# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ២៦

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉**

*(តាំងពី**ស៊ុនសេក**វាយយកបានអាណាខេត្តមកជាចំណុះច្រើន ហើយមានចិត្តកំរើបធ្វើចុតហ្មាយក្រាបទូលព្រះចៅ**ហៀនតេ**យកគុណគាប់ រហូតដល់**អ៊ូនសៀវ**លើកទ័ពទៅច្បាំងនឹង**ចូឆូ**នៅតំបន់ប៊ូអៀង។)*

**ស៊ុនសេក**មានចិត្តកំរើប ទើបធ្វើចុតហ្មាយប្រើ**ទៀវហៀន**ឲ្យកាន់ចូលទៅក្រាបទូលព្រះចៅ**ហៀនតេ** ប្រាថ្នានឹងឲ្យមានឈ្មោះសំឡេងយសបណ្ដាសក្តិ សេចក្តីសំបុត្រនោះថ្លែងជារឿងរ៉ាវថា **ស៊ុនសេក**ចៅហ្វាយស្រុកកាំងតាំងបានប្រាបប្រាមអាណាខេត្តជាច្រើនតំបន់ឲ្យរាបទាបអស់ហើយ។ **ទៀវហៀន**ក៏នាំចុតហ្មាយនោះទៅឲ្យ**ចូឆូ** ៗឃើញសេចក្តីចុតហ្មាយដូច្នោះក៏ដកដង្ហើមធំ ហើយគិតថា "ធម្មតាជាតិកូនខ្លាវមែងតែសាហាវ នរណានឹងប៉ងប្រាថ្នាទៅធ្វើអន្តរាយដល់កូនខ្លានោះ ក៏កម្រនឹងបាន បើដូច្នោះចាំយើងគិតលើកបុត្រីជាប្អូននាង**ចោយិន** ឲ្យជាភរិយា**ស៊ុនខង**ជាប្អូន**ស៊ុនសេក** ទើបបានស្រួលជាផ្គុំមួយនឹង**ស៊ុនសេក**" ហើយ**ចូឆូ**ក៏យកខ្លួន**ទៀវហៀន**ទុកធ្វើរាជការនៅក្រុងហ៊ូតោ។ ឯ**ស៊ុនសេក**លុះដឹងដំណឹងថា **ចូឆូ**មិនបានយកសំបុត្រទៅថ្វាយព្រះចៅ**ហៀនតេ** ហើយយកខ្លួន**ទៀវហៀន**ទុកធ្វើរាជការក្នុងក្រុង **ស៊ុនសេក**ក៏ខឹងខ្លាំងណាស់ គិតនឹងលើកកងទ័ពទៅវាយកម្ចាត់**ចូឆូ**ជារឿយៗ។

ឯ**ខៅកង**ចៅហ្វាយស្រុកង៉កុនដែលជាចំណុះស្រុកកាំងតាំងនោះ លុះដឹងថា **ស៊ុនសេក**ធ្វើការប្រទូសរ៉ាយអាក្រក់ផ្សេងៗ ក៏តែងសំបុត្របកប្តឹងចូលទៅ**ចូឆូ** ជាសេចក្តីថា "**ស៊ុនសេក**ធ្វើការអាក្រក់ដល់អាណាខេត្តទាំងពួងខ្លាំងពេកណាស់ សព្វ

ថ្ងៃនេះអ្នករាជការ និងបណ្ដារាស្ត្របានសេចក្ដីក្ដៅក្រហាយគ្រប់ខេត្តខណ្ឌ សូមមហាឧបរាជរិះគិតឲ្យមានព្រះតម្រាស់ព្រះចៅ**ហៀនតេ** ឲ្យហៅយកខ្លួន**ស៊ុនសេក**ចូលមកធ្វើរាជការឯស្រុកក្រុងវិញ បើនឹងបង្អង់ទុកឲ្យ**ស៊ុនសេក**នៅធ្វើជាធំ ខាងក្រោយយូរទៅនឹងប្រែជាក្បត់ផែនដីមិនខាន” លុះតែងសំបុត្រហើយក៏ប្រើទាហានឲ្យកាន់ឆ្លងកាត់ជ្រោយសមុទ្រទៅ។

លុះទាហានកងក្រវែលស្រុកកាំងតាំងឃើញប្លែក ក៏ចាប់យកខ្លួនទុកត្រួតមើលសំបុត្រ ក៏បញ្ជូនខ្លួន និងសំបុត្រទៅដល់**ស៊ុនសេក** ៗឃើញសំបុត្រដូច្នោះក៏ខឹងណាស់ ទើបឲ្យយកខ្លួនអ្នកកាន់សំបុត្រទៅសម្លាប់ ហើយ**ស៊ុនសេក**ក៏ធ្វើជាកលឧបាយបញ្ឆោត ឲ្យទាហានទៅអញ្ជើញ**ខៅកង**ចៅហ្វាយស្រុកង៉កុនមកស៊ីលៀង។ **ខៅកង**មិនមានសេចក្ដីមន្ទិលសង្ស័យ ក៏ចូលមករក**ស៊ុនសេក** ៗក៏យកសំបុត្រនោះមកបង្ហាញឲ្យ**ខៅកង**មើល ហើយស្រែកគំរាមថា ហេតុម្ដេចក៏ឯងធ្វើសំបុត្រថាអញជាមនុស្សក្បត់ផែនដី ឲ្យ**ចូវឆូ**ហៅយកខ្លួនអញចូលទៅឯស្រុកក្រុងវិញ? **ខៅកង**ទាល់គំនិតឥតបានឆ្លើយថាដូចម្ដេចសោះ។ **ស៊ុនសេក**ក៏ឲ្យចាប់ចងនាំយកខ្លួនទៅសម្លាប់។ ឯបណ្ដាគ្រួសារនិងបាវព្រាវទាំងអស់របស់**ខៅកង** លុះដឹងដូច្នោះក៏នាំគ្នារត់បែកខ្ចាត់ខ្ចាយទៅពីស្រុកង៉កុន នៅសល់តែទាហាន**ខៅកង**បីនាក់។ ទាហាននោះមានចិត្តព្យាបាទ**ស៊ុនសេក** គិតនឹងសងសឹកវិញឲ្យបាន ទើបបបួលគ្នាទៅនៅក្នុងព្រៃជិតស្រុកកាំងតាំង ប្រាថ្នានឹងលបលួចធ្វើអន្តរាយ**ស៊ុនសេក**វិញ។

មានកាលថ្ងៃមួយ **ស៊ុនសេក**នាំទាហានទៅបរបាញ់សត្វក្នុងព្រៃ ឃើញប្រើសមួយ ក៏កន្ត្រាក់ធ្នូឡើងសេះដេញតាមទៅតែម្នាក់ឯង ទទួលឃើញទាហានបីនាក់នោះកាន់ធ្នូ និងទូនឈរអែបប្រេបដើមឈើ **ស៊ុនសេក**ក៏សួរថា ខ្លួនជាបាវនរណា? មកពីណា? ទាហានទាំងបីនាក់នោះក៏ប្រើឧបាយឆ្លើយថា ខ្ញុំបាទជាបាវ**ហាន់តុង**ដែលជា

ទាហានឯករបស់លោក បបួលគ្នាចេញមកបរបាញ់សត្វក្នុងព្រៃ។ **ស៊ុនសេក**បានស្តាប់ក៏មិនមានចិត្តសង្ស័យ ហើយបរសេះត្រឡប់ចេញពីទីនោះទៅ។ ទាហានទាំងបីនាក់នោះឃើញបានការ ទាហានម្នាក់យកទ្វនចាក់ត្រូវជើងឆ្វេង**ស៊ុនសេក**មួយផ្លែ ម្នាក់លើកធ្នូបាញ់ទៅត្រូវមុខ**ស៊ុនសេក** ៗភ័យស្លុតកន្ត្រាក់ដងព្រួញបាន ហើយបាញ់ទៅត្រូវទាហាននោះស្លាប់ម្នាក់។ ឯទាហានពីរនាក់ក៏យកទ្វនចូលមកចោមចាក់ **ស៊ុនសេក** ហើយស្រែកគំរាមថា អញជាទាហាន**ខៅកង**ដែលអញនាំគ្នាមកធ្វើដូច្នេះ ប្រាថ្នានឹងសងសឹកចៅហ្វាយអញ។ **ស៊ុនសេក**គ្មានអាវុធនៅដៃសោះ យកតែដងធ្នូទាត់ទះការពារទ្វនមិនឲ្យកាប់ចាក់ត្រូវខ្លួន មានត្រូវរបួសមុតជាច្រើនអន្លើ។

ទទួល**ទៀផៅ** ជិះសេះនាំទាហានប្រហែលប្រាំបួនដប់នាក់តម្រង់ចូលមកជិត**ស៊ុនសេក**ក៏ស្រែកហៅឲ្យជួយ **ទៀផៅ**និងទាហានឃើញដូច្នោះក៏បរសេះចូលទៅកាប់ទាហានទាំងពីរនាក់នោះដាច់ខ្ទេចខ្ទីអស់ទាំងខ្លួនទាល់តែស្លាប់ ហើយត្រឡប់ទៅមើល**ស៊ុនសេក**ឃើញមុខត្រូវព្រួញមួយអន្លើ រាងកាយក៏ត្រូវរបួសនិងព្រួញជាច្រើនអន្លើ **ទៀផៅ**ក៏យកគ្រប៊ីកាត់ជាយអាវមករុំរបួសឲ្យ**ស៊ុនសេក** ហើយគ្រាប៍នាំចូលមកស្រុកវិញ។ **ស៊ុនសេក**ក៏ប្រើបម្រើឲ្យទៅរកខ្លួន**ហ៊្វាតោ**ជាពេទ្យឲ្យមករក្សារបួសខ្លួន។

ខណៈនោះគ្រូពេទ្យ**ហ៊្វាតោ**មិននៅ ព្រោះមានកិច្ចរវល់ទៅមើលជំងឺឯស្រុកក្រុង បានតែសិស្ស**ហ៊្វាតោ**ម្នាក់មក ពេទ្យនោះមើលហើយក៏ជម្រាប**ស៊ុនសេក**ថា ឯរបួសដោយទ្វននោះខ្ញុំបាទមើលឲ្យជាដាច់បាន តែរបួសដោយធ្នូនោះព្រួញមុតដល់ឆ្អឹង ហើយព្រួញនោះមានដាក់ថ្នាំពិសផង បើនឹងរក្សាសូមអញ្ជើញលោកទៅរកទីស្ងាត់នៅ កុំឲ្យមនុស្សចូលទៅមកអ៊ូអរ ហើយឲ្យលោករំលត់សេចក្តីក្រោធខឹងឲ្យអស់ផង លុះគ្រប់កំណត់មួយរយថ្ងៃទើបជាដាច់ស្រឡះ បើរម្ងាប់កំហឹងមិនបានទេ

ថ្នាំពិសក៏រឹតតែកម្រើកខ្លាំងឡើង។ **ស៊ុនសេក**ក៏ធ្វើតាម ខណៈនោះពេទ្យរក្សាបានប្រហែលម្ភៃថ្ងៃ **ស៊ុនសេក**នោះជាមនុស្សចិត្តរហ័សនឹងធ្វើអ្វីចង់ឲ្យបានទាន់ចិត្តភ្លាម។

ទទួលពេលនោះ មានបម្រើ**ទៀវហៀន**ម្នាក់ដែលទៅនៅស្រុកក្រុងហ៊ូតោនោះឲ្យចូលមកជម្រាបសេចក្តី លុះ**ស៊ុនសេក**ដឹងហើយក៏ឲ្យរកហៅអ្នកបម្រើនោះចូលទៅ ហើយសួរថា **ទៀវហៀន**ប្រើអ្នកមកដោយហេតុដូចម្តេច? អ្នកបម្រើប្រាប់ថា **ទៀវហៀន**ប្រើខ្ញុំបាទឲ្យមកជម្រាបលោកថា **ទៀវហៀន**ដែលបានទៅនៅស្រុកក្រុងនោះ បានឃើញ**ចូឆ្វូ**និងទីប្រឹក្សាព្រមទាំងសេនាទាហានទាំងពួងនោះ បើនឹងនិយាយគ្នាពីកិច្ចការរាជការអ្វី ក៏មានសេចក្តីកោតញញើតលោកជាច្រើនដរាប តែ**គុយកែ**នោះបើនឹងពោលនិយាយពីកិច្ចការអ្វីក៏ឥតគិតខ្លាចក្រែងលោកសោះ។ **ស៊ុនសេក**សួរថា ចុះដែល**គុយកែ**មើលងាយយើងនោះបាននិយាយថាម្តេចខ្លះ? អ្នកបម្រើនោះនៅស្ងៀមមិនឆ្លើយ **ស៊ុនសេក**ឃើញអ្នកបម្រើនោះនៅស្ងៀមដូច្នោះក៏ខឹងណាស់ថា **ទៀវហៀន**ប្រើខ្លួនមកឲ្យប្រាប់ដំណឹងយើង ៗសួរអ្វីក៏នៅស្ងៀមដូច្នេះ? ឯអ្នកបម្រើនោះឃើញ**ស៊ុនសេក**ខឹងខ្លាំងក៏នឹកខ្លាច ទើបឆ្លើយថា **គុយកែ**បាននិយាយនឹង**ចូឆ្វូ**ថាហេតុម្តេចបានជាខ្លាច**ស៊ុនសេក** ឯ**ស៊ុនសេក**នោះជាមនុស្សគ្មានប្រាជ្ញាសោះ បានតែចិត្តរហ័ស ទោះនឹងគិតការអ្វីក៏រមែងមើលស្រាលប្រមាថ គិតសង្វាតតែអួតចេះហើយតម្កើងខ្លួនជាធំ យូរទៅគង់តែនឹងស្លាប់ដោយថ្វីដៃកូនទាហាន។

ឯ**ស៊ុនសេក**បានស្តាប់ដូច្នោះ ក៏រឹតតែក្រោធខឹងពន់ប្រមាណណាស់ទៅទៀតនិយាយថា “**គុយកែ**នោះវាមានសតិប្រាជ្ញាយ៉ាងណាខ្លះ ទើបបានអាចហ៊ាននិយាយមើលងាយប្រមាថយើងជាពាក្យអាក្រក់ដូច្នេះ ចាំយើងនឹងលើកទ័ពទៅវាយយកស្រុកហ៊ូតោឲ្យទាល់តែបាន ហើយនឹងចាប់យកទាំងខ្លួន**គុយកែ**សម្លាប់ចោលចេញរួចឲ្យចិញ្ច្រាំសាច់ឲ្យល្អិតខ្ទេចកុំឲ្យក្អែកចឹកស៊ីបាន” និយាយហើយក៏ឲ្យហៅទីប្រឹក្សា

ទាំងពួងមកប្រឹក្សាការថា “**គុយកែ**និយាយមើលងាយប្រមាថយើងដូច្នេះ ត្រូវតែយើងបង្ខំភ្ញុំសេនាទាហានឲ្យបាន ព្រមទុកជាស្រេច រួចយើងនឹងលើកកងទ័ពទៅវាយយកស្រុកហ្ស៊ូតោ ចាប់យកទាំង**គុយកែ**ទៅសម្លាប់ចោលចេញឲ្យបាន ទើបបាត់ខឹង”។ **ទៀវចៀវ**ថា កាលពីថ្ងៃមុនគ្រូពេទ្យបានមកថែរក្សារបួសព្រួញនោះ ក៏បានហាមប្រាមលោកថាកុំឲ្យមានសេចក្តីក្រោធខឹងលុះគ្រប់មួយរយថ្ងៃ ឥឡូវទើបនឹងបានម្ភៃថ្ងៃប្តាយ ហើយលោកមានទោសោបម្រុងនឹងលើកកងទ័ពទៅច្បាំងប្រឆាំងនឹងពាក្យ**គុយកែ**នោះ ឃើញថាមិនគួរទេ។

ខណៈនោះទទួលមានបម្រើសេះម្នាក់មកជម្រាប**ស៊ុនសេក**ថា ឥឡូវ**តាន់ជិន**ទាហាន**អ៊្លួនសៀវ**មានការចង់ចូលមករកលោក។ **ស៊ុនសេក**ក៏ឲ្យហៅខ្លួនចូលទៅ **តាន់ជិន**គំនាប់ហើយក៏ហុចសំបុត្រទៅឲ្យ**ស៊ុនសេក** ៗទទួលយកសំបុត្រ**អ៊្លួនសៀវ**ទៅមើលឃើញសេចក្តីថា **ចូឆូ**ជាសត្រូវរាជសម្បត្តិ សូមឲ្យ**ស៊ុនសេក**តាំងចិត្តជាមួយនឹងយើង លើកកងទ័ពទៅវាយខ្ទប់ស្រុកហ្ស៊ូតោពីទិសខាងត្បូង យើងនឹងលើកចូលពីទិសខាងជើងនឹងកម្ចាត់**ចូឆូ**ចេញ។ **ស៊ុនសេក**ឃើញច្បាស់ក្នុងសំបុត្រដូច្នោះក៏មានអំណរណាស់ ទើបឲ្យរៀបតុលៀងភោជនាហារ អញ្ជើញ**តាន់ជិន**ឲ្យបរិភោគជាមួយនឹងសេនាទាហានទាំងពួងលើសើន។

ខណៈកាលភ្ញៀវកំពុងសេពសុរានោះ **ស៊ុនសេក**ឃើញទាហានទាំងពួងដែលកំពុងបរិភោគនោះនិយាយខ្សឹបគ្នា ហើយយកដៃចង្អុលចុះពីលើសើនព្រមគ្នា។ **ស៊ុនសេក**មានសេចក្តីសង្ស័យក៏សួរអ្នកបម្រើថា ហេតុម្តេចបានជានាហ្មឺននិងទាហានទាំងពួងនិយាយខ្សឹបគ្នា ហើយចង្អុលចុះទៅក្រោមសើនដូច្នោះ? អ្នកបម្រើជម្រាបថា **អ៊ីកៀត**ដែលអ្នកស្រុកទាំងអស់គ្នាធ្លាប់និយមរាប់អានថា ជាមនុស្សមានសេចក្តីចេះដឹងស័ក្តិសិទ្ធិនោះ ឥឡូវដើរមកតាមផ្លូវពីទិសខាងត្បូងចូលឈប់ក្រោម

សើន ទាហានទាំងពួងឃើញហើយក៏មានសេចក្ដីត្រេកអរ ទើបបបួលគ្នាចុះទៅគំនាប់។ **ស៊ុនសេក**បានស្ដាប់ដូច្នោះក៏អើតមើលទៅតាមបង្អួចសើន ឃើញ**អ៊ីកៀត**តែងខ្លួនពាក់អាវសម្បុរសដូចទេវតា ដៃកាន់ឈើច្រត់ដើរទៅតាមផ្លូវ អ្នកស្រុកទាំងពួងបបួលគ្នាកាន់ផ្កាភ្ញីនិងទៀនធូបចូលទៅគំនាប់ដោយគោរពដល់**អ៊ីកៀត**។ **ស៊ុនសេក**ខឹងណាស់ ជេរ**អ៊ីកៀត**ថា វាធ្វើដូច្នេះជាការកុហកបញ្ឆោតឱ្យគេជឿ ហើយក៏បង្គាប់ឱ្យទាហានដេញចាប់ខ្លួន**អ៊ីកៀត**យកទៅសម្លាប់។

ទាហានទាំងពួងជម្រាបថា **អ៊ីកៀត**នេះនៅក្រៅស្រុកមកពីទិសឯកើត ធ្លាប់យកទឹកមន្តមកឱ្យអ្នកស្រុកដែលមានជំងឺឈឺថ្កាត់ បើផឹកស្រោចងូតទៅកាលណាហើយ ក៏ជាសះស្បើយរោគជារឿយៗ ហើយអ្នកស្រុកនិយមរាប់អានថា **អ៊ីកៀត**ជាមនុស្សទាល់ក្រមានចិត្តបុណ្យអាណិតអាសូររាស្ត្រណាស់ ដែលលោកនឹងបង្គាប់ឱ្យទាហានចាប់យកទៅសម្លាប់ចេញនោះជាការមិនគួរទេ។ **ស៊ុនសេក**បានស្ដាប់ដូច្នោះរឹងរឹតតែខឹងខ្លាំងណាស់ឡើងទៀត ក៏បង្គាប់ឱ្យទាហានទៅចាប់ខ្លួនឱ្យខាងតែបានហើយពោលថា បើនរណាមួយរឹងទទឹង អញនឹងឱ្យកាត់ក្បាលអ្នកនោះវិញ។ ទាហានទាំងពួងក៏ភិតភ័យខ្លាចមិនហ៊ានរឹងទទឹង ខំប្រឹងនាំគ្នាទៅរកចាប់ខ្លួន**អ៊ីកៀត**ទៅឱ្យ**ស៊ុនសេក**លើសើន។ **ស៊ុនសេក**ក៏ស្រែកគំរាមហើយសួរថា ខ្លួនមកពីណា? ហេតុម្ដេចមកធ្វើកិរិយាកុហកបញ្ឆោតឱ្យគេជឿវង្វេងទាំងអស់គ្នាដូច្នេះ?

**អ៊ីកៀត**ឆ្លើយតបថា ខ្ញុំបាទនៅស្រុកឡុងសៀ កាលព្រះចៅ**ស៊ុនតេ**សោយរាជ្យនោះ ខ្ញុំបាទបានទៅស្វែងរកថ្នាំលើភ្នំខយ៉ុកយ៉ង បានតម្រាក្នុងរូងភ្នំប្រហែលមួយរយច្បាប់សម្រាប់ធ្វើការសែកទឹកមន្តរក្សាជំងឺឈឺថ្កាត់ផ្សេងៗ ខ្ញុំបាទប្រាថ្នាយកតែបុណ្យកុសលប៉ុណ្ណោះ ដែលនឹងបានធ្វើកលឧបាយល្បួងបញ្ឆោតគេឱ្យវង្វេងជឿស្ដាប់ ជាការពុំគប្បីក៏ទេសោះ។ **ស៊ុនសេក**សួរថា “បើខ្លួនមិនបានយកថ្លៃឈ្នួលពី

ឈ្មោះណាទេ ហេតុម្តេចខ្លួនក៏បានចំណីអាហារបរិភោគចិញ្ចឹមជីវិតតមក ហើយនិងបានគ្រឿងឧបភោគប្រដាប់ស្លៀកពាក់ដូច្នេះ? ខ្លួនឯងនេះគឺជាពួកជាមួយនឹង**ទៀវកុក** បើអញមិនសម្លាប់ឯងចេញទេ ឯងនឹងមានចិត្តកំរើបគិតប្រទូសរ៉ាយដល់អញវិញ” ថាហើយក៏បង្គាប់ទាហានឲ្យនាំខ្លួន**អ៊ីកៀត**យកទៅសម្លាប់ចោល។

**ទៀវចៀវ**និយាយឃាត់ថា តាំងពី**អ៊ីកៀត**មកនៅស្រុកកាំងតាំងនេះជាងបីឆ្នាំហើយ មិនដែលឮថា**អ៊ីកៀត**ទៅភូតកុហកបញ្ឆោតអ្នកណាមួយសោះ ដែលលោកឲ្យយកខ្លួនទៅសម្លាប់នោះឃើញថាមិនគួរទេ។ **ស៊ុនសេក**និយាយនឹង**ទៀវចៀវ**ថា អ្នកមករាប់អាន**អ៊ីកៀត**ថាជាមនុស្សចិត្តបុណ្យនោះខុសសោះ **អ៊ីកៀត**ជាមនុស្សបោកកុហកបីដូចសត្វតិរច្ឆាន ទាហានទាំងពួងចូរនាំ**អ៊ីកៀត**ទៅសម្លាប់ចុះ។ ប៉ុន្តែលុះនាហ្មឺនទាំងពួង និង**តាន់ជិន**នាំគ្នាចូលទៅអង្វរឃាត់**ស៊ុនសេក**សុំជីវិត**អ៊ីកៀត**ទុកបាន។ **សុនសេក**ក៏ឲ្យយកខ្លួន**អ៊ីកៀត**ទៅឃុំដាក់គុកទុកវិញ ហើយ**ស៊ុនសេក**ត្រឡប់មកនៅក្នុងគេហដ្ឋាន។ អ្នកបម្រើ**ស៊ុនសេក**ក៏នាំយករឿងដែលធ្វើទោស**អ៊ីកៀត**នោះទៅជម្រាបដល់នាង**ង៉ហ៊ូយិន** ជាមាតា**ស៊ុនសេក**សព្វគ្រប់ប្រការ។

នាង**ង៉ហ៊ូយិន**បានស្តាប់ដូច្នោះ ក៏ឲ្យហៅ**ស៊ុនសេក**ចូលទៅនិយាយថា **អ៊ីកៀត**នោះជាមនុស្សចិត្តបុណ្យ អាណិតអាសូរដល់បណ្តារាស្ត្រណាស់ ហេតុម្តេចក៏កូនឲ្យយក**អ៊ីកៀត**មកធ្វើទោសដូច្នេះ? **ស៊ុនសេក**ឆ្លើយថា “**អ៊ីកៀត**នេះជាមនុស្សបោកកុហក បើនឹងទុកឲ្យយូរទៅ គង់នឹងមានចិត្តកំរើបធំឡើងទៀត បើនឹងទុកវាគង់នឹងមានភ័យអន្តរាយដល់ខ្លួនខ្ញុំបាទ មាតាកុំគប្បីជឿស្តាប់ពាក្យដែលគេមកជម្រាបនោះឡើយ។ មាតាជ្រាបស្រាប់ហើយ កុំរាប់អានកាន់**អ៊ីកៀត**នោះធ្វើអ្វី” ហើយ**ស៊ុនសេក**ក៏លាមាតាត្រឡប់មកវិញ។

ខណៈនោះ **ទៀវចៀវ**និងនាហ្មឺនដប់មួយដប់ពីរនាក់ នាំគ្នាចុះឈ្មោះធ្វើរឿងរ៉ាវចូលមកប្ដឹង**ស៊ុនសេក**ជាសេចក្ដីថា សូមឲ្យដោះលែង**អ៊ីកៀត**ចេញទៅ បើដំណាតទៅមុខ**អ៊ីកៀត**មានចិត្តកំរើបគិតប្រទូសរ៉ាយដល់លោកយ៉ាងណា សូមឲ្យលោកកាត់ក្បាលយើងខ្ញុំទាំងអស់គ្នាចេញចុះ។ **ស៊ុនសេក**ឃើញពាក្យបណ្ដឹងជាក់ច្បាស់ដូច្នោះក៏និយាយថា អ្នកទាំងអស់គ្នាមិនដឹងទេឬ? កាលគ្រា**ទៀវកុក**និងពួកភឿនធ្វើជាចោរនោះ ខាង**ទៀវជិន**ចៅហ្វាយស្រុកកៅជីវ រាប់អានថាជាហ្មថាវបញ្ចូលខ្មោចស័ក្ដិសិទ្ធិ បើ**ទៀវជិន**នឹងលើកទ័ពទៅទីណាក៏យកព្រៃក្រហម ឲ្យហ្មថាវចុះលេខយន្តមន្តគាថាឲ្យ ហើយឲ្យទាហានទាំងពួងជូតក្បាល ធ្វើការសង្គ្រាមក៏កាន់យកអាវុធមិនបាន **ទៀវជិន**និងទាហានទាំងពួងធ្វើសង្គ្រាមក៏បរាជ័យចាញ់ក្នុងទីចម្បាំង ឯអ្នករាល់គ្នាមករាប់អាន**អ៊ីកៀត**ដែលជាមនុស្សបោកកុហក ជឿកាន់ខ្មោចបិសាចនោះមិនសមគួរសោះ យើងនឹងឲ្យសម្លាប់**អ៊ីកៀត**ចេញ ស្រុកយើងក៏នឹងបានសេចក្ដីសុខក្សេមក្សាន្តតទៅ។

**លីហ៊្វយហោ**និយាយនឹង**ស៊ុនសេក**ថា ខ្ញុំបាទបានឮកិត្តិស័ព្ទថា **អ៊ីកៀត**មានការចេះដឹងហៅខ្យល់ហៅភ្លៀងបាន ឥឡូវស្រុកយើងរាំងភ្លៀង បណ្ដារាស្ត្រធ្វើស្រែមិនបានសោះ សូមលោកឲ្យ**អ៊ីកៀត**ហៅភ្លៀង បើ**អ៊ីកៀត**ហៅភ្លៀងឲ្យធ្លាក់ចុះមកបានហើយ ឲ្យលោកបើកលែង**អ៊ីកៀត**ចេញចុះ។ **ស៊ុនសេក**យល់ឃើញត្រូវ ក៏ឲ្យទាហានសង់រោងពិធីសុំទឹកភ្លៀងខ្ពស់ប្រហែលដប់ព្យាម (២០ម) ទើបឲ្យទៅយកខ្លួន**អ៊ីកៀត**ចេញមកហើយប្រាប់ថា ខ្លួនមានសេចក្ដីចេះដឹងទាំងមានចិត្តអាណិតអាសូររាស្ត្រទាំងពួង ឥឡូវស្រុកយើងរាំងភ្លៀង រាស្ត្រធ្វើស្រែមិនបាន ខ្លួនចូរហៅទឹកភ្លៀងឲ្យធ្លាក់ចុះមក យើងនឹងដោះខ្លួនចេញ។

**អ៊ីកៀត**ក៏ទទួលពាក្យ**ស៊ុនសេក**ហើយជម្រះកាយឲ្យអស់មន្ទិល លុះវេលាព្រឹកឡើងថ្ងៃរះស្រឡះ មេឃកំពុងក្ដៅ **អ៊ីកៀត**ក៏ឡើងទៅលើរោងពិធី ហើយយកពួរចងរឹតខ្លួនដេកហាលថ្ងៃបរិកម្មសុំទឹកភ្លៀង អ្នកស្រុកទាំងអស់ក៏នាំគ្នាមកមើលមីរដេរដាស។ **អ៊ីកៀត**ក៏ស្រែកប្រាប់មកអ្នកស្រុកទាំងអស់គ្នាថា យើងនឹងសុំទឹកភ្លៀងឲ្យធ្លាក់មកយ៉ាងធំ ឲ្យទឹកលិចផែនដីជម្រៅពីរហត្ថប្លាយ រាស្ត្រទាំងឡាយនឹងងាយធ្វើស្រែឲ្យបានបរិបូរ ទោះបីនឹងធ្វើបានដូចប្រាថ្នាក្ដី ក៏ជីវិតយើងគ្រានេះឃើញជាមិនរួចពីសេចក្ដីស្លាប់ឡើយ។ អ្នកស្រុកទាំងអស់គ្នាក៏ឆ្លើយឡើងព្រមគ្នាថា បើប្រសិនជាហៅភ្លៀងឲ្យធ្លាក់ចុះមកបានមែន **ស៊ុនសេក**មុខជាមិនយកទោសលោកទេ។ **អ៊ីកៀត**ស្រែកមកទៀតថា អាយុជីវិតយើងត្រូវស្លាប់ក្នុងថ្ងៃនេះហើយ ទោះបីនឹងមាននរណាមកជួយដូចម្ដេចក៏មិនបានដែរ។

ខណៈនោះ**ស៊ុនសេក**ក៏បង្គាប់ទាហានទាំងពួងថា ឲ្យជញ្ជូនចំបើងមកគរទុកក្រោមរោងពិធី បើហួសថ្ងៃត្រង់ហើយគ្មានភ្លៀងចុះមកទេ ឲ្យអុជភ្លើងដុត**អ៊ីកៀត**ឲ្យដល់សេចក្ដីស្លាប់ក្នុងទីនោះតែម្ដង។ លុះដល់ពេលថ្ងៃត្រង់ក៏កើតខ្យល់ព្យុះខ្លាំងងងឹតអ័ព្ទអស់ទិសានុទិសទាំងពួង ទាំងមេឃទាំងអាកាសក៏ងងឹតឈឹង **ស៊ុនសេក**ឃើញមិនមានភ្លៀងធ្លាក់ក៏ថា**អ៊ីកៀត**ជាមនុស្សបោកកុហក បានទទួលថាខ្លួនហៅភ្លៀងឲ្យធ្លាក់ចុះបាន ឥឡូវគ្មានភ្លៀងសោះ” ទើបប្រើទាហានឲ្យឡើងទៅយកខ្លួន**អ៊ីកៀត**ចុះមកចងទុកលើគំនរចំបើង ហើយអុជភ្លើងដុត**អ៊ីកៀត**នោះឆេះឡើង ទទួលភ្លើងកំពុងតែឆេះសន្ធោឡើង ស្រាប់តែមានសូរផ្គរលាន់រន្ទាន់គ្រប់ទិស ភ្លៀងក៏រំលាធ្លាក់ចុះមកយ៉ាងសម្បើមអស្ចារ្យ ទឹកក៏ជោរជន់លិចលើផែនពសុធាប្រហែលជម្រៅពីរហត្ថប្លាយ ភ្លើងដែលដុតកំពុងតែឆេះសន្ធោសន្ធៅនោះក៏រលត់បាត់សូន្យឈឹងទៅ។ **អ៊ីកៀត**ក៏ស្រែកថាឲ្យភ្លៀងរាំងចុះ ភ្លៀងនោះក៏ហាក់ដូចជាមានវិញ្ញាណ ក៏រាំងឈឹង

សូន្យអស់ទៅមួយរំពេច។ នាហ្មឺននិងបណ្ដារាស្ត្រទាំងពួងឃើញថា **អ៊ីកៀត**ធ្វើការបានពូកែស័ក្ដិសិទ្ធិណាស់ ក៏នាំគ្នាលុយហែលទឹកចុះទៅដោយមិនមានសេចក្ដីរង្កៀសខ្លាចទទឹកឡើយ លុះដល់ហើយក៏ស្រាយចំណង**អ៊ីកៀត**ចេញ ហើយពនាំយកខ្លួន**អ៊ីកៀត**ឡើងមក អ្នកទាំងអស់គ្នាក៏គំនាប់**អ៊ីកៀត**។

**ស៊ុនសេក**ឃើញដូច្នោះក៏មានចិត្តឥច្ឆាថា “នាហ្មឺននិងបណ្ដារាស្ត្រស្រឡាញ់រាប់អាន**អ៊ីកៀត**ជាច្រើនណាស់” ហើយស្រែកគំរាមថា “ដែលភ្លៀងធ្លាក់ចុះមកនេះព្រោះអំណាចទេវតា **អ៊ីកៀត**ជាមនុស្សបោកកុហកផ្សំថាហៅភ្លៀងបាន ហេតុម្ដេចអ្នកទាំងពួងនាំគ្នារាប់អាន**អ៊ីកៀត**ថាមានសេចក្ដីចេះដឹងស័ក្ដិសិទ្ធិ?” ថាហើយ**ស៊ុនសេក**ក៏ដកហូតគ្រប៊ីបង្គាប់ឲ្យទាហានប្រញាប់ទៅចាប់ខ្លួន**អ៊ីកៀត**យកទៅសម្លាប់។ នាហ្មឺនទាំងពួងឃើញដូច្នោះក៏ភ័យស្លុតស្លាំងទាំងអស់គ្នា នាំគ្នាចូលទៅអង្វរសូមទោស**ស៊ុនសេក** ៗបានស្ដាប់រឹតតែខឹងខ្លាំងឡើងទៀតហើយថា “អ្នករាល់គ្នារាប់អាន**អ៊ីកៀត**មកសូមអាយុជីវិតទុកនោះ ប្រាថ្នានឹងគប់គិតចូលគំនិតគ្នាប្រទូសរ៉ាយដល់យើងឬ? នាហ្មឺនទាំងអស់នៅស្ងៀមមិនឆ្លើយថាម្ដេចសោះ ឯទាហាន**ស៊ុនសេក**ក៏ចូលអូសទាញកន្ត្រាក់ចាប់យកខ្លួន**អ៊ីកៀត**បាន ហើយនាំទៅប្រហារជីវិតស្លាប់មួយរំពេច។ **ស៊ុនសេក**ក៏បង្គាប់ឲ្យយកសព**អ៊ីកៀត**ទៅដោតផ្លាលទុកនៅកណ្ដាលផ្លូវបែកជាបី ដើម្បីកុំឲ្យអ្នកឯណាយកតម្រាប់តទៅ។

លុះដល់ពេលពាក់កណ្ដាលអាធ្រាត្រ មានភ្លៀងរំលាធ្លាក់មកម្ដងទៀត ខ្មោច**អ៊ីកៀត**ក៏បាត់ពីទីនោះទៅ ទាហានដែលយាមរក្សានោះទៅប្រាប់**ស៊ុនសេក** ៗបានស្ដាប់ក៏ខឹងណាស់ គិតនឹងសម្លាប់ទាហាននោះចេញទៀត ទទួលក្រឡេកទៅឃើញរូប**អ៊ីកៀត**ដើរកែក្រោយចូលមកត្រង់មុខ**ស៊ុនសេក** ៗរឹតតែមានសេចក្ដីខឹងខ្លាំងណាស់ទៀត ក៏កន្ត្រាក់គ្រប៊ីនឹងកាប់រូប**អ៊ីកៀត**នោះ **ស៊ុនសេក**ក៏ដួលសន្លប់បាត់

ស្មារតីពុំដឹងខ្លួននៅទីនោះ ទាហានទាំងពួងក៏ភ័យស្លុតស្រឡាំងកាំងរត់ចូលមកទៀត គ្រាប់**ស៊ុនសេក**ចូលទៅដាក់ខាងក្នុង ហើយកែខៃឲ្យដឹងខ្លួនឡើងវិញ ឯនាង**ង៉ហ៊ូយិន** ជាមាតា លុះដឹងដំណឹងហើយក៏ចេញទៅសួរ**ស៊ុនសេក**ថាព្រោះអ្នកធ្វើអន្តរាយដល់ **អ៊ីកៀត ទើ**បកើតមានហេតុដូច្នេះ។

**ស៊ុនសេក**បានស្តាប់ក៏អស់សំណើច ហើយថា ខ្លួនខ្ញុំបាទបាននៅជាមួយនឹងបិតា កាលធ្វើទ័ព បានសម្លាប់មនុស្សជាច្រើនណាស់ ឧបមាដូចគ្រាប់ខ្សាច់ហួសវិស័យដែលនឹងរាប់បាន ខ្ញុំក៏មិនមានអន្តរាយ ដែលខ្ញុំបាទសម្លាប់**អ៊ីកៀត**ជាមនុស្សបោកកុហករាស្ត្រកណ្តាលស្រុកចេញដូច្នេះ ប្រាថ្នានឹងធ្វើសន្តានចិត្តមនុស្សឲ្យតាំងនៅក្នុងសេចក្តីសុចរិតពិតត្រង់ កុំឲ្យលុះទៅក្នុងសេចក្តីល្ងង់ខ្លៅ ត្រូវធ្វើចិត្តឲ្យទៀងត្រង់ជាសច្ចៈ កុំឲ្យវិបត្តិគិតរាប់អានមនុស្សឥតសច្ចៈតទៅ ហេតុម្តេចមាតាមកថាខ្ញុំបាទកើតហេតុនេះព្រោះសម្លាប់**អ៊ីកៀត**ទៅវិញ? នាង**ង៉ហ៊ូយិន**តបថា ដែលកើតហេតុដូច្នេះ ព្រោះអ្នកមិនជឿរាប់អាន**អ៊ីកៀត** អ្នកចូរធ្វើបុណ្យបញ្ជូនផលទៅឲ្យ**អ៊ីកៀត** ទើបនឹងបន្តោរបង់សេចក្តីអន្តរាយបាន។ **ស៊ុនសេក**ឆ្លើយថា ដែលខ្ញុំបាទមានអាភេទដូច្នេះព្រោះទេវតាឲ្យទោស ហេតុម្តេចមាតាមកឲ្យខ្ញុំបាទរាប់អានមនុស្សកុហកនោះវិញ?

នាង**ង៉ហ៊ូយិន**ឃើញថា **ស៊ុនសេក**មិនទទួលស្តាប់ពាក្យសោះ ក៏ត្រឡប់វិលទៅផ្ទះវិញ ហើយគិតនឹងធ្វើបុណ្យឧទ្ទិសកុសលផលបញ្ជូនទៅឲ្យ**អ៊ីកៀត** លុះវេលាកណ្តាលអាធ្រាត្រ **ស៊ុនសេក**ក៏ដេកឈឺលើគ្រែដំណេក ទទួលខ្យល់បក់មកទៀនក៏រលត់ទៅ ក្នុងមួយរំពេចនោះភ្លើងក៏ឆេះឡើងវិញ ហើយក្រឡេកមើលទៅឃើញរូប**អ៊ីកៀត**មកឈរនៅពីមុខ **ស៊ុនសេក**ក្រោកឡើងក៏ស្រែកគំហកហើយថា “ចិត្តអញនេះស្អប់មនុស្សកុហកបោកបញ្ឆោតជឿកាន់ខ្មោចបិសាច បានជាអញសម្លាប់ឯង

ចេញ ឥឡូវស្លាប់ទៅហើយ ហេតុម្តេចទៅជាអសុរកាយមកជិតអញទៀត?” ថា ហើយក៏ហូតគ្រប៉ីចោលទៅ រូប**អ៊ីកៀត**ក៏បាត់ពីទីនោះទៅវិញ។ នាង**ង៉ហ៊ួយិន**បានឮសំឡេង**ស៊ុនសេក**និយាយនឹង**អ៊ីកៀត**ដូច្នោះ ក៏រឹតតែមានសេចក្តីទុក្ខព្រួយជាខ្លាំងឡើងទៀត។ **ស៊ុនសេក**ដឹងថាមាតាមិនសប្បាយក៏ទៅសួរហើយនិយាយថា មាតាកុំកើតទុក្ខព្រួយដល់ខ្ញុំបាទឡើយ ខ្ញុំបាទមិនមានអន្តរាយដោយអ្វីទេ។

នាង**ង៉ហ៊ួយិន**ថា **អ៊ីកៀត**នោះគ្មានសេចក្តីខុសឆ្គងអ្វីសោះ កូនសម្លាប់គេ ៗក៏មានកំហឹង ទើបបណ្តាលឲ្យឃើញជារូបអសុរកាយមកប្រទូសរ៉ាយកូនវិញ។ ឥឡូវម៉ែឲ្យមនុស្សរៀបចំធ្វើបុណ្យនៅវត្តយ៉ុកសៀងគួន កូនចូរប្រញាប់ចេញទៅគំនាប់បូជា**អ៊ីកៀត**ចុះ ទើបបានសេចក្តីសុខមិនបានគ្រោះថ្នាក់អន្តរាយ។ **ស៊ុនសេក**ទទឹងមាតាពុំបាន ក៏វិលត្រឡប់ទៅផ្ទះវិញ លុះដល់ព្រឹកឡើង**ស៊ុនសេក**ក៏ចេញទៅឯវត្តយ៉ុកសៀងគួន លោកមេវត្តនោះក៏និយាយប្រាប់**ស៊ុនសេក**ថា គ្រឿងបូជារៀបស្រេចអស់ហើយ ឲ្យលោកចូលទៅអុជទៀនធូបបូជាចុះ។ **ស៊ុនសេក**ក៏ចូលទៅអុជទៀនធូបឡើង តែមិនបានគំនាប់បូជា ក្នុងខណៈនោះក៏ឃើញរូប**អ៊ីកៀត**អង្គុយអណ្តែតលើផ្សែងធូប **ស៊ុនសេក**ខឹងណាស់ជេរថា “អា**អ៊ីកៀត**ចង្រៃអប្រិយ៍ចេញឆាប់ទៅ!” ហើយដើរត្រឡប់មកដល់មាត់ទ្វារកឹង ក៏ឃើញរូប**អ៊ីកៀត**ឈរសម្លក់ក្បែរមាត់ទ្វារទៀត **ស៊ុនសេក**ខឹងណាស់កន្ត្រាក់គ្រប៉ីចោលទៅត្រូវទាហានដែលសម្លាប់**អ៊ីកៀត**នោះដួលសន្លប់ចុះ ចេញឈាមពីច្រមុះ និងមាត់ដួចគេផ្ទុះចេញមក ក៏ដាច់ខ្យល់ស្លាប់។ **ស៊ុនសេក**មានសេចក្តីអាណិតណាស់ ឲ្យរៀបចំសពនាំទៅកប់តាមប្រពៃណី **ស៊ុនសេក**ក៏ដើរចេញពីមាត់ទ្វារទៅឃើញរូប**អ៊ីកៀត**ដើរឆ្លងទៅមកពីខាងមុខ។

**ស៊ុនសេក**ក៏ថា វត្តនេះមានខ្មោចបិសាចមកនៅច្រើន លងយាយីកាចពេកណាស់ នឹងទុកតទៅមិនបាន ទើបបង្គាប់ទាហានរើរុះចេញ។ ទាហានទាំងពួងក៏ធ្វើ

តាម ឯរូប**អ៊ីកៀត**ក៏ទៅនៅលើដំបូលវិហារយកក្បឿងចោលគ្រវែងចុះមកត្រូវទាហានរបួសពិការគ្រប់គ្នា ទាហានក៏ខ្លាចមិនអាចចូលទៅរើរុះបានឡើយ។ **ស៊ុនសេក**ក៏បង្គាប់លោកមេវត្តឲ្យហៅគ្នាដើរចេញឲ្យអស់ពីក្នុងវត្ត ហើយបង្គាប់ឲ្យទាហានយកភ្លើងមកគរដុតវត្តនោះឆេះឡើង ស្រាប់តែឃើញរូប**អ៊ីកៀត**អណ្តែតនៅក្នុងអណ្តាតភ្លើង **ស៊ុនសេក**ទឹកខឹងណាស់ក៏ត្រឡប់មកផ្ទះ ឃើញរូប**អ៊ីកៀត**មកឈរនៅទទឹងមាត់ទ្វារទៀត។ **ស៊ុនសេក**ទ្រាំពុំបានក៏នាំសេនាទាហានទៅបោះទ័ពនៅខាងក្រៅស្រុក ហៅទីប្រឹក្សាមកពិគ្រោះការនឹងលើកកងទ័ពទៅជួយ**អ៊ូនសៀវ**ដើម្បីច្បាំងកម្ចាត់**ចូឆូ**។

ទីប្រឹក្សាទាំងពួងនិយាយហាមឃាត់ថា លោកមិនទាន់សះជាជំងឺរបួស បើប្រញាប់លើកទ័ពទៅនោះ របួសព្រួញក៏នឹងកម្រើកឡើងទៀត សូមឲ្យបង្អង់ឈប់សិន បើបានសះជាវេលាណាសឹមលើកទ័ពទៅវេលានោះ។ **ស៊ុនសេក**ស្តាប់បានហើយក៏ឲ្យពេទ្យមករក្សាជំងឺខ្លួនឡើងវិញ។ វេលាយប់មួយ **ស៊ុនសេក**ឃើញរូប**អ៊ីកៀត**មកឈរសំយ៉ាកសក់លៀនអណ្តាតខមភ្នែកនៅប្របគ្រែដេក **ស៊ុនសេក**ខឹងណាស់ ក្រោកឡើងស្រែកគំហកជាច្រើនដងទាល់តែដល់ភ្លឺ។ នាង**ង៉ហ៊ូយិន**ក៏ឲ្យហៅខ្លួន**ស៊ុនសេក**ចូលទៅជួប នាងឃើញរូប**ស៊ុនសេក**នោះស្គាំងស្គមខុសប្លែកពីធម្មតាក៏នឹកភ័យបារម្ភ យំសោកជាទុក្ខហើយថា មុខមាត់អ្នកសៅហ្មងស្គាំងស្គមខ្លាំងណាស់។ **ស៊ុនសេក**បានឮមាតាថាដូច្នោះ ក៏ទាញយកកញ្ចក់មកឆ្លុះមើលមុខ ឃើញរូបរាងកាយដូចពាក្យម្តាយប្រាប់ក៏ស្លុតក្នុងចិត្តទើបថា "រូបរាងកាយខ្ញុំបាទបង់ឆោមទៅដល់យ៉ាងនេះ?" ក៏ក្រឡេកទៅឃើញរូប**អ៊ីកៀត**នៅក្នុងកញ្ចក់ **ស៊ុនសេក**ខឹងក៏បោកកញ្ចក់នោះចេញហើយស្រែកយ៉ាងខ្លាំង របួសព្រួញនោះក៏រឹតតែខ្លាំងឡើងលោហិតហូរចេញមកដួលសន្លប់នៅទីនោះ។ ភរិយា**ស៊ុនសេក**និងស្រីទាំងពួងក៏នាំគ្នា

គ្រាហ៍ពលើកឡើងដាស់ឲ្យដឹងខ្លួន។ **ស៊ុនសេក**ដកដង្ហើមធំហើយថា ជីវិតយើងក្នុងគ្រានេះមុខជាមិនរួចពីសេចក្ដីស្លាប់ទេ ទើបឲ្យហៅ**ស៊ុនគួន**ជាប្អូននិង**ទៀវចៀវ**មកប្រជុំគ្នា និងទីប្រឹក្សាទាំងពួងនៅខាងក្នុងហើយនិយាយថា “ខ្លួនយើងពេលនេះមុខជាមិនរួចពីសេចក្ដីស្លាប់ទេ ផែនដីសព្វថ្ងៃកើតចលាចលផ្សេងៗ ឯស្រុកកាំងតាំងនេះជាស្រុកធំ **ទៀវចៀវ**ចូរជួយរៀបចំរិះគិតទំនុកបម្រុង**ស៊ុនគួន**ផង ឲ្យ**ស៊ុនគួន**រក្សាស្រុកដោយទំនៀមទម្លាប់ប្រពៃណីពីបុរាណ” ទើបឲ្យយកត្រាសម្រាប់ងារមកប្រគល់ឲ្យ**ស៊ុនគួន** ហើយផ្ដាំថា “ខ្លួនអ្នកត្រូវបានជាធំក្នុងស្រុកកាំងតាំងនេះហើយ ចូរត្រិះរិះគិតការសង្គ្រាមឲ្យជំនាញស្ទាញស្ទាត់ទាំងផ្លូវទឹក និងផ្លូវគោកដូចយ៉ាងបង តែឯការដែលប្រើចិត្តធូរទូលាយរួសរាយរាប់អានសេនាទាហាននោះ ប្អូនមានចិត្តគំនិតធ្ងន់ធ្ងរល្អច្រើន ជាងបងណាស់ បងនេះជាមនុស្សចិត្តស្រាលរហ័សមិនដូចប្អូនទេ មួយទៀតបើប្អូននឹងរិះគិតកិច្ចការអ្វីៗ គប្បីថ្នាក់ថ្នមរក្សាទុករបស់ជាកេរដែលបិតា និងបងបានគ្រប់គ្រង ចាត់ចែងទុកមកដោយការនឿយលំបាក ទើបនឹងមានបរិបូរឡើងត្រឹមនេះ ប្អូនត្រូវបម្រុងរក្សាកុំឲ្យរបស់ទាំងនោះអន្តរាយទៅវិញ។ **ស៊ុនគួន**ទទួលយកត្រាសម្រាប់ងារ ហើយក៏គំនាប់ចាប់យកពាក្យបណ្ដាំបងប្រុសដែលរំឭកប្រដៅក៏សោកសៅអាឡោះអាល័យ។

**ស៊ុនសេក**ក៏និយាយជម្រាបមាតាថា ខ្លួនខ្ញុំបាទនឹងដល់នូវសេចក្ដីស្លាប់ហើយ ឯត្រាសម្រាប់ងារនោះ ខ្ញុំបាទបានប្រគល់ឲ្យ**ស៊ុនគួន**ជាប្អូនទទួលធ្វើការជំនួសតទៅ សេចក្ដីខុសត្រូវដូចម្ដេចសូមអ្នកម្ដាយជួយរំឭកទូន្មាន កុំឲ្យប្អូនខ្ញុំបាទប្រមាថមើលងាយនាយទាហានដែលមានជាប់មកពីបិតា។ នាង**ង៉ហ៊ូយិន**បានឮពាក្យ**ស៊ុនសេក** ក៏ស្រក់ទឹកភ្នែកយំយែកបោកប្រាណអាឡោះអាល័យ ទើបស្រដីថា **ស៊ុនគួន**ប្អូនអ្នកក៏នៅក្មេងណាស់ ក្រែងនឹងរក្សាស្រុកកាំងតាំងនេះមិនបាន។ **ស៊ុនសេក**ឆ្លើយថា ឯ

**ស៊ុនគួន**នោះទោះបីនៅក្មេងក៏ពិតមែនហើយ តែមានតម្រិះប្រាជ្ញាស្មារតីច្រើនជាងខ្ញុំបាទដប់ភាគទៅទៀត ខ្ញុំបាទយល់ឃើញថានឹងគ្រប់គ្រងស្រុកកាំងតាំងបាន ឯការខាងក្នុង បើលើសគំនិតឲ្យយកចិត្តពិគ្រោះប្រឹក្សានឹង**ទៀវចៀវ** ឯការខាងសង្គ្រាមបើទញ់ទាល់ប្រការម្ដេចក៏ឲ្យពិគ្រោះប្រឹក្សានឹង**ជីវយី**ចុះ។ តែខ្ញុំបាទនៅតូចចិត្តណាស់ ព្រោះមិនបានជួបនឹង**ជីវយី**ក្នុងវេលានេះ មិនបានផ្ដាំពាក្យពេចន៍ទល់មាត់នឹងមាត់សោះ។

ហើយ**ស៊ុនសេក**ឲ្យហៅប្អូនស្រីទាំងពីរមកផ្ដាំថា ប្អូនចូរយកចិត្តទុកដាក់ឈឺឆ្អាលនឹង**ស៊ុនគួន**ជាបងផង បើមាននរណាដែលជាបក្សពួកសែជាមួយនឹងយើងគិតប្រទូសរ៉ាយដល់**ស៊ុនគួន** ចូរជួយព្រួតគ្នារិះគិតប្រើប្រាជ្ញាប្រាបប្រាមឲ្យរាបទាប កុំឲ្យអ្នកដទៃមើលងាយប្រមាថ និងតិះដៀលនិន្ទាបាន។ ខណៈនោះ**ស៊ុនគួន** និងប្អូនស្រីទាំងពីរទទួលស្ដាប់ពាក្យបណ្ដាំហើយក៏សោកាពិលាប **ស៊ុនសេក**ក៏និយាយនឹងនាង**កៀវហ៊ួយិន**ជាភរិយាថា “ខ្លួនបងអស់បុណ្យវាសនាហើយ នឹងស្លាប់ចោលប្អូនក្នុងគ្រានេះ ប្អូនចូរនៅឲ្យបានសេចក្ដីសុខចុះ ហើយខំយកចិត្តទុកដាក់ប្រណិប័តន៍រក្សាមាតារបស់បងផង មួយទៀតឲ្យប្អូនជួយនិយាយរំឭកប្អូនស្រីដែលជាភរិយា**ជីវយី** ឲ្យខំយកចិត្ត**ជីវយី**គ្រាន់បានជាទីពឹង ដើម្បីនឹងឲ្យ**ជីវយី**ជួយទំនុកបម្រុង**ស៊ុនគួន** ហើយសូមឲ្យ**ជីវយី**មានមេត្រីចិត្ត គិតដល់សេចក្ដីស្មោះត្រង់របស់យើងដែលធ្លាប់ធ្វើការផងគ្នារៀងរាបមក”។ លុះផ្ដែផ្ដាំសេចក្ដីសព្វគ្រប់ហើយ **ស៊ុនសេក**ក៏ដាច់ខ្យល់ស្លាប់។

កាល**ស៊ុនសេក**ស្លាប់នោះអាយុម្ភៃប្រាំមួយឆ្នាំ មាតានិងភរិយានូវអស់គណៈញាតិបងប្អូនទាំងអស់ ក៏សឹងទួញយំដំឱរាសោកាល័យគ្រប់គ្នា ឯ**ស៊ុនគួន**នោះយំទាល់តែដួលសន្លប់ ពេទ្យក៏ស្រោចស្រប់លាបរឹងរួតទាល់តែដឹងខ្លួនឡើងវិញ។

**ទៀវថៀវ**និយាយលួងលោមចិត្តថា វេលានេះអាណាខេត្តទាំងពួងនៅមិនទាន់រាបទាបជាប្រក្រតីនៅឡើយ ដែលអ្នកនឹងមកសោកសៅដូច្នេះមិនគួរទេ សូមឱ្យអ្នករៀបចំតាក់តែងធ្វើបុណ្យបូជាសព**ស៊ុនសេក**ឱ្យរួចស្រេចសិនទៅ ដើម្បីនឹងបានរិះគិតកិច្ចការការពាររក្សាស្រុកឱ្យមាំមួនទៅ។ **ស៊ុនគួន**យល់ឃើញត្រូវ ទើបផ្ទុកដាក់មុខងាររៀបចំការបូជាសពនោះឱ្យ**ស៊ុនចេង**ជាមា ចាត់ចែងតែងតាមទំនៀមទម្លាប់ ឯ**ស៊ុនគួន**ក៏ចេញនិយាយការរាជការបណ្ដានាហ្មឺនមុខមន្ត្រី និងសេនាទាហានគ្រប់តំណែង ចូលមកគំនាប់ព្រមគ្នា។ **ស៊ុនគួន**នោះជាមនុស្សមានសុភលក្ខណៈ រូបរាងស្អាតបាត មុខធំ ថ្ពាសទូលាយ ភ្នែកក្រហម។

ខណៈកាល**ស៊ុនគៀន**ជាបិតារស់នៅឡើយនោះ **ឡៅអួន**ជានាហ្មឺនធំនៅក្នុងព្រះចៅ**ហៀនតេ** ចេញមកស្ដីរាជការស្រុកកាំងតាំង ឃើញកូន**ស៊ុនគៀន**ទាំងបួននាក់ មានរូបរាងល្អស្អាតប្រកបដោយលក្ខណៈជាអ្នកមានបុណ្យ **ឡៅអួន**ទាយទុកថា **ស៊ុនគួន**នោះនឹងមានបុណ្យវាសនាច្រើនជាងបងប្អូនទាំងអស់ ទាំងអាយុក៏យឺនវែង យូរទៅ**ស៊ុនគួន**នឹងបានជាធំ។ ដល់គ្រានេះបានសមដូចពាក្យ**ឡៅអួន**ទាយទុកមែន។

ឯ**ជីវយី** ដែល**ស៊ុនសេក**ឱ្យឃុំនាំទាហានទៅរក្សាគយល្បាតនៅតំបន់ប៉ាគីវនោះ លុះបានដឹងដំណឹងថា**ស៊ុនសេក**ត្រូវព្រួញរបួសឈឺជាទម្ងន់ ក៏នាំទាហានស្រូតរូតមកស្រុកកាំងតាំងវិញ ដឹងថា**ស៊ុនសេក**ស្លាប់ក៏ប្រញាប់ចូលមកឱបសព**ស៊ុនសេក**សោកាពិលាបរៀបរាប់ដោយសេចក្ដីអាឡោះអាល័យផ្សេងៗ។ នាង**ង៉ហ៊ូយិន** និង**ស៊ុនគួន**ក៏ចេញមកជួបនឹង**ជីវយី** ហើយពណ៌នាប្រាប់តាមបណ្ដាំ ដែល**ស៊ុនសេក**ផ្ដាំទុកសព្វគ្រប់ប្រការ។ **ជីវយី**ឆ្លើយថា **ស៊ុនសេក**នេះមានគុណូបការៈចំពោះខ្លួនខ្ញុំបាទមកច្រើនណាស់ ខ្ញុំបាទសូមជួយទំនុកបម្រុង**ស៊ុនគួន**ទៅតាមសតិបញ្ញា ដោយការ

សុចរិតលុះត្រាតែអស់ជីវិតសង្ខារ។ **ស៊ុនគួន**ក៏ថា ខ្លួនខ្ញុំនៅក្មេងសេចក្ដីខ្លីគំនិតនៅឡើយ តែថា**ស៊ុនសេក**ជាបងលើកប្រគល់ត្រាសម្រាប់ងារ និងការរាជការក្នុងស្រុកដល់ខ្ញុំហើយក៏ត្រូវទទួល តែខ្លួនអ្នកដែលជាអ្នកទំនុកបម្រុងនឹងឲ្យខ្ញុំរក្សាស្រុកទេសប្រការម្ដេចនឹងបានសេចក្ដីសុខតទៅ ត្រូវណែនាំបំភ្លឺឲ្យខ្ញុំបានដឹង ស្គាល់យល់ការផង។ **ជីវយី**ថា ពាក្យទំនៀមបុរាណពោលទុកមកថា បើអ្នកឯណាដែលធ្វើជាមេបារក្សាស្រុកទេសនីមួយៗ ឲ្យចេះបញ្ចុះបញ្ចូលល្បួងលួងលោមយកចិត្តអ្នកដែលមានតម្រិះប្រាជ្ញាស្មារតី ហើយត្រូវមានមេត្រីចងចិត្តសេនាទាហាន ដែលមានថ្វីដៃខ្លាំងពូកែយកធ្វើជាគ្នាឲ្យបានច្រើន ទើបស្រុកទេសនោះនឹងបានសេចក្ដីសុខជាប្រក្រតីទៅ បើអ្នកឯណាលះបង់ពាក្យបុរាណដូច្នេះហើយ ស្រុកនោះក៏នឹងកើតវិប្បលាសវិនាសអន្តរាយ ដូចខ្លួនអ្នកដែលបានយសស័ក្តិធ្វើជាចៅហ្វាយស្រុកគ្រានេះ ត្រូវតែខំប្រឹងរិះគិតធ្វើតាមពាក្យបុរាណ ទើបប្រទេសបានចម្រើននូវសេចក្ដីសុខស្ថាពរតទៅ។ **ស៊ុនគួន**ថា បងខ្ញុំបានផ្ដាំទុកថា ការខាងរៀបរយក្នុងស្រុក (ស៊ីវិល) ឲ្យពិគ្រោះប្រឹក្សានឹង**ទៀវចៀវ** ឯការខាងសេនាទាហានឲ្យពិគ្រោះប្រឹក្សានឹងអ្នក។

**ជីវយី**ក៏ក្លែងបន្ទាបខ្លួនថា **ទៀវចៀវ**នោះគេមានសតិបញ្ញាច្រើន គួរត្រិះរិះខាងការរៀបរយក្នុងស្រុកហើយ តែដែល**ស៊ុនសេក**ផ្ដាំឲ្យខ្ញុំជួយនិយាយការខាងសេនាទាហាននោះ ឃើញថាលើសកម្លាំង ព្រោះការទាហាននោះជ្រៅទូលាយឆ្ងាយណាស់ ក្រែងសតិបញ្ញាខ្ញុំគិតទៅមិនដល់ ការទាំងពួងក៏នឹងសាបរលាបខ្លួនបង់ទៅ។ ខ្ញុំយល់ឃើញថា**ឡោសុក**នៅស្រុកតាំងឈ្នួននោះមានសតិបញ្ញាជាច្រើនណាស់ ទាំងទ្រព្យសម្បត្តិក៏មានបរិបូរព្រមទាំងមានសេចក្ដីកតញ្ញូផង កាលបិតា**ឡោសុក**ស្លាប់នោះ **ឡោសុក**ប្រណិប័តន៍ថែរក្សាមិនឲ្យរលកដង្គំ ហើយយកទ្រព្យចំណាយឲ្យទានដល់មនុស្សទុរគតខ្សត់កំព្រាជារឿយៗ។ កាលខ្ញុំលើកបក្សពួកប្រហែលបីរយនាក់

ទៅនៅតំបន់ចៅទៀតនោះ ទទួលស្រូវថ្លៃ ខ្ញុំដឹងថា**ឡោសុក**មានស្រូវពីរជង្រុក ក្នុងមួយជង្រុកបីពាន់ថាំង ខ្ញុំនាំគ្នាទៅសុំស្បៀងអាហារពី**ឡោសុក** ៗក៏មានអំណរសាទរឲ្យស្រូវខ្ញុំមួយជង្រុក។ លុះអំណើះតមក **ឡោសុក**នាំមាតានិងគ្រួសារទៅនៅតំបន់ខយ៉ុកឱ មាតា**ឡោសុក**ទទួលអនិច្ចកម្ម **ឡោសុក**មានសម្លាញ់ម្នាក់ ឈ្មោះ**ឡោជុងជៀង**។ ឥឡូវ**ឡោជុងជៀង**បបួល**ឡោសុក**ប្រុងទៅនៅនឹង**តេងប៉ោ**ចៅហ្វាយស្រុកចៅអ។ **ឡោសុក**មិនទាន់ព្រមទៅ ហេតុនេះសូមឲ្យលោកចាត់ប្រើមនុស្ស ដែលមានសតិបញ្ញាទៅបញ្ចុះបញ្ចូលអញ្ជើញ**ឡោសុក**យកមកទុកជាទីប្រឹក្សា ដើម្បីនឹងជួយគិតការតទៅ។

**ស៊ុនគួន**បានស្ដាប់ហើយក៏មានសេចក្ដីត្រេកអរ និយាយនឹង**ជីវយី**ថា “ដែលនឹងរកអ្នកឯណាឲ្យទៅនោះក៏មិនដូចអ្នក” ហើយក៏រៀបចាត់ចែងរបស់ទ្រព្យដ៏មានតម្លៃឲ្យ**ជីវយី**នាំយកទៅគំនាប់សមគួរនឹង**ឡោសុក**។ **ជីវយី**ក៏ទទួលនាំយករបស់ទ្រព្យទាំងនោះទៅជាមួយនឹងបាវព្រាវដល់តំបន់ខយ៉ុកឱ ហើយនាំចូលទៅឲ្យ**ឡោសុក** រួចនិយាយថា **ស៊ុនគួន**បានដឹងថាអ្នកមានតម្រិះប្រាជ្ញាស្មារតី ប្រកបដោយមេត្រីចិត្តរាប់អានអ្នកតូចទូទៅ សមគួរនឹងធ្វើជាចៅហ្វាយនាយគេបាន ក៏ឲ្យខំគិតអានចូលទៅនៅពឹងបុណ្យអ្នកនោះនឹងបានជាទីពឹងពំនាក់តទៅ។ ឥឡូវអ្នកក៏ដឹងហើយថា **ស៊ុនគួន**ជាចៅហ្វាយនាយរបស់យើងនេះ មានតម្រិះប្រាជ្ញាស្មារតីប្រកបដោយមេត្រីចិត្តរាប់អាន ស្រឡាញ់សេនាទាហានដែលមានថ្វីដៃខ្លាំងពូកែ និងអ្នកដែលមានសតិបញ្ញាច្រើន មួយទៀត បើអ្នកណាដែលមានសតិបញ្ញានឹងនិយាយការអ្វីជាផ្លូវត្រូវ ហើយប៉ានទៅទទឹងទាស់ **ស៊ុនគួន**ក៏ប្រែក្រឡាស់យល់តាមឥតប្រកែកសោះ ចិត្តរបស់ខ្ញុំដែលស្រឡាញ់ស្មោះយល់ឃើញថា បើអ្នកទៅនៅធ្វើការនឹង**ស៊ុនគួន** យល់ថា

ប្រសើរជាងទៅនៅនឹងអ្នកដទៃច្រើនភាគ ដែលខ្ញុំខំសង្វាតមកនិយាយនឹងអ្នកដូច្នេះ ដោយអំពើសុចរិត សូមឲ្យអ្នករំពឹងរិះគិតពិចារណាមើលតាមការគួរចុះ។

**ឡោសុក**បានស្តាប់ដូច្នោះ ក៏យល់ភ្លឺច្បាស់ក្នុងសន្តានចិត្តមានសោមនស្ស ប្រីតាឆ្លើយថា ខ្ញុំយល់ព្រមតាមសម្ដីអ្នក ខ្ញុំសូមចូលទៅពឹងពាក់**ស៊ុនគួន**ជាចៅហ្វាយនាយតទៅ។ **ជីវយី**ក៏នាំ**ឡោសុក**ទៅដល់ស្រុកកាំងតាំង ហើយក៏ចូលទៅគំនាប់**ស៊ុនគួន** ៗក្រឡេកឃើញ**ឡោសុក**ទៅដល់ក៏ត្រេកអររីករាយ ចេញពីក្នុងបន្ទាយមកទទួលនាំចូលទៅនិយាយសាកសួរតាមសមគួរ ហើយក៏ពិគ្រោះប្រឹក្សាពីកិច្ចរាជការសឹកសង្គ្រាមតាំងពីព្រឹកដល់ថ្ងៃត្រង់។ **ឡោសុក**ក៏និយាយបរិយាយឲ្យ**ស៊ុនគួន**ភ្លឺ ចូលចិត្តស្តាប់បានសព្វគ្រប់ប្រការ។ **ស៊ុនគួន**មានសេចក្តីត្រេកអរជាអនេកកប្បការ ហើយឲ្យរៀបតុជប់លៀងភោជនាហារ**ឡោសុក**។ លុះវេលាយប់**ស៊ុនគួន**ក៏ឃាត់**ឡោសុក**ឲ្យនៅដេកជាមួយគ្នាលើគ្រែដំណេក។ **ស៊ុនគួន**ក៏មានចិត្តត្រេកអររីករាយនាំនិយាយពីកិច្ចរាជការផែនដី ដេកប្រកងកើយលើ**ឡោសុក**ដោយស្រដីថា សព្វថ្ងៃនេះ ព្រះចៅ**ហៀនតេ**សោយរាជសម្បត្តិ ផែនដីក៏កើតវិប្បរិតចលាចលផ្សេងៗ ខ្ញុំយល់ឃើញថាស្រុកទេសរបស់យើងវេលានេះ នឹងរៀវរោយសាបសូន្យអស់ហើយ ដែលខ្ញុំបានរក្សាស្រុកជំនួស**ស៊ុនសេក**ជាបងគ្រានេះ ខ្ញុំក៏ប្រុងគិតនឹងធ្វើការឲ្យធំទូលាយចេញទៅទៀត ឲ្យដូចគ្រាព្រះចៅ**ជិនប៊ុនកុង**សោយរាជសម្បត្តិនោះ ៗអាណាខេត្តទាំងពួងក៏បះបោរជារឹករវចលាចលរាល់អន្លើ ឯព្រះចៅ**ជិនប៊ុនកុង** និង**ចេហ្ស៊ិនកុង**ជាមហាឧបរាជក៏រិះគិតនឹងបំបាត់ចលាចល ធ្វើឲ្យគ្រប់មណ្ឌលរាបទាបចុះចូលក្នុងអំណាចទាំងអស់។ ប្រទេសក៏បានសេចក្តីសុខក្សេមក្សាន្តជាយូរអង្វែង ដែលខ្ញុំនាំរឿងមកសម្ដែងឲ្យឃើញជាលំអានដូច្នេះ តើខ្លួនអ្នកយល់ឃើញប្រការដូចម្ដេច?

**ឡោសុក**តបថា លោកត្រិះរិះគិតនេះជាការត្រូវណាស់ តែនឹងចង់ឲ្យរហ័សឆាប់រួសរាន់ទាន់ចិត្ត គិតឲ្យបានធំទូលាយដូចនិយាយពីព្រះចៅ**ជិនប៊ុនកុង** និង**ចេហ្វ៊ូកុង**នោះមិនទាន់បានទេ ព្រោះផែនដីសព្វថ្ងៃនេះកំពុងកើតចលាចល ព្រះចៅ**ហៀនតេ**ដែលគ្រងក្នុងសកលរាជធានី ក៏ជាទីកង្វល់អំពល់មិនបានសុខដូចប្រក្រតី ដោយមានមន្ត្រីធំគឺ**ចូឆូ** ជាមហាឧបរាជមានតម្រិះប្រាជ្ញាស្មារតីទាំងសេនាទាហានក៏មានថ្វីដៃជាច្រើន ដែលលោកគិតនឹងកាច់បំបាក់យករហ័សនោះមិនបានទេ មួយទៀត**អ៊្វិនសៀវ**ក៏កំពុងតែធ្វើសឹកជាប់ដៃគ្នានឹង**ចូឆូ**។ ឯ**ឡោពៀវ**ចៅហ្វាយស្រុកកេងជីវ និង**អ៊ុយចរ**ចៅហ្វាយស្រុកកាំងហែនោះ ក៏ជាចម្រូងចម្រាសនៅជិតស្រុកយើង សូមឲ្យលោករិះគិតកម្ចាត់**ឡោពៀវ** និង**អ៊ុយចរ**ចេញសិនរួចសឹមគិតការធំតទៅទៀត។ **ស៊ុនគួន**បានស្ដាប់ដូច្នោះក៏ពេញចិត្តណាស់ ក្រោកឡើងសំពះ**ឡោសុក**ហើយក៏ដេកជាមួយគ្នាទៅ។ លុះព្រឹកឡើង**ស៊ុនគួន**ក៏ចាត់ចែងមាសប្រាក់ និងគ្រឿងសម្លៀកបំពាក់យ៉ាងល្អមានតម្លៃ ឲ្យជារង្វាន់**ឡោសុក**ជាច្រើន ហើយក៏ចាត់ចែងទីលំនៅឲ្យ**ឡោសុក**ៗទទួលយករបស់ទាំងនោះរួចលា**ស៊ុនគួន**ទៅកាន់ទីលំនៅ។

ឯ**ជូកាត់កិន**ជាបងខុងបេងនោះនៅក្នុងដែនស្រុកកេងជីវ មានសតិបញ្ញាច្រើនជាសម្លាញ់គ្នានឹង**ឡោសុក** លុះដឹងដំណឹងថា**ឡោសុក**ទៅនៅស្រុកកាំងតាំង **ជូកាត់កិន**ក៏ទៅសួរដោយសេចក្ដីរឭក**ឡោសុក** ៗមានអំណរណាស់ក៏បបួល**ជូកាត់កិន**ឲ្យចូលទៅនៅធ្វើការជាមួយនឹង**ស៊ុនគួន**។ **ជូកាត់កិន**ក៏ព្រម ទើប**ឡោសុក**នាំខ្លួនទៅជួបនឹង**ស៊ុនគួន** ហើយពណ៌នារឿងរ៉ាវប្រាប់ថា **ជូកាត់កិន**នេះជាសម្លាញ់ស្និទ្ធស្នាលនឹងខ្ញុំបាទមកពីដើម ឥឡូវព្រមចូលមកនៅធ្វើរាជការនឹងលោក។ **ស៊ុនគួន**បានស្ដាប់ដូច្នោះ ក៏មានចិត្តត្រេកអរទទួលយក**ជូកាត់កិន**ទុកជាទីប្រឹក្សា ហើយក៏ពិគ្រោះនឹងទីប្រឹក្សាទាំងពួងថា **អ៊្វិនសៀវ**បានឲ្យសំបុត្រមកដល់បងយើង ឲ្យលើកកងទ័ពទៅ

ជួយវាយកម្ចាត់**ចូឆ្វ**ចេញ។ ឥឡូវបងយើងក៏អនិច្ចកម្មទៅហើយ បើដូច្នេះតើអ្នកទាំងអស់គ្នាយល់យ៉ាងណា នឹងឲ្យយើងចូលទៅខាង**អ៊្វីនសៀវ**ល្អជាង ឬចូលទៅខាង**ចូឆ្វ**ល្អជាង? **ជូកាត់កិន**ឆ្លើយឡើងថា ដែលនឹងចូលទៅខាង**អ៊្វីនសៀវ**នោះ ខ្ញុំយល់ឃើញថាមិនស្រួលទេ សូមឲ្យលោកចូលទៅខាង**ចូឆ្វ**ចុះ បើកាលណាឃើញថាមានឱកាសចន្លោះល្មម សឹមយកចំណាប់នោះមករិះគិតចាប់ការតាមតម្រិះប្រាជ្ញាជាក្រោយ។ **ស៊ុនគួន**យល់ឃើញត្រូវក៏ព្រមតាម ទើបធ្វើសំបុត្រទៅកាត់ផ្លូវមេត្រី ឲ្យ**តាន់ជិន**ត្រឡប់ទៅឲ្យ**អ៊្វីនសៀវ**។

ឯ**ចូឆ្វ**លុះដឹងដំណឹងថា**ស៊ុនសេក**ស្លាប់ហើយ ក៏ប្រឹក្សានឹងសេនាទាហានទាំងពួងថា **ស៊ុនសេក**ស្លាប់ហើយ ឥឡូវ**ស៊ុនគួន**ជាប្អូនបានទទួលធ្វើរាជការជំនួសបងយើងចង់នឹងលើកកងទ័ពទៅវាយយកស្រុកកាំងតាំងគ្រានេះ តើអ្នកទាំងអស់គ្នាយល់ឃើញប្រការដូចម្ដេច? **ទៀវហៀន**ក្លែងឧបាយឆ្លើយថា វេលានេះ**ស៊ុនសេក**ក៏ស្លាប់ទៅហើយ **ស៊ុនគួន**និងក្រុមញាតិបងប្អូនទាំងពួងក៏នៅកំពុងរវល់រៀបចំការសព**ស៊ុនសេក** បើលោកនឹងលើកទ័ពទៅច្បាំងយកស្រុកកាំងតាំងក្នុងគ្រានេះ មនុស្សទាំងពួងនឹងគរហានិន្ទា ប្រការមួយទៀត បើលោកទៅធ្វើការសង្គ្រាមនោះ ត្រឡប់ទៅជាថ្លោះការប្រការម្ដេចទៅវិញក៏រឹតតែអប្បយសជាច្រើន លោកចូររិះគិតយកចិត្ត**ស៊ុនគួន**ទុកជាគ្នាវិញប្រសើរជាង។ **ចូឆ្វ**យល់ឃើញត្រូវ ក៏ចូលទៅក្រាបបង្គំទូលព្រះចៅ**ហៀនតេ** ឲ្យតាំង**ស៊ុនគួន**ពេញជាទៅចៅហ្វាយស្រុកកាំងតាំង តាំង**ទៀវហៀន**ជាទីបាឡាត់។ ព្រះចៅ**ហៀនតេ**ក៏ទ្រង់យល់ព្រម ហើយត្រាស់ឲ្យ**ចូឆ្វ**តែងត្រាតាំងឲ្យ**ទៀវហៀន**កាន់ត្រឡប់ទៅឲ្យ**ស៊ុនគួន**។ ឯ**ស៊ុនគួន**លុះបានទទួលត្រាតាំងហើយក៏មានសេចក្ដីត្រេកអរពន់ប្រមាណ ទាំងបាន**ទៀវហៀន**ត្រឡប់មកវិញផងហើយតាំងឲ្យ**ទៀវចៀវ** និង**ទៀវហៀន**ជានាហ្មឺនធំសម្រាប់ចាត់ការការរក្សាស្រុក

ទេស។ លុះនៅមកថ្ងៃមួយនោះ **ទៀវហៀន**ក៏នាំ**កោះយ៉ុង**ចូលមកគំនាប់**ស៊ុនគួន**ហើយជម្រាបថា **កោះយ៉ុង**នេះជាមនុស្សមានសតិបញ្ញាសុចរិតពិតត្រង់ខ្ជាប់ខ្ជួន មិនចេះផឹកសុរាកាន់ការល្បែងសោះ មានចិត្តស្ដាប់រស់ស្ម័គ្រចិត្តមកនៅនឹងលោក។ **ស៊ុនគួន**មានអំណរណាស់ទើបតាំង**កោះយ៉ុង** ជាភ្នាក់ងារខាងតុលាការសម្រាប់វិនិច្ឆ័យសេចក្ដីអាណាប្រជានុរាស្ត្រទាំងពួង។ **ស៊ុនគួន**ក៏តាំងចិត្តទំនុកបម្រុងសេនាទាហាន និងថែរក្សាអាណាប្រជាជនតាមទំនៀមទម្លាប់ឲ្យនៅជាសុខក្សេមក្សាន្ត បណ្ដារាស្ត្រទាំងប៉ុន្មានដែលមាននៅគ្រប់ស្រុកចំណុះក៏ស្រុះស្រួលចូលចិត្តស្រឡាញ់**ស៊ុនគួន**ជាច្រើន។

ឯ**តាន់ជិន**កាលត្រឡប់ទៅដល់ស្រុកគីជីវ ក៏យកសំបុត្រទៅជូន**អ៊្វនសៀវ**ហើយពណ៌នាសេចក្ដីថា ឥឡូវ**ស៊ុនសេក**ស្លាប់ទៅហើយ **ស៊ុនគួន**បានជាចៅហ្វាយស្រុកជំនួស ខាង**ចូឆូ**ក៏រិះគិតយកចិត្ត**ស៊ុនគួន** បានទទួលស្នើឲ្យមានត្រាតាំង**ស៊ុនគួន**ពេញទីជាចៅហ្វាយស្រុក។ គ្រានេះ**ស៊ុនគួន**ក៏ចូលចិត្តទៅខាង**ចូឆូ**។ **អ៊្វនសៀវ**ឃើញសេចក្ដីសំបុត្រនិងបានស្ដាប់ព័ត៌មានពី**តាន់ជិន**និយាយដូច្នោះ ក៏នឹកខឹងខ្លាំងណាស់ ទើបបង្គាប់ឲ្យកេណ្ឌពលយោធាក្នុងស្រុកគីជីវ ស្រុកអ៊ីរជីវ ស្រុកសៀងជីវ ស្រុកបេងជីវ បានទាហានទាំងបួនស្រុកចិតសិបម៉ឺនប្លាយ លុះទាហានជួបជុំហើយ ក៏រង់ចាំមើលឫក្សពារពេលាល្អនឹងលើកចេញទៅវាយស្រុកហ៊ូតោ។

ខាង**ហែហ៊្វទុន** ដែល**ចូឆូ**ប្រើទៅតាំងទ័ពនៅតំបន់គួរត ឮដំណឹងថា**អ៊្វនសៀវ**នឹងលើកទ័ពមក ក៏បកសំបុត្រចូលទៅជម្រាប**ចូឆូ** ៗឃើញសំបុត្របកមក ក៏ចាត់ឲ្យ**ស៊ុនហុក**នៅថែរក្សាស្រុកក្រុង តាំងកេណ្ឌទាហានបានប្រាំពីរម៉ឺនប្រាំពាន់ លើកទៅបញ្ចូលនឹងកងទ័ព**ហែហ៊្វទុន** ហើយឲ្យតាំងបន្ទាយវាយកងទ័ពប្រចាំការតស៊ូនឹង**អ៊្វនសៀវ** នៅត្រើយទន្លេហាងហោ។

ឯ**ទៀនហាង**ដែលត្រូវទោសនៅក្នុងគុកនោះ លុះឮដំណឹងថា**អ៊ួនសៀវ**នឹងលើកទ័ពទៅវាយស្រុកហ៊ូតោ ក៏ធ្វើសំបុត្រមួយច្បាប់ឲ្យយកទៅឃាត់**អ៊ួនសៀវ**សេចក្ដីថា “ធម្មតាមនុស្សដែលនៅមិនទាន់មានទុក្ខភ័យ ក៏កុំគប្បីគិតយកទុក្ខភ័យមកដើម្បីដាក់លើខ្លួន ដែលលោកនឹងគិតលើកកងទ័ពទៅក្នុងគ្រានេះ ខ្ញុំបាទយល់ឃើញថាមិនសមសួនទេ ព្រោះគ្មានជោគជ័យល្អ សូមឲ្យលោករារង់បង្អង់គ្រាន់តែរក្សាស្រុកឲ្យមាំមួនសិនចុះ ព្រោះ**ចូវឆ្វ**ក៏មិនអាចនឹងលើកព្យុហៈទ័ពមករំលុបរំលាងស្រុកយើងបានទេ។ ប្រការមួយទៀតត្រូវតែចាំស្ដាប់ដំណឹងឲ្យដឹងកលការសិន បើឮថា**ចូវឆ្វ**ធ្វើសង្គ្រាមភ្ជាត់ភ្លាំងនឹងអ្នកឯណា សឹមយើងលើកពលយោធាទៅវាយយកស្រុកហ៊ូតោឲ្យបានយ៉ាងស្រួល។ វេលានេះ បើលោកមិនព្រមទទួលជឿស្ដាប់ពាក្យខ្ញុំបាទទេ ខំតែសង្វាតលើកទ័ពទៅ ខ្ញុំបាទយល់ឃើញថា លោកនឹងដល់នូវសេចក្ដីបរាជ័យចាញ់ដៃ**ចូវឆ្វ**ជាប្រាកដ”។

**អ៊ួនសៀវ**ទទួលសំបុត្រនោះមកមើលហើយ ក៏មិនបានថាប្រការម្ដេច។ **ហាងគី**ដឹងសេចក្ដីច្បាស់ក៏ស្រដីនឹង**អ៊ួនសៀវ**ថា លោកប្រុងនឹងយកឫក្សលើកទ័ពទៅហើយ **ទៀនហាង**មកនិយាយពាក្យអពមង្គលដូច្នេះមិនគួរទេ។ **អ៊ួនសៀវ**ឮ**ហាងគី**ថាដូច្នោះក៏ខឹងក្រដួឡើង ទើបបង្គាប់ឲ្យទៅយកខ្លួន**ទៀនហាង**ទៅសម្លាប់។ ទីប្រឹក្សានិងសេនាទាហានទាំងពួងដឹងដូច្នោះ ក៏ចូលទៅនិយាយហាមឃាត់**អ៊ួនសៀវ**ថា លោកនឹងលើកកងទ័ពចេញទៅធ្វើការសង្គ្រាម នឹងមកកាប់សម្លាប់មនុស្សខុសទំនៀមដូច្នេះមិនគួរទេ។ **អ៊ួនសៀវ**ឆ្លើយថា “បើដូច្នោះត្រូវឲ្យដាក់គុក**ទៀនហាង**ទុកឲ្យខ្ជាប់ បើយើងទៅធ្វើការមានជ័យជម្នះឈ្នះទ័ព**ចូវឆ្វ**កាលណា វិលត្រឡប់មកវិញនឹងឲ្យសម្លាប់កាលនោះ”។ លុះបានឫក្សជោគពេលាល្អ **អ៊ួនសៀវ**ក៏លើកទ័ពទៅតំបន់ប៊ូអៀង ហើយឲ្យបញ្ឈប់ទាហានកងទ័ពចាប់ធ្វើបន្ទាយជាមាំមួននៅទីនោះ។

**ចស៊ីវ**ជម្រាប**អ៊្លូនសៀវ**ថា ទាហានយើងច្រើនក៏ពិតមែន តែមិនសូវក្លាហានចំណានក្នុងការសង្គ្រាមដូចទាហាន**ចូឆូ**សោះ ឯស្បៀងអាហារក្នុងកងទ័ព**ចូឆូ**នោះតិចជាងយើងមែន តែលោកកុំអាលប្រញាប់ធ្វើការរួសរាន់ពេក ចូររង់រិះគិតឲ្យល្អិតល្អន់សិន ប្រសិនបើស្បៀងក្នុងកងទ័ព**ចូឆូ**អស់កាលណា គង់តែទាហានទាំងនោះនឹងបែកខ្ញែកទៅឯង រួចសឹមយើងលើកកងទ័ពទៅវាយ**ចូឆូ**ៗ នឹងថ្លោះការរបស់យើងមិនលែង។ **អ៊្លូនសៀវ**បានស្ដាប់ហើយក៏ខឹងច្រឡោតឡើងថា “កាលយើងរៀបលើកកងទ័ពចេញមក **ទៀនហង**ជាមនុស្សទោសប៉ាននិយាយទទឹងទាស់នឹងគំនិតយើងម្តងទៅហើយ ឥឡូវថែមមកនិយាយឲ្យរំខានចិត្តយើងម្តងទៀត ដែលខ្លួននាំនិយាយឲ្យចង្អៀតយឺតការដូច្នេះមិនជាក្បួនសឹកសោះ” **អ៊្លូនសៀវ**ថាប៉ុណ្ណោះក៏បង្គាប់ឲ្យទាហានចាប់ខ្លួន**ចស៊ីវ**យកទៅដាក់គុក ហើយថា “បើសម្រេចការសង្គ្រាមវេលាណានឹងឲ្យសម្លាប់ព្រមគ្នានឹង**ទៀនហង**” ហើយឲ្យទាហានតាំងបន្ទាយវាយកងទ័ពរៀងគ្នាទៅចម្ងាយប្រហែលប្រាំបួនរយសិន (៣៦ គ.ម)។

ពេលនោះមានបម្រើសេះខាង**ចូឆូ**ម្នាក់ នាំយកសេចក្តីចូលទៅប្តឹង**ចូឆូ** ៗដឹងហើយក៏គិតថាទាហាន**អ៊្លូនសៀវ**លើកមកគ្រានេះ ច្រើនជាងទាហានយើងប្រាំបួនភាគឬដប់ភាគទៅទៀត **ចូឆូ**ក៏ប្រឹក្សានឹងសេនាទាហានទាំងពួងថា **អ៊្លូនសៀវ**លើកទាហានមកច្រើនម្ល៉េះតើអ្នករាល់គ្នាគិតតតាំងច្បាំងដូចម្តេច? **ស៊ុនហ៊ីវ**ឆ្លើយថា នឹងខ្លាចអ្វីថ្វីដៃ**អ៊្លូនសៀវ**នោះ! ថ្វីបើជាទាហានច្រើនយ៉ាងណា ក៏សុទ្ធតែមិនក្លៀវក្លាខ្លាំងពូកែប៉ុន្នាន ទាហានយើងតិចពិតមែន តែច្រើនវៃឆ្លាតរហ័សស្ទាត់ស្ទាញក្នុងការសង្គ្រាមទាំងអស់ ទោះបីទាហានយើងតិចជាងទាហាន**អ៊្លូនសៀវ**ដប់ភាគរយក៏ដោយ បើបានតតាំងច្បាំងគ្នាដោយឆាប់រហ័សហើយក៏មិនជាការអ្វី ខ្ញុំបាទគិតក្រែងតែ **អ៊្លូនសៀវ**នឹងបង្អង់ទុកឲ្យយូរ ស្បៀងអាហារយើងតិច បើយូរទៅនឹងខ្វះខាត។

**ចូឆ្វ**ថា “អ្នកឯងនិយាយនោះត្រូវល្អណាស់ ត្រូវនឹងគំនិតរបស់យើង” ហើយ**ចូឆ្វ**ក៏កេណ្ឌទាហានលើកចេញមកធ្វើបន្ទាយ ដើម្បីនឹងច្បាំងតគ្នានឹង**អ៊្វីនសៀវ**។

**សឹមផោយ**ដឹងថាកងទ័ព**ចូឆ្វ**លើកមក ទើបប្រជុំទាហានធ្នូមួយម៉ឺនឲ្យចេញទៅពួនបង្កប់នៅក្រៅបន្ទាយសងខាងផ្លូវហើយដាក់កំហិតថា បើកាលណាបានឮសំឡេងផាវអុជជាសញ្ញាឡើង ឲ្យប្រញាប់លើកគ្នាវាយខ្ទប់កងទ័ព**ចូឆ្វ**ដែលចូលមក។ **អ៊្វីនសៀវ**ឃើញ**សឹមផោយ**រៀបចំកងទ័ពដូច្នោះក៏ពេញចិត្តណាស់ តាំងប្រមូលទាហានលើកចេញទៅតាំងនៅពីក្រៅបន្ទាយ លុះក្រឡេកឃើញកងទ័ពមក **អ៊្វីនសៀវ**ក៏តែងខ្លួនពាក់ក្រោះមាសបាំងសប្បធនមាសនាំយក**ទៀវខាប់**, **កោឡាំ**, **ហាន់បេង**, **អ៊ីខេង** ចេញមកឈរនៅមុខទាហានធ្វើជាក្តៀវក្លា។

**ចូឆ្វ**ឃើញ**អ៊្វីនសៀវ**ចេញមកឈរនៅមុខទាហានដូច្នោះ ក៏នាំ**ខៅធូ**, **តៀវលៀវ**, **ស៊ីហ្វុង**, **លីទៀន** បរសេះចេញមកបញ្ឈរនៅមុខទាហាន ហើយលើកស៊ែចង្អុលមុខ**អ៊្វីនសៀវ**ថា ពីដើមយើងបានក្រាបទូលព្រះចៅ**ហៀនតេ**ឲ្យតាំងអ្នកឯងជានាហ្មឺនធំ ព្រះចៅ**ហៀនតេ**ក៏ទ្រង់ប្រោសព្រះរាជទាន ហេតុម្តេចបានជាអ្នកឯងប្រែចិត្តគំនិតគិតក្បត់ លើកកកងទ័ពមកប្រទូសរ៉ាយក្រុងហ៊ូតោវិញ ឲ្យទាស់ព្រះទ័យព្រះចៅ**ហៀនតេ** អ្នកជាមនុស្សអកតញ្ញូទុរយស។ **អ៊្វីនសៀវ**ឮដូច្នោះក៏ឆ្លើយតបថា ខ្លួនជាមហាឧបរាជមិនមានសច្ចៈសុចរិតពិតត្រង់ តាំងធ្វើទ័ពដ៏ធំពន្លឹក នឹកប្រាថ្នាតែនឹងដណ្តើមយករាជសម្បត្តិ លើសជាងកាលគ្រា**អងម៉ាំង** និង**តាំងតុះ**ទៅទៀត ដែលយើងលើកកងទ័ពមកនេះ នឹងបានតាំងចិត្តថាក្បត់នឹងព្រះចៅ**ហៀនតេ**ក៏ឥតអង្គឹមានឡើយ។ យើងមកនេះប្រាថ្នាតែនឹងកម្ចាត់ខ្លួនឲ្យវិនាសចេញបំពេញព្រះរាជហឫទ័យអម្ចាស់ផែនដីរបស់យើងប៉ុណ្ណោះ ព្រោះខ្លួនជារាជសត្រូវធំ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ២៧

**ចារឹករឿងទាញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូឆូ**ប្រើ**តៀវលៀវ**ឲ្យចេញតយុទ្ធនឹង**អ៊្វីនសៀវ** ៗប្រើ**ទៀវខាប់**ចេញតទល់រហូតដល់**ចូឆូ**ចាប់បានសំបុត្រនាយទាហានរបស់ខ្លួន ដែលប្រែចិត្តទៅចូលនឹង**អ៊្វីនសៀវ**។)*

**ចូឆូ**បានឮច្បាស់ក៏ខឹងខ្លាំងណាស់ ទើបចាត់**តៀវលៀវ**ឲ្យលើកទាហានចេញទៅច្បាំងនឹង**អ៊្វីនសៀវ** ៗឃើញដូច្នោះក៏ចាត់ប្រើឲ្យ**ទៀវខាប់**លើកទាហានចេញមកតនឹង**តៀវលៀវ** បានហាសិបភ្លេង នៅមិនទាន់ចាញ់ឈ្នះគ្នា។ **ចូឆូ**ឃើញ**ទៀវខាប់**ក្លាហានណាស់ក៏សរសើរថា "**ទៀវខាប់**មានថ្វីដៃចំណានក្នុងការសង្គ្រាមណាស់" ទើបប្រើ**ខៅធូ**ឲ្យចេញទៅជួយ**តៀវលៀវ**។ **អ៊្វីនសៀវ**ឃើញដូច្នោះ ទើបប្រើ**កោឡាំ**ចេញទៅជួយ**ទៀវខាប់**។ នាយទាហានទាំងបួននាក់នោះ ក៏ប្រយុទ្ធគ្នាទៅវិញទៅមកដោយគុនអាវុធដ៏រហ័សបីដូចគោមរិល។ **ចូឆូ**ចាត់ឲ្យ**ហែហ៊្វូទុន** និង**ចោហាង** លើកទាហានម្នាក់បីពាន់ ចេញទៅជួយវាយខ្ទប់កងទ័ព**អ៊្វីនសៀវ**កុំឲ្យដឹងខ្លួនទាន់។ **សីមផោយ**ឃើញទាហាន**ចូឆូ**លបមកវាយខ្ទប់ពីម្ខាងដូច្នោះ ក៏ឲ្យដុតផាវជាសញ្ញាឡើង ពួកទាហានដែលពួនបង្កប់ទាំងពីរប៉ែក ក៏ស្រែករត់ចូលមក។ **ហែហ៊្វូនទុន**និង**ចោហាង**ទប់មិនបាន ក៏ប្រាសនាំទាហានថយរត់ទៅក្រោយ។ **អ៊្វីនសៀវ**បានចំណាប់ក៏លើកទ័ពដេញបណ្ដោយ ទៅកាប់ចាក់ត្រូវពលទាហាន**ចូឆូ**របួសពិការស្លាប់ជាច្រើន។ ទ័ព**ចូឆូ**ក៏បែកព្រាត់ព្រាយ **ចូឆូ**ឃើញហួសកម្លាំងនឹងទប់ពុំឈ្នះ ក៏ថយទ័ពត្រឡប់ទៅតាំងបន្ទាយនៅទីភ្នំគួរត។

**អ៊្លួនសៀវ**ក៏លើកទ័ពតាមទៅ តាំងបន្ទាយជាប់ជិតគ្នានឹងបន្ទាយ**ចូឆ្វ**។ **សឹមផោយ**និយាយនឹង**អ៊្លួនសៀវ**ថា នៅតំបន់គួរតនេះជាទីចង្អៀតស្រួលណាស់ បើរិះគិតប្រើគំនិតច្បាំងវាយយកបន្ទាយគួរតបានហើយ ស្រុកហ៊ូតោក៏នឹងវាយយកបានដោយងាយ សូមឱ្យលោកចាត់ទាហានទុករក្សាបន្ទាយត្រឹមតែដប់ម៉ឺនចុះ លើសពីនោះ ចាត់ឱ្យជញ្ជូនយកអាចម៍ដីមកគរជាកំពែងទប់ឱ្យខ្ពស់ឡើងជាងសើនបន្ទាយ**ចូឆ្វ**ដោយជុំវិញ រួចឱ្យទាហានបាញ់ធ្នូចម្រុះចូលទៅក្នុងបន្ទាយ**ចូឆ្វ** មុខជា**ចូឆ្វ**នឹងការពារពុំឈ្នះប្រាសបែកទៅឯង បើយើងបានតំបន់គួរតហើយក៏ដូចជាបានក្រុងហ៊ូតោដែរ។ **អ៊្លួនសៀវ**យល់ឃើញពេញចិត្ត ក៏ឱ្យធ្វើតាមគំនិតដែល**សឹមផោយ**គិតនោះ។ ទាហាន**អ៊្លួនសៀវ**តាំងតែ**ជីក**យកអាចម៍ដី ហាសិបកងជញ្ជូនមកចាក់គរជាជ្រួលច្របល់។

**ចូឆ្វ**ក្រឡេកទៅឃើញក៏ដឹងថា **អ៊្លួនសៀវ**ឱ្យជញ្ជូនអាចម៍ដី មកចាក់ឱ្យខ្ពស់ឡើង ប្រយោជន៍នឹងឱ្យបាញ់ធ្នូចម្រុះទៅក្នុងបន្ទាយនៃខ្លួន **ចូឆ្វ**ក៏បង្គាប់ទាហានឱ្យលើកទៅវាយបំបែកទ័ព**អ៊្លួនសៀវ** ដែលកំពុងដឹកជញ្ជូនអាចម៍ដីកុំឱ្យធ្វើការបាន។ ទាហាន**ចូឆ្វ**ក៏លើកចេញទៅតាមបង្គាប់។ **សឹមផោយ**គិតបារម្ភខ្លាចក្រែង**ចូឆ្វ**ប្រើទាហានមកកម្ចាត់កម្ចាយមិនឱ្យធ្វើការបាន ក៏បែងចែកទាហានឱ្យនៅរក្សាបន្ទាយប្រាំម៉ឺន សុទ្ធតែកាន់ធ្នូបម្រុងចាំបាញ់មិនឱ្យទាហាន**ចូឆ្វ**លើកចេញពីក្នុងបន្ទាយ។ ពួកទាហាន**អ៊្លួនសៀវ**ដែលដឹកជញ្ជូនអាចម៍ដីនោះ ប្រហែលដប់ថ្ងៃមកហើយ ទំនប់ដីក៏ចម្រើនខ្ពស់ឡើងជុំវិញបន្ទាយ**ចូឆ្វ**បានហាសិបអន្លើ ជិតបន្ទាយ**ចូឆ្វ**ប្រហែលប្រាំព្យាម (១០ ម) **អ៊្លួនសៀវ**ក៏ភ្ជុំទាហានធ្នូឱ្យឡើងទៅនៅលើទំនប់ដីគ្រប់កន្លែង ហើយបង្គាប់ទុកថា “បើឮសំឡេងផាវក៏ឱ្យព្រមគ្នាបាញ់ធ្នូចម្រុះទៅក្នុងបន្ទាយ**ចូឆ្វ**” ទាហានទាំងពួងនោះក៏ធ្វើតាមបង្គាប់**អ៊្លួនសៀវ**។

ឯទាហាន**ចូឆ្វ**ដែលនៅក្នុងបន្ទាយនោះ លុះឃើញទាហាន**អ៊្លូនសៀវ**បាញ់ធ្នូចម្រុះមកជុំវិញបន្ទាយ ក៏**នាំ**គ្នាយកស្បែកសេះនិងពាងបាំងវាំងខ្លួន ខ្លះគេចវេះពួនជ្រកនៅក្នុងរណ្ដៅរំលុងក្នុងបន្ទាយខ្លះ។ ទាហាន**អ៊្លូនសៀវ**ឃើញដូច្នោះ ក៏បបួលគ្នាទះដៃសើចអកឡុកឡើយបញ្ឈឺចិត្ត។ **ចូឆ្វ**ឃើញទាហានទាំងពួងបែកខ្វែកគ្នា ក៏ប្រឹក្សានឹងនាយទាហានទាំងអស់ថា **អ៊្លូនសៀវ**ធ្វើឧបាយយ៉ាងនេះ នរណានឹងគិតគំនិតកែខៃដូចម្ដេចបាន? **ឡៅហ៊្ហួ**ឆ្លើយថា ឥឡូវនេះទាហាន**អ៊្លូនសៀវ**នៅទីខ្ពស់ បើនឹងលើកកងទ័ពយើងឡើងទៅវាយទម្លាយចេញ ទាហានខាងយើងមិញក៏តិចជាងគេណាស់ បើដូច្នោះសូមឲ្យ**លោក**ធ្វើចក្រយន្តនាំរទេះផ្ទុកថ្មសិលារុញទៅឲ្យល្មមផុតបន្ទាយជិតទំនប់ដីនោះ ឲ្យបានបួនទិស រួចឲ្យទាញខ្សែយន្តឲ្យចក្របក់ទាត់ដុំថ្មនោះឲ្យខ្ទាតឡើង មុខជាត្រូវទាហាន**អ៊្លូនសៀវ**ខ្ចាត់ខ្ចាយពីលើទំនប់ដីនោះមិនលែង។ **ចូឆ្វ**យល់ឃើញស្រួល ក៏ឲ្យ**ឡៅហ៊្ហួ**ធ្វើចក្រយន្តហើយយករទេះស្បៀងពីររយមកផ្ទុកថ្មសិលាឲ្យពេញរទេះមួយៗ។ រួចយកចក្រនោះដាក់ក្នុងរទេះត្រៀមឲ្យព្រមក្នុងពេលកណ្ដាលយប់ស្ងាត់ លុះព្រឹកឡើងឃើញទាហាន**អ៊្លូនសៀវ**ឡើងបាញ់ធ្នូពីលើទំនប់ **ចូឆ្វ**ក៏ឲ្យទាហានរុញរទេះដែលផ្ទុកដុំថ្មនោះមួយទិសហាសិបរទេះ ចេញទៅផុតបន្ទាយជិតគំនរដីប្រហែលបីព្យាមប្ដាយ ហើយឲ្យកន្ត្រាក់ខ្សែយន្តឡើងព្រមគ្នា ចក្រយន្តនោះក៏បក់ទាត់ដុំថ្មនោះខ្ទាតឡើងទៅលើគំនរដី ត្រូវទាហាន**អ៊្លូនសៀវ**របួសពិការស្លាប់អស់ជាច្រើន ណាដែលរស់នៅក៏មិនអាចនឹងនៅក្នុងទីនោះបាន សឹងតែថយរត់ចុះពីលើគំនរដីនោះអស់ឥតមានសល់ម្នាក់ឡើយ។

**អ៊្លូនសៀវ**ឃើញដូច្នោះ ក៏ពិគ្រោះនឹង**សឹមផោយ**ថា ទាហានយើងដែលឡើងទៅនៅលើទំនប់ដីនោះ ក៏ធ្វើអន្តរាយ**ចូឆ្វ**មិនបាន ត្រឡប់រត់**ចុះ**មកអស់ដូច្នេះ តើអ្នកនឹងគិតប្រការម្ដេចទៀត? **សឹមផោយ**ឆ្លើយថា កលឧបាយខ្ញុំបាទនៅមានមួយទៀត

សូមឲ្យលោកប្រមូលទាហានរកជីកឧមង្គទម្លុះចូលទៅក្នុងបន្ទាយ**ចូវឆ្វ** កាលណាបានសម្រេចហើយ ដល់ពេលកណ្តាលយប់ស្ងាត់ ត្រូវបញ្ចូលទាហានឲ្យទៅតាមប្រហោងឧមង្គ ហើយទម្លុះឡើងទៅឲ្យចំកណ្តាលបន្ទាយ**ចូវឆ្វ** ដេញកាប់សម្លាប់ទាហាន**ចូវឆ្វ**ក្នុងបន្ទាយឲ្យវិនាសខ្ចាត់ខ្ចាយទៅ មុខជាទាហានក្នុងបន្ទាយមិនដឹងខ្លួន។ **អ៊ួនសៀវ**យល់ឃើញត្រូវ ក៏ឲ្យប្រមូលទាហានមកជីកឧមង្គក្រៅបន្ទាយជិតគំនរដី។ ទាហាន**ចូវឆ្វ**ឃើញដូច្នោះក៏ទៅជម្រាប**ចូវឆ្វ**ថា ឥឡូវ**អ៊ួនសៀវ**ឲ្យទាហានជីកដីទម្លុះនៅក្រោយគំនរដីជាច្រើនណាស់ នឹងធ្វើប្រការម្តេចក៏មិនច្បាស់? **ចូវឆ្វ**ឮដូច្នោះក៏នឹកពិភាល់សង្ស័យ ទើបសួរទៅ**ឡៅហ៊្វ**ថា ដែល**អ៊ួនសៀវ**ធ្វើដូច្នេះអ្នកយល់បានឬទេ? **ឡៅហ៊្វ**ថា **អ៊ួនសៀវ**នឹងគិតធ្វើការយកជ័យជម្នះយើងពីតម្រិះដែលចេញមុននោះឃើញជាមិនបានហើយ បានជាធ្វើកលឧបាយឲ្យទាហានជីកដី ប្រាថ្នាដើរផ្លូវឧមង្គចូលមកធ្វើអន្តរាយបន្ទាយយើង បើដូច្នោះសូមឲ្យលោកប្រមូលទាហានមកជីករំលុងស្នាក់ឲ្យជ្រៅពីក្រៅបន្ទាយ មុខជាទាហាន**អ៊ួនសៀវ**ធ្វើការមកមិនរហូតបាន។ **ចូវឆ្វ**យល់ត្រូវផង លុះវេលាយប់ស្ងាត់ក៏ប្រមូលទាហានមកជីករំលុងតាមពាក្យ**ឡៅហ៊្វ**ថា។

ឯទាហាន**អ៊ួនសៀវ**នោះ លុះជីកឧមង្គមកដល់ជិតជើងបន្ទាយ**ចូវឆ្វ** ក៏ពារទៅលើរំលុងដែល**ចូវឆ្វ**ឲ្យជីកស្នាក់ទុកនោះ នឹងជីកទម្លុះចេញទៅទៀតក៏ពុំបាន ព្រោះរំលុងធំជ្រៅពន្លឹកណាស់ ទើបនាំគ្នាទៅជម្រាប**អ៊ួនសៀវ**វិញ។ **អ៊ួនសៀវ**បានឮទាហានប្តឹងដូច្នោះ ក៏មិនដឹងបើនឹងគិតធ្វើដូចម្តេចតទៅទៀត ក៏ឲ្យថយទ័ពត្រឡប់ទៅតាំងបន្ទាយឆ្ងាយអំពីតំបន់គួរត ចម្ងាយប្រហែលបីរយសិន (១២ គ.ម)។

ឯចំណែក**ចូវឆ្វ** តាំង**តែ**រារែកបង្អង់កងទ័ពមិនចេញតតាំងច្បាំងនឹង**អ៊ួនសៀវ** តាំងពីខែភទ្របទរហូតដល់ខែអស្សុជ ក៏មិនឃើញ**អ៊ួនសៀវ**ចេញច្បាំង គិតនឹងថយ

ទ័ពទៅស្រុក**ហ៊្វូ**គោវិញ ទទួល**ស៊ីហ្វុង**កងក្រលែវចាប់ទាហាន**អ៊្វូនសៀវ**បានម្នាក់ ក៏នាំខ្លួនទៅជូន**ចូឆូ** ៗសួរទាហានយកការណ៍ថា **អ៊្វូនសៀវ**ប្រើអ្នកឯងឲ្យទៅណាមកណា? ចូរប្រាប់យើងតាមត្រង់ បើឯងភូតភរកុហកយើង ៗឲ្យកាត់ក្បាលចេញឥឡូវនេះ។ ទាហាននោះខ្លាចក៏ឆ្លើយប្រាប់តាមត្រង់ថា ខ្ញុំបាទជាបាវ**ហ័នបេង**។ **អ៊្វូនសៀវ**ប្រើហ័នបេងឲ្យជញ្ជូនស្បៀងមកឲ្យកងទ័ព ត្រឡប់មកជិតនឹងដល់ទីបន្ទាយហើយ **ហ័នបេង**ប្រើខ្ញុំបាទស្រូតមកស៊ើបការណ៍ជាមុន។

**ស៊ុនហ៊ីវ**ឮដូច្នោះក៏ជម្រាប**ចូឆូ**ថា **ហ័នបេង**នេះជាមនុស្សមានថ្វីដៃខ្លាំងពូកែក៏ពិតមែន តែគ្មានតម្រិះប្រាជ្ញាទេ ប្រសិនបើលោកចាត់ការឲ្យទាហានឯកលើកពលយោធាតែបីពាន់ទៅចាំស្ទាក់ដណ្តើមយកស្បៀង**អ៊្វូនសៀវ** មុខជានឹងបានដោយងាយ **អ៊្វូនសៀវ**គង់តែនឹងបែកខ្ញែកខូចស្បៀងអាហារអស់។ **ចូឆូ**ថា ចុះយើងនឹងឲ្យទាហានណាទៅស្ទាក់ធ្វើការនេះបាន? **ស៊ុនហ៊ីវ**ថា ត្រឹមតែថ្វីដៃ**ស៊ីហ្វុង**ក៏ល្មមនឹងតស៊ូនឹង**ហ័នបេង**បានហើយ។ **ចូឆូ**ក៏យល់ឃើញព្រមផង ទើបចាត់ទាហានបីពាន់ឲ្យ**ស៊ីហ្វុង**និង**ស៊ូហ្វួន**កាន់កាប់ទៅផង ឲ្យលើកកងទ័ពទៅតាំងចាំស្ទាក់នៅត្រង់ចន្លោះផ្លូវច្រកភ្នំ ដែល**ហ័នបេង**នឹងនាំស្បៀងមកនោះ ហើយប្រើ**តៀវលៀវ** និង**ខៅធូ**ឲ្យលើកទាហានប្រាំពាន់ទៅតាមក្រោយ។ ទាហានទាំងនោះក៏លើកទៅតាម**ចូឆូ**បង្គាប់។ លុះវេលាកណ្តាលអាធ្រាត្រយប់ស្ងាត់ **ហ័នបេង**ក៏នាំរទេះស្បៀងពីរពាន់មកដល់ច្រកភ្នំនោះ ស្រាប់តែក្រឡេកទៅឃើញ**ស៊ីហ្វុង**បញ្ឈរសេះនៅទទឹងផ្លូវពីមុខ **ហ័នបេង**ក៏បរសេះបង្រុះចូលទៅប្រយុទ្ធនឹង**ស៊ីហ្វុង**ទាំងអំណាច នៅមិនទាន់ចាញ់ឈ្នះ **ស៊ូហ្វួន**ឃើញដូច្នោះក៏លើកទាហានចូលទៅព្រួតពីក្រោយថែមទៀត សម្លាប់ទាហាន**ហ័នបេង**ស្លាប់អស់ជាច្រើន ហើយឲ្យទាហាន**យក**ភ្លើងដុតរទេះស្បៀងនោះឆេះអស់។ **ហ័នបេង**ឃើញ**ស៊ូហ្វួន**ដេញចាក់ទាហានចូលមក ឃើញថាលុបលើស

កម្លាំង ទប់ទល់ពុំឈ្នះ ក៏បរសេះរត់ត្រឡប់ទៅក្រោយវិញ ទាហានក៏បាក់ទ័ពបណ្ដោយទៅបែកខ្ញែកខ្ចាត់ខ្ចាយអស់។

ឯ**អ៊ួនសៀវ**នៅក្នុងបន្ទាយ ឃើញពន្លឺភ្លើងឆេះឡើងខាងទិសឯលិច ក៏នឹកសង្ស័យណាស់ ទទួលទាហានដែលបែកទ័ពនោះរត់ទៅដល់ ប្ដឹងសេចក្ដីឲ្យ**អ៊ួនសៀវ**ដឹង **អ៊ួនសៀវ**ក៏ភ័យស្លុតចិត្ត ទើបប្រើ**ទៀវខាប់** និង**កោឡាំ**នាំទាហានលើកទៅជួយស្កាត់វាយវាយទ័ព**ចូឆូ**ដែលដុតរទេះស្បៀងនោះ **ទៀវខាប់** និង**កោឡាំ**ក៏លា**អ៊ួនសៀវ**នាំទាហានកងទ័ពទៅចាំស្កាត់កណ្ដាលផ្លូវ។

ឯ**ស៊ីហ្មុង** និង**ស៊ូហ្មួន** លុះដុតរទេះស្បៀងឆេះអស់ហើយ ក៏លើកទ័ពត្រឡប់មកតាមផ្លូវ ទទួលប្រទះនឹង**ទៀវខាប់, កោឡាំ** នៅចាំស្ទាក់កណ្ដាលផ្លូវនោះ ក៏ចូលប្រយុទ្ធគ្នាជាពន្លឹក ទទួល**តៀវលៀវ, ខៅធូ**លើកទ័ពទៅជួបប្រទះគ្នាទៀត ក៏បរពលចូលប្រយុទ្ធគ្នាជាច្រឡំបល់។ **កោឡាំ** និង**ទៀវខាប់**តទល់ពុំឈ្នះក៏ប្រាសបែកទ័ពទៅ **ស៊ីហ្មុង, ខៅធូ, ស៊ូហ្មួន** ក៏ដេញកាប់កងទ័ព**អ៊ួនសៀវ**ស្លាប់វិនាសច្រើនណាស់ ហើយក៏លើកត្រឡប់ទៅបន្ទាយគួរតវិញ ចូលទៅជម្រាប**ចូឆូ** ៗក៏មានអំណរណាស់ ឲ្យបំណាច់រង្វាន់ដល់**ស៊ីហ្មុង** និងសេនាទាហានទាំងពួងជាច្រើន។

ឯ**ហ៊ានបេង**រត់ទៅដល់បន្ទាយ ក៏នាំយកសេចក្ដីនោះទៅជម្រាប**អ៊ួនសៀវ** ៗខឹងណាស់ ទើបបង្គាប់ឲ្យចាប់**ហ៊ានបេង**យកទៅប្រហារជីវិត។ ទីប្រឹក្សានិងសេនាទាហានទាំងពួងក៏នាំគ្នាអង្វរសូមទោស។ **សឹមផោយ**ជម្រាប**អ៊ួនសៀវ**ថា ឯការធ្វើសឹកសង្គ្រាមនេះអាស្រ័យនឹងមានស្បៀងអាហារជាកម្លាំង ឥឡូវបើស្បៀងអាហារយើង ដែលលាក់ទុកនៅតំបន់អ៊ូចៅនោះខ្លាចក្រែង**ចូឆូ**ដឹង នឹងលើកទ័ពទៅដណ្ដើមយកបាន យើងក៏នឹងខ្វះខាតស្បៀងអាហារ ឃើញថានឹងធ្វើការសង្គ្រាមតទៅឲ្យរហូតពុំបាន ហេតុនេះសូមលោកចាត់ទាហានដែលមានថ្វីដៃទៅរក្សាតំបន់អ៊ូចៅទុក

ជាមាំមួន ទើបយើងនឹងបានអាស្រ័យអាហារជាកម្លាំងតទៅ។ **អ៊្វនសៀវ**ថា ការត្រង់នេះអ្នកកុំវិតក្កឡើយ ឯតំបន់អ៊្វថៅនោះយើងបានចាត់ចែងជាមាំមួនទុកស្រេចហើយ ឲ្យអ្នកស្រួតទៅស្រុកង៉ៀបកុន ដែលជាស្រុកចុះឡើងស្តាប់បង្គាប់យើង ឲ្យស្រួតរួតបញ្ជូនស្បៀងអាហារមកឲ្យកងទ័ពជាប្រញាប់កុំឲ្យខ្វះខាតទាន់។

**ស៊ីមផោយ**ក៏លា**អ៊្វនសៀវ**ទៅកាន់ស្រុកង៉ៀបកុន។ លុះ**ស៊ីមផោយ**ទៅផុតហើយ **អ៊្វនសៀវ**ក៏ចាត់**អ៊ីខេង**ជានាយទាហានទ័ពធំ និង**កុយង្វន, ជិនហ័ន, គីជូ, លីអ៊ុយហង, ទៀវយ៉ូយ** ឲ្យលើកទាហានពីរម៉ឺនទៅនៅរក្សាតំបន់អ៊្វថៅ។ ខណៈកាល**អ៊ីខេង**ទៅនៅតំបន់អ៊្វថៅហើយ ក៏មិនបានយកចិត្តទុកដាក់ក្នុងកិច្ចការរាជការផែនដីអ្វីសោះ គិតតែនាំពួកភៀនផឹកស្រាស្រវឹងជានិច្ច ទោះបីបើអ្នកណានិយាយទទឹងទាស់ ក៏ត្រឡប់ទៅជាក្រោធខឹងវិញ ហើយពោលពាក្យទ្រគោះមើលងាយជាច្រើន។ ទាហានទាំងពួងក៏សឹងតែកោតខ្លាច**អ៊ីខេង**មិនអាចហាមឃាត់ ឬរំឭកបានឡើយ។

ឯ**ចូឆ្វ**ដែលតាំងទ័ពនៅតំបន់គួរតនោះ ស្បៀងអាហារក៏កាន់តែស្តួចស្តើងណាស់។ **ចូឆ្វ**ក៏ប្រើទាហានកាន់សំបុត្រទៅឲ្យ**ស៊ុនហុក**ឯស្រុកហ៊្វតោ សេចក្តីសំបុត្រនោះថា “ក្នុងកងទ័ពយើងមានការខ្វះខាតស្បៀងអាហារច្រើនណាស់ហើយ ឲ្យ**ស៊ុនហុក**ខំរិះគិតចាត់ឲ្យនាំស្បៀងទៅជាប្រញាប់កុំឲ្យខ្វះខាតទាន់”។ ទាហានទទួលសំបុត្រហើយក៏លា**ចូឆ្វ**ទៅ។ ចេញពីបន្ទាយចម្ងាយប្រហែលបីរយសិន (១២គ.ម) ពួកទាហានកងក្រវ៉េល**អ៊្វនសៀវ**ក៏ចាប់ខ្លួនបានហើយនាំយកទៅឲ្យ**ខៅហ៊ីវ** ដែលជាទីប្រឹក្សាធំរបស់**អ៊្វនសៀវ**។

**ខៅហ៊ីវ**នេះកាលនៅពីកម្លោះនៅឡើយនោះ ជាភៀនសម្លាញ់នឹង**ចូឆ្វ** លុះ**ចូឆ្វ**បែកចាកទៅធ្វើរាជការក្នុងស្រុកហ៊្វតោ **ខៅហ៊ីវ**ក៏ចូលមកនៅធ្វើរាជការនឹង

**អ៊្វិនសៀវ** កាលនាយកងក្រវែលចាប់បានទាហាន**ចូឆូ**មកឲ្យ **ខៅហ៊ីវ**ឲ្យមនុស្សត្រួតមើលឃើញសំបុត្រដែល**ចូឆូ**ឲ្យទៅដល់**ស៊ុនហុក**។ **ខៅហ៊ីវ**ក៏នាំសំបុត្រនោះទៅជម្រាប**អ៊្វិនសៀវ**ហើយថា **ចូឆូ**តាំងរាទ័ពនឹងយើងក៏យូរអង្វែងណាស់មកហើយ ទាល់តែអស់ស្បៀងអាហារ ស្រុកហ៊ូតោក៏នៅទំនេរគ្មាននរណាការពារជាមាំមួន សូមឲ្យលោកបែងទាហានលើកទៅក្រលុកវាយយកស្រុកហ៊ូតោ បើជាបានស្រុកហ៊ូតោហើយ **ចូឆូ**ក៏នៅក្នុងកណ្ដាប់ដៃយើងតែម្ដង។

**អ៊្វិនសៀវ**ថា **ចូឆូ**នោះជាមនុស្សមានល្បិចប្រាជ្ញាណាស់ អ្នកកុំអាលមើលងាយ ដែល**ចូឆូ**ធ្វើសំបុត្រឲ្យទាហានកាន់យកទៅឲ្យដល់ស៊ុនហុកនោះ ជាកលឧបាយ ដើម្បីឲ្យយើងបែងទាហានទៅវាយស្រុក**ហ៊ូតោ**ក៏សឹងបាន បើកាលណាយើងធ្វើការជ្រុលហួសទៅហើយ **ចូឆូ**នឹងត្រឡប់លើកទ័ព**ទៅ**វាយយកស្រុកយើងវិញក៏មិនដឹង។ **ខៅហ៊ីវ**ថា កាលសង្គ្រាមបានចំណាប់ដូច្នោះហើយ លោកមិនធ្វើតាមពាក្យខ្ញុំបាទទេ យូរទៅអន្តរាយមុខជានឹងមានដល់ខ្លួនលោកមិនខាន។ កាលកំពុងនិយាយគ្នានោះ ស្រាប់តែមានទាហានជាបម្រើម្នាក់នាំសំបុត្រមកពី**សឹមផោយ**ដែលទៅជញ្ជូនស្បៀងពីស្រុកងៀបកុននោះមកឲ្យ**អ៊្វិនសៀវ**។ **អ៊្វិនសៀវ**ទទួលលាមើលឃើញសេចក្ដីក្នុងសំបុត្រនោះថា ខ្ញុំបាទ**សឹមផោយ**បានចាត់ចែងស្បៀងក្នុងស្រុកងៀបកុននេះស្រេចអស់ហើយ តែឥឡូវនេះមានគេប្ដឹងខ្ញុំបាទថា **ខៅហ៊ីវ**កាលនៅក្នុងស្រុកគីជីវនោះ ធ្វើការអាក្រក់ឲ្យបណ្ដារាស្ត្រអ្នកស្រុកបានសេចក្ដីក្ដៅក្រហាយជាច្រើន ហើយប្រើកូនក្មួយរបស់ខ្លួនទៅបោកឆរាស្ត្រ ទារយករប៉ៃរ៉ៃដាក់ពីបណ្ដារាស្ត្រក្នុងស្រុកចៀងកុន ខ្ញុំបាទក៏បានយកខ្លួនកូនក្មួយ**ខៅហ៊ីវ**មកសួរ វាឆ្លើយទទួលសារភាពដូចពាក្យគេប្ដឹង។ ឥឡូវខ្ញុំបាទឲ្យយកខ្លួនទៅឃុំទុកក្នុងគុកហើយ។

**អ៊្លួនសៀវ**ឃើញសំបុត្រក៏ខឹងណាស់ និយាយនឹង**ខៅហ៊ីវ**ថា ខ្លួនឯងជាមនុស្សបោកកុហកអាក្រក់ណាស់ នៅខំឈមមុខចូលមកប្រឹក្សាការសង្គ្រាមនឹងអញធ្វើអ្វីទៀត? អញដឹងថាឯងជាពួកភឿនសម្លាញ់នឹង**ចូឆ្វូ**មកពីដើម ឥឡូវ**ចូឆ្វូ**ឲ្យសំណូកឯង បានជាឯងរិះគិតឲ្យកូនក្មួយឯងទៅធ្វើការផ្តេសផ្តាសដូច្នេះ ប្រាថ្នានឹងឲ្យបណ្តារាស្ត្រភ្ញាក់ផ្អើលជ្រួលច្របល់ ឯក្បាលឯងនេះអញបានផ្ញើទុកនឹងខ្លួនឯងពីដើម ពីថ្ងៃនេះទៅមុខ ឯងកុំចូលមកឲ្យអញឃើញមុខទៀតឡើយ។ **ខៅហ៊ីវ**បានឮសម្តី**អ៊្លួនសៀវ**ស្តីទ្រគោះដូច្នោះ ក៏ដើរដកដង្ហើមធំចេញទៅ ហើយនិយាយថា “ខ្លួនអញមានសេចក្តីសត្យពិតត្រង់ជាប្រាកដណាស់ **តែនិយាយអ្វីអ៊្លួនសៀវ**ក៏មិនជឿស្តាប់ៗតែពាក្យមនុស្សញុះញង់វៀចអាក្រក់។ ឥឡូវ**សឹមផោយ**ក្លែងចងអាឃាតយករឿងអាក្រក់មកដាក់លើយើង ទាល់តែកូនក្មួយរបស់យើងទទួលទុក្ខ ដែលយើងនឹងឈមមុខត្រឡប់ទៅឃើញស្រុកគឺជីវវិញ ក៏នឹងបានសេចក្តីអាប់យសដល់មនុស្សទាំងពួង” ហើយ**ខៅហ៊ីវ**ក៏ហូតគ្រប៊ីឡើងនឹងអារកឲ្យស្លាប់។

ពេលនោះ មានទាហានម្នាក់ជាសម្លាញ់ស្និទ្ធស្នាលរបស់**ខៅហ៊ីវ**ក្រឡេកឃើញដូច្នោះ ក៏ស្ទុះទៅដណ្តើមយកគ្រប៊ីចេញបាន ហើយនិយាយលួងលោមអង្វរហាមឃាត់**ខៅហ៊ីវ**ថា ខ្លួនលោកមានតម្រិះប្រាជ្ញាស្មារតីច្រើន សូម្បីមានរឿងតែប៉ុណ្ណេះនឹងមកសម្លាប់ខ្លួនឯងចេញមុនឈឺនោះមិនគួរទេ បើ**អ៊្លួនសៀវ**មិនជឿស្តាប់ពាក្យលោកហើយ ត្រូវតែគិតដោះខ្លួនឲ្យរួចទៅល្អជាង ឧបមាដូចនៅក្នុងទីងងឹតអន្ធការ ត្រូវតែខស្បាហ៍ស្វែងរកទីដែលភ្លឺស្វាង ប្រការមួយទៀត **ចូឆ្វូ**និងលោកក៏ជាភឿនសម្លាញ់រាប់អានគ្នាមកពីដើម បើប្រសិនជាលោកនឹងប្រែផ្លាស់វេះគេចទៅរកយ៉ាងម៉េចក៏គង់តែ**ចូឆ្វូ**នឹងទទួលទំនុកបម្រុងផ្គុងផ្តើមលោកមិនខាន ប្រហែលជាកើនខ្លួនជាជាងនៅនឹង**អ៊្លួនសៀវ**ទៅទៀតផង។

**ខៅហ៊ីវ**បានស្តាប់ពាក្យទាហាននោះ ក៏ឲ្យផុសស្មារតីគិតឃើញតាមភ្លាម លុះវេលាយប់ក៏នាំបក្សពួកដែលស្និទ្ធស្នាលនោះ លបចូលទៅក្នុងបន្ទាយ**ចូឆូ** ហើយទាហាន**ចូឆូ**ដែលជាកងក្រវែលនោះឃើញ**ខៅហ៊ីវ**នាំពួកគឿនចូលមក ក៏ព្រួតចាប់ឃុំទុកហើយសួរពិចារណាថា ដែលអ្នកឯងនាំគ្នាមកនេះនឹងប្រាថ្នាការអ្វី? **ខៅហ៊ីវ**ឆ្លើយថា ខ្លួនយើងនេះបានស្គាល់ច្បាស់មហាឧបរាជមកពីដើម បានជាយើងនាំគ្នាមករកដោយសេចក្តីទញ់ទាល់ អ្នកចូរនាំខ្លួនយើងចូលទៅឲ្យជួបនឹងមហាឧបរាជចុះ។ ទាហានកងក្រវែលក៏ចូលទៅជម្រាប**ចូឆូ**ថា ឥឡូវ**ខៅហ៊ីវ**នៅស្រុកលាំហ៊្យុងមានការមករកលោក។

ខណៈនោះ **ចូឆូ**កំពុងដេករិះគិតការនឹងធ្វើសង្គ្រាម លុះបានឮទាហានប្រាប់ព័ត៌មានដូច្នោះ ក៏មានសេចក្តីត្រេកអរណាស់ ក្រោកឡើងខ្លួនទទេមិនបានពាក់អាវចេញទៅដល់មាត់ទ្វារបន្ទាយ ឃើញ**ខៅហ៊ីវ**ក៏ស្គាល់ច្បាស់។ **ចូឆូ**ក៏ទះដៃឱនខ្លួនគំនាប់ដោយអំណរ **ខៅហ៊ីវ**ឃើញដូច្នោះក៏ភ័យស្លុតចិត្ត ទើបចាប់ដៃ**ចូឆូ**ហើយថាខ្លួនលោកជាមហាឧបរាជមិនគួរមកបន្ទាបអំណាចឱនគំនាប់ខ្ញុំបាទទេ។ **ចូឆូ**តបថា “ខ្លួនអ្នកនិងយើងជាមិត្តសម្លាញ់រាប់អានគ្នាមកពីដើម ទោះបីយើងនឹងមានវាសនាលើសជាងអ្នកក៏ពិតមែន តែចិត្តយើងនៅស្មើដូចពីដើម” ហើយ**ចូឆូ**ក៏នាំ**ខៅហ៊ីវ**ចូលទៅក្នុងបន្ទាយ។ **ខៅហ៊ីវ**និយាយថា ខ្លួនខ្ញុំបាទដែលភ្លាត់ទៅនៅនឹង**អ៊្វនសៀវ**នោះ ព្រោះគិតថានឹងផ្ញើខ្លួនឲ្យបានតែសេចក្តីសុខមួយគ្រាទៅចុះ បានតាំងចិត្តសុចរិតពិតត្រង់ជួយការ**អ៊្វនសៀវ** ៗក៏មិនមានជឿស្តាប់វាចាដល់ម្តងសោះ ថែមទាំងមើលងាយប្រមាថខ្លួនខ្ញុំបាទថែមទៀត បានជាខ្ញុំបាទចង្អៀតចិត្តគិតរំខានខ្លាំងណាស់ ព្រោះឃើញថាអស់រំពឹងនឹងនៅផ្ញើខ្លួនតទៅទៀតហើយ ទើបវេលានេះបែរមុខចូលមកសូមនៅជ្រកនឹងលោក ដោយបំណងប្រាថ្នាថានឹងជួយធ្វើរាជការលោកតាមតែ

លោកនឹងប្រើប្រាស  តាមសតិកម្លាំងទៅចុះទម្រាំតែអស់ជីវិត។ ខ្ញុំបាទលែងគិតនឹងទៅទីពឹងអ្នកដទៃទៀតហើយ។ **ចូឆ្វូ**តបថា ដែលអ្នកផ្ដាច់ចិត្តគិតមកនៅនឹងយើង ៗ ក៏មានអំណរក្នុងចិត្តពេកណាស់ ការរបស់យើងទាំងប៉ុន្មាន បើនឹងបានសម្រេចតទៅក៏ដោយសារគំនិតអ្នកជួយបំភ្លឺពន្យល់ យើងក៏ត្រូវសម្គាល់ធ្វើតាម ជាប្រយោជន៍នឹងបានកម្ចាត់**អ៊ួនសៀវ**ចេញ។ **ខៅហ៊ីវ**ថា ការទាំងនេះជាភ្នាក់ងារខ្ញុំបាទនឹងជួយរិះគិតធ្វើការតបស្នងសងគុណលោក តាមតម្រិះប្រាជ្ញា និងថ្វីដៃ។ កាលខ្ញុំបាទនៅនឹង**អ៊ួនសៀវ**នោះ ខ្ញុំបាទក៏បានថា ឥឡូវនេះលោកលើកកងទ័ពមកតតាំងច្បាំងនឹង**អ៊ួនសៀវ** នឹងរកអ្នកឯណាខ្លាំងពូកែនៅរក្សាស្រុកក៏គ្មាន សូមឲ្យ**អ៊ួនសៀវ**បែងទាហានលើកត្រឡប់ទៅវាយខ្ទប់យកស្រុកហ៊្សតោ ឃើញថានឹងបានដោយងាយ**អ៊ួនសៀវ**ក៏មិនស្ដាប់ក៏ត្រឡប់ខឹងមកខ្ញុំបាទវិញ។ **ចូឆ្វូ**បានស្ដាប់ដូច្នោះក៏នឹកភ័យខ្លាំងណាស់ ឆ្លើយថា បើប្រសិនជា**អ៊ួនសៀវ**ធ្វើតាមពាក្យអ្នកពន្យល់មែន ខ្ញុំក៏នឹងថ្លោះការជាប្រាកដ។

**ខៅហ៊ីវ**ក៏សួរ**ចូឆ្វូ**ថា ស្រូវអង្ករស្បៀងអាហារក្នុងកងទ័ពលោកនេះ នៅមានប៉ុន្មាន ច្រើនឬតិច? **ចូឆ្វូ**យល់ឃើញថា **ខៅហ៊ីវ**និយាយសួរនោះជាល្បិចល្បង ក៏ក្លែងឆ្លើយថា ឯស្បៀងអាហាររបស់យើងនោះមិនសូវជានឹងខ្វះខាតប៉ុន្មានទេ ល្មមនឹងប្រើការចិញ្ចឹមសេនាទាហានបានមួយឆ្នាំទៀត។ **ខៅហ៊ីវ**ឮដូច្នោះក៏អស់សំណើចហើយថា លោកមានប្រសាសន៍នេះលើសហួសពេកមិនសមសោះ។ **ចូឆ្វូ**ថា យើងនិយាយដោយពិតវិញ គឺស្បៀងអាហាររបស់យើងនៅល្មមប្រើបានកន្លះឆ្នាំទៀត។ **ខៅហ៊ីវ**ឃើញ**ចូឆ្វូ**និយាយអំព្រៀងកុហកដូច្នោះក៏នឹកខឹងណាស់ ទើបក្រោកឡើងហើយថា ខ្ញុំបាទមកសុំនៅនឹងមហាឧបរាជនេះ ប្រយោជន៍នឹងតាំងចិត្តគិតធ្វើរាជការដែនដីតបស្នងសងគុណលោក ដោយសុចរិតត្រង់ ឥឡូវលោកមិនទាន់ជឿ

ទុកចិត្តខ្ញុំបាទជាប្រាកដហើយ ខ្ញុំបាទក៏សូមលាលោកទៅរកទីពឹងដទៃទៀត លុះត្រាតែបានសេចក្ដីសុខ។

**ចូឆ្វ**ឃើញអាការកិរិយា**ខៅហ៊ីវ**ដូច្នោះ ក៏ចាប់ជាយអាវ**ខៅហ៊ីវ**ឲ្យអង្គុយ ហើយថា អ្នកកុំអាលខឹងនឹងយើង គិតលាទៅរកទីពឹងនៅទៀតឡើយ យើងដឹងចិត្តអ្នកហើយ យើងនឹងប្រាប់អ្នកឲ្យត្រង់ទៅចុះ ស្បៀងអាហារយើងនៅតិចណាស់ ប្រហែលប្រើការបានតែពីរបីខែទៀតអស់ហើយ។ **ខៅហ៊ីវ**ក៏អស់សំណើចហើយថា កិត្តិស័ព្ទល្បីថា មហាឧបរាជនឹងនិយាយការអ្វីរមែងជាកិច្ចកលឧបាយ មិនងាយនឹងជឿស្ដាប់សោះ ឥឡូវក៏ឃើញសមប្រកបដូចពាក្យគេថាមែនទាំងអស់។ **ចូឆ្វ**បានឮ**ខៅហ៊ីវ**ស្ដីដល់ដូច្នោះក៏មិនបានខឹង ធ្វើជាអស់សំណើចហើយថា “អ្នកមិនដឹងទេឬ ឯការសង្គ្រាមនេះដែលនឹងមានជ័យជម្នះបាន ក៏អាស្រ័យដោយតបះកម្លាំងសតិបញ្ញាកលឧបាយជាប្រធាន” ហើយធ្វើជាខិនខ្សឹបប្រាប់**ខៅហ៊ីវ**ថា ស្បៀងអាហារយើងនៅតែមួយខែទៀតអស់ហើយ។ **ខៅហ៊ីវ**ក៏ស្រែកគំហកឲ្យ**ចូឆ្វ**ហើយថា នៅតែនិយាយកុហកខ្ញុំបាទដល់ណាទៅទៀត? ខ្ញុំបាទដឹងអស់ហើយ គឺស្បៀងក្នុងកងទ័ពលោកអស់រលីងហើយ។ **ចូឆ្វ**ភ័យណាស់ ទើបសួរ**ខៅហ៊ីវ**ថា ហេតុម្ដេចបានជាអ្នកដឹង?

**ខៅហ៊ីវ**ក៏ដកសំបុត្រហុចទៅឲ្យ**ចូឆ្វ**មើល គឺសំបុត្រដែល**ចូឆ្វ**ផ្ញើទៅឲ្យ**ស៊ុនហុក**នោះ។ **ចូឆ្វ**ឃើញសំបុត្រនោះហើយក៏សួរថា នរណាយកសំបុត្រនេះទៅឲ្យអ្នក? **ខៅហ៊ីវ**ក៏ពណ៌នារឿងរ៉ាវដែលចាប់បានអ្នកកាន់សំបុត្រនោះឲ្យ**ចូឆ្វ**ស្ដាប់គ្រប់ប្រការ។ **ចូឆ្វ**យល់ឃើញថា**ខៅហ៊ីវ**ដឹងការសព្វគ្រប់ដូច្នោះ ក៏ខ្លាចបែកការខ្ចាយខ្ចរឡើង ក៏ហាមប្រាមថា អ្នកកុំបីនិយាយសេចក្ដីទាំងអស់នេះឲ្យនរណាដឹងឮឡើយ ចូរជួយគ្នាគិតកម្ចាត់**អ៊្វិនសៀវ**ចេញឲ្យបាន។ **ខៅហ៊ីវ**ក៏ទទួលពាក្យហើយថា លោកធ្វើ

សង្គ្រាមនឹង**អ៊្វីនសៀវ**វេលានេះ ទាហាន**អ៊្វីនសៀវ**ច្រើនលើសលុបណាស់ សូមឲ្យលោកស្រួតប្រញាប់ធ្វើការទើបបានជ័យជម្នះ បើនឹងបង្អង់ឲ្យយឺតយូរតទៅនឹងថ្លោះការដោយទ័ព**អ៊្វីនសៀវ**ជាប្រាកដ។ **ចូឆ្វ**ឆ្លើយថា អ្នកនិយាយនេះត្រូវហើយ ចុះគំនិតរបស់អ្នកនឹងគិតដូចម្តេចខ្លះ ទើបនឹងឲ្យ**អ៊្វីនសៀវ**បែកទ័ពទៅដោយឆាប់រហ័សបាន? **ខៅហ៊ីវ**ឆ្លើយថា ខ្ញុំបាទគិតធ្វើឧបាយកលមួយយ៉ាង ប្រសិនបើលោកធ្វើតាមខ្ញុំបាទហើយ មុខជា**អ៊្វីនសៀវ**និងសេនាទាហានទាំងពួងបែកទ័ពទៅក្នុងរវាងបីថ្ងៃនេះ។ **ចូឆ្វ**សួរថា ឧបាយកលរបស់អ្នកនោះដូចម្តេច? **ខៅហ៊ីវ**ឆ្លើយថា **អ៊្វីនសៀវ**មកធ្វើការគ្រានេះ បានប្រមូលស្រូវអង្ករជាស្បៀងអាហារមកទុកនៅតំបន់អ៊្វីថៅ ឲ្យ**អ៊ុីខេង**នៅថែរក្សា។ ឯ**អ៊ុីខេង**នោះក៏មិនបានយកចិត្តទុកដាក់សោះ ផឹកតែស្រាស្រវឹងជានិច្ច ទាហានទាំងពួងក៏បែកខ្ញែកអស់ជាច្រើន សូមឲ្យលោកចាត់ប្រើទាហានឲ្យលើកកងទ័ពចូលទៅ បន្លំជាពួកទាហាន**អ៊្វីនសៀវ** លើកអមព័ទ្ធបន្ទាយ**អ៊្វីនសៀវ**ចេញទៅតំបន់អ៊្វីថៅ បើមាននរណាសាកសួរឲ្យឆ្លើយថាជាទាហាន**ជៀវគី** ដែលជានាយកងស្បៀង**អ៊្វីនសៀវ** នឹងទៅបង្ខំទារយកស្បៀងពីតំបន់អ៊្វីថៅ បើទៅដល់តំបន់អ៊្វីថៅហើយ ឲ្យលបចូលទៅព័ទ្ធវាយហើយដុតស្បៀងអាហារ**អ៊្វីនសៀវ**នៅទីនោះឲ្យអស់ បើ**អ៊្វីនសៀវ**ខូចស្បៀងអាហារអស់ហើយ ក៏នឹងបែកទ័ពជាប្រាកដ។

**ចូឆ្វ**បានស្តាប់ហើយក៏មានអំណរណាស់ ទើបប្រើមនុស្សឲ្យរៀបតុលៀងភោជនាហារ**ខៅហ៊ីវ** ហើយអញ្ជើញចូលទៅនៅក្នុងបន្ទាយ។ លុះវេលាព្រឹកឡើង **ចូឆ្វ**ក៏ចាត់ប្រើទាហានសេះមួយពាន់ ឲ្យលើកទៅតំបន់អ៊្វីថៅ។ **តៀវលៀវ**ក៏លបទៅនិយាយនឹង**ចូឆ្វ**ថា **អ៊្វីនសៀវ**ក៏នៅមានតម្រិះប្រាជ្ញាដែរ បើប្រសិនជាដុតស្បៀងនៅតំបន់អ៊្វីថៅបាននោះ ក៏គង់មានទាហាននៅគ្រប់គ្រងរក្សាមាំមួន ដែលលោកមកស្រាលគំនិតគិតជឿពាក្យសម្តី**ខៅហ៊ីវ**នោះ ខ្ញុំបាទមិនទាន់យល់ឃើញផងទេ ក្រែង

ជាកលឧបាយ**អ៊្វួនសៀវ**ទេដឹង? ឲ្យលោកត្រិះរិះមើលតាមគួរសិនចុះ។ **ចូឆូ**ឆ្លើយថា អ្នកកុំសង្ស័យឡើយ ដែល**ខៅហ៊ីវ**នឹងបញ្ឆោតយើងនោះមិនមែនទេ ឥឡូវយើងឃើញថា**អ៊្វួនសៀវ**អស់វាសនាហើយ ប្រហែលជានឹងដល់សេចក្ដីស្លាយផងក៏មិនដឹង បានជាបណ្ដាលឲ្យគិតធ្វើការខុសៗទៅទាល់តែយើងដឹងសេចក្ដីសព្វគ្រប់ យើងក៏បានចំណាប់ហើយ បើនឹងបង្អង់ទុកមិនធ្វើតាមពាក្យ**ខៅហ៊ីវ**ថាទេ ស្បៀងអាហារខាងយើងក៏ខ្វះខាត យូរទៅគង់នឹងថ្លោះការរបស់**អ៊្វួនសៀវ**វិញ។ **តៀវលៀវ**ឆ្លើយថា ដែលមហាឧបរាជគិតនេះក៏ត្រូវហើយ តែខ្ញុំក្រែង**អ៊្វួនសៀវ**ដឹងថាលោកលើកទ័ពទៅតំបន់អ៊្វូចៅ **អ៊្វួនសៀវ**នឹងលើកទ័ពមកវាយយកបន្ទាយខាងនេះវិញ សូមឲ្យលោករិះគិតឲ្យមាំមួនសិនចុះ។ **ចូឆូ**ថា អ្នកកុំវិតក្ករឿងរក្សាបន្ទាយនោះឡើយ យើងក៏បានគិតទុកជាស្រេចហើយ។

**ចូឆូ**ក៏ចាត់ប្រើ**ស៊ុនហ៊ីវ**, **កាសៀង**, **ចោហាង** និង**ខៅហ៊ីវ** ទាំងបួននាក់នេះជានាយក្រុមឲ្យនៅរក្សាបន្ទាយ ឲ្យ**ហែហ៊ូទុន** និង**ហែហ៊ូអៀន**លើកទាហានជាកងទ័ពទៅបង្កប់នៅពីក្រៅបន្ទាយខាងឆ្វេងហើយ ទើបបង្គាប់ថា បើប្រសិនជា**អ៊្វួនសៀវ**នឹងលើកកងសេនាទាហានមកវាយយកបន្ទាយ ក៏ឲ្យជួយគ្នាការពាររក្សាទុកកុំឲ្យអន្តរាយបាន ហើយ**ចូឆូ**ក៏ប្រើ**ខៅធូ**, **តៀវលៀវ**, **ស៊ីហ្វាង** និង**អ៊ីគឹម**ឲ្យលើកទាហានសេះប្រាំពាន់តែងខ្លួនបន្លំជាទាហាន**អ៊្វួនសៀវ** ហើយយកទង់ជ័យដែលមានពណ៌ដូចទង់ជ័យ**អ៊្វួនសៀវ**លើកចេញទៅ ឲ្យយកបាច់ខសនិងចំបើងដែលប្រុងនឹងដុតតំបន់អ៊្វូចៅនោះផ្ទុករទេះទៅផង ខ្លាចក្រែងទៅមុខនឹងរកមិនទាន់ការ ហើយបង្គាប់ថា "បើកាលណានឹងលើកទ័ពទៅនោះ កុំឲ្យនរណានិយាយគ្នាឲ្យលាន់ឮសំឡេងជាខ្លាំង" លុះដល់ពេលយប់ **ចូឆូ**ក៏លើកទ័ពចេញពីបន្ទាយនឹងទៅវាយយកតំបន់អ៊្វូចៅ។

ឯ**ចស៊ីវ**ដែល**អ៊ួនសៀវ**ឲ្យដាក់គុកទុកនោះ លុះមកពេលយប់មួយឃើញមេឃភ្លឺស្វាងក៏នឹកឆ្ងល់ក្នុងចិត្តណាស់ ទើបឲ្យនាយភ្ញូឃុំដោះក្ដី ហើយក្រោកចេញទៅខាងក្រៅល្វែងកងទ័ព ក៏ងើយមើលទៅលើមេឃឃើញផ្កាយ**វិបរិត**ក៏នឹកភ័យបារម្ភ ទើបគិតថា អន្តរាយនឹងមានដល់នាយចៅហ្វាយរបស់យើងក្នុងគ្រានេះហើយ បើយើងនឹងនៅស្ងៀមកន្តើយឃើញមិនគួរ។ **ចស៊ីវ**ក៏ឲ្យនាយភ្ញូឃុំនាំខ្លួនចូលទៅជួបនឹង**អ៊ួនសៀវ**កំពុងផឹកស្រាស្រវឹងដេកលក់ ទទួលទាហានចូលទៅជម្រាបថា **ចស៊ីវ**មកប្ដឹងពីការរាជការដល់**អ៊ួនសៀវ** ៗក៏ឲ្យ**ចស៊ីវ**ចូលទៅហើយសួរថា ខ្លួនចូលមករកយើងដោយកិច្ចធុរៈអ្វី? **ចស៊ីវ**ជម្រាបថា ពេលយប់នេះមានផ្កាយ**វិបរិត** ខ្ញុំបាទពិគ្រោះពិចារណាមើលទៅឃើញថា លោកនឹងមានសេចក្ដីព្រួយលំបាក ព្រោះមានគេលបទៅវាយយកតំបន់អ៊ួចៅ សូមឲ្យ**លោក**ចាត់ប្រើទាហានទៅចាំស្កាត់ដើមផ្លូវទុកឲ្យមាំកុំឲ្យសត្រូវលើកចូលទៅបាន។

**អ៊ួនសៀវ**បានស្ដាប់ហើយក៏ខឹងច្រឡោតជេរ**ចស៊ីវ**ថា “ខ្លួនឯងជាមនុស្សទោស ហេតុម្ដេចមកអាចប៊ានចរចាអួតចេះដឹងដូច្នេះ?” ហើយនិយាយនឹងភ្ញូឃុំថា “**ចស៊ីវ**ជាមនុស្សទោស យើងឲ្យយកខ្លួនទៅឃុំទុកក្នុងគុក ហេតុម្ដេចក៏ខ្លួនបណ្ដោយឲ្យវាចេញមករកយើង?” ហើយបង្គាប់ឲ្យយកខ្លួនភ្ញូឃុំនោះទៅសម្លាប់ ហើយក៏ចាត់ទាហានឯទៀតឲ្យនាំខ្លួន**ចស៊ីវ**ទៅដាក់គុកវិញ។ វេលានោះ**ចស៊ីវ**អង្គុយដកដង្ហើយធំហើយថា “អ្នករាល់គ្នានឹងដល់នូវសេចក្ដីស្លាប់ក្នុងថ្ងៃព្រឹកស្អែកនេះហើយនឹងយកសាកសពទៅគរទុកនៅតំបន់ឯណាក៏មិនដឹងទេ” និយាយហើយ**ចស៊ីវ**អង្គុយយំ។

ឯ**ចូឆ្វ**កាលលើកទ័ព**កាត់**រំលងបន្ទាយ**អ៊ួនសៀវ**ទៅ ទាហានកងក្រវែល**អ៊ួនសៀវ**ក្រឡេកឃើញក៏ស្រែកសួរថា កងទ័ពនរណាលើកទៅណា? ទាហាន**ចូឆ្វ**

ឆ្លើយថា **អ៊ួនសៀវ**ប្រើ**ជៀវគី**ឲ្យឃុំនាំទាហានលើកទៅយកស្បៀងឯតំបន់អ៊ួថៅជាប្រញាប់។ ទាហានកងក្រវែលបានស្តាប់ក៏ក្រឡេកមើលតាមទៅឃើញទង់ជ័យសម្រាប់ទ័ព**អ៊ួនសៀវ** ក៏សម្គាល់ថាមែនពិតឥតមានសង្ស័យអ្វីសោះ។ កាល**ចូឆ្វ**លើកកងទ័ពទៅក្នុងពេលយប់នោះ ក៏ប្រទះនឹងទាហាន**អ៊ួនសៀវ**ដេញដោលរាល់អន្លើ ទាហាន**ចូឆ្វ**ក៏ឆ្លើយតែសម្ដីមួយដូចកាលមុន។ ពួកទាហានកងក្រវែល**អ៊ួនសៀវ**ទាំងនោះ ក៏មិនមានវិមុត្តិសង្ស័យឡើយ លុះដល់ពេលយាមពីរប្លាយ **ចូឆ្វ**ក៏បានទៅដល់តំបន់អ៊ួថៅ ទើបឲ្យទាហានទាំងអស់ចងបាច់ខសនិងបាច់ចំបើងដុតភ្លើងឲ្យឆេះឡើងព្រមគ្នាជុំវិញជង្រុកស្រូវ ភ្លើងឆេះរាលទៅដល់ជង្រុកនោះជុំវិញ ទាហានទាំងអស់ក៏ស្រែកហ៊ោកញ្ជ្រៀវគឹកកង លើកគ្នាចូលទៅចោមព័ទ្ធ**អ៊ីខេង**។

ឯ**អ៊ីខេង**នោះ តាំងពីពេលព្រលប់ផឹកស្រាស្រវឹងពុំដឹងស្មារតី ដេកលក់នៅក្នុងដំណេក លុះបានឮសំឡេងអឺងកងក៏បានស្មារតីដឹងខ្លួនភ្ញាក់ឡើង រត់ចេញទៅមើលឃើញកងទ័ព**ចូឆ្វ**លើកមកចោមរោមវាយកាប់ចាក់ទាហាន ហើយចូលទៅចាប់ខ្លួន**អ៊ីខេង**បាន។ ឯ**គុយអ៊ួនជិន** និង**ទៀវយ៉ូយ** ដែល**អ៊ីខេង**ប្រើឲ្យនាំទាហានទៅយកស្បៀងអាហារមកឲ្យកងទ័ព**អ៊ួនសៀវ**នោះ លុះត្រឡប់ទៅជិតដល់តំបន់អ៊ួថៅ ទទួលក្រឡេកមើលទៅឃើញពន្លឺភ្លើង ត្រង់ជង្រុកស្រូវកំពុងឆេះឡើងសន្ធោ ក៏លើកទាហានទន្ទ្រានចូលទៅជួយ។

ខណៈនោះទាហាន**ចូឆ្វ**ក្រឡេកទៅឃើញ កងទ័ពលើកមកពីក្រោយច្រើនណាស់ **ចូឆ្វ**ស្រែកឡើងថាកុំឲ្យគ្នាយើងភិតភ័យ ឲ្យតាំងចិត្តខំប្រឹងតែធ្វើការទៅខាងមុខទៀតចុះ ដែលកងទ័ពលើកមកពីក្រោយនោះជាភ្នាក់ងាររបស់យើងនឹងការពារកែខៃហើយ។ ទាហានទាំងពួងបានឮដូច្នោះ ក៏បង្ខំដុតភ្លើងទាំងអស់គ្នា ហើយចូលទៅដេញកាប់សម្លាប់ ទាហាន**អ៊ីខេង**ស្លាប់អស់ជាច្រើនណាស់។ លុះ**គុយអ៊ួនជិន**

និង**ទៀវយ៉ូយ**លើកទ័ពវាយពីក្រោយចូលទៅ **ចូឆ្វ**ក៏ដេញទាហានដែលរក្សាខ្លួនឲ្យត្រឡប់មុខមកវាតតាំងច្បាំងគ្នាជាពន្លឹក។ ទាហាន**ចូឆ្វ**យកទួនចាក់ត្រូវ**គុយអ៊ួនជិន**និង**ទៀវយ៉ូយ**ធ្លាក់ពីលើសេះស្លាប់។

ឯទាហាន**អ៊ួនសៀវ**ដែលលើកទៅក្នុងពេលយប់នោះ ឃើញពន្លឺភ្លើងឆេះឡើងខាងទិសឧត្តរក៏ខំស្រូទៅប្រាប់**អ៊ួនសៀវ**។ ខណៈនោះ**អ៊ួនសៀវ**កំពុងដេកលក់ ក៏ភ័យឡើងក្រោកទៅមើលឃើញភ្លើងឆេះភ្លឺចំទិសឧត្តរ ក៏ដឹងថាជាកងទ័ព**ចូឆ្វ**លើកទៅដុតជង្រុកស្រូវនៅតំបន់អ៊ូចៅអស់ ទើបឲ្យហៅសេនាទាហានទាំងអស់មកប្រឹក្សាថានឹងលើកទ័ពទៅជួយ។ **ទៀវខាប់**ឆ្លើយថា ខ្ញុំបាទនឹង**កោឡាំ**សុំយកអាសាលើកទាហានទៅជួយការពារស្បៀងឲ្យបាន។ **គួតៅ**ជម្រាបថា ដែល**ទៀវខាប់** និង**កោឡាំ**ថានឹងយកអាសាលើកទ័ពទៅនោះពិតជាមិនបានទេ ព្រោះ**ចូឆ្វ**លើកទ័ពមកធ្វើការដោយខ្លួនឯង សូមឲ្យលោកស្រួតលើកទ័ពទៅវាយបន្ទាយ**ចូឆ្វ**ខាងណោះវិញ បើ**ចូឆ្វ**ដឹងនឹងវាមកជួយដណ្ដើមយកបន្ទាយទុក ការដែលយើងធ្វើក៏នឹងបានសម្រេចដោយងាយ។ **ទៀវខាប់**តបថា គំនិតរបស់**ចូឆ្វ**នោះជ្រៅនិងចំណានស្ទាត់ក្នុងការសង្គ្រាមណាស់ បើប្រសិន**ចូឆ្វ**នឹងលើកទៅការខាងនោះ ក៏គង់បានទុកសេនាទាហានដែលមានថ្វីដៃ ឲ្យនៅរក្សាបន្ទាយខាងនេះជាមាំមួនមិនឲ្យមានអន្តរាយបានឡើយ ដែលលោកនឹងឲ្យលើកទ័ពទៅវាយបន្ទាយ**ចូឆ្វ**មិនងាយនឹងបានទេ ក្រែងមានថ្លោះការប្រការមួយទៀត បើនឹងលើកទៅជួយ**អ៊ីខេង**ខាងនោះសោត ទោះបីអាក្រក់ល្អប្រហែលជា**ចូឆ្វ**នឹងចាប់**អ៊ីខេង**បានហើយ ការដែលលោកនឹងប្រឹងគិតគ្រានេះឃើញថា មុខជាថ្លោះការទាំងសងខាងមិនលែងទេ។

**គួតៅ**ឆ្លើយឡើងថា ខ្ញុំបាទសូមអង្វរលោក ព្រោះ**ចូឆ្វ**លើកទ័ពទៅនោះ មុខជាមានតែកូនទាហាននៅរក្សាបន្ទាយទេ សូមឲ្យលោកលើកទ័ពទៅតាមពាក្យខ្ញុំបាទ

ចុះ។ **អ៊ួនសៀវ**ក៏យល់ឃើញត្រូវផង ទើបចាត់**ទៀវខាប់** និង**កោឡាំ**ឲ្យលើកទាហានប្រាំពាន់ទៅវាយយកបន្ទាយ**ចូឆូ** ហើយឲ្យ**ជៀវគី**លើកទាហានមួយម៉ឺនទៅជួយ**អ៊ីខេង**នៅតំបន់អ៊ូថៅ។ នាយទាហានទាំងពីរកង ក៏លើកទៅតាមពាក្យ**អ៊ួនសៀវ**បង្គាប់ក្នុងពេលកណ្ដាលយប់នោះ។

ឯកងទាហាន**ចូឆូ**នោះ លុះវាយយកបានតំបន់អ៊ូថៅហើយ ក៏រើជញ្ជូនយករបស់ទ្រព្យ គឺក្រោះ និងគ្រឿងសាស្ត្រាវុធនៅទង់ជ័យជារបស់**អ៊ីខេង**ច្រើនណាស់ ហើយទាហានដែលចាប់**អ៊ីខេង**បាន ក៏នាំយកខ្លួននិងគ្រឿងប្រដាប់ទៅជូន**ចូឆូ** ៗក៏ឲ្យកាត់ម្រាមដៃ មាត់ ច្រមុះ និងត្រចៀក**អ៊ីខេង**ចេញអស់ ហើយឲ្យចងផ្ដាល រួចលែងទៅ។ **ចូឆូ**ក៏ឲ្យទាហានទាំងពួងយកក្រោះ និងទង់ជ័យដែលរើសបាននោះ ឲ្យទាហានស្លៀកពាក់បន្លំជាទាហាន**អ៊ីខេង** ឲ្យ**ខៅធូ** និង**តៀវលៀវ**លើកចេញទៅជាមុន ហើយបង្គាប់ថា “បើប្រទះនឹងទាហាន**អ៊ួនសៀវ**កាលណាឲ្យធ្វើអាការៈប្រាប់ថាជាទាហាន**អ៊ីខេង**បែកពីទ័ព**ចូឆូ**រត់ចេញមក” លុះចាត់ចែងស្រេចហើយ ក៏លើកត្រឡប់ទៅដល់ច្រកភ្នំមួយ ក៏ប្រទះនឹង**ជៀវគី** ៗក៏ស្រែកសួរថា នរណាលើកទ័ពទៅណា? **តៀវលៀវ** និង**ខៅធូ**ក៏បង្គាប់ឲ្យទាហានឆ្លើយថា យើងជាទាហាន**អ៊ីខេង**បែករត់មក។ **ជៀវគី**បានស្ដាប់ហើយក៏មិនសង្ស័យឡើយ ខំតែស្រូតដេញទាហានរបស់ខ្លួនឲ្យប្រញាប់លឿនទៅ។ **តៀវលៀវ** និង**ខៅធូ**ឃើញ**ជៀវគី**បរសេះមកជិត ក៏ស្រែកគំហកថា ឯងលើកទាហានទៅណា? **ជៀវគី**ក៏ជ្រុលទៅនៅក្នុងចំណោមសេនាទាហាន**ចូឆូ** លុះឮដូច្នោះក៏ភ័យណាស់នឹងតទល់ច្បាំងរាំងការក៏មិនទាន់។ **តៀវលៀវ**ក៏លើកទួនឡើងចាក់ត្រូវ**ជៀវគី**ធ្លាក់ពីលើសេះស្លាប់មួយរំពេចនោះ ហើយដេញកាប់ពលទាហានទាំងពួង ស្លាប់មីរដេរដាសថែមទៀត។

ខណៈនោះ **តៀវសៀវ**ក៏ឲ្យទាហានដែលស្លៀកពាក់បន្លំជាទាហាន**អ៊្វនសៀវ**នោះ ឲ្យខំស្រូតទៅខាងមុខ ស្រែកប្រកាសដល់ពួកទាហាន**អ៊្វនសៀវ**ថា ឥឡូវ**ជៀវគី**លើកទ័ពទៅសម្លាប់ទាហាន**ចូឆូ** ស្លាប់អស់ជាច្រើនណាស់ សំឡេងនោះក៏ឮតៗទៅដល់**អ៊្វនសៀវ** ៗមិនដឹងកលឧបាយក៏រឹតតែមានសេចក្តីត្រេកអរ មិនបានប្រមូលទាហានបញ្ជូនទៅជួយ**ជៀវគី**។ **អ៊្វនសៀវ**ក៏បញ្ជូនទាហានទៅជួយ**ទៀវខាប់** និង**កោឡាំ** ដែលទៅប្លន់បន្ទាយ**ចូឆូ**នោះវិញ។

ឯ**ទៀវខាប់** និង**កោឡាំ** លុះលើកទ័ពទៅដល់ប្រទល់នឹងបន្ទាយ**ចូឆូ** ហើយក៏វាយទាហានចូលវាយទម្លាយយកបន្ទាយ**ចូឆូ** ឯ**ចោហង**ដែលនៅរក្សាបន្ទាយនោះក៏លើកទាហានចេញទៅតទល់ច្បាំងគ្នាជាពន្លឹក។ **ហែហ៊្វទុន** និង**ហែហ៊្វអៀន**, **ចោយិន**, **លីទៀន** ដែលជាកងទ័ពបង្កប់ឆ្វេងស្តាំក៏លើកទ័ពវាយខ្ទប់មកទាំងសងខាង សម្លាប់ទាហាន**អ៊្វនសៀវ**ស្លាប់អស់ជាច្រើន **ទៀវខាប់** និង**កោឡាំ**តទល់ពុំឈ្នះ ក៏ថយទាហានមកក្រោយ ជួបប្រទះនឹងទាហានដែល**អ៊្វនសៀវ**បញ្ជូនឲ្យទៅជួយនោះ **ចោហង** និងកងទ័ពដែលបង្កប់ទាំងបួនក្រុម ក៏លើកគ្នាវាយខ្ទប់**ទៀវខាប់** និង**កោឡាំ**ជុំវិញទាំងបីទិស។

ចំណែក**ចូឆូ**លើកកងទ័ពមកឃើញដូច្នោះ ដេញទាហានឲ្យចូលទៅវាយប្រសព្វពីក្រោយទាហាន**អ៊្វនសៀវ**គ្រប់ទិសទាំងបួន។ **ទៀវខាប់** និង**កោឡាំ**ទប់ទល់ពុំឈ្នះ ក៏នាំទាហានពារទម្លាយរត់ចេញទៅរួច។ ឯ**អ៊ីខេង** ដែល**ចូឆូ**ធ្វើទោសចងលែងខ្លួនបានមកជួបនឹងពួកទាហានដែលបែកទ័ព ក៏នាំគ្នាទៅរក**អ៊្វនសៀវ**នៅក្នុងបន្ទាយ។ **អ៊្វនសៀវ**ក្រឡេកទៅឃើញ**អ៊ីខេង**មានរបួសឈឺចាប់ជាទម្ងន់ណាស់ ក៏សួរថា ហេតុម្តេចទើបថ្លោះការដូច្នោះ? ទាហានដែលបែកមកជាមួយនោះក៏ជម្រាប**អ៊្វនសៀវ**ថា កាល**អ៊ីខេង**ទៅនៅរក្សាតំបន់អ៊្វចៅនោះ មិនបានយកចិត្តទុកដាក់ត្រួតត្រា

រក្សាស្បៀងអាហារសោះ ចេះតែផឹកស្រាស្រវឹងគ្រប់វេលាជានិច្ច លុះ**ចូឆ្វ**លើកទ័ពទៅវាយ ក៏ចាប់**អ៊ុីខេង**បានហើយក៏ឲ្យកាត់ម្រាមដៃ ច្រមុះ និងត្រចៀកចងលែងមក។ **អ៊្វូនសៀវ**បានស្តាប់ដូច្នោះក៏ក្រោធខ្លាំង ទើបចាប់គ្រប៊ីមកចាក់សម្លាប់**អ៊ុីខេង**។

ខណៈនោះ**គួតៅ**កាលបានដំណឹងថា **ទៀវខាប់** និង**កោឡាំ**ចាញ់ទ័ព**ចូឆ្វ**ដូច្នោះក៏គិតថា "ប្រហែលជា**អ៊្វូនសៀវ**ប្រើឲ្យ**ទៀវខាប់** និង**កោឡាំ**ទាំងពីរនាក់ទៅធ្វើការនោះ តាមពាក្យដែលអញពន្យល់ ឥឡូវ**ទៀវខាប់** និង**កោឡាំ**ផ្តោះការហើយ មុខជា**អ៊្វូនសៀវ**នឹងរករឿងខឹងនឹងអញមិនខាន បើដូច្នោះអញចាំគិតរកឧបាយចូលទៅនិយាយញុះឲ្យ**អ៊្វូនសៀវ**ត្រឡប់ខឹង**ទៀវខាប់** និង**កោឡាំ**វិញ ខ្លួនអញក៏នឹងរួចពីទោសនោះ" លុះគិតហើយក៏ចូលទៅជម្រាប**អ៊្វូនសៀវ**ថា ឥឡូវ**ទៀវខាប់** និង**កោឡាំ** ដែលទៅប្លន់បន្ទាយ**ចូឆ្វ**នោះដឹងដំណឹងថា លោកខូចស្បៀងអាហារអស់ហើយ ក៏មានចិត្តត្រេកអរ។ **អ៊្វូនសៀវ**ក៏សួរថា ហេតុម្តេចបានជាអ្នកឯងថា**ទៀវខាប់** និង**កោឡាំ**មានសេចក្តីត្រេកអរដូច្នោះ? **គួតៅ**ឆ្លើយថា ខ្ញុំដឹងជាប្រាកដថា **ទៀវខាប់** និង**កោឡាំ**នោះមានចិត្តគំនិតមិនពិតត្រង់នឹងលោកយូរហើយ គិតកែប្រែចិត្តចេញ តែមិនទាន់មានឱកាស លុះលោកប្រើទៅប្លន់បន្ទាយគ្រានេះ ក៏មិនមែនតាំងចិត្តនឹងធ្វើការជាប្រាកដ ក្លែងធ្វើជាចាញ់**ចូឆ្វ**។ **អ៊្វូនសៀវ**បានឮដូច្នោះក៏ជឿថាពិត មានចិត្តនោះខឹងគុំគួនទុកជាខ្លាំងណាស់ ទើបប្រើទាហានឲ្យទៅហៅខ្លួ**ទៀវខាប់** និង**កោឡាំ**ចូលមកធ្វើទោស។ ទាហានទទួលពាក្យ**អ៊្វូនសៀវ**ហើយក៏លាចេញទៅ។

**គួតៅ**ឃើញ**អ៊្វូនសៀវ**ជឿស្តាប់ពាក្យខ្លួនហើយ ក៏ត្រឡប់មកវិញទើបប្រើមនុស្សស្និទ្ធស្នាលម្នាក់ ឲ្យស្រូតទៅប្រាប់**ទៀវខាប់** និង**កោឡាំ**ជាមុនថា ឥឡូវ**អ៊្វូនសៀវ**ខឹងព្រោះទៅធ្វើការឲ្យផ្តោះការ ដែលឲ្យហៅខ្លួនមកនេះដើម្បីប្រហារជីវិត។ បម្រើ**គួតៅ**ក៏ស្រូតរូតទៅប្រាប់សេចក្តីដល់**ទៀវខាប់** និង**កោឡាំ**គ្រប់ប្រការ។

**ទៀវខាប់** និង**កោឡាំ**ដឹងដូច្នោះក៏រិះគិតគ្នា។ ទទួលមានទាហាន**អ៊្លួនសៀវ**ទៅប្រាប់ថា **អ៊្លួនសៀវ**ឲ្យហៅទៅជួប។ **ទៀវខាប់, កោឡាំ**សួរថា ដែល**អ៊្លួនសៀវ**ឲ្យមកហៅយើងទៅនោះមានការអ្វី? ខ្លួនដឹងឬទេ? ទាហាននោះ**ប្រាប់**ថាមិនដឹងមានការអ្វីទេ។ **កោឡាំ**ក៏ខឹងហូតគ្របីសម្លាប់ទាហាននោះស្លាប់ទៅ។

**ទៀវខាប់**ឃើញដូច្នោះក៏ភ័យស្លុតចិត្ត ទើបសួរទៅ**កោឡាំ**ថា ហេតុម្ដេចបានជាអ្នកសម្លាប់បម្រើ**អ៊្លួនសៀវ**ចេញដូច្នេះ? **កោឡាំ**ថា ឯចិត្ត**អ៊្លួនសៀវ**នោះមិនមែនជាអ្នកចិញ្ចឹមមនុស្សទៀងត្រង់ដោយប្រក្រតីទេ រមែងជឿស្ដាប់តែពាក្យមនុស្សញុះញង់ ដែលឲ្យមកហៅយើងទាំងពីរនាក់ទៅវេលានេះ ប្រាថ្នានឹងសម្លាប់យើងដូចបម្រើ**គួតៅ**មកប្រាប់មែន ទោះបីយើងរួចជីវិតក្នុងគ្រានេះ យូរទៅក៏គង់**តែ**នឹងស្លាប់ដោយថ្វីដៃទាហាន និងតម្រិះប្រាជ្ញា**ចូឆូ**មិនខាន បើដូច្នោះត្រូវតែយើងបបួលគ្នាទៅនៅនឹង**ចូឆូ** សូមធ្វើការយកអាសា**ចូឆូ**វិញ ទើបនឹងបានសេចក្ដីសុខតទៅ។ **ទៀវខាប់**យល់ឃើញត្រូវផង ក៏នាំទាហានទាំងពួងចូលទៅក្នុងបន្ទាយ**ចូឆូ** ហើយប្រាប់ទាហាន**ចូឆូ**ថា យើងឈ្មោះ**ទៀវខាប់** និង**កោឡាំ**ទាំងពីរនាក់ស្ម័គ្រចូលមកសូមធ្វើការនឹងមហាឧបរាជ។ ទាហាននោះក៏នាំសេចក្ដីទៅជម្រាប**ចូឆូ**។

ឯ**ហែហ៊្លួទុន**បានឮដូច្នោះក៏ជម្រាប**ចូឆូ**ថា **ទៀវខាប់** និង**កោឡាំ**នោះជាទាហានឯករបស់**អ៊្លួនសៀវ** ឥឡូវនេះលោកនឹង**អ៊្លួនសៀវ**កំពុងតែធ្វើសង្គ្រាមជាប់ដៃគ្នា ដែល**ទៀវខាប់** និង**កោឡាំ**ស្ម័គ្រចូលមកធ្វើរាជការនឹងលោកនោះ ខ្ញុំបាទក្រែងជាកលឧបាយទេដឹង? សូមឲ្យលោករិះគិតពិនិត្យមើលកុំអាលជឿទុកចិត្ត។ **ចូឆូ**តបថា "អ្នកឯងនិយាយនេះត្រូវហើយ ដែល**កោឡាំ** និង**ទៀវខាប់**ចូលមកធ្វើកលឧបាយសឹកប្រការម្ដេច យើងក៏ល្មមដឹងបាន នឹងខ្លាចអ្វីត្រឹមប្រាជ្ញាឈ្មោះទាំងពីរនោះ បើនៅនឹងយើងដោយសុចរិតពិតត្រង់ យើងក៏ទទួលចិញ្ចឹមដោយប្រក្រតី" ហើយក៏ឲ្យ

ទាហានចេញទៅហៅខ្លួន**ទៀវខាប់** និង**កោឡាំ**ចូលមក។ **ទៀវខាប់** និង**កោឡាំ**គំនាប់**ចូឆ្វ**ហើយក៏ពណ៌នារឿងរ៉ាវពីដើមដល់ចប់ ដែលបាននៅនឹង**អ៊ួនសៀវ**នោះឲ្យ**ចូឆ្វ**ស្តាប់គ្រប់ប្រការ រួចជម្រាប**ចូឆ្វ**ថា ឥឡូវនេះខ្ញុំបាទនឹងនៅតទៅទៀតពុំបាន ទើបនាំគ្នាមកសូមនៅធ្វើទាហានរបស់លោកនេះ។

**ចូឆ្វ**បានស្តាប់ក៏ក្តែងលើកសរសើរ**ទៀវខាប់, កោឡាំ**ថា "ឯ**អ៊ួនសៀវ**នោះមានសេនាទាហានឯកក៏ច្រើន បើប្រសិនជាស្តាប់ពាក្យអ្នកឯងទាំងពីរនាក់ក៏នឹងមិនខូចខាតស្បៀងអាហារ សូម្បីកិច្ចការទាំងពួងក៏គង់សម្រេចបានដោយងាយ។ នេះហាក់តែបុណ្យរបស់យើងច្រើន ទើបបណ្តាលឲ្យ**អ៊ួនសៀវ**មិនជឿស្តាប់ពាក្យអ្នក ដែលយើងបានអ្នកមកទុកទាំងពីរនេះ អ្នកក៏ចូរយកចិត្តទុកដាក់ជួយធ្វើរាជការសឹកដើម្បីកម្ចាត់**អ៊ួនសៀវ**ឲ្យបរាជ័យចាញ់ដោយសតិបញ្ញា និងថ្វីដៃរបស់អ្នកទាំងពីរ យើងក៏សូមសង្ឃឹមទុកចិត្តនឹងគំនិតប្រាជ្ញារបស់អ្នកដោយអស់ពីចិត្ត" ហើយ**ចូឆ្វ**ក៏តាំងឲ្យ**ទៀវខាប់** និង**កោឡាំ**ធ្វើជានាយទាហាន។ **ទៀវខាប់** និង**កោឡាំ**ឃើញ**ចូឆ្វ**ទទួលរាប់អានដោយស្មោះអស់ពីចិត្ត ក៏រឹតតែមានសេចក្តីត្រេកអរសោមនស្សជាច្រើន ហើយជម្រាប**ចូឆ្វ**ថា បើលោកនឹងលើកទ័ពទៅច្បាំងនឹង**អ៊ួនសៀវ**វេលាណា ខ្ញុំបាទសូមយកអាសាចេញទៅជាទ័ពមុខជាប្រាកដ។ ខណៈនោះទាហានក្នុងកងទ័ព**អ៊ួនសៀវ**ដឹងថា **ខៅហ៊ីវ, ទៀវខាប់, កោឡាំ**រត់ទៅនៅខាង**ចូឆ្វ**អស់ហើយ ទាំងស្បៀងអាហារនៅតំបន់អ៊ូចៅនោះក៏ឆេះវិនាសអស់ ទាហានទាំងនោះក៏នឹកតូចចិត្តទោមនស្សគិតដោះយកតែខ្លួនខ្លះ ក៏កើតទុក្ខព្រួយរំខានពុំបានយកចិត្តទុកដាក់ធ្វើការរាជការឡើយ។

ចំណែក**ខៅហ៊ីវ**ជម្រាប**ចូឆ្វ**ថា គ្រានេះសង្គ្រាមបានកលការជាចំណាប់អស់ហើយ សូមឲ្យលោកលើកកងទ័ពទៅវាយច្បាំងនឹង**អ៊ួនសៀវ**ជាប្រញាប់កុំបង្អង់។

**ចូឆ្វ**ក៏យល់ឃើញត្រូវផង ទើបកេណ្ឌទាហានឲ្យ**ទៀវខាប់** និង**កោឡាំ**លើកទៅប្ដន់បន្ទាយ**អ៊្លួនសៀវ** ៗក៏ឲ្យទាហានចេញតច្បាំងជាខ្លាំងពន្លឹក **ទៀវខាប់** និង**កោឡាំ** ក៏សម្លាប់ទាហាន**អ៊្លួនសៀវ**ស្លាប់អស់ជាច្រើនណាស់ លុះពេលព្រឹកឡើង**ទៀវខាប់**និង**កោឡាំ**ក៏នាំកងទ័ពត្រឡប់មកប្ដឹងដំណឹង**ចូឆ្វ** តាមដែលបានទៅធ្វើការមានជ័យជម្នះសព្វគ្រប់ប្រការ **ចូឆ្វ**ក៏មានសេចក្ដីត្រេកអរជាអនេក។

**ស៊ុនហុក**ជម្រាប**ចូឆ្វ**ថា ទាហានក្នុងកងទ័ព**អ៊្លួនសៀវ**នោះឃើញថាទន់ខ្សោយកម្លាំង និងស្លួចស្ដើងអស់ហើយ សូមឲ្យលោកចាត់ទាហានយើងឲ្យទៅនិយាយការជាពាក្យឧបាយថា វេលានេះលោកនឹងលើកទ័ពទៅវាយស្រុកង៉ៀបកុន ដែលបញ្ជូនស្បៀងអាហារមកឲ្យ**អ៊្លួនសៀវ**មួយកង ទៅវាយទ័ពដែលតាំងស្កាត់ផ្លូវនៅតំបន់លីយ៉ុងមួយកង ទៅវាយទ័ពដែលតាំងនៅដើមផ្លូវនឹងទៅស្រុកគីជីវមួយកង បើដំណឹងនេះបានឮដល់**អ៊្លួនសៀវ**វេលាណា **អ៊្លួនសៀវ**ក៏នឹងបែងទាហានទៅជួយស្រុកង៉ៀបកុនមួយកង ទៅវាយទ័ពដែលស្កាត់ដើមផ្លូវមួយកង កាលណាបែងរំលែកទៅជាច្រើនកងដូច្នេះហើយ ទាហានកងទ័ពធំរបស់**អ៊្លួនសៀវ**ក៏មានតែថយចុះស្លួចស្ដើងទៅ រួចសូមឲ្យលោកលើកទ័ពទៅវាយយកបន្ទាយ**អ៊្លួនសៀវ** ឃើញថានឹងបែកបានដោយងាយ។ **ចូឆ្វ**យល់ឃើញត្រូវផង ក៏ចាត់ប្រើទាហានឲ្យដើរទៅនិយាយបរិហារដល់ពួកអ្នកស្រុកគ្រប់តំបន់តាមពាក្យ ដែល**ស៊ុនហុក**និយាយនោះ។

ឯទាហាន**អ៊្លួនសៀវ**លុះបានដឹងថា **ចូឆ្វ**លើកកងទ័ពទៅគ្រប់តំបន់ ក៏នាំយកសេចក្ដីនោះទៅប្រាប់**អ៊្លួនសៀវ** ៗដឹងដូច្នោះក៏ភ័យខ្លាំងណាស់ ទើបចាត់**អ៊្លួនសុង**ជាបុត្រឲ្យឃុំនាំទាហានប្រាំម៉ឺនទៅជួយរក្សាការពារស្រុកង៉ៀបកុន កុំឲ្យខូចស្បៀងអាហារបាន ហើយឲ្យ**ស៊ិនបេង**លើកទាហានប្រាំម៉ឺនទៅចាំវាយកងទ័ពដែលលើក

ទៅស្ទាក់ផ្លូវតំបន់លីយ៉ុង **អ៊្លួនសុង** និង**ស៊ិនបេង**ក៏លើកទាហានម្នាក់ប្រាំម៉ឺន ចេញទៅតែរៀងខ្លួន។

**ចូឆូ**ដំណឹងដូច្នោះ ក៏ចាត់ចែងទាហាន លើកញែកចេញជាប្រាំបីកងចូលទៅវាយបន្ទាយ**អ៊្លួនសៀវ** ឯពួកទាហាន**អ៊្លួនសៀវ**នោះសឹងតែកោតញញើតមិនអាចនឹងចេញច្បាំង ព្រោះខ្លាចអំណាច**ចូឆូ**ទាំងអស់។ **អ៊្លួនសៀវ**ឃើញទាហានរបស់ខ្លួនប្រែចិត្តក៏រឹតតែភ័យខ្លាច មិនទាន់ពាក់ក្រោះវេះនាំ**អ៊្លួនថាំ**ជាបុត្រនិងទាហានប្រហែលប្រាំបីរយប្លាយ ចេញចោលបន្ទាយ និងត្រាសម្រាប់ងារនូវទ្រព្យរបស់ទាំងអស់ ហើយក៏ពារទម្លាយកងទ័ពចេញរួចឆ្លងទន្លេហាងហោទៅ។

ក្នុងខណៈនោះ ទាហាន**ចូឆូ**ក៏កាប់សម្លាប់ទ័ព**អ៊្លួនសៀវ**ស្លាប់អស់ជាច្រើន ឯ**តៀវលៀវ, ខៅធូ, អ៊ីគឹម** និង**ស៊ីហ្វុង**ក៏បរសេះលើកទាហានដេញ**អ៊្លួនសៀវ**ទៅដល់ត្រើយមាត់ទន្លេហាងហោ លុះឃើញ**អ៊្លួនសៀវ**ឆ្លងហួសក៏នាំគ្នាត្រឡប់មកវិញ ទើបចូលទៅរើជញ្ជូនយករបស់ទ្រព្យ**អ៊្លួនសៀវ**ក្នុងបន្ទាយមកឲ្យ**ចូឆូ** ៗក៏យកមាសប្រាក់និងគ្រឿងសម្លៀកបំពាក់នោះចែកឲ្យទាហានតាមសមគួរ ឯនាយទាហានដប់នាក់យកសំបុត្រដែលបានមកពីបន្ទាយ**អ៊្លួនសៀវ**នោះទៅឲ្យ**ចូឆូ** ៗទទួលយកសំបុត្រនោះមកមើលឃើញសេចក្តីថា “ខ្ញុំបាទជានាយទាហានច្រើននាក់ ដែលមកនៅក្នុងកងទ័ព**ចូឆូ**នោះ សូមជម្រាបមកដល់**អ៊្លួនសៀវ**ថា បើ**ចូឆូ**បរាជ័យចាញ់ដៃវេលាណា ខ្ញុំបាទរាល់គ្នានឹងសុំតែជីវិតទុក នឹងចូលមកសាពិភក្តិទីពឹងលោកតទៅ”។ ទីប្រឹក្សានិងសេនាទាហានទាំងពួងដឹងសេចក្តីក្នុងសំបុត្រនោះដូច្នោះហើយ ក៏ជម្រាប**ចូឆូ**ថា សូមឲ្យលោកពិចារណារកខ្លួនមនុស្សដែលប្រព្រឹត្តបទទុច្ចរិតនឹងលោក ហើយលបផ្ញើសំបុត្រទៅដល់**អ៊្លួនសៀវ**ឲ្យឃើញកុំឲ្យខាន។



# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ២៨

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូឆ្វ**យកសំបុត្រនាយទាហានមកពិចារណា រិះគិតតែក្នុងចិត្តមិនយកទោសដុតសំបុត្រនោះចោល រហូតដល់**ចូឆ្វ**លើកទ័ពទៅវាយយកស្រុកគីជីវ ទៅដល់មាត់ទន្លេហាងហោក៏តាំងបន្ទាយនៅទីនោះ។)*

**ចូឆ្វ**ដឹងដូច្នោះក៏នឹកតែក្នុងចិត្តថា បើពិចារណាតាមសំបុត្រនេះ ក៏គង់នឹងរកខ្លួនឃើញ តែបណ្ដាអ្នកដែលមានខ្លួននោះ ក៏គង់នឹងក្លែងឆ្លើយដោះសារថាមិនដឹងមិនឃើញ បើយើងដេញដោលឲ្យបែកការណ៍ឡើង ទាហានទាំងពួងក៏គង់នឹងភ្ញាក់ផ្អើលរឹករវរមិនខាន នាំមានពាក្យនិយាយថា យើងពិចារណាសួរដេញដោលនោះមិនគួរ ព្រោះនាយទាហានទាំងអម្បាលនោះនឹងបានគិតប្រទូសរ៉ាយដល់យើងវិញក៏ទេ ដែលបានជាគិតដូច្នោះព្រោះក្រែង**អ៊ួនសៀវ**មានជ័យជម្នះ ដោយហេតុ**អ៊ួនសៀវ**មានទាហានច្រើនជាង ខ្លាចខាងយើងភ្លាត់ចំណាប់បរាជ័យ ទើបនាំគ្នានិយាយទៅរក**អ៊ួនសៀវ** ដើម្បីនឹងផ្ញើខ្លួនប្រាណទុកជាមុន។ រឿងនេះបើយើងពិចារណាយកទោសកំហុសដល់រូបនីមួយៗក៏មិនគួរ សូម្បីខ្លួនយើងវិញបើមកនៅក្នុងចំណោមសឹកគេនោះ ក៏គង់មានសេចក្ដីភ័យបារម្ភដូចគ្នា។ **ចូឆ្វ**គិតហើយ ក៏យកសំបុត្រនោះដុតអស់ក្នុងភ្លើងទៅ។

ខណៈកាលដែល**អ៊ួនសៀវ**បែកទ័ពទៅនោះ ទាហាន**ចូឆ្វ**មួយកងចូលទៅក្នុងបន្ទាយ ឃើញ**ចស៊ីវ**ត្រូវឃុំទុកក្នុងគុក ក៏នាំខ្លួនទៅឲ្យ**ចូឆ្វ** ៗក្រឡេកឃើញទាហាននាំ**ចស៊ីវ**មក ក៏បង្គាប់ឲ្យដោះចំណងចេញ ហើយនិយាយថា យើងនិង**ចស៊ីវ**នេះឯង

ធ្លាប់ស្គាល់រាប់អានគ្នាមកពីដើម។ **ចស៊ីវ**ឃើញ**ចូឆ្វ**ធ្វើដូច្នោះ ក៏ដឹងភ្លាមថា **ចូឆ្វ**នឹងល្បួងលោមយកខ្លួនទុក ទើបស្រែកថា **អាចូឆ្វ** អាឯងកុំមកល្បួងលួងលោមអញឡើយ អញមិនបានអង្វរលន់តួទោសខ្លាចអាឯងទេ។

**ចូឆ្វ**បានឮសម្តី**ចស៊ីវ**និយាយទ្រគោះមើលងាយដូច្នោះ ក៏មិនមានសេចក្តីខឹងឡើយ ទើបយកមាសប្រាក់ និងគ្រឿងសម្លៀកបំពាក់មកឲ្យ**ចស៊ីវ**ហើយថា **អ៊ួនសៀវ**នោះជាមនុស្សល្ងង់ល្ងើគ្មានសតិបញ្ញាអ្វីសោះ បានជាមិនចិញ្ចឹមទំនុកបម្រុងអ្នកឲ្យដល់ខ្នាត ប្រសិនបើយើងបានអ្នកមកទុកជាគ្នាហើយ យើងនឹងរិះគិតការកម្ចាត់**អ៊ួនសៀវ**ចេញបានដោយងាយណាស់ ហេតុម្តេចអ្នកនៅតែរាប់អានស្រឡាញ់**អ៊ួនសៀវ**ធ្វើអ្វីទៀត? **ចស៊ីវ**នៅស្ងៀមមិនឆ្លើយតបថាអ្វីសោះ។ **ចូឆ្វ**ក៏ឲ្យរៀបតុលៀងភោជនាហារឲ្យ**ចស៊ីវ**បរិភោគ។

លុះពេលពាក់កណ្តាលអាធ្រាត្រយប់ស្ងាត់ **ចស៊ីវ**ក៏លបចេញទៅលួចយកបានទាំងសេះមួយផង ជិះរត់ទៅដើម្បីនឹងទៅរក**អ៊ួនសៀវ**វិញ។ ទាហាន**ចូឆ្វ**ដែលយាមល្បាតក៏ចាប់ខ្លួន**ចស៊ីវ**បាន ហើយនាំខ្លួនទៅឲ្យ**ចូឆ្វ** ៗក៏ថា "**ចស៊ីវ**បើមិនព្រមចូលចិត្តនៅធ្វើការជាមួយនឹងយើងក៏វាហីទៅចុះ" ហើយក៏បង្គាប់ឲ្យទាហាននាំយកខ្លួន**ចស៊ីវ**ទៅសម្លាប់ក្នុងវេលានោះ តែ**ចូឆ្វ**ត្រឡប់ចិត្តគិតឃើញភ្លាមមួយរំពេចនោះថា "យើងឲ្យសម្លាប់**ចស៊ីវ**ដែលជាមនុស្សមានចិត្តសត្យ ទៀងត្រង់ស្រឡាញ់ចៅហ្វាយនាយនោះមិនគួរសោះ" ទើបឲ្យគាត់តែងការសពនាំទៅបញ្ចុះទុកនៅមាត់ទន្លេហាងហោ ហើយឲ្យយកថ្មមកចារឹកអក្សរទុកជាអនុស្សាវរីយ៍ថា "**ចស៊ីវ**នេះមានចិត្តសត្យទៀងត្រង់ស្រឡាញ់ចៅហ្វាយនាយទាល់តែស្លាប់ជីវិត នរណានឹងធ្វើការតទៅមុខ ចូរមើលតួយ៉ាង**ចស៊ីវ**ទុកជាតម្រាប់ចុះ" ហើយ**ចូឆ្វ**ក៏រៀបចំលើក

ទាហានឆ្លងទន្លេហងហោចេញទៅ ប្រាថ្នានឹងតាមទៅឲ្យទាន់**អ៊ួនសៀវ**។ ខណៈនោះ **អ៊ួនសៀវ**និងទាហានប្រាំបីរយប្លាយ ក៏លើករត់ទៅដល់ដែនស្រុកលីយ៉ុង។

ឯ**ជៀវងី**ដែល**អ៊ួនសៀវ**ឲ្យទៅរក្សាស្រុកលីយ៉ុងនោះ ខ្លាចក្រែង**ចូឆ្វ**នឹងលើកទ័ពមកធ្វើអន្តរាយ ទើបកេណ្ឌទាហានចេញមកតាំងបន្ទាយនៅក្រៅស្រុក លុះដឹងថា **អ៊ួនសៀវ**ចាញ់ទ័ព**ចូឆ្វ**រត់មកដល់ដែនស្រុកលីយ៉ុងដូច្នោះ ក៏ចេញទៅទទួល**អ៊ួនសៀវ** ហើយអញ្ជើញចូលទៅក្នុងបន្ទាយ **អ៊ួនសៀវ**ក៏ពណ៌នារឿងរ៉ាវឲ្យ**ជៀវងី**ស្តាប់គ្រប់ប្រការ ហើយ**អ៊ួនសៀវ** និង**ជៀវងី**ក៏នៅក្នុងបន្ទាយនោះ។

ឯទាហាន**អ៊ួនសៀវ**ដែលបែកទ័ពនឹង**ចូឆ្វ**រត់មក លុះដឹងដំណឹងថា**អ៊ួនសៀវ** ចូលទៅនៅក្នុងបន្ទាយលីយ៉ុងក៏មានសេចក្តីត្រេកអរ ទើបបបួលគ្នាចូលទៅរក**អ៊ួនសៀវ** **ៗ**បានទាហានចូលមកជាច្រើនក៏គិតនឹងលើកទ័ពទៅច្បាំងនឹង**ចូឆ្វ**ទៀត ទើបលើកទ័ពចេញចាកបន្ទាយលីយ៉ុង**សំដៅ**នឹងទៅស្រុកគីជីវ លុះទៅដល់កណ្តាលផ្លូវត្រូវពេលយប់ **អ៊ួនសៀវ**ក៏ឲ្យឈប់ទាហានកងទ័ពនៅក្បែរជើងភ្នំមួយ **អ៊ួនសៀវ**ក៏នៅក្នុងទ័ពនោះ ស្រាប់តែឮស្នូរសំឡេងមាត់មនុស្សយំខាងក្រៅ **អ៊ួនសៀវ**ក៏នឹកសង្ស័យ ទើបក្រោកចេញទៅលបស្តាប់ បានឮសំឡេងទាហានទ្រូញយំអាលោះអាល័យបងប្អូនដែលស្លាប់ រៀបរាប់ថា បើប្រសិនជាចៅហ្វាយយើងស្តាប់ពាក្យ**ទៀនហង** និយាយរំឮកហើយ កាលណាឡើយយើងនឹងបានសេចក្តីក្តៅក្រហាយយ៉ាងនេះ។

**អ៊ួនសៀវ**បានឮដូច្នោះក៏គិតថា បើយើងស្តាប់ពាក្យ**ទៀនហង**ហាមឃាត់ទាហានក៏មិនមានអន្តរាយ ដែលយើងត្រឡប់ទ័ពទៅស្រុកគីជីវវិញនោះ ក៏ឃើញថាខ្លាស**ទៀនហង**ខ្លាំងណាស់ តែត្រូវទៅឲ្យដល់សិនចុះនឹងបានគិតការសងសឹក**ចូឆ្វ**វិញ។ លុះវេលាព្រឹកឡើង **អ៊ួនសៀវ**ក៏លើកទាហានចេញទៅ ទទួលប្រទះនឹង**ហងគី** ដែលជាទីប្រឹក្សាជិះសេះនាំទាហានមកដល់ **អ៊ួនសៀវ**និយាយនឹង**ហងគី**ថា យើងទៅ

ធ្វើសឹកសង្គ្រាមគ្រានេះ ផ្ដោះការនឹង**ចូឆ្វ**ទើបវិលមកវិញ ព្រោះយើងមិនព្រមស្ដាប់ពាក្យ**ទៀនហង**ឃាត់ហាម ដែលយើងនឹងលើកទ័ពត្រឡប់ទៅស្រុកក្នុងវេ**លា**នេះ គឺយើងទៅទាំងអៀនខ្មាស**ទៀនហង**ពេកណាស់។...



# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ២៩

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

ចំណែក**អ៊ួនថាំ** ក៏លើកកងទ័ពត្រឡប់ទៅស្រុកតេងងួនគួនវិញ។ **គួតៅ** និយាយនឹង**អ៊ួនថាំ**ថា ដែល**ចូឆូ**នឹងលើកបុត្រីឲ្យជាភរិយានៃលោកនោះ ខ្ញុំបាទយល់ថា មិនមែនដូចពាក្យថាទេ។ ឥឡូវ**ចូឆូ**តាំង**លីកង, លីសៀង** ជានាយទាហាន ហើយយកទុកប្រើការផងនោះ ឃើញថា**ចូឆូ**ក្លែងឧបាយលើកតម្កើង ដើម្បីចូលចិត្តគិតធ្វើការឲ្យស្មោះត្រង់ ដែល**ចូឆូ**ប្រើឧបាយដូច្នេះ ឧបមាដូចគៀងត្រីបញ្ចូលលប បើលោកជឿចិត្ត**ចូឆូ**ហើយ ខ្ញុំបាទយល់ឃើញថា ខ្លួនលោកនិងអាណាខេត្តខាងទិសឧត្តរនោះ នឹងមានអន្តរាយផ្សេងៗដោយអំណាច**ចូឆូ**ជាប្រាកដ សូមឲ្យលោកធ្វើត្រាសម្រាប់នាយទាហានពីរដួង ឲ្យអ្នកបម្រើយកទៅឲ្យ**លីកង, លីសៀង**ហើយផ្ដាំជាសេចក្ដីស្ងាត់ថា ឲ្យ**លីកង, លីសៀង**គិតនឹកដល់លោកកុំភ្លេច កុំឲ្យប្រែចិត្តទៅចូលខាង**ចូឆូ** បើ**ចូឆូ**លើកកងទ័ពទៅវាយ**អ៊ួនសុង**ហើយ ឲ្យ**លីកង, លីសៀង**ធ្វើកលសឹក បើមានការវេលាណាឲ្យៗដំណឹងមកយើង ៗនឹងលើកចូលទៅធ្វើប្រទូសរ៉ាយ**ចូឆូ**វេលានោះ។

**អ៊ួនថាំ**យល់ឃើញត្រូវ ក៏ឲ្យធ្វើត្រាពីរដួង ហើយប្រគល់ឲ្យអ្នកបម្រើទៅឲ្យជាការស្ងាត់ដល់**លីកង, លីសៀង**ខ្លាចមិនរួចខុស ទើបធ្វើជាយកត្រានោះទៅឲ្យ**ចូឆូ**មើលថា **អ៊ួនថាំ**ផ្ញើមកឲ្យ តែខសេចក្ដីឯទៀតនោះ មិនបាននិយាយប្រាប់ឲ្យច្បាស់ៗ។ **ចូឆូ**ឃើញត្រាដូច្នោះក៏ថា **អ៊ួនថាំ**ធ្វើត្រាមកឲ្យជាសម្រាប់ងារនាយទាហានដល់អ្នកទាំងពីរនេះ ព្រោះ**អ៊ួនថាំ**គិតនឹងប្រទូសរ៉ាយយើង ប្រាថ្នានឹងឲ្យអ្នកទាំងពីរធ្វើជា

កលសឹកខាងក្នុង អ្នកចូរទទួលយកត្រាទាំងពីរនេះទុកចុះ សេចក្ដីដែល**អ៊្លូនថាំ**ផ្ដាំមកល្អអាក្រក់ប្រការម្ដេច អ្នកត្រូវតែផ្ដាំទៅវិញថា បានទទួលធ្វើតាមទាំងអស់ បើយើងលើកកងទ័ពទៅកម្ចាត់**អ៊្លូនសុង**ចេញហើយ យើងនឹងលើកទៅសម្លាប់**អ៊្លូនថាំ**ទៀត។ **លីកង, លីសៀង**ឃើញសេចក្ដីគិតរបស់**ចូឆ្វូ**កន្លងដឹងដូច្នោះ ក៏ឲ្យនឹកខ្លាចក្រែង**ចូឆ្វូ**ដឹងដល់ មិនបាននិយាយប្រាប់អ្នកបម្រើ**អ៊្លូនថាំ**ប្រការម្ដេចសោះ។

ឯ**អ៊្លូនសុង**ដឹងថា **ចូឆ្វូ**ឲ្យជីកព្រែកដូច្នោះ ក៏ប្រឹក្សានឹង**សឹមផោយ**ថា ដែល**ចូឆ្វូ**គិតធ្វើការដូច្នេះ ប្រាថ្នានឹងបញ្ជូនស្បៀងអាហារទៅមកដោយស្រួល អ្នកនឹងគិតការពារដូចម្ដេច? **សឹមផោយ**ឆ្លើយថា ឲ្យលោកមានសំបុត្រទៅដល់**អិនកែ**ចៅហ្វាយស្រុកប៉ូអ័នដែលចំណុះស្រុកយើង ឲ្យលើកកងទ័ពមកតាំងនៅដែនស្រុកម៉ះសៀ ហើយឲ្យ**បងគី** ដែលទៅនាំស្បៀងពីស្រុកសៀងតុងនោះ ឲ្យលើកទាហានមកតាំងនៅដែនស្រុកហ័នត័ន ទើប**ចូឆ្វូ**នឹងមិនអាចលើកចូលមកវាយយកស្រុកគីជីវបាន ព្រោះខ្លាចទ័ពទាំងពីរអន្លើនេះនឹងក្រលុកមកពីក្រោយ ឯលោកត្រូវលើកកងទ័ពទៅវាយស្រុកតេងង្វនគួន បើបានហើយទើបលើកងទ័ពមកបញ្ចូលគ្នានឹងកងទ័ពទាំងពីរស្រុកនោះ លើកទៅចោមព័ទ្ធវាយកងទ័ព**ចូឆ្វូ** ក៏នឹងបែកបានដោយងាយ។ **អ៊្លូនសុង**បានស្ដាប់ហើយយល់ឃើញថាត្រូវ ក៏ធ្វើសំបុត្រទៅដល់ខេត្តទាំងពីរឲ្យលើកកងទ័ពទៅតាំង តាមពាក្យ**សឹមផោយ**និយាយ ហើយឲ្យ**តាន់លឹម** និង**សឹមផោយ**នៅរក្សាស្រុក **អ៊្លូនសុង**ប្រមូលទាហានបានព្រមស្រេចហើយ ក៏ប្រើ**ម៉ាអៀន** និង**ទៀវគី**ជានាយទ័ពមុខ លើកទៅវាយយកស្រុកតេងង្វនគួន។

ខណៈនោះ ទទួល**ខៅហ៊ីវ**មកពីក្រុងហ៊្វូតោបានដឹងដំណឹងថា **អ៊្លូនសុង**លើកទ័ពទៅច្បាំងនឹង**អ៊្លូនថាំ**ឯស្រុកតេងង្វនគួន **ខៅហ៊ីវ**ក៏និយាយនឹង**ចូឆ្វូ**ថា ហេតុម្ដេចបានជាលោកមកសំងំនៅស្ងៀមដូច្នេះ នឹងចាំឲ្យរន្ទះបាញ់**អ៊្លូនថាំ**និង**អ៊្លូនសុង**ស្លាប់ឯងៗ

ទើបទៅយកស្រុកគីជីវឬ? **ចូឆ្វូ**ឮហើយក៏អស់សំណើច ហើយនិយាយថាអ្នកកុំវិតក្កឡើយ យើងគិតការទុកជាស្រេចអស់ហើយ ទើបប្រើ**ចោហាង**លើកទាហានទៅវាយស្រុកគីជីវ ឯ**ចូឆ្វូ**នោះក៏លើកងទ័ពទៅវាយ**អិនកៃ** ដែលតាំងទ័ពនៅដែនស្រុកម៉ះសៀ។

ឯ**អិនកៃ**ឃើញ**ចូឆ្វូ**លើកទ័ពមក ក៏ឡើងសេះលើកទាហានចេញទៅឈរនៅមុខបន្ទាយ។ **ចូឆ្វូ**ក៏ប្រើ**ខៅធូ**ចូលច្បាំងនឹង**អិនកៃ**បានប្រាំភ្លេង **ខៅធូ**យកទួនចាក់**អិនកៃ**ធ្លាក់ពីលើសេះស្លាប់។ ទាហាន**អិនកៃ**ក៏របួសពិការស្លាប់ជាច្រើន ណាដែលនៅរស់ក៏រត់រួចទៅខាងទ័ព**ចូឆ្វូ**ខ្លះ។ **ចូឆ្វូ**ឃើញចំណាប់ ក៏លើកទ័ពទៅវាយ**បងគី**ដែលតាំងបន្ទាយនៅដែនស្រុកហ័នត័នទៀត។ **បងគី**ឃើញ**ចូឆ្វូ**លើកទ័ពមក ក៏ឡើងសេះនាំទាហានចេញទៅឈរនៅមុខបន្ទាយ **តៀវលៀវ**សូមអាសាបរសេះរាំទួនចេញទៅច្បាំងនឹង**បងគី**បានបីភ្លេង **បងគី**ទ្រាំនឹងកម្លាំង**តៀវលៀវ**មិនបាន ក៏បរសេះថយរត់ **តៀវលៀវ**ចូលកាប់ទម្លាយបន្ទាយសម្លាប់ទាហាន**បងគី**ស្លាប់អស់ជាច្រើន ហើយបរសេះដេញតាមទៅ យកធ្នូបាញ់ត្រូវ**បងគី**ធ្លាក់ពីលើសេះស្លាប់។ ខណៈនោះទាហាន**ចូឆ្វូ**ក៏ចាប់ទាហាន**បងគី**បានទុកជាច្រើន ហើយ**ចូឆ្វូ**ក៏លើកទ័ពស្រូតទៅបញ្ចូលគ្នានឹងកងទ័ព**ចោហាង** ឲ្យតាំងបន្ទាយព័ទ្ធឡោមស្រុកទុកជុំវិញ ហើយក៏ឲ្យទាហានជញ្ជូនយកអាចម៍ដីមកគរជាពំនូកខ្ពស់ឡើងស្មើនឹងកំពែងស្រុក ហើយឲ្យជីកឧម្មង្គប៉ងនឹងឲ្យធ្លុះចូលទៅក្នុងស្រុក ឯ**សឹមផោយ** និង**តាន់លឹម**ឃើញ**ចូឆ្វូ**លើកកងទ័ពមកឡោមព័ទ្ធជុំវិញស្រុក ប្រឹងខំជាមាំមួនដូច្នោះ ក៏ត្រួតត្រាមន្ទីរសើនបន្ទាយឲ្យការពាររក្សាជាមាំមួន។

ខណៈនោះ **បាំងឡេ**ជានាយទាហានរក្សាគយទិសខាងកើត ផឹកស្រាស្រវឹងដេកលក់ទៅ មិនបានបង្គាប់បញ្ជាត្រួតទាហានឲ្យយាមល្បាតរក្សាសើនជាមាំមួនសោះ **សឹមផោយ**ទៅត្រួតមើលឃើញដូច្នោះក៏ខឹងណាស់ ឲ្យចាប់យកខ្លួន**បាំងឡេ**ទៅ

វាយជាច្រើន **បាំងឡេ**បានសេចក្តីក្តៅក្រហាយចិត្តខ្លាំងណាស់ លុះពេលយប់ក៏លបរត់ចេញទៅចូលខាងទ័ព**ចូឆូ**ហើយយកសេចក្តីដែលមានចិត្តឈឺក្តៅនោះ ទៅប្រាប់**ចូឆូ**ស្តាប់គ្រប់ប្រការ។

**ចូឆូ**ដឹងដូច្នោះក៏ទទួលអំណរសាទរ ទើបនិយាយថា ខ្លួនអ្នកឯងនៅក្នុងស្រុកនោះបានឃើញការធ្ងន់ស្រាលម្តេចៗទាំងអស់ នឹងឲ្យយើងធ្វើប្រការម្តេច ទើបនឹងបានស្រុកនោះដោយឆាប់? **បាំងឡេ**ឆ្លើយថា ខាងកំពែងបន្ទាយទិសខាងកើតនោះ ខ្ញុំបាទឃើញដីនោះរឹងមាំមួនណាស់ សូមលោកជីកឧម្មង្គចូលទៅ ហើយទម្លុះឡើងចំកណ្តាលស្រុក រួចឲ្យទាហានទាំងពួងស្ទុះឡើងធ្វើការ ក៏នឹងបានស្រុកដោយងាយ។ **ចូឆូ**យល់ឃើញត្រូវ ក៏កេណ្ឌទាហានប្រាំរយឲ្យ**បាំងឡេ**នាំទៅជីកឧម្មង្គទិសខាងកើត តែក្នុងពេលយប់ឲ្យធ្លុះរហូតទៅបាន។ លុះពេលយប់ **បាំងឡេ**ក៏លើកទាហានឆ្លងទ្វារស្រុក ចូលទៅជីកឧម្មង្គជាជ្រួលច្របល់។

**សឹមធោយ**ដឹងថា **បាំងឡេ**រត់ទៅចូលខាង**ចូឆូ** ក៏ឡើងត្រួតត្រាការបង្គាប់បញ្ជាទាហានឲ្យរក្សានាទីទិសសើនបន្ទាយ ដាក់វេនយាមល្បាតកុំឲ្យធ្វេសប្រហែស។ ក្នុងពេលយប់នោះ **សឹមធោយ**ក៏ទៅលើសើនទិសខាងកើតនោះ ពួកទាហានដែលយាមល្បាតបានដឹងការ ក៏ទៅជម្រាប**សឹមធោយ**ថា បន្ទាយត្រង់ទ្វារដែលចេញទៅនោះឃើញងងឹតប្លែកណាស់ ប្រហែលជាសត្រូវនឹងគិតធ្វើការអ្វីក៏មិនដឹង។ **សឹមធោយ**បានឮក៏ក្រឡេកមើលទៅ ឃើញដូចពាក្យទាហាននិយាយ ហើយថា ដែលបន្ទាយនៅទីនោះងងឹតដូច្នេះ ប្រហែលជា**អាបាំងឡេ**វាលើកទាហានអាសា**ចូឆូ**ជីកឧម្មង្គ នឹងឲ្យធ្លុះរហូតមកក្នុងស្រុកទេដឹង? **សឹមធោយ**ក៏ចាត់ប្រើទាហានដែលមានកម្លាំងឲ្យជញ្ជូនយកដុំថ្មទៅគរទុកត្រង់មាត់ទ្វារជាច្រើន ហើយឲ្យបើកទ្វារចំហ បង្ខំទាហានឲ្យជញ្ជូនដុំថ្មទៅទម្លាក់បិទនៅមាត់រណ្តៅឧម្មង្គឲ្យពេញណែន កុំឲ្យខ្យល់

ចូលបាន លុះជញ្ជូនរួចក៏ឲ្យទាហានវិលចូលមកក្នុងស្រុកវិញ។ ទាហាន**ចូឆ្វូ**ដែល**បាំងឡៀ**នាំទៅជីកឧម្មង្គដីនោះ ឡើងមកវិញមិនរួច ខ្យល់ក៏ចេញចូលមិនបាន ក៏ថប់ដង្ហើមដាច់ខ្យល់ស្លាប់ទាំងអស់គ្នានៅក្នុងដីនោះ។ លុះព្រឹកឡើង ទាហានទៅជម្រាប**ចូឆ្វូ**ថា មាត់រណ្ដៅឧម្មង្គនោះមានថ្មបិទជិតទាំងអស់។ **ចូឆ្វូ**ឮដូច្នោះក៏គិតថាការដែលជីកឧម្មង្គនោះ មានគេដឹងដល់ បានជាឲ្យមនុស្សជញ្ជូនដុំថ្មទៅបិទសន្ទប់មាត់រណ្ដៅ ទាហានយើងក៏ស្លាប់ទាំងអស់។ តាំងពីនោះមក **ចូឆ្វូ**មិនបានគិតជីកឧម្មង្គទៀតឡើយ ហើយលើកបន្ទាយដែលព័ទ្ធស្រុកនោះចេញទៅទាំងអស់ ថយទៅតាំងទ័ពនៅតំបន់អ៊្វីនស៊ុយ ប្រាថ្នានឹងចាំទទួលច្បាំងនឹងកងទ័ព**អ៊្វីនសុង**។

ឯ**អ៊្វីនសុង**ដែលលើកទ័ពទៅឡោមព័ទ្ធស្រុកតេងង្វនគួននោះ មានបម្រើសេះម្នាក់ទៅប្រាប់ដំណឹងថា **ចូឆ្វូ**លើកទ័ពមកសម្លាប់**អិនកៃ** និង**បងគី**ស្លាប់អស់ហើយ ឥឡូវលើកទៅឡោមព័ទ្ធស្រុកគីជីវទៀត **អ៊្វីនសុង**ដឹងដូច្នោះ ក៏ឲ្យលើកទ័ពត្រឡប់ទៅវិញ។ **ម៉ាអៀន**តបថា ដែលលោកនឹងលើកកងទ័ពត្រឡប់ទៅតាមផ្លូវហ្លួងនោះ ខ្ញុំបាទយល់ឃើញថា **ចូឆ្វូ**នឹងឲ្យទាហានមកចាំស្កាត់កណ្ដាលផ្លូវ សូមឲ្យលោកលើកកងទ័ពកាត់ទៅផ្លូវភ្នំខាងលិចវិញ បើទៅដល់ទន្លេប៉ែកតុកហើយនឹងបានវាយយកស្បៀង ដែលជញ្ជូនទៅឲ្យ**ចូឆ្វូ**នោះផង កងទ័ព**ចូឆ្វូ**ក៏នឹងដាច់ស្បៀងអាហារសោះ ទាហានទាំងនោះក៏នឹងអត់ឃ្លាន មុខជា**ចូឆ្វូ**នឹងលើកទ័ពត្រឡប់ទៅវិញ ទោះបីនឹងតាំងនៅ ទាហានទាំងអម្បាលនោះក៏អស់ស្បៀងអាហារហើយ យើងក៏នឹងបានធ្វើការចម្បាំងដោយមាំមួន។ **អ៊្វីនសុង**យល់ឃើញត្រូវផង ក៏ប្រើឲ្យ**ម៉ាអៀន** និង**គៀវគី**លើកទាហានការពារទៅជាក្រោយ ហើយ**អ៊្វីនសុង**ក៏លើកកងទ័ពកាត់តម្រង់ ទៅផ្លូវភ្នំទិសខាងលិច។

បម្រើសេះ**ចូឆ្វ**ដឹងដូច្នោះ ក៏ស្រូតនាំសេចក្ដីនោះទៅប្រាប់**ចូឆ្វ**គ្រប់ប្រការ **ចូឆ្វ**ឮហើយក៏និយាយនឹងទីប្រឹក្សាទាំងពួងថា “យើងខ្លាចក្រែងតែ**អ៊ួនសុង**នឹងលើកទ័ពមកតាមផ្លូវហ្លួង ព្រោះកងទ័ពយើងស្តើងស្លួចបែកខ្ញែកអស់ទៅហើយ ឥឡូវ**អ៊ួនសុង**លើកមកតាមផ្លូវទិសឯលិចវិញ យើងនឹងរិះគិតចាប់យកខ្លួន**អ៊ួនសុង**ឲ្យបាន ព្រោះហេតុថា **អ៊ួនសុង**លើកទ័ពមកដល់នឹងដុតភ្លើងឲ្យឆេះហើយ ឲ្យទាហានដែលនៅក្នុងស្រុកនោះឃើញជាសម្គាល់ ហើយនឹងបានលើកទ័ពវាយខ្ទប់ទ័ពយើងចេញមក យើងចាំកេណ្ឌទាហានជាពីរកងឲ្យលើកទៅចាំច្បាំងតនឹង**អ៊ួនសុង**មួយកង មួយកងទៀតនោះ ឲ្យលើកទៅចាំព័ទ្ធវាយទាហានដែលលើកចេញមកពីក្នុងស្រុក ហើយ**ចូឆ្វ**ក៏ប្រមូលពលទាហានបម្រុងទុកតាមពាក្យដែលនិយាយ។

**អ៊ួនសុង**លើកទាហានជាកងទ័ពទៅដល់ទន្លេប៉េកតុក មើលទៅមិនឃើញទូកស្បៀង**ចូឆ្វ**សោះ **អ៊ួនសុង**ក៏លើកទ័ពទៅតាំងនៅតំបន់យ៉ុងប៉េងវិញ ផ្លូវជិតស្រុកគីជីវប្រហែលពីររយសិន (៨ គ.ម) ហើយបង្គាប់ទាហានឲ្យទៅជញ្ជូនយកចំបើង និងស្មៅមកគរទុកជាច្រើន ប្រាថ្នានឹងដុតភ្លើងឲ្យឆេះឡើង ដើម្បីឲ្យ**សឹមធោយ**ឃើញជាសម្គាល់ នឹងបានលើកទាហានជួយខ្ទប់កងទ័ព**ចូឆ្វ**ចេញមក ទើបឲ្យ**លីហ៊ូ**តែងខ្លួនបន្លំជាទាហាន**ចូឆ្វ**ហើយបង្គាប់ថា ឲ្យចូលទៅប្រាប់**សឹមធោយ**ថា យើងលើកកងទ័ពមកដល់ទីនេះហើយ បើឃើញពន្លឺភ្លើងដែលយើងដុតឡើងកាលណា ឲ្យលើកទាហានវាយខ្ទប់ចេញមកទទួលយើងចូលទៅក្នុងស្រុក។ **លីហ៊ូ**ក៏បន្លំធ្វើជាទាហាន**ចូឆ្វ**ចូលទៅក្នុងស្រុកបាន ហើយប្រាប់**សឹមធោយ**តាមពាក្យដែល**អ៊ួនសុង**បង្គាប់នោះ **សឹមធោយ**បានស្ដាប់ដូច្នោះ ក៏ចាត់ចែងទាហានត្រៀមទុកព្រម។ **លីហ៊ូ**ដឹងថា ស្រូវអង្ករស្បៀងអាហារក្នុងស្រុកនោះស្លួចស្តើងហើយ ក៏និយាយនឹង**សឹមធោយ**ថា ដែល**អ៊ួនសុង**នឹងលើកទ័ពចូលមកតាំងនៅក្នុងស្រុកគីជីវនេះ ខ្ញុំបាទយល់ឃើញថា នឹងខ្វះ

ខាតដោយស្បៀងអាហារ ខ្ញុំបាទនឹងសុំរិះគិតឲ្យអ្នកស្រុករត់ចេញទៅចុះចូលនឹង**ចូឆូ** មុខជា**ចូឆូ**ភាន់ស្មារតីធ្វេសប្រហែសទៅ លោកត្រូវលើកទាហានតាមចេញទៅចោមវាយកងទ័ព**ចូឆូ** ៗក៏គង់នឹងបែកទៅដោយងាយមិនខាន។ **សឹមផោយ**យល់ឃើញត្រូវផង ក៏ឲ្យទាហានយកទង់សមកសរសេរជាអក្សរថា “ឥឡូវ**អ៊ួនសុង**មិនបាននៅក្នុងស្រុកទេ អ្នកស្រុកទាំងអស់ព្រមចិត្តគ្នានឹងសុំទៅចំណុះចុះចូលខាងមហាឧបរាជវិញ” ហើយយកទង់នោះទៅដោតលើសើនបន្ទាយ។ **ចូឆូ**ឃើញអក្សរក្នុងទង់ដូច្នោះ ក៏និយាយក្នុងទីប្រឹក្សាទាំងពួងថា “ទង់សសរសេរអក្សរដោតលើសើននោះ ព្រោះ**សឹមផោយ**ឃើញថា ស្បៀងអាហារក្នុងស្រុកស្តួចស្តើងណាស់ហើយ ទើបរិះគិតធ្វើឧបាយដូច្នេះ ឲ្យអ្នកស្រុកចេញមកចំណុះចុះចូលយើង ឲ្យយើងទុកចិត្ត ឯខ្លួន**សឹមផោយ**នោះនឹងលើកទាហានចេញមកព័ទ្ធវាយកងទ័ពយើង” **ចូឆូ**ក៏ឲ្យ**តៀវលៀវ**និង**ស៊ីហ្វុង**លើកទាហានម្នាក់បីពាន់ ទៅពួនបង្កប់នៅជើងភ្នំក្បែរកំពែងស្រុក បើឃើញ**សឹមផោយ**លើកចេញមក ក៏ឲ្យនាំគ្នាព្រួតវាយខ្ទប់ចាប់យកខ្លួន**សឹមផោយ**ឲ្យបាន ហើយ**ចូឆូ**ក៏ពាក់ក្រោះជិះសេះសប្តធន់ នាំទាហានទៅជិតជើងកំពែងស្រុក ប្រាថ្នាថាច្បាំងនឹង**សឹមផោយ** ឯទ្វារស្រុកនោះក៏បិទជិត ទទួលក្រឡេកមើលទៅឃើញអ្នកស្រុកដែលចាស់ជរាកាន់ឈើច្រត់ និងធូបទៀនផ្កាភ្ញីចេញមកជាច្រើន ហើយឃើញ**សឹមផោយ**លើកទាហានតាមមកទៀត **ចូឆូ**ក៏ឲ្យបោកទង់ក្រហមបីដង។

ឯ**តៀវលៀវ** និង**ស៊ីហ្វុង**ឃើញដូច្នោះ ក៏លើកទាហានដែលបង្កប់នោះចេញមកវាយខ្ទប់ទាំងសងខាង កាប់សម្លាប់ទាហាន**សឹមផោយ** និងពួកអ្នកស្រុកស្លាប់ជាច្រើនមីរដេរដាស។ **សឹមផោយ**យល់ឃើញថានឹងតស៊ូពុំបាន ក៏នាំទាហានថយចូលស្រុកវិញ។ **ចូឆូ**ឃើញទ្វារស្រុកបើកចំហ ក៏បរសេះចូលទៅជិតជើងកំពែងស្រុក ប្រាថ្នានឹងដេញទាហានទាំងនោះឲ្យច្បាំងទម្លាយចូលទៅក្នុងស្រុកឲ្យបាន នោះ

ទាហានដែលនៅលើសេះក៏តដៃគ្នាជាពន្លឹក ហើយបាញ់ធ្នូសំដៅ ព្រួញធ្លាក់ទៅត្រូវមួកចូរឆ្វធ្ពុះរហូតទៅ។



# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣០

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពីទាហាន**ចូឆូ**វាយបន្ទាយអ៊្វីនសុងបែករត់ទៅ **ចូឆូ**យកបានស្រុកគីជីវ សម្លាប់**សឹមផោយ** ហើយលើកតាម**អ៊្វីនថាំ**ទៅស្រុកឡាំភី រហូតដល់**ចូឆូ**ប្រឹក្សានឹងលើកទៅវាយ**ឡៅពៀវ**។)*

**បណ្ដា**ទាហានទាំងពួងក៏ភ័យស្លុតចិត្តគិតថា **ចូឆូ**ត្រូវព្រួញក៏នាំគ្នាចូលទៅចោមរោម ហើយនាំ**ចូឆូ**ចូលទៅក្នុងបន្ទាយ **ចូឆូ**ក៏ចាត់ចែងទាហានលើកទៅវាយបន្ទាយ**អ៊្វីនសុង** ៗដឹងហើយក៏លើកទាហានចេញមកច្បាំងនឹងកងទ័ព**ចូឆូ**ជាពន្លឹក។ **អ៊្វីនសុង**ខូចខាតទាហានច្រើនណាស់ ឃើញថានឹងទ្រាំនៅមិនបាន ក៏នាំទាហានដែលសល់នៅទាំងប៉ុន្មាននោះលើករត់ទៅតាំងបន្ទាយនៅភ្នំទិសខាងលិច ហើយឲ្យបម្រើសេះស្រួតទៅហៅ**ម៉ាអៀន**និង**ទៀវយី**មក។

ខណៈនោះ មានបម្រើសេះម្នាក់មកប្រាប់**ចូឆូ**ថា **អ៊្វីនសុង**លើកកងទ័ពចេញពីស្រុកតេងងួនក្លួនទៅហើយ។ **ចូឆូ**ប្រើ**លីកង, លីសៀង** ទៅបញ្ចុះបញ្ចូល**ម៉ាអៀន**និង**ទៀវយី**បានមក ហើយឲ្យធ្វើជានាយទាហាន។ កាលថ្ងៃដែល**សឹមផោយ**ចេញមកនោះ លុះដល់ពេលយប់ស្ងាត់ **ចូឆូ**ក៏ឲ្យ**លីកង, លីសៀង, ម៉ាអៀន, ទៀវយី** លើកទាហានទៅប្លន់បន្ទាយ**អ៊្វីនសុង** ៗមិនទាន់ដឹងខ្លួន ក៏ខូចខាតទាហានជាច្រើន ទើបថយទៅតាំងនៅភ្នំទិសខាងលិច ចម្ងាយពីស្រុកប្រហែលបួនរយសិន (១៦ គ.ម) **អ៊្វីនសុង**ឃើញទាហានរបស់ខ្លួនស្លូតស្លើងបែកខ្ញែកគ្នាដូច្នោះ ក៏ឲ្យ**សឹមអេង**ទៅជម្រាប**ចូឆូ**ថា យើងនឹងសូមមកចំណុះចុះចូល ធ្វើការរាជការជាមួយនឹងមហា

ឧបរាជផង។ **សឹមអេង**ក៏ចូលទៅរក**ចូឆ្វ** ហើយអធិប្បាយសេចក្ដីតាមពាក្យដែល**អ៊ួនសុង**បង្គាប់។

**ចូឆ្វ**បានស្ដាប់ដូច្នោះហើយក៏គិតថា “**អ៊ួនសុង** ដែលមកចំណុះចុះចូលយើងនេះព្រោះអស់តម្រិះប្រាជ្ញា បើយើងនឹងរក្សាទុកក៏មិនបាន តែត្រូវទទួលតាមពាក្យចុះតទៅមុខសឹមគិតសម្លាប់ចេញឲ្យបាន” **ចូឆ្វ**គិតហើយក៏ឆ្លើយទៅ**សឹមអេង**ថា ដែល**អ៊ួនសុង**ចូលមកចំណុះយើង ព្រមធ្វើរាជការផងក៏តាមចិត្តចុះ។ **សឹមអេង**ក៏លា**ចូឆ្វ**ត្រឡប់ទៅប្រាប់**អ៊ួនសុង**វិញថា **ចូឆ្វ**ព្រមទទួលហើយ។

លុះពេលព្រលប់ **ចូឆ្វ**ក៏ប្រើ**តៀវលៀវ** និង**ស៊ីហ្វុង**ឲ្យលើកទាហានទៅវាយបន្ទាយ**អ៊ួនសុង**។ **តៀវលៀវ** និង**ស៊ីហ្វុង**លើកទាហានទៅជិតបន្ទាយប្រហែលជាយាមបីប្លាយ ក៏លើកចូលទៅវាយទម្លាយបន្ទាយ**អ៊ួនសុង**។ ខណៈនោះ**អ៊ួនសុង**មិនដឹងខ្លួន ក៏ខូចខាតទាហានជាច្រើន ចោលត្រាសម្រាប់ងារនិងរបស់ទ្រព្យទាំងអស់ នាំទាហានដែលសល់នៅទាំងប៉ុន្មាននោះរត់ឆ្លងទៅភ្នំ **តៀវលៀវ** និង**ស៊ីហ្វុង**ក៏រើសយកត្រា និងរបស់ទ្រព្យទៅឲ្យ**ចូឆ្វ**ហើយពណ៌នារឿងរ៉ាវឲ្យ**ចូឆ្វ**ស្ដាប់គ្រប់ប្រការ។

**ចូឆ្វ**ដឹងច្បាស់ដូច្នោះ ក៏មានអំណរសាទរណាស់ ទើបលើកកងទ័ពទៅព័ទ្ធស្រុកគីជីវ។ **ខៅហ៊ីវ**និយាយនឹង**ចូឆ្វ**ថា ហេតុម្ដេចបានជាលោកមកធ្វើសង្គ្រាម បង្អែបង្អង់នៅដូច្នេះមិនគួរសោះ សូមឲ្យលោកលើកទាហានជីកព្រែកបង្ហូតទឹក ឲ្យចូលមកក្នុងគូកំពែងស្រុក ទឹកក៏គង់ហូរមកតាមព្រែកចូលទៅលិចស្រុក មនុស្សទាំងឡាយក៏នឹងលង់លិចស្លាប់ពុំខាន លោកក៏នឹងបានស្រុកគីជីវដោយងាយ។ **ចូឆ្វ**យល់ឃើញថាត្រូវ ក៏កេណ្ឌទាហានឲ្យធ្វើទំនប់ទប់ទន្លេជៀងហោទុក ហើយឲ្យជីកព្រែកមួយពីមាត់ទន្លេជៀងហោ កាត់តម្រង់ទៅស្រុកគីជីវ ចម្ងាយផ្លូវប្រហែលជាបួនរយសិន (១៦ គ.ម)។

ឯ**សឹមផោយ**នៅលើសើនបន្ទាយ ឃើញ**ចូឆ្វ**ត្រឡប់មកធ្វើការជីកព្រែកដូច្នោះ ក៏សើចហើយនិយាយនឹងទាហានទាំងពួងថា គំនិត**ចូឆ្វ**គិតធ្វើការដូច្នេះ យើងមិនខ្លាចសោះឡើយ យើងខ្លាចតែជីកព្រែកនោះឲ្យជ្រៅ ទើបបង្ហូតទឹកចូលមកឲ្យលិចស្រុកយើងបាន។ **សឹមផោយ**ឃើញថា**ចូឆ្វ**នឹងធ្វើការនោះមិនកើតរហូត ទើបមិនបានជាគិតការពារប្រការដូចម្ដេចសោះ។

ឯ**ចូឆ្វ**មិនបានឃើញពួកអ្នកស្រុកគីជីវធ្វើការការពារអ្វីសោះ ក៏ឃើញបានចំណាប់ដូចគំនិតគិត លុះវេលាយប់ក៏ប្រមូលពលទាហានឲ្យទៅចូលគ្នាជីកព្រែកទំហំបួនព្យាមជម្រៅបួនព្យាម (៨ម) ឲ្យហើយស្រេចតែក្នុងពេលយប់នោះ។ ទាហានទាំងអស់ក៏ជួយគ្នាចម្រុះធ្វើការជីកព្រែក ទំហំនិងជម្រៅបួនព្យាម (៨ម) ហើយស្រេច រួចក៏បើកទំនប់ក្នុងពេលយប់នោះ ទឹកក៏បាក់ហូរចុះទៅក្នុងគូពេញប្រៀបហើយហូរចូលទៅតាមព្រែកជីកក្នុងស្រុកនោះជាច្រើនអន្លើគ្រប់តំបន់ ឡើងលិចពេញស្រុកជម្រៅទឹកប្រហែលប្រាំពីរទៅប្រាំបីហត្ថ បណ្ដាជននិងពួកទាហានទាំងពួងក៏ទញ់ខ្វះខាតដោយស្បៀងអាហារ ស្លាប់ដោយលង់ទឹកខ្លះ ៗក៏រត់ឡើងលើសើនបន្ទាយ។

ឯ**ស៊ីនភី**ក៏រើសយកបានត្រាសម្រាប់ងារនិងម្កុដ និងគ្រឿងប្រដាប់តែងខ្លួនរបស់**អ៊្លីនសុង** ដែលបានទុកចោលក្នុងបន្ទាយនោះ **ស៊ីនភី**ក៏រើសយកពាក់ទៅលើចុងឈើ លើកឡើងគ្រវីស្រែកប្រាប់បណ្ដាជនទាំងពួងថា ឥឡូវនេះមហាឧបរាជសម្លាប់**អ៊្លីនសុង**ចេញហើយ អ្នករាល់គ្នានឹងនៅស្ងៀមធ្វើអ្វីឲ្យដល់នូវសេចក្ដីស្លាប់ ចូរនាំគ្នាត្រឡប់មកចំណុះចុះចូលនៅនឹងមហាឧបរាជចុះ ទើបនឹងរស់រួចជីវិតតទៅ។ **សឹមផោយ**បានឮ**ស៊ីនភី**ស្រែកប្រកាសដូច្នោះ ក៏ខឹងណាស់បង្គាប់ឲ្យចាប់យកភរិយាបុត្រ និងបក្សពួកបងប្អូន**ស៊ីនភី**ប្រហែលប៉ែតសិបនាក់ទៅសម្លាប់ចោលទាំងអស់

ហើយយកខ្មោចនោះបោះចេញទៅឲ្យ**ស៊ីនភី**ឃើញ។ **ស៊ីនភី**ឃើញដូច្នោះក៏រន្ធត់ស្លុតចិត្ត ស្រែកទ្រហោរយំទួញ អាល័យភរិយាបុត្រនិងបងប្អូនញាតិសន្តានពន់ប្រមាណ។

ខណៈនោះ**សឹមអេង**ត្រូវជាក្មួយ**សឹមផោយ**នោះ ជាភឿនសម្លាញ់នឹង**ស៊ីនភី** កាលបើ**សឹមអេង** ឃើញ**សឹមផោយ**ឲ្យសម្លាប់ភរិយាបុត្រញាតិសាច់សាលោហិត**ស៊ីនភី**អស់ហើយ ក៏នឹកក្តៅក្រហាយខ្លាំងណាស់ ព្រោះ**សឹមអេង**ស្រឡាញ់**ស៊ីនភី**ជាច្រើន ទើបសរសេរសំបុត្រជាសេចក្តីថា ខ្ញុំបាទ**សឹមអេង**ជាក្មួយ**សឹមផោយ** ជាភឿនសំឡាញ់នឹង**ស៊ីនភី** មានសេចក្តីក្តៅក្រហាយនឹង**សឹមផោយ**ខ្លាំងណាស់ ព្រោះ**សឹមផោយ**ជាមាខ្ញុំបាទសម្លាប់ភរិយាបុត្រ និងញាតិសាច់សាលោហិត**ស៊ីនភី**អស់ ពេលយប់នេះ ខ្ញុំសូមឲ្យមហាឧបរាជលើកទ័ពចូលមកចុះ ខ្ញុំបាទនឹងបើកទ្វារស្រុកចាំទទួល ហើយយកសំបុត្រនោះចងនឹងព្រួញបាញ់ចេញទៅ។

ឯ**ស៊ីនភី**កាលបើរើសបានសំបុត្រ ក៏យកមកមើលឃើញសេចក្តីច្បាស់ហើយ ក៏មានអំណរណាស់ ទើបនាំសំបុត្រនោះទៅនឲ្យ**ចូឆូ** ៗដឹងសេចក្តីច្បាស់ហើយ ក៏យកទៅប្រកាសប្រាប់ដល់ទាហានទាំងពួងថា យើងនឹងលើកទ័ពចូលស្រុកក្នុងយាមបីប្លាយយប់នេះ កុំឲ្យនរណាធ្វើទុក្ខបុកម្នេញពួកសែ**អ៊ួន** និងពួកដែលសូមចំណុះចុះចូលជាដាច់ខាត បើនរណាមួយល្មើសមិនស្តាប់នឹងឲ្យសម្លាប់ជីវិតបង់។

លុះពេលជិតភ្លឺ **សឹមអេង**ក៏បើកទ្វារស្រុកទុកតាមសញ្ញា **ស៊ីនភី**ឃើញហើយ ក៏លើកទាហានចូលទៅក្នុងស្រុកគីជីវ **សឹមផោយ**នៅរក្សាគយល្បាតសើនបន្ទាយនៅខាងទិសឯកើត ឃើញទាហានកងទ័ព**ចូឆូ**ចូលមកក្នុងស្រុកពីទិសខាងត្បូង ក៏លើកទាហានប្រហែលសាមសិបនាក់មកប្រុងនឹងតដៃនឹងទាហាន**ចូឆូ** ទទួលប្រទះនឹង**ស៊ីហ្វុង**។ **សឹមផោយ**ក៏បរសេះចូលច្បាំងនឹង**ស៊ីហ្វុង**ជាប់គ្នា **ស៊ីហ្វុង**ព្រួតចាប់ខ្លួន**សឹមផោយ**បាន ក៏ចងនាំទៅឲ្យ**ចូឆូ**។ **ស៊ីនភី**ដឹងដូច្នោះហើយ ក៏បរសេះស្រូតតាមទៅ

ដោយអំណាចចិត្តដែលនឹកក្តៅពន់ប្រមាណ ក៏យកស៊ែសេះវាយ**សឹមផោយ** ហើយខាំធ្មេញជេរថាអាសត្រូវ អាឯងស្លាប់ក្នុងថ្ងៃនេះហើយ។

**សឹមផោយ**ឮដូច្នោះ ក៏ខឹងណាស់ទើបឆ្លើយតបថា អាឯងប្រែចិត្តទៅចូលនឹងអា**ចូឆ្វ**ជាសត្រូវ អញមានចិត្តខឹងចង់ស៊ីសាច់អាឯងទៀត **ស៊ីហ្មុង**ខំស្រូតនាំខ្លួន**សឹមផោយ**ទៅឲ្យ**ចូឆ្វ**ក្នុងបន្ទាយ ទើប**ចូឆ្វ**សួរ**សឹមផោយ**ថា នរណាបើកទ្វារស្រុកទទួលទាហានយើង? **សឹមផោយ**ឮហើយក៏ខឹងណាស់ទើបនិយាយថា កុំតែអាសត្រូវពីក្នុងឲ្យដៃទៅសត្រូវក្រៅ កុំអីមិនខូចស្រុកសោះ។

**ចូឆ្វ**ក៏សួរ**សឹមផោយ**ថា កាលពីថ្ងៃខ្លួនបានធ្វើកលឧបាយឲ្យអ្នកស្រុកចេញមកចុះចូលយើងនោះ យើងជិះសេះចូលទៅជិតជើងកំពែង ទាហាននៅលើសើនយកធ្នូបាញ់ចម្រុះចុះមកពីណាក៏ច្រើនម្ល៉េះ? **សឹមផោយ**ឆ្លើយថា ខ្លួនជាសត្រូវនាយថៅហ្វាយយើងមានសេចក្តីខឹងគុំគួន នេះត្រូវលើពេលដែលធ្នូតិចពេក បើប្រសិនជាមានច្រើនទៀតនឹងឲ្យទាហានបាញ់បន្ថែម ឲ្យខ្លួនដល់នូវសេចក្តីស្លាប់តែម្តង។ **ចូឆ្វ**តបវិញថា ដែលខ្លួនមានសេចក្តីសត្យកតញ្ញូនឹងនាយថៅហ្វាយរបស់ខ្លួននោះ យើងពេញចិត្តណាស់ តែវេលានេះ**អ៊្វួនសៀវ**ថៅហ្វាយរបស់ខ្លួនស្លាប់បាត់ទៅហើយ ខ្លួនព្រមមកនៅធ្វើការរាជការជាមួយនឹងយើងឬ យើងនឹងចិញ្ចឹមទំនុកបម្រុងតទៅ? **ស៊ុនភី**បានឮ**ចូឆ្វ**ថាដូច្នោះ ក៏ឆ្លើយជម្រាបទៅវិញថា បុត្រភរិយានិងបក្សពួករបស់ខ្ញុំបាទជាងប៉ែតសិបនាក់ **សឹមផោយ**វាសម្លាប់អស់រលីងហើយ សូមឲ្យលោកសម្លាប់វាឲ្យស្លាប់តាមគ្នាទៅ ទើបខ្ញុំបាទនឹងបាត់ខឹង។ **សឹមផោយ**ឆ្លើយតបថា ឯងកុំមកញុះញង់ថែមថ្វីទៀត អញមិនមែនសោកស្តាយជីវិតទេ ព្រោះខ្លួនអញកើតមកជាមនុស្សកតញ្ញូ គិតតាំងចិត្ត ធ្វើជាបាវអ្នកណាហើយ ក៏ត្រូវតែទៀងត្រង់នឹងអ្នកនោះ យ៉ាងដូចអញបានមកនៅជាបាវសែ**អ៊្វួន** ក៏ត្រូវតែស្រឡាញ់ស្មោះត្រង់ដោយសុចរិត

ទោះបីខ្លួនអញស្លាប់ទៅ ក៏សូមឲ្យទៅជួបជាបារសែ**អ៊ួន**ទៀត នឹងបានគិតទុច្ចរិតដូចខ្លួនឯងក៏ទេ ឯងចូរញុះញង់**ចូឆ្វ**ឲ្យសម្លាប់អញចេញចុះ **ចូឆ្វ**ឮដូច្នោះក៏ខឹងណាស់ ទើបបង្គាប់ទាហានឲ្យយកខ្លួន**សឹមផោយ**ទៅសម្លាប់។ ទាហានទាំងពួងក៏នាំខ្លួន**សឹមផោយ**ចេញទៅ។ ខណៈដែលនឹងលើកដាវឡើងកាប់នោះ **សឹមផោយ**ក៏និយាយអង្វរពេជ្ឈឃាតថា ចៅហ្វាយយើងនៅទិសខាងជើង សូមឲ្យបង្អង់កុំអាលសម្លាប់សិន យើងសូមបែរមុខទៅកាន់ទិសត្រង់ចៅហ្វាយយើងនៅរួចសឹមកាប់ចុះ **សឹមផោយ**ក៏ប្រែខ្លួនបែរមុខទៅទិសឧត្តរ ផ្សងចិត្តគិតដល់ចៅហ្វាយនាយ ហើយពេជ្ឈឃាតក៏លើកដាវឡើងកាប់សម្លាប់នៅទីនោះ។

**ចូឆ្វ**យល់ឃើញដូច្នោះ ក៏ក្លែងលើកសរសើរ**សឹមផោយ** ប្រាថ្នានឹងឲ្យសេនាទាហានរបស់ខ្លួន ប្រាថ្នានឹងឲ្យសេនាទាហានរបស់ខ្លួនមានចិត្តស្និទ្ធភក្តីមេត្រីស្រឡាញ់ដល់ខ្លួនចៅហ្វាយនាយ ហើយថា **សឹមផោយ**នេះជាមនុស្សមានសេចក្តីសត្យកតញ្ញូនឹងនាយចៅហ្វាយណាស់ នរណានឹងធ្វើរាជការតទៅឲ្យយកជាតួយ៉ាង**សឹមផោយ**ទុកខ្លួនចុះ ហើយក៏ឲ្យតែងការសពនាំយកទៅកប់តាមទំនៀម។ ទទួលទាហានចាប់បានខ្លួន**តាន់លឹម**នាំមកទៀត **ចូឆ្វ**ក៏សួរ**តាន់លឹម**ថា ដែល**អ៊ួនសៀវ**ឲ្យខ្លួនតែងសេចក្តីសំបុត្របិទជាប្រកាសគ្រប់អាណាខេត្តទាំងអស់ថា យើងធ្វើការទុច្ចរិតអាក្រក់ក្នុងផែនដីនោះក៏ត្រូវមែនហើយ ព្រោះ**អ៊ួនសៀវ**និងយើងជាសត្រូវនឹងគ្នា ហេតុអ្វីបានជាខ្លួនចេះដឹងឈោងនិយាយកកាយទៅដល់ជីតាបិតាយើងថា គិតប្រទូសរ៉ាយក្បត់ផែនដីដោយហេតុអ្វី? **តាន់លឹម**តបថា ដែលខ្ញុំបាទតែងសំបុត្រនោះឧបមាដូចអ្នកយឹតធ្នូផ្គងព្រួញនឹងបាញ់ ត្រូវទាញខ្សែប្រឡោះឲ្យតឹងតម្រង់ព្រួញឲ្យត្រង់ ហើយលែងទៅឲ្យត្រូវមនុស្ស និងសត្វដល់នូវសេចក្តីស្លាប់តែម្តង។ ទីប្រឹក្សានិងសេនាទាហានទាំងពួងឮដូច្នោះខឹងណាស់ ទើបនិយាយនឹង**ចូឆ្វ**ថា ដែល**តាន់លឹម**

និយាយរ៉ាវរឿងដូច្នេះជាទីប្រមាថមើលងាយខ្លាំងណាស់ សូមឲ្យលោកយកខ្លួនទៅសម្លាប់ចេញ។ **ចូឆ្ង**តបថា ដែល**តាន់លឹម**និយាយនោះជាសេចក្តីពិត អ្នករាល់គ្នានឹងប្រកាន់ខឹងឲ្យយើងសម្លាប់ចេញនោះមិនគួរទេ យើងត្រូវចិញ្ចឹមទុកសម្រាប់នឹងឲ្យតែងសំបុត្រនិងចុតហ្មានតទៅ។

ឯ**ចោភី**ជាបុត្រ**ចូឆ្ង**នោះអាយុដប់បានដប់ប្រាំបីឆ្នាំ មានសតិបញ្ញាឆ្លៀវឆ្លាតណាស់ **ចូឆ្ង**ស្រឡាញ់ពេញចិត្តជាច្រើន ទោះបីនឹងលើកទ័ពទៅច្បាំងដល់តំបន់ណា **ចោភី**ក៏ទៅតាមបិតាជាដរាប។ ក្នុងកាលដែល**ចូឆ្ង**វាយយកបានស្រុកគីជីវនោះ **ចោភី**ជាបុត្ររបស់**ចូឆ្ង** ក៏កាន់គ្រប៊ីចូលទៅជាមួយនឹងទាហានដល់ទ្វារផ្ទះ**អ៊្លួនសៀវ** ទាហានហាមឃាត់**ចោភី**ថា មហាឧបរាជបានហាមប្រាមទុកថា កុំឲ្យនរណាធ្វើអន្តរាយដល់បុត្រភរិយាញាតិសាច់សាលោហិត និងបក្សពួករបស់**អ៊្លួនសៀវ**ឡើយ។ **ចោភី**ឮដូច្នោះហើយក៏ចាកចេញទៅ។

ឯ**ឡៅពី**បាននិយាយនឹង**ឡៅពៀវ**ថា “យើងទាំងអស់ត្រូវព្រួតដៃគ្នាទៅវិញទៅមកជាប្រក្រតី ទើបនឹងបានជួយច្បាំងគ្នាការពាររក្សាកេរដំណែលរបស់បិតា មិនឲ្យអន្តរាយនឹង**ចូឆ្ង**បាន។ **ឡៅពៀវ**យល់ឃើញត្រូវ ក៏ឲ្យធ្វើសំបុត្រតបទៅដល់**អ៊្លួនថាំ**តាមពាក្យ**ឡៅពី**និយាយ។

**អ៊្លួនថាំ**ដឹងសេចក្តីក្នុងសំបុត្រ**ឡៅពៀវ**ដូច្នោះ ក៏ពិគ្រោះឃើញថា ដែល**ឡៅពៀវ**តបមកដូច្នេះ ឃើញថាមុខជាមិនឲ្យកងទ័ពមកជួយទេ ទើបគិតថា បើនឹងនៅក្នុងស្រុកនេះក៏នឹងទប់ទល់នឹង**ចូឆ្ង**មិនបាន គិតហើយក៏ចាត់ចែងទាហានទាំងពួងលើកទៅតាំងនៅស្រុកលាំភី។ ចំណែក**ចូឆ្ង**ដឹងដូច្នោះ ក៏លើកទ័ពទៅដល់ដែនស្រុកលាំភី ទទួលជាទេសកាលរដូវរងា ទឹកក្នុងទន្លេក៏រឹងជាដុំកកទាំងអស់ ទូកដែលនឹងដើរ

ចេញចូលនាំស្បៀងនោះក៏មិនបាន **ចូឆ្វូ**ក៏ឲ្យប្រកាសឃោសនាបណ្ដាអ្នកស្រុកមកជីកទម្លាយទឹកកកឲ្យទូកស្បៀងចេញចូលបាន។ រាស្ត្រទាំងពួងឮដូច្នោះ ក៏នាំគ្នាកើតទុក្ខក្រហល់ក្រហាយនិយាយថា គ្រានេះយើងបានសេចក្ដីលំបាកជាទម្ងន់ហើយទើបនាំគ្នារត់ចោលផ្ទះសម្បែងទៅជ្រកពួននៅក្នុងព្រៃ។ **ចូឆ្វូ**ដឹងដូច្នោះក៏ខឹងណាស់ទើបបង្គាប់ទាហានតាមទៅចាប់ខ្លួនពួកនោះមកសម្លាប់ចេញ បណ្ដាអ្នកស្រុកទាំងអម្បាលនោះមិនបានដឹង ក៏ភិតភ័យខ្លាចសេចក្ដីស្លាប់នាំគ្នាត្រឡប់មកចុះចូលនៅនឹង **ចូឆ្វូ** ហើយសូមទោសកំហុស ព្រមចូលធ្វើការរាជការនឹង**ចូឆ្វូ** ៗក៏នឹកតែក្នុងចិត្តថា "ដែលបណ្ដារាស្ត្រអ្នកស្រុកត្រឡប់មកសូមទោសដូច្នេះ បើនឹងលើកទោសចោលការដែលបានបង្គាប់ទៅហើយក្រែងថ្ងៃក្រោយនឹងមិនសម្រេច បើនឹងធ្វើទោសទៅអ្នកស្រុកទាំងពួងនឹងនិន្ទា បើដូច្នោះចាំនឹងគិតការឲ្យបានទាំងសងខាង" គិតហើយក៏និយាយនឹងអ្នកស្រុកទាំងពួងថា បើយើងសម្លាប់អ្នករាល់គ្នាចេញក៏មានសេចក្ដីអាណិត បើដូច្នេះ ចូរនាំគ្នារត់ពួនជ្រកឲ្យរួចពីទាហានយើងទៅចុះ អ្នកស្រុកទាំងអស់ឮដូច្នោះក៏ភ័យស្លុតចិត្ត ស្រែកយំអាណិតគ្នាអឺងកង ហើយក៏រត់ទៅជ្រកក្នុងទីផ្សេងៗ ពួកទាហាន**ចូឆ្វូ**បានជួបប្រទះក៏កាប់សម្លាប់ចោលជាច្រើន។

ឯ**អ៊្លូនថាំ**ដឹងថា**ចូឆ្វូ**លើកទ័ពមកដូច្នោះ ក៏ចាត់ចែងទាហានហើយលើកចេញមកច្បាំងនឹង**ចូឆ្វូ** ៗឃើញ**អ៊្លូនថាំ**លើកចេញមក ក៏បរសេះចេញទៅឈរពីមុខទាហាន ហើយនិយាយនឹង**អ៊្លូនថាំ**ថា ពីដើមខ្លួនខ្លាច**អ៊្លូនសុង**ជាប្អូន បានជារត់មកចុះចូលនៅនឹងយើង ៗក៏មានសេចក្ដីអាណិតអាសូរប្រុងនឹងលើកបុត្រីឲ្យជាភរិយាឥឡូវយើងបានស្រុកគីជីវហើយ យើងឲ្យហៅខ្លួនៗក៏មិនទៅ ដែលខ្លួនគិតត្រឡប់មកប្រទូសរ៉ាយដល់យើងវិញដូច្នេះ ពេញជាមនុស្សអកតញ្ញូទុរយសពេកណាស់។ **អ៊្លូនថាំ**តបថា ហេតុទាំងនេះព្រោះខ្លួនលើកកងទ័ពមកច្បាំងនឹងយើងទាំងបង និងប្អូន

បានជាទាស់គ្នា លុះបានស្រុកហើយខ្លួនក៏ធ្វើទុក្ខបុកម្នេញបងប្អូនយើងផ្សេងៗ បានជាយើងមានចិត្តខឹងក្តៅក្រហាយណាស់ ហេតុម្តេចបានជាមកថាយើងមិនដឹងគុណវិញ? **ចូឆ្វ**ឮហើយក៏ខឹងណាស់ ទើបប្រើ**ស៊ីហ្វុង**ឲ្យចេញទៅច្បាំងនឹង**អ៊្វីនថាំ** ៗក៏ប្រើ**ផែនអាន់**ឲ្យចេញមកច្បាំងនឹង**ស៊ីហ្វុង**បានប្រាំភ្លែង។ **ស៊ីហ្វុង**យកដាវកាប់**ផែនអាន់**ធ្លាក់ពីលើសេះស្លាប់។ **អ៊្វីនថាំ**ឃើញដូច្នោះក៏ញញើត បរសេះនាំទាហានរត់ចូលទៅក្នុងស្រុកលាំភី។ **ចូឆ្វ**ក៏លើកកងទ័ពតាមចូលទៅឡោមព័ទ្ធស្រុកនោះទុក។ **អ៊្វីនថាំ**យល់ឃើញថា ទ្រាំនឹងកម្លាំង**ចូឆ្វ**មិនបាន ក៏ប្រើ**ស៊ីនបេង**ឲ្យចេញទៅអង្វរលន់តួទោសសូមចុះចូល**ចូឆ្វ**ទៀត។ **ចូឆ្វ**ឃើញដូច្នោះក៏និយាយថា **អ៊្វីនថាំ**ចរចាទុកនឹងយើងពីមុននោះ ក៏ត្រឡប់ពាក្យសម្តីគិតមកធ្វើប្រទូសរ៉ាយនឹងយើងវិញ ឥឡូវអស់តម្រិះហើយឬ បានជាឲ្យមកអង្វរលន់តួទោសដូច្នេះ? យើងមិនព្រមទេ ហើយថា **ស៊ីនភី**ប្អូនអ្នកឯងនោះបានមកនៅធ្វើការរាជការជាមួយនឹងយើង ហើយខ្លួនអ្នកត្រឡប់ចូលទៅរក**អ៊្វីនថាំ**នោះ ក៏នឹងបណ្តោយទៅតាមគ្នាជាប្រាកដ អ្នកចូលមកនៅនឹងយើងចុះ យើងចិញ្ចឹមឲ្យដល់ខ្នាតឲ្យដូចប្អូនប្រុសរបស់អ្នក។ **ស៊ីនបេង**តបថា ដែលមហាឧបរាជចរចាដូច្នេះមិនគួរសោះ ព្រោះពាក្យបុរាណបានពោលទុកថា ធម្មតាជាខ្ញុំកំដរគេហើយ ត្រូវតាំងចិត្តស្វាមីភក្តិនឹងចៅហ្វាយនាយ បើចៅហ្វាយនាយបានសេចក្តីសុខខ្លួនក៏បានសុខផង បើចៅហ្វាយនាយបានសេចក្តីទុក្ខ ក៏គប្បីឲ្យទូន្មានកាយឲ្យលំបាកផងទើបគួរ។ ឯខ្លួនខ្ញុំបាទនៅនឹង**អ៊្វីនសៀវ**ក៏យូរណាស់មកហើយ ឥឡូវ**អ៊្វីនសៀវ**ដែលមានគុណូបការៈក៏ដល់នូវសេចក្តីមរណៈភាពទៅ ខ្ញុំបាទនឹងសូមនៅតបគុណ**សែអ៊្វីន**ទៅទម្រាំតែអស់ជីវិត ដែល**ស៊ីនភី**ប្អូនខ្ញុំបាទបានមកនៅនឹងលោកនោះ ក៏តាមតែវាសនារបស់គេចុះ។ **ចូឆ្វ**បានស្តាប់ដូច្នេះក៏គិតថា **ស៊ីនបេង**នេះមានចិត្តសុចរិតសត្យទៀងត្រង់ណាស់ មុខជានិយាយបញ្ចុះបញ្ចូលទុកមិនបាន

ទើបថា បើខ្លួនអ្នកមិនព្រមនៅនឹងយើងហើយ ចូរស្រូតត្រឡប់ទៅប្រាប់**អ៊ួនចាំ**តាមពាក្យយើងនិយាយចុះ។

**ស៊ីនបេង**ក៏លា**ចូអ្វ**ត្រឡប់ទៅប្រាប់**អ៊ួនចាំ**គ្រប់ប្រការ **អ៊ួនចាំ**បានឮដូច្នោះក៏ខឹងនឹង**ស៊ីនបេង** ហើយនិយាយថាប្អូនរបស់ខ្លួនទៅនៅនឹង**ចូអ្វ**ប្រាប់កិច្ចការអាថ៌កំបាំងអស់ ឥឡូវយើងឲ្យខ្លួនទៅនិយាយនឹង**ចូអ្វ** ៗក៏មិនព្រម ឯសេចក្ដីយ៉ាងនេះក៏**ចូអ្វ**ប្រើខ្លួនឲ្យត្រឡប់មកធ្វើប្រទូសរ៉ាយដល់យើងវិញឬ? **ស៊ីនបេង**បានស្ដាប់ដូច្នោះក៏មានសេចក្ដីខឹងក្ដៅក្រហាយជាច្រើនណាស់ ទោមនស្សទាល់តែខ្យល់ចាប់ដួលចុះសន្លប់នៅទីនោះ។ **អ៊ួនចាំ**ឲ្យទាហាននាំខ្លួន**ស៊ីនបេង**ចេញទៅក្រៅ នៅបានតែមួយស្របក់ក៏ដាច់ខ្យល់ស្លាប់ទៅ។

**គួតៅ**និយាយនឹង**អ៊ួនចាំ**ថា ដែលយើងឲ្យទៅអង្វរលន់តួទោស**ចូអ្វ** ៗមិនព្រម ឥឡូវខ្លួនយើងក៏នៅក្នុងទីចង្អៀតទញ់ទាល់ បីដូចជាមនុស្សមានជំងឺឈឺធ្ងន់ដាបពេករាល់តែថ្ងៃបើល្មមនឹងកែរោគនោះបាន ក៏គង់នឹងរួចពីសេចក្ដីស្លាប់បាន សូមឲ្យលោកកេណ្ឌយករាស្ត្រអ្នកស្រុកឲ្យអស់រលីងលើកទៅជាកងទ័ពមុខ លោកត្រូវលើកពលទាហានឯទៀតទៅជាកងទ័ពប្រចាំជូនច្បាំងនឹង**ចូអ្វ**ទៀត។ **អ៊ួនចាំ**យល់ឃើញត្រូវ ក្នុងពេលកណ្ដាលយប់នោះ ក៏ប្រមូលទាហាន និងបណ្ដាអ្នកស្រុកទាំងពួងជាកងទ័ពមុខបួនកង ត្រៀមប្រុងទុកស្រេច ហើយចាត់ចែងបណ្ដាទាហានជាកងទ័ពជំនួយបានគ្រប់ទាំងបួនកង។ លុះវេលាព្រឹកឡើងក៏ឲ្យបើកទ្វារទាំងបួនទិស ហើយលើកកងទ័ពចេញទៅប្រឡូកវាយបន្ទាយ**ចូអ្វ**ទាំងបួនផ្លូវ។ **ចូអ្វ**ឃើញដូច្នោះ ក៏ឲ្យបម្រើសេះស្រូតទៅប្រាប់តៗគ្នាគ្រប់បន្ទាយ ហើយដេញទាហានឲ្យចេញតតាំងច្បាំងជាពន្លឹក តាំងពីព្រឹកដល់ថ្ងៃត្រង់ ទាហានទាំងសងខាងក៏ចាក់កាប់សម្លាប់គ្នាស្លាប់ជាច្រើន មិនទាន់ឈ្នះចាញ់។ **ចូអ្វ**ឃើញដូច្នោះ ក៏គិតខ្លាចក្រែងទាហាន

ទាំងពួងនឹងហត់នឿយណាស់ ទើបឡើងទៅលើភ្នំហើយក៏វាយស្គរចម្បាំង ប្រាថ្នានឹងដេញទាហានទាំងពួងឲ្យចូលច្បាំងពុះពារយកជ័យជម្នះឲ្យបាន ពួកទាហាន**ចូឆ្វ**បានឮសំឡេងស្គរក៏ស្ទុះស្រូចូលទៅប្រកាប់ប្រចាក់ពាក់ពូនលើគ្នា បណ្ដាទាហាន**អ៊្វនថាំ** និងអ្នកស្រុកក៏ស្លាប់ដេរដាសប្រាសរត់ចេញទៅ។ **ចោហង**ក៏បង្ខំដេញពលទាហានចូលកាប់ចាក់ពាក់ពូនលើគ្នាជាច្រវ៉ាំបល់ **ចោហង**បានចំណាប់ក៏យកដាវដេញកាប់**អ៊្វនថាំ**ត្រូវរបួសជាច្រើនអន្លើ **អ៊្វនថាំ**ក៏គ្រាំគ្រាទាល់តែធ្លាក់ពីលើសេះស្លាប់។ **គួតៅ**ក៏បរសេះនឹងត្រឡប់ចូលស្រុកវិញ **ង៉ាក់ជិន**ក្រឡេកឃើញក៏ញាក់សេះដេញតាម ហើយយឺតធ្នូបាញ់ត្រូវ**គួតៅ**ធ្លាក់ពីលើសេះចុះទៅក្នុងស្នាមគូស្លាប់។ **ចូឆ្វ**ក៏ឲ្យទាហានកាត់យកក្បាល**អ៊្វនថាំ** ទៅប្រកាសប្រាប់ដល់បណ្ដារាស្ត្រអ្នកស្រុកថា កុំឲ្យនរណាយំសោកអាល័យ**អ៊្វនថាំ**ឡើយ បើនរណាមកយំសោកក៏ឲ្យចាប់ខ្លួនសម្លាប់ចេញ។ លុះប្រកាសហើយ ឲ្យយកក្បាល**អ៊្វនថាំ**ទៅដោតទុកនៅទ្វារស្រុកខាងទិសឯជើង **ចូឆ្វ**ក៏លើកទាហានចូលទៅក្នុងស្រុកលាំភី ហើយប្រាបប្រាមអ្នកស្រុកឲ្យនៅជាប្រក្រតី ទទួលមានបម្រើសេះម្នាក់មកប្រាប់**ចូឆ្វ**ថា មាននាយទាហានពីរនាក់នាំទាហានជាច្រើនលើកមកជិតស្រុកលាំភីហើយ **ចូឆ្វ**បានឮក៏ឲ្យរៀបពលទាហានលើកចេញទៅក្រៅស្រុកបំណងនឹងតតាំងច្បាំងគ្នា។

ឯ**ទៀវហៀន** និង**ទៀវឡាំ**ឃើញ**ចូឆ្វ**លើកទ័ពចេញមក ក៏ចុះពីលើសេះបោះអាវុធចេញហើយដោះក្រោះអស់ពីខ្លួន ចូលទៅគំនាប់**ចូឆ្វ** ៗសួរថា អ្នកទាំងពីរនេះឈ្មោះអ្វី? មកពីទីណា? នាយទាហានទាំងពីរនាក់ក៏ជម្រាបថា ខ្ញុំបាទឈ្មោះ**ទៀវហៀន, ទៀវឡាំ** ជានាយទាហាន**អ៊្វនហ៊ី**ជាបុត្រ**អ៊្វនសៀវ**។ ខ្ញុំបាទឮដំណឹងថា មហាឧបរាជមានចិត្តមេត្តារាប់អានទាហានខ្ញុំរាជការដោយសុចរិត ទើបគិតគូរនាំ

ទាហានទាំងនេះមកប្រាថ្នានឹងចូលទៅធ្វើការរាជការជាមួយនឹងលោក។ **ចូឆ្វ**បានស្តាប់ក៏ទទួលអំណរណាស់ តាំងឲ្យ**ទៀវហៀន, ទៀវឡាំ** ជានាយទាហានឆ្វេងស្តាំ។

ឯ**ទៀវអៀន**ជាមេចោរនៅភ្នំអេងសាន់ដឹងដំណឹងថា **ចូឆ្វ**វាយយកបានស្រុកគីជីវ និងស្រុកលាំភី ក៏លើកពួកទាហានចោរប្រហែលដប់ម៉ឺននាក់ មកសូមចូលនៅធ្វើរាជការជាមួយនឹង**ចូឆ្វ** ៗតាំងឲ្យ**ទៀវអៀន**ជាទីប៉ាក់ចុងគុន គឺស្តេចប្រាបប្រាមអាណាខេត្តទិសឧត្តរ។

ឯ**អងស៊ីវ** កាលឮដំណឹងថា**អ៊ួនថាំ**ស្លាប់ហើយ ក៏មានសេចក្តីសោកស្តាយអាឡោះអាល័យ ក៏ចូលទៅអង្គុយយំសោកអាណិត**អ៊ួនថាំ**ដែលគេដោតក្បាលនោះ ទាហានល្បាតឃើញដូច្នោះក៏ចាប់យកខ្លួនទៅឲ្យ**ចូឆ្វ** ៗសួរថា អ្នកយំនោះឈ្មោះអ្វី? ហេតុម្តេចបានជាយំអាណិត**អ៊ួនថាំ**? **អងស៊ីវ**ឆ្លើយថា ខ្ញុំបាទឈ្មោះ**អងស៊ីវ**ជាទីប្រឹក្សា**អ៊ួនថាំ**។ ខ្ញុំបាទបានហាមឃាត់**អ៊ួនថាំ**ឲ្យគិតគូរស្ម័គ្រសមាគមនឹងបណ្តាញាតិ បងប្អូនជាមេត្រីនឹងគ្នា ដើម្បីនឹងជួយការពាររក្សាស្រុកគីជីវទុកឲ្យគង់ **អ៊ួនថាំ**មិនព្រមស្តាប់ពាក្យខ្ញុំបាទសោះ បានជាខូចស្រុកថែមទាំងខ្លួនក៏មានទុក្ខទាល់តែស្លាប់ទៅទៀត។ ខ្ញុំបាទឃើញរូបក៏តឹងចង្អៀតចិត្តអាណិត ព្រោះហេតុនេះបានជាយំ។ **ចូឆ្វ**សួរថា កាលយើងឲ្យយកក្បាលទៅស្រែកប្រកាសដល់បណ្តាអ្នកស្រុកទាំងពួងថា បើនរណាមកយំអាឡោះអាល័យ**អ៊ួនថាំ** យើងសម្លាប់នោះខ្លួនដឹងឮឬទេ? **អងស៊ីវ**ថា ដែលលោកហាមប្រាមនោះខ្ញុំបាទក៏បានដឹងដែរ។ **ចូឆ្វ**ថា បើខ្លួនបានដឹងឮហើយ ហេតុម្តេចក៏ហ៊ានមកយំសោក ខ្លួនមិនខ្លាចស្លាប់ទេឬ? **អងស៊ីវ**ឆ្លើយថា ពីដើមរៀងមកនោះ ខ្ញុំបាទក៏បានសេចក្តីសុខច្រើនណាស់ ព្រោះ**អ៊ួនថាំ**ជួយទំនុកបម្រុង ឥឡូវ**អ៊ួនថាំ**ស្លាប់ទៅហើយ បើនឹងនៅព្រងើយកន្តើយ ក៏ហាក់បីដូចជាមនុស្សអកតញ្ញូនឹងចៅហ្វាយនាយ ទោះបីនឹងរស់នៅជាមនុស្សក៏គ្មាននរណាគេ

សរសើររាប់អាន ហេតុនេះបានជាខ្ញុំបាទមកយំអាណិត ព្រោះគិតដល់គុណ**អ៊្លួនចាំ** ទោះបីលោកនឹងសម្លាប់ខ្ញុំបាទចេញ ដោយទោសល្មើសដូច្នេះក៏ស្រេចនៅលោកចុះ តែសូមឲ្យខ្ញុំបាទតែងសព**អ៊្លួនចាំ**សិន រួចសឹមបិទមុខស្លាប់តាមនាយចៅហ្វាយទៅទៀត។

**ចូឆ្វូ**ស្តាប់ក៏យល់ឃើញពិត ទើបនិយាយថា បណ្តាអាណាខេត្តខាងទិសឧត្តរនេះ មានទាហានដែលមានថ្វីដៃខ្លាំងពូកែ និងមានតម្រិះប្រាជ្ញាប្រកបទាំងចិត្តសត្យានុសត្យពិតទៀងត្រង់នឹងនាយចៅហ្វាយជាច្រើនណាស់ ប្រសិនបើ**អ៊្លួនសៀវ** និងបុត្រមានចិត្តអាណិតប្រណីមេត្រីរាប់អាន បានចិញ្ចឹមរក្សាមនុស្សល្អឲ្យដល់ខ្នាតហើយ កាលណាឡើយយើងនឹងមកវាយយកស្រុកគីជីវបាន ហើយ**ចូឆ្វូ**ក៏ឲ្យទាហានតែងការសព**អ៊្លួនចាំ**តាមប្រវេណី ឯ**អងស៊ីវ**នោះ**ចូឆ្វូ**ក៏តាំងឲ្យធ្វើជានាយឃ្លាំង ហើយសួរ**អងស៊ីវ**ថា ឥឡូវ**អ៊្លួនសុង**រត់ទៅនៅនឹង**អ៊្លួនហ៊ឺ**ឯស្រុកអីវជីវ អ្នកនឹងរិះគិតប្រការម្តេចទើបនឹងចាប់ខ្លួន**អ៊្លួនសុង**បាន? **អងស៊ីវ**តបថា មហាឧបរាជក៏មានឧបការគុណនឹងខ្ញុំបាទ បើជាការដទៃមកនោះ ខ្ញុំបាទនឹងរិះគិតតបស្នងសងគុណលោកទៅតាមសតិកម្លាំង ត្រាតែអស់តម្រិះប្រាជ្ញាមិនថាអ្វីសោះ វេលានេះ លោកនឹងឲ្យខ្ញុំបាទទៅគិតចាប់ខ្លួន**អ៊្លួនសុង** ដែលជាបងប្អូននាយចៅហ្វាយរបស់ខ្ញុំបាទនោះ ខ្ញុំបាទក៏ទាល់ហើយ តាមតែលោកនឹងមេត្តាអត់ទោសប្រោសប្រណីទៅចុះ។ **ចូឆ្វូ**បានឮដូច្នោះក៏សរសើរថា **អងស៊ីវ**នេះជាមនុស្សមានសុចរិតទៀងត្រង់នឹងអ្នកមានគុណណាស់ ហើយទើបប្រឹក្សានឹងទាហានទាំងពួងថា យើងនឹងគិតប្រការម្តេចទើបនឹងចាប់ខ្លួន**អ៊្លួនសុង**បាន? **គុយកែ**ឆ្លើយថា សូមឲ្យលោកប្រើទាហាន**អ៊្លួនសៀវ**ដែលមកនៅនឹងលោកនោះ ឲ្យលើកកងទ័ពទៅរិះគិតធ្វើការច្បាំងចាប់ខ្លួន**អ៊្លួនសុង**ឲ្យបាន។ **ចូឆ្វូ**យល់ឃើញត្រូវ ក៏ប្រើ**ទៀវហៀន** និង**ទៀវឡាំ** លើកទាហានមួយកង ឲ្យ**លីកង, លីសៀង**

លើកទាហានមួយកង ឲ្យ**ម៉ាអៀន** និង**ទៀវតី**លើកទាហានមួយកង ទៅវាយស្រុកអីវជីវចាប់ខ្លួន**អ៊្លួនហ៊ី** និង**អ៊្លួនសុង**ឲ្យបាន។ នាយទាហានទាំងបីកងក៏លើកកងទ័ពចេញទៅ ហើយ**ចូឆ្វ**ប្រើ**ទៀវអៀន**នាយចោរ និង**លីតៀន, ង៉ាក់ជិន** ឲ្យលើកទាហានទៅចាប់ខ្លួន**កោកាន់**ឯស្រុកបេងជីវ។

ខណៈនោះ**អ៊្លួនហ៊ី** និង**អ៊្លួនសុង**ដឹងដំណឹងថា **ចូឆ្វ**ឲ្យលើកកងទ័ពទៅដូច្នោះ ក៏គិតគ្នាថានឹងនៅតទល់ឃើញជាមិនបាន ទើបនាំទាហានរត់ចេញពីស្រុក ប្រាថ្នានឹងទៅពឹងនៅដោយសារ**ហោហ្វួន** ចៅហ្វាយស្រុកលៀវសៃ ដែលឡើងចំណុះស្រុកអីវជីវ។

ឯ**ហោហ្វួន**កាល**ចូឆ្វ**វាយបានស្រុកគីជីវនោះ **ហោហ្វួន**ក៏បបួលពួកគឿនដែលជាទាហាន**អ៊្លួនសៀវ**ទៅស្បថស្បាន់នឹងគ្នា ថានឹងរួមចិត្តគំនិតស្រឡាញ់គ្នា តែចិត្ត**ហោហ្វួន**នោះគិតនឹងចូលទៅនៅនឹង**ចូឆ្វ**។ លុះអំណើះតមក **ហោន្ទួន**ចាត់បម្រើឲ្យទៅជញ្ជើញពួកគឿនមកផឹកស្រាព្រមគ្នា **ហោហ្វួន**ក៏លើកគ្រប៊ីដាក់លើតុហើយថា **ចូឆ្វ**នោះខ្លាំងពូកែណាស់ ទាំងទាហានធំតូចក៏មានច្រើន ឥឡូវវាយបានស្រុកគីជីវហើយ បើយើងនឹងស្ងៀននៅដូច្នេះ ក៏នឹងមិនរួចពីដៃ**ចូឆ្វ** យើងត្រូវតែប្រមូលគ្នាទៅចូលនៅនឹង**ចូឆ្វ** បើនរណាមួយមិនព្រម យើងនឹងយកគ្រប៊ីនេះកាត់ក្បាលចេញ។

**ហាន់ហង**ឮដូច្នោះក៏ខឹងណាស់ កន្ត្រាក់គ្រប៊ីនោះបោះចោលចេញហើយស្រែកថា **អ៊្លួនសៀវ**ចិញ្ចឹមយើងរៀងមកបានសេចក្ដីសុខ តែយើងនៅមិនទាន់បានតបគុណស្រ័យអ្វីនៅឡើយ ឥឡូវកូនចៅចៅហ្វាយយើងបានសេចក្ដីក្ដៅក្រហាយដោយអន្តរាយស្រុកទេសគួរតែយើងតាំចិត្តយកអាសាត្រាតែអស់ជីវិត ហេតុអ្វីអ្នកឯងមកទុរយសទៅចូលនឹង**ចូឆ្វ**នោះវិញ? យើងមិនយល់ព្រមផងទេ។ នាយទាហានទាំងពួងឃើញ**ហោហ្វួន** និង**ហាន់ហង**ជជែកទាស់គ្នាដូច្នោះ ក៏មិនបានគិតប្រការ

ម្តេច។ **ហោហ្វួន**ក៏និយាយនឹង**ហាន់ហង**ថា “ការទាំងនេះយើងរិះគិតគ្នានឹងអ្នកទាំងពួង អ្នកទាំងពួងក៏យល់ព្រមអស់ហើយ តែខ្លួនអ្នកមួយនៅមិនព្រមចូលនឹងយើង ហេតុនេះខ្លួនចូលមកនៅនឹងពួកយើងនោះមិនគួរ” ទើបឲ្យមនុស្សបណ្តេញ**ហាន់ហង**ចេញផុតពីទីនោះទៅ។

ឯទាហាន**ចូឆ្វ**ទាំងបីកងនោះ លុះលើកទ័ពទៅជិតដល់ស្រុកអីវជីវហើយ ទទួលដឹងដំណឹងថា **អ៊្វនហ៊ី, អ៊្វនសុង**រត់ទៅតាមផ្លូវស្រុកលៀវសៃ ក៏លើកកងទ័ពតាមទៅដល់ស្រុកលៀវសៃទៀត។ ខណៈនោះ**ហោហ្វួន**ដឹងក៏ចេញមកទទួលទាហាន**ចូឆ្វ** នាយទាហានទាំងបីកងក៏សួរថា **អ៊្វនហ៊ី, អ៊្វនសុង**មកសំណាក់អាស្រ័យនឹងអ្នកឬ? **ហោហ្វួន**ឆ្លើយថា មិនដឹងទេ ហើយប្រាប់ថា ខ្ញុំបាទនេះស្ម័គ្រចង់ទៅនៅធ្វើរាជការនឹងមហាឧបរាជ។ នាយទាហានទាំងនោះក៏នាំខ្លួន**ហោហ្វួន**ទៅឲ្យ**ចូឆ្វ** ហើយសារសព្ទដំណើររឿងរ៉ាវដែលមានមកពីដើមឲ្យ**ចូឆ្វ**ស្តាប់ **ចូឆ្វ**ក៏មានសេចក្តីត្រេកអរសាទរណាស់ ទើបតាំង**ហោហ្វួន**ជាចៅហ្វាយស្រុកលៀវសៃដូចដើម តែយកខ្លួនទុកធ្វើការរាជការជាមួយ។

ខណៈនោះ មានបម្រើសេះមកប្រាប់**ចូឆ្វ**ថា **ទៀវអៀន, ង៉ាក់ជិន, លីទៀន** ដែលទៅវាយស្រុកបេងជីវនោះ ខាង**កោកាន់**ចៅហ្វាយស្រុកក៏លើកទាហានចេញមកតាំងបន្ទាយតគ្នានៅតំបន់គយហោគួន បានច្បាំងតគ្នាជាច្រើនលើកច្រើនគ្រា នាយទាហានទាំងបីនឹងកាច់យកស្រុកនោះមិនបាន។ **ចូឆ្វ**ឮដូច្នោះ ក៏ចាត់ចែងទាហានលើកជាកងទ័ពប្រចាំសម្រាប់ជញ្ជូនទៅទៀតលុះទៅដល់គយហោគួន នាយទាហានទាំងបីនាក់ក៏ចូលទៅជម្រាប**ចូឆ្វ**តាម ដែលបានតតាំងច្បាំងគ្នានឹង**កោកាន់**នោះគ្រប់ប្រការ។

**ចូឆូ**ដឹងហើយក៏ប្រឹក្សានឹងនាយទាហានទាំងពួងថា យើងនឹងគិតប្រការម្ដេចទើបនឹងចាប់ខ្លួន**កោកាន់**បានដោយងាយ? **ស៊ុនហ៊ីវ**តបថា ទាហាន**អ៊្វូនសៀវ**ដែលមកនៅក្នុងកងទ័ពយើងជាច្រើន ត្រូវចាត់រកនរណាដែលមានតម្រិះប្រាជ្ញា ឲ្យធ្វើជារត់ទៅរក**កោកាន់** ហើយនិងគិតជាកលសឹក ទើបនឹងចាប់**កោកាន់**បានដោយងាយ។ **ចូឆូ**យល់ឃើញត្រូវ ទើបខ្សឹបប្រាប់**លីកង, លីសៀង** ឲ្យខិតខំគិតទៅធ្វើការចាប់ខ្លួន**កោកាន់**ឲ្យបាន។

លុះវេលាយប់ **លីកង, លីសៀង** ក៏នាំទាហានដែលស្និទ្ធប្រហែលហាសិបនាក់ទៅដល់ទ្វារគយ ហើយក៏ប្រាប់ទាហានដែលចាំទ្វារថា យើងសូមចូលទៅជួបនឹង**កោកាន់**។ នាយទ្វារទើបយកសេចក្ដីនោះទៅប្រាប់**កោកាន់** ៗដឹងដូច្នោះហើយ ក៏អើតមើលទៅតាមចន្លោះសើន ឃើញ**លីកង, លីសៀង**ហើយសួរថា ខ្លួនមករកយើងនេះដោយប្រការអ្វី? **លីកង, លីសៀង**តបថា ខ្ញុំជាទាហាន**អ៊្វូនថាំ** ដែលខ្ញុំបាទបានចូលទៅនៅនឹង**ចូឆូ**នោះ ដោយ**អ៊្វូនថាំ**ប្រើទៅក៏ចាំចិត្តនៅ ឥឡូវ**ចូឆូ**ធ្វើការទុច្ចរិតអាក្រក់ផ្សេងៗ ដល់ខ្ញុំបានសេចក្ដីឈឺចាប់បានជាខ្ញុំរត់មកប្រាថ្នានឹងចូលមកនៅនឹងលោកឯនេះ ដើម្បីនឹងជួយធ្វើការរិះគិតកម្ចាត់**ចូឆូ**ជាផ្លូវសងសឹកវិញ។

**កោកាន់**ស្ដាប់ឮហើយក៏នៅមានចិត្តសង្ស័យ សួរទៅ**លីកង, លីសៀង**វិញថា បើខ្លួនគិតដូច្នេះ ត្រូវឲ្យទាហានដែលមកជាមួយនៅខាងក្រៅ ខ្លួនទាំងពីរចូលមកនិយាយនឹងយើងសិន។ **លីកង, លីសៀង**ឃើញថា **កោកាន់**មិនជឿចិត្តដូច្នោះ ក៏ក្លែងធ្វើជាបោះអាវុធចេញពីដៃ ដោះក្រោះចេញប្រាថ្នានឹងឲ្យ**កោកាន់**អស់សង្ស័យ គំនាប់**កោកាន់**ហើយប្រាប់ថា **ចូឆូ**ទើបនឹងលើកកងទ័ពមកដល់កំពុងនឿយហត់នៅឡើយ ហើយតាំងបន្ទាយនៅទីនោះមិនទាន់មាំមួន ពេលកណ្ដាលអាធ្រាត្រយប់នេះ បើលោកលើកកងទ័ពទៅប្លន់ក៏នឹងបានបន្ទាយ**ចូឆូ**ដោយងាយណាស់។

**កោកាន់**បានស្តាប់ហើយក៏យល់ឃើញត្រូវផង ទើបអស់សេចក្តីសង្ស័យ តាំងកេណ្ឌទាហានដែលមានថ្វីដៃត្រៀមទុកប្រហែលមួយម៉ឺន ឯ**ចូឆ្វូ**ក៏ចាត់ចែងទាហានឲ្យចេញទៅតាំងនៅក្រៅបន្ទាយបួនកង បើឃើញ**កោកាន់**ចេញមកប្លន់បន្ទាយ ឲ្យវាយស្ទាក់កុំឲ្យ**កោកាន់**ថយវិលត្រឡប់ចូលទៅក្នុងគយវិញបាន។ ទាហានទាំងពីរក៏ថយចេញទៅធ្វើតាមបង្គាប់**ចូឆ្វូ**។

ឯ**កោកាន់**នោះ លុះដល់ពេលប្រហែលយាមពីរប្លាយ ក៏ប្រើ**លីកង, លីសៀង**ឲ្យលើកទៅជាកងទ័ពមុខ ខ្លួន**កោកាន់**ជាកងទ័ពជំនួយ លើកទាហានបើកទ្វារបន្ទាយស្រែកហ៊ោចេញទៅប្លន់បន្ទាយ**ចូឆ្វូ**។ ឯទាហាន**ចូឆ្វូ**ដែលបង្កប់នៅទាំងបួនទិស ឃើញ**កោកាន់**លើកទ័ពចេញមកប្លន់បន្ទាយនក៏អុជផាវជាសញ្ញាឡើង ហើយបរពលវាយខ្ទប់ប្រសព្វគ្នាមកទាំងបួនទិស កាប់សម្លាប់ទាហាន**កោកាន់**ស្លាប់អស់ជាច្រើន។ **កោកាន់**ឃើញដូច្នោះក៏គិតថា យើងចាញ់កលបាយ**ចូឆ្វូ**ហើយ ទើបនាំទាហានដែលសល់នោះថយត្រឡប់ទៅ នឹងចូលក្នុងទ្វារគយវិញ ទទួល**លីទៀន, ង៉ាក់ជិន** លើកទាហានវាយខ្ទប់ស្ទាក់ពីមុខ ឯទាហានទាំងបួនកង ក៏លើកតាមពីក្រោយនិងសងខាងថែមទៀត **កោកាន់**ក៏នាំទាហានបរសេះពុះពារទ័ព**ចូឆ្វូ**ចេញទៅបានហើយរត់ទៅ ក្នុងខណៈនោះ **ចូឆ្វូ**ក៏លើកពលយោធាដេញតាម**កោកាន់**ទៅ។

ឯ**កោកាន់**ក៏រត់ចេញផុតដែនស្រុកគីជីវទៅដល់ស្រុកកាន់អ៊្វ ទើបចូលទៅរក**ចោអៀនអង**ចៅហ្វាយស្រុក ហើយពណ៌នារឿងរ៉ាវថា វេលានេះ**ចូឆ្វូ**មានកម្លាំងខ្លាំងពូកែណាស់ ទាំងសេនាទាហានក៏មានច្រើន បានលើកទ័ពមកធ្វើអន្តរាយអាណាខេត្តខាងទិសឧត្តរ ឲ្យបានសេចក្តីក្តៅក្រហាយណាស់ ខ្ញុំបាទឃើញថា **ចូឆ្វូ**មានចិត្តកំរើប ប្រាថ្នានឹងឆ្លងមកដល់ដែនស្រុកនេះទៀត សូមឲ្យលោកលើកកងទ័ពទៅទប់

ទល់ ហើយវាយយកអាណាខេត្តដែល**ចូឆ្វូ**វាយបាននោះ មកជាចំណុះស្រុកលោកទាំងអស់វិញ ទើបលោកមិនមានអន្តរាយ។

**ចៅអៀនអង**បានស្តាប់អភិប្រាយដូច្នោះ ក៏និយាយថា **ចូឆ្វូ**នឹងយើងមិនដែលមានសេចក្តីអ្វី ឲ្យជាទីទាស់អធ្យាស្រ័យនឹងគ្នាសោះ ដែលអ្នកឯងថានឹងលើកឆ្លងមកវាយយកស្រុកយើងនោះ យើងមិនយល់ឃើញព្រមផងទេ ហាក់តែខ្លួនមានចិត្តព្យាបាទ**ចូឆ្វូ** ទើបមកក្លែងញុះញង់ប៉ងនឹងឲ្យយើងមានសត្រូវតទៅ។ និយាយហើយក៏បង្គាប់ទាហានឲ្យបណ្តេញ**កោកាន់**ចេញទៅពីក្នុងស្រុក។ **កោកាន់**មករំពឹងគិតតែក្នុងចិត្តថា យើងនឹងទៅទីពឹងអាស្រ័យនៅនឹង**ឡៅពៀវ**ចៅហ្វាយស្រុកកេងជីវវិញចុះឃើញថាស្រួលជាង គិតហើយក៏នាំទាហានឆ្លងចូលដែនខេត្តទិសឧត្តរ ខំស្រូតកាត់តម្រង់ទៅដល់កណ្តាលផ្លូវ ជួនជាពេលយប់ក៏ឈប់សម្រាកនៅទីនោះមួយអន្លើសិន។ **អងតាំង**ជាទាហាន**កោកាន់**ក៏លបសម្លាប់**កោកាន់**ស្លាប់ ហើយកាត់យកក្បាលទៅឲ្យ**ចូឆ្វូ**ឯទីគយហោគួន។ **ចូឆ្វូ**ក៏ទទួលអំណរណាស់ ទើបចាត់តាំង**អងតាំង**ជានាយទាហាន ហើយ**ចូឆ្វូ**ក៏លើកទ័ពចូលទៅវាយយកស្រុកបេងជីវបាន។

ក្នុងសម័យនោះ **ចូឆ្វូ**ក៏ប្រាប់ប្រាមបណ្តារាស្ត្រអ្នកស្រុក ឲ្យនៅជាសុខក្សេមក្សាន្ត ហើយប្រឹក្សានឹងសេនាទាហានទាំងពួងថា យើងនឹងលើកកងទ័ពទៅវាយយកស្រុកខាងទិសបស្ចិមទៀត អម្បាលដែលអ្នកឡើងស្តាប់បង្គាប់ស្រុកគីជីវ ហើយនិងបានស្រាវជ្រាវរកខ្លួន**អ៊្វូនហ៊ី** និង**អ៊្វូនសុង**ផង ទើបនឹងអស់ចម្រូងចម្រាស់តទៅ។ **ចៅហង** និងពួកទាហានក៏ស្រែកឃាត់ហាម**ចូឆ្វូ**ថា **អ៊្វូនហ៊ី, អ៊្វូនសុង**នោះ មិនមែនចូលទៅអាស្រ័យនៅក្នុងស្រុកភូមិនបានទេ ប្រហែលនាំគ្នាទៅជ្រកពួននៅក្នុងព្រៃ ទោះបីនឹងមានទាហានទៅផងក៏តិចនាក់ ឯអាណាខេត្តទិសបស្ចិមនោះ សុទ្ធជាស្រុកតូចតាចដាច់ដោច ហើយផ្លូវនឹងទៅនោះ ក៏ឆ្ងាយដាច់ស្រយាលណាស់ បើនឹងលើក

កងទ័ពទៅវាយប៉ះ ក៏ជាការមិនគួរល្មម ខ្លាច**ឡៅពៀរ**និង**ឡៅពី**ដឹង នឹងលើកទ័ពទៅវាយយកស្រុកហ៊ូតោ មុខជាលោកនឹងលើកទៅជួយមិនទាន់ទេ ហេតុនេះសូមឲ្យលោកលើកកងទ័ពត្រឡប់ទៅរក្សាស្រុកហ៊ូតោវិញល្អជាង។ **គុយកែ**ឆ្លើយថា ដែល**ចោហង**និយាយនោះមិនត្រូវទេ ព្រោះអាណាខេត្តខាងទិសបស្ចិមនោះ កាល**អ៊ួនសៀវ**រស់នៅឡើយ ក៏បានទំនុកបម្រុងជាប្រក្រតី ការសឹកសង្គ្រាមក៏មិនដែលមានទៅដល់ មុខជាមានសេចក្តីធ្វេសប្រមាទ។ ឥឡូវ**អ៊ួនហ៊ី, អ៊ួនសុង**ក៏ទៅអាស្រ័យនៅទីនោះផង ត្រូវតែយើងលើកកងទ័ពទៅប្រាបប្រាមឲ្យរាបទាបតែម្តង ឯ**ឡៅពៀរ**នោះជាមនុស្សជាងខាងសម្តី នឹងគិតការអ្វីក៏មិនរហូតបាន វេលានេះបាន**ឡៅពី**មកទុក បើនឹងទំនុកបម្រុងឲ្យដល់ខ្នាត **ឡៅពៀរ**ក៏មិនសូវទុកចិត្ត**ឡៅពី** ឯ**ឡៅពី**នោះឃើញថា មិនមែនជាចិត្តស្មោះត្រង់នឹង**ឡៅពៀរ**ប៉ុន្មាន ដែលការទាំងពួងដែលគិតគ្នានោះ ក៏រមែងមិនស្រុះស្រួលនឹងគ្នា យើងមិនគួរនឹងញញើតខ្លាច**ឡៅពៀរ** និង**ឡៅពី**សោះ ហេតុនេះខ្ញុំសូមឲ្យលោកលើកកងទ័ពប្រាបប្រាមអាណាខេត្តខាងទិសបស្ចិមឲ្យបានរាបទាបសិនទើបស្រួល។



# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣១

**ចារឹកឡើងវិញដោយ ៖ ឈុល ជារ៉ា**

*(តាំងពី**ចូឆូ**លើកទៅវាយស្រុកលៀវតាំង **គុយកែ**ឈឺស្លាប់ **កងស៊ុនខង**កាត់យកក្បាល**អ៊ួនហ៊ី, អ៊ួនសុង**ទៅឲ្យ**ចូឆូ** រហូតដល់**ស៊ុនខៀន**ឃាត់ហាមមិនឲ្យ**ឡៅពី**ទៅទទួលគំនាប់មន្ត្រីខេត្ត។)*

**ចូឆូ**យល់ត្រូវផង ក៏ចាត់ចែងរទេះស្បៀងបានបីពាន់ ហើយលើកកងទ័ពចេញទៅ ឆ្លងព្រៃវាលរបោះជាចន្លោះភ្នំជាច្រើនតំបន់ ផ្លូវនោះក៏ឆ្ងាយដាច់ស្រយាលវាលរកដើមឈើធំគ្មាន បើមានខ្យល់បក់ផាត់មក ក៏បោកផង់ធូលីដីខ្សាច់ហុយលុបលើកងទ័ព។ **ចូឆូ**ឃើញដូច្នោះក៏គិតថា យើងលើកទ័ពមកនេះ ទាហាននឹងបានសេចក្ដីលំបាកពេកណាស់ នឹងចង់លើកកងទ័ពត្រឡប់ទៅវិញ លុះដល់ប្រឹក្សានឹង**គុយកែ**សោត ឯ**គុយកែ**ក៏ឈឺដេកជាប់មកក្នុងរទេះ **ចូឆូ**ឃើញគុយកែដេកឈឺធ្ងន់ក៏យំសោកាហើយថា ដែលអ្នកមកមានជំងឺឈឺដូច្នេះ ក៏ពីព្រោះយើងលើកកងទ័ពនាំអ្នកមក យើងក៏មិនមានសេចក្ដីសប្បាយ នឹងចង់លើកកងទ័ពត្រឡប់ទៅស្រុកវិញ **គុយកែ**ឆ្លើយថា គុណបំណាច់របស់លោកមាននៅលើខ្លួនខ្ញុំបាទច្រើនណាស់ កុំគប្បីលោកវិតក្កនឹងខ្ញុំបាទឡើយ ទោះបីខ្លួនខ្ញុំនឹងស្លាប់ ក៏ទុកជីវិតដែលស្លាប់នោះ ជាទីតបស្នងសងគុណលោកតែម្ដងទៅ ដូចពាក្យបុរាណលោកពោលទុកថា ការអ្វីដែលមើលទៅឃើញថា បានការបានប្រយោជន៍ហើយ ក៏ត្រូវតែខំប្រឹងធ្វើការនោះឲ្យបានសម្រេច ដែលនឹងត្រឡប់លើកកងទ័ពទៅស្រុកវិញគ្រានេះ ខ្ញុំបាទឃើញថាជាការនាំឲ្យខាតប្រយោជន៍ទាំងសងខាង ទាហានទាំងឡាយក៏នឹងបានសេចក្ដីព្រួយនឿយលំបាកទទេទៅ បើដូច្នេះសូមឲ្យលោកបញ្ឈប់កងទ័ពនៅទីនេះសិន ដើម្បីនឹង

សម្រាកកម្លាំងទាហានទាំងពួង ហើយត្រូវរើសរកតែទាហានណាដែលខ្លាំងពូកែ ឲ្យយកស្បៀងអាហារច្រកទៃច្រវាត់ស្ពាយ ហើយឲ្យកាន់អាវុធគ្រប់ដៃ ចាប់យកអ្នកស្រុកឲ្យនាំផ្លូវលើកទៅចោមវាយយកស្រុកនីមួយៗ កុំឲ្យមនុស្សដែលនៅក្នុងស្រុកនោះដឹងខ្លួនទាន់ ទើបនឹងបានស្រុកដោយងាយ។

**ចូឆ្វ**ស្តាប់ហើយគិតឃើញយល់ថាស្រួល ក៏ឲ្យប្រមូលកងទ័ពឈប់នៅទីនោះជាដែនស្រុកអេកជីវ ហើយឲ្យហៅរកមេភូមិម្នាក់ចេញមកនឹងឲ្យនាំផ្លូវទៅ មេភូមិនោះក៏ជម្រាបថា ខ្ញុំបាទមិនសូវស្គាល់ផ្លូវព្រៃច្បាស់លាស់ទេ តែមានទាហាន**អ៊្វិនសៀវ**ម្នាក់ធ្វើជាកងក្រវែលឈ្មោះ**ទៀនទីវ** រត់មកនៅក្នុងស្រុកនេះ ជាអ្នកវាងវៃខាងស្គាល់ផ្លូវព្រៃ និងស្រុកភូមិទាំងអស់មិនសល់។ **ចូឆ្វ**ក៏បង្គាប់ឲ្យរកខ្លួន**ទៀនទីវ**មកសួររយៈផ្លូវនឹងឲ្យនាំទៅ។ **ទៀវទីវ**ក៏ជម្រាបថា ដែលនឹងឲ្យលើកទ័ពទៅកាន់អាណាខេត្តខាងទិសបស្ចិមនោះ ខ្ញុំបាទនឹងនាំទៅបាន តែថាតំបន់ស្រុកលីវសៀនោះជាផ្លូវដាច់ស្រយាលណាស់ បើនឹងដើរជើងក៏នឹងត្រូវលុយទឹក និងភក់ល្បាប់ បើនឹងទៅដោយទូកទឹកក៏រាក់ សូមឲ្យត្រឡប់វាងទៅតាមផ្លូវតំបន់អ៊ីឡុងវញ តែទៅដល់ពាក់កណ្តាលផ្លូវលំបាកណាស់ នឹងត្រូវដើរទៅក្រោមរូងភ្នំតាមកន្លែងចង្អៀត លុះផុតពីទីនោះទៅក៏ចេញទៅដល់វាលធំ ទើបគេចូលទៅតាមផ្លូវស្រុកលីវសៀវិញ **ប៉េកទុន**ចៅហ្វាយស្រុកនោះក៏មិនទាន់ដឹងខ្លួន មុខជាលោកនឹងយកស្រុកនោះបានដោយស្រួល។

**ចូឆ្វ**បានស្តាប់ដូច្នោះក៏ត្រេកអរណាស់ ទើបចាត់ទាហានឲ្យនៅរក្សា**គុយកៃ**ក្នុងតំបន់នោះ ហើយក៏តាំងឲ្យ**ទៀនទីវ**ជាមេទាហាននាំផ្លូវទ័ព ឲ្យ**តៀវលៀវ**ជាកងមុខ **ចូឆ្វ**ជាកងហ្លួង ហើយលើកកងទ័ពទៅដល់ភ្នំប៉ែកឡុងសាន ក៏ទទួលជួបប្រទះនឹង**អ៊្វិនហ៊ី**, **អ៊្វិនសុង** និង**ប៉េកទុន**លើកទាហានជាច្រើនមកតាំងស្កាត់ផ្លូវនៅក្បែរភ្នំ

នោះ ប្របមាត់វាលធំ **តៀវលៀវ**ឃើញដូច្នោះក៏ភ័យស្លុតចិត្ត ទើបឲ្យទាហានឈប់សម្ងាត់ ហើយក៏បរសេះត្រឡប់មកប្រាប់**ចូឆូ**ថា **ប៉េកទុន**ចៅហ្វាយស្រុក លីវសៀលើកទាហានមកចាំស្កាត់នៅមាត់ផ្លូវ **ចូឆូ**កាលស្ដាប់ដឹងសេចក្ដីដូច្នោះក៏ឡើងទៅលើភ្នំ ឃើញទាហាន**ប៉េកទុន**មិនបានតាំងជាក្បួនទ័ព **ចូឆូ**ក៏ប្រគល់ទង់ជ័យក្រហមអាជ្ញាសិទ្ធិសម្រាប់មេទ័ព ហើយប្រមូលទាហានឲ្យ**តៀវលៀវ**ស្រូតទៅ បរពលទាហានចូលព័ទ្ធវាយកងទ័ព**ប៉េកទុន**។ **តៀវលៀវ**ក៏ទទួលយកទង់ជ័យ ហើយហៅ**ខៅធូ, ស៊ីហ្ងង, អ៊ីគឹម** ជាប្អូននាយនឹង**តៀវលៀវ** នាំគ្នាបរសេះស្រូតរូតទៅ លុះដល់ប្រទល់ទ័ព ក៏ចូលប្រកាក់ប្រចាក់សម្លាប់កងទ័ព**ប៉េកទុន**ស្លាប់ទាហានច្រើនណាស់ **តៀវលៀវ**ក៏ចូលប្រយុទ្ធនឹង**ប៉េកទុន**ជាពន្លឹក ហើយយកទួនចាក់ត្រូវ**ប៉េកទុន**ធ្លាក់ពីលើសេះស្លាប់។ ពួកពលខាង**ប៉េកទុន**ក៏មកចំណុះចុះចូលនៅខាង**ចូឆូ**ទាំង អស់។ **អ៊ួនហ៊ី, អ៊ួនសុង**ឃើញដូច្នោះ ក៏នាំទាហានវាងរត់ទៅខាងអាណាខេត្តទិស បូព៌ា។

**ចូឆូ**ក៏នាំកងទ័ពចូលទៅក្នុងស្រុកលីវសៀ ហើយតាំងឲ្យ**ទៀនទីវ**នៅឈររក្សាស្រុកនោះ។ **ទៀនទីវ**អង្គុយយំហើយថា ខ្ញុំបាទជាមនុស្សវេះរត់ពីនាយចៅហ្វាយមក លោកបានមកជួបក៏មិនប្រកាន់ទោសនោះ គុណលោករកទីបំផុតគ្មាន ដែលលោកមកថែមលើកឲ្យធ្វើជាចៅហ្វាយស្រុកនេះទៀត ឃើញថាជាលើសកម្លាំងពេកណាស់ ព្រោះថារត់គេចវេះពីចៅហ្វាយនាយមកហើយ មកឲ្យអ្នកដទៃលើកតម្កើងខ្លួនថាជាមនុស្សល្អត្រឹមត្រូវនោះ មិនសមគួរឡើយ ទោះបីលោកមិនអាណិតអាសូរនឹងកាប់សម្លាប់ខ្ញុំបាទចេញ ព្រោះរឹងទទឹងនឹងប្រសាសន៍លោក ត្រង់ខនេះ ក៏តាមការចុះ។ **ចូឆូ**ឮដូច្នោះក៏នឹកពេញចិត្តណាស់ ទើបសរសើរ**ទៀនទីវ**ថាជាមនុស្សសុចរិតពិតត្រង់ល្អមែន ហើយនិយាយថា បើអ្នកមិនចូលចិត្តធ្វើជាចៅហ្វាយស្រុកក៏វាហើចុះ ហើយក៏តាំង**ទៀនទីវ**ទុកជាទីប្រឹក្សា។

ខណៈនោះ **ចូឆូ**ចាប់បានសេះជាងមួយម៉ឺន ស្រុកនោះក៏អត់ឃ្លានដោយគ្មានស្បៀងអាហារ ជួនជាទេសកាលរដូវរងា **ចូឆូ**ក៏ឲ្យលើកកងទ័ពត្រឡប់មកវិញចម្ងាយផ្លូវប្រហែលពីពាន់សិន (៨០ គ.ម) ពួកកងទ័ពក៏ផុតអស់ស្បៀងអាហារ និងទឹកផឹក។ **ចូឆូ**ឲ្យសម្លាប់សេះឈ្លើយនោះ ចែកឲ្យទាហានទាំងពួងស៊ី ហើយឲ្យជីកអណ្តូងទឹកជម្រៅប្រហែលប្រាំបួនទៅដប់ព្យាម (២០ ម) ទើបបានទឹកចែកគ្នាឲ្យទាហានផឹក ហើយលើកមកដល់ស្រុកអេកជីវ ឲ្យឈប់ទ័ពចែករង្វាន់បំណាច់ទាហានធំតូចតាមសមគួរ ឯអ្នកដែលឃាត់ហាមមិនឲ្យលើកទ័ពទៅច្បាំងខាងទិសបស្ចិមនោះ **ចូឆូ**ក្លែងឲ្យបំណាច់រង្វាន់ច្រើនជាងទាហានទាំងពួងមួយភាគខ្លះ ពីរភាគខ្លះ ហើយប្រកាសដល់ទាហានទាំងពួងថា ដែលយើងលើកទ័ពមកវាយស្រុកលីវសៀគ្រានេះ ជាផ្លូវឆ្ងាយណាស់ ឃើញថាអ្នកហាមឃាត់ទាំងប៉ុន្មានត្រូវបានរង្វាន់ច្រើន ព្រោះយើងមិនស្តាប់ ដែលវាយយកបានស្រុកនោះ ព្រោះទេព្តាជួយយើងទេ។ អំណើះពីនេះទៅមុខ បើយើងធ្វើការអ្វី ក៏កុំឲ្យទាហានទាំងពួងគិតរួញរាញញើតថានឿយហត់ ឬខ្លាចសឹកសត្រូវឡើយ។

កាល**ចូឆូ**មិនទាន់លើកត្រឡប់មកដល់នោះ **គុយកែ**ក៏ស្លាប់ជាមុន ទាហានក៏រក្សាសពទុកចាំ**ចូឆូ** លុះ**ចូឆូ**ត្រឡប់មកដល់ក៏ឲ្យរង្វាន់បំណាច់ទាហាន ហើយឲ្យតែងការសព **ចូឆូ**ក៏អុជធូបទៀនសែនសព**គុយកែ** ហើយក៏យំសោកអាឡោះអាល័យថា គ្រានេះ**គុយកែ**មកស្លាប់កណ្តាលផ្លូវ ឧបមាដូចទេព្តាទម្លាយជីវិតយើងចេញ ហើយនិយាយប្រាប់ទីប្រឹក្សាទាំងពួងថា អាយុអ្នករាល់គ្នានឹងយើងស្របាលគ្នា តែ**គុយកែ**នោះអាយុក្មេងជាងយើងទេ យើងគិតថា ប្រសិនបើយើងស្លាប់មុននឹងបានផ្ញើបុត្រភរិយាញាតិសាលោហិត និងកិច្ចការទាំងពួងឲ្យ**គុយកែ**ជួយទំនុកបម្រុងទៅ

ឥឡូវ**គុយកែ**មកស្លាប់មុនយើងវិញ មិនគួរសោះឡើយ កាលណាឡើយយើងនឹងបានសេចក្តីសប្បាយ។

ខណៈនោះ មានមនុស្សបម្រើស្និទ្ធរបស់**គុយកែ**ម្នាក់ យកសំបុត្រមួយច្បាប់មកឲ្យ**ចូឆូ**ហើយជម្រាបថា សំបុត្រច្បាប់នេះ កាល**គុយកែ**ឈឺជិតស្លាប់នោះ បានខំឧស្សាហ៍សរសេរទុកជូនលោក ពាក្យក្រៅពីនោះ **គុយកែ**បានផ្តាំទុកថា ឲ្យមហាឧបរាជធ្វើតាមសំបុត្រនេះឲ្យបាន។ ឯស្រុកលៀវតាំងនោះ គង់នឹងបាននៅក្នុងកណ្តាប់ដៃលោក។ **ចូឆូ**ក៏ទទួលសំបុត្រនោះមក មើលហើយក៏ញាក់មុខ ហើយយកសំបុត្រនោះដាក់ក្នុងហិបលាក់ទុកទៅវិញ ទីប្រឹក្សានិងសេនាទាហានទាំងពួងក៏មិនដឹងការថាអ្វីសោះ នាំគ្នាគិតឆ្ងល់សង្ស័យ។ លុះវេលាព្រឹកឡើង**ហែហ៊ូទុន** ក៏និយាយប្រាប់**ចូឆូ**ថា ខ្ញុំបាទឮដំណឹងថា **កងស៊ុនខង**ចៅហ្វាយស្រុកលៀវតាំង ដែលនៅខាងទិសបូព៌ានៃស្រុកគីជីវនោះ គិតអង់អាចត្រៀមពលយោធាតាំងជាបន្ទាយជីកគូស្នាមភ្លោះមាំមួនណាស់ ទាំង**អ៊ួនហ៊ី, អ៊ួនសុង**ក៏ទៅនៅពឹងពាក់សំណាក់អាស្រ័យនឹង **កងស៊ុនខង**ដែរ។ ខ្ញុំបាទយល់ឃើញថា **កងស៊ុនខង**នោះគង់ជាសត្រូវនឹងលោក បានជាគិតធ្វើការដូច្នេះ សូមឲ្យលោកស្រូតលើកកងទ័ពទៅកម្ចាត់ចេញឲ្យទាន់ការ ហើយនឹងចាប់ខ្លួន**អ៊ួនហ៊ី, អ៊ួនសុង**ផង ប្រសិនបើបង្អង់ទុកយូរ **កងស៊ុនខង**នឹងមានគំនិតគិតជាថ្មីឡើងទៀត។

**ចូឆូ**ស្តាប់ហើយក៏អស់សំណើចហើយតបថា ការនេះអ្នកកុំព្រួយជាទុក្ខឡើយ យើងមិនបានឲ្យអ្នកទាំងអស់គ្នាបានសេចក្តីលំបាកទេ ត្រូវជួយស្តាប់សូរស័ព្ទដំណឹងមើលប្រាំបួនថ្ងៃដប់ថ្ងៃសិនចុះ មុខជា**កងស៊ុនខង**នឹងកាត់យកក្បាល**អ៊ួនហ៊ី, អ៊ួនសុង**មកឲ្យយើង។ ទាហានទាំងពួងឮដូច្នោះ ក៏មានសេចក្តីសង្ស័យទាំងអស់គ្នា។

ឯ**អ៊្លួនហ៊ី**, **អ៊្លួនសុង**កាលរត់ចេញពី**ចូឆ្វ**ទៅនោះ មានទាហានជាប់ទៅផង ប្រហែលមួយពាន់ប្លាយ លុះទៅលដ់ស្រុកលៀវតាំង ក៏លាស្រាយរឿងរ៉ាវទាំងពួង ប្រាប់អ្នកចាំទ្វារឲ្យចូលទៅជម្រាប**កងស៊ុនខង**ថា យើងជាបងប្អូននឹងមកសូមចូល នៅពឹងពំនាក់អាស្រ័យ**កងស៊ុនខង**តទៅ។ អ្នកចាំទ្វារក៏នាំយកសេចក្ដីនោះចូលទៅជម្រាប**កងស៊ុនខង** ៗដឹងហើយក៏ប្រឹក្សានឹងនាហ្មឺនមុខមន្ត្រីនូវអស់សេនាទាហានទាំងពួងថា ឥឡូវ**អ៊្លួនហ៊ី**, **អ៊្លួនសុង**រត់ចេញពី**ចូឆ្វ**មក នឹងចូលមកពឹងពាក់អាស្រ័យនៅក្នុងស្រុកយើង អ្នកទាំងពួងនឹងយល់ឃើញប្រការម្ដេច? **កងស៊ុនកុង**ជាប្អូនឆ្លើយថា កាលគ្រា**អ៊្លួនសៀវ**នៅរស់មិនទាន់ស្លាប់នៅឡើយនោះ ខ្ញុំឮដំណឹងថា**អ៊្លួនសៀវ**ប្រុងនឹងលើកទ័ពមកធ្វើអន្តរាយស្រុកយើងរឿយៗ ឥឡូវ**អ៊្លួនហ៊ី**, **អ៊្លួនសុង** ខូចស្រុករត់មក បើយើងនឹងឲ្យចូលទៅអាស្រ័យនោះ ក៏ឃើញថាមិនទំនង ព្រោះចិត្ត**អ៊្លួនហ៊ី**, **អ៊្លួនសុង**នោះឧបមាដូចក្អែក ទោះបីឲ្យអាស្រ័យនៅហើយ យូរទៅគង់នឹងប្រែចិត្តគិតប្រទូសរ៉ាយដណ្ដើមយកស្រុកយើង បីដូចក្អែកដណ្ដើមយកសំបុកតាវៅ បើដូច្នេះត្រូវតែយើងបញ្ឆោតឲ្យ**អ៊្លួនហ៊ី**, **អ៊្លួនសុង**ចូលមកចុះ រួចសឹមគិតចាប់ខ្លួនសម្លាប់ចេញ ហើយកាត់ក្បាលយកទៅឲ្យ**ចូឆ្វ**។ ស្រុកយើងក៏នឹងមិនមានសេចក្ដីអន្តរាយទៅ។ **កងស៊ុនខង**តបទៅថា បងក្រែងលោ**ចូឆ្វ**នោះមានកម្លាំងខ្លាំងពូកែឡើងទៀត ហើយនឹងលើកកងទ័ពឆ្លងមកវាយយកស្រុកយើង ដែលយើងនឹងឲ្យសម្លាប់**អ៊្លួនហ៊ី**, **អ៊្លួនសុង**នោះមិនគួរ បើចិញ្ចឹមទុកជាទាហានក៏នឹងបានជាកម្លាំង ហើយយើងនឹងលើកទ័ពទៅច្បាំងនឹង**ចូឆ្វ**ស្រួលល្អជាង។

**កងស៊ុនកុង**ឆ្លើយថា ដែលបងគិតដូច្នោះក៏ត្រូវហើយ តែសូមឲ្យប្រើទាហានបម្រើទៅស៊ើបស្ដាប់ការណ៍សិននឹងដឹងថា **ចូឆ្វ**នឹងលើកទ័ពឆ្លងមកវាយយកស្រុកយើងមែនឬទេ? បើលើកមកមែន សឹមយើងទទួលចិញ្ចឹម**អ៊្លួនហ៊ី**, **អ៊្លួនសុង**ទុក បើ

**ចូវឆ្វ**មិនលើកទ័ពមកញីញក់ស្រុកយើងទេ យើងត្រូវចាប់ខ្លួន**អ៊្វិនហ៊ី, អ៊្វិនស៊ុង**សម្លាប់ចេញ រួចកាត់យកក្បាលទៅឲ្យ**ចូវឆ្វ**។ **កងស៊ុនខង**យល់ឃើញត្រូវ ក៏ចាត់ទាហានជាបម្រើទៅស៊ើបស្តាប់ការណ៍ពីកងទ័ព**ចូវឆ្វ**។ ទាហានជាបម្រើទទួលពាក្យហើយក៏លាទៅ **កងស៊ុនខង**ក៏ចាត់ឲ្យទាហានចេញទៅទទួល**អ៊្វិនហ៊ី, អ៊្វិនុស៊ុង**ចូលមក។

ឯ**អ៊្វិនហ៊ី, អ៊្វិនស៊ុង**ក៏ប្រឹក្សានឹងគ្នា ទាហានក្នុងស្រុកលៀវតាំងនេះមានប្រហែលប្រាំម៉ឺនប្លាយ ឃើញថាល្មមនឹងទប់ទល់ទ័ព**ចូវឆ្វ**បាន ប្រសិនបើយើងចូលទៅនៅហើយ ត្រូវរិះគិតដណ្តើមយកស្រុកនេះរួចសម្លាប់**កងស៊ុនខង**ចេញ ហើយនឹងបានបញ្ចុះបញ្ចូលអ្នកស្រុកផ្សំនឹងទាហានរបស់យើង លើកទៅច្បាំងដណ្តើមយកខេត្តខណ្ឌខាងជើងរបស់យើងវិញ។ លុះប្រឹក្សាគ្នាស្រេចហើយ ក៏នាំគ្នាចូលទៅជួបនឹង**កងស៊ុនខង** ក្នុងខណៈនោះ **កងស៊ុនខង**ឲ្យរៀបចំទីសំណាក់អាស្រ័យឲ្យ**អ៊្វិនហ៊ី, អ៊្វិនស៊ុង**នៅតាមសមគួរ។ ឯ**កងស៊ុនខង**ក៏ធ្វើជាឈឺមិនសប្បាយ មិនបានចេញមកនិយាយការរាជការ ប្រាថ្នានឹងរង់ស្តាប់ដំណឹងកងទ័ព**ចូវឆ្វ**។

ឯទាហានដែលទៅស៊ើបការណ៍ ក៏ត្រឡប់មកវិញទាំងព័ត៌មានមកប្តឹង**កងស៊ុនខង**ថា ឥឡូវនេះ កងទ័ព**ចូវឆ្វ**មកតាំងបន្ទាយនៅក្នុងស្រុកអេកជីវ មិនបានរិះគិតនឹងលើកមកវាយស្រុកលៀវតាំងជាស្រុករបស់យើងទេ។ **កងស៊ុនខង**ឮដូច្នោះក៏មានអំណរ ទើបចាត់ទាហានប្រហែលហាសិបនាក់ កាន់អាវុធគ្រប់ដៃទៅពួនបង្កប់ខាងក្នុងហើយបង្គាប់ថា បើ**អ៊្វិនហ៊ី, អ៊្វិនស៊ុង**ចូលមកប្រឹក្សាការរាជការ ហើយឮសំឡេងយើងស្រែកថាយកចុះ ចូរនាំគ្នាចេញមកចាប់**អ៊្វិនហ៊ី, អ៊្វិនស៊ុង**នាំទៅសម្លាប់ចេញ លុះចាត់ចែងស្រេចហើយក៏ឲ្យបម្រើទៅហៅ**អ៊្វិនហ៊ី, អ៊្វិនស៊ុង**ចូលមកប្រឹក្សាការរាជការ។ (ឯកសារដើមបាត់ឃ្លាមួយចំនួន)

**កងស៊ុនខង**ឮហើយ ក៏បើកភ្នែកសម្លក់ហើយស្រែកថា នឹងបានកន្ទេលពីណាមកឲ្យអង្គុយ ក្បាលឯងទាំងពីរនាក់នេះនឹងត្រូវដាក់ជាលនាំយកទៅផ្លូវឆ្ងាយ ហើយក៏ស្រែកថាគ្នាយើងចុះដៃគ្នា ទាហានទាំងពួងក៏ចេញស្រមកចោមរោមពីមុខពីក្រោយចាប់**អ៊្លួនហ៊ី, អ៊្លួនសុង**កាប់សម្លាប់នៅទីនោះ ហើយកាត់យកក្បាលទៅច្រកជាលទុក។ **កងស៊ុនខង**ក៏ឲ្យទាហាននាំយកក្បាល**អ៊្លួនហ៊ី, អ៊្លួនសុង**នោះ ទៅឲ្យ**ចូឆូ**ឯស្រុកអេកជីវ។ ទាហានក៏នាំយកចេញទៅ។

ខណៈកាលដែល**ចូឆូ**តាំងទ័ពនៅក្នុងស្រុកអេកជីវនោះ **ហែហ៊្វូទុន** និង**គៀវលៀវ**និយាយជម្រាប**ចូឆូ**ថា លោកមិនលើកទ័ពទៅវាយស្រុកលៀវតាំង ហើយក៏មិនត្រូវមកបង្អង់នៅអ្វីក្នុងទីនេះឲ្យយូរការទេ គួរតែលើកទ័ពត្រឡប់ចូលទៅស្រុកហ៊ូតោវិញស្រួលជាង ខ្លាច**ឡៅពៀវ** និង**ឡៅពី**លើកទ័ពមកធ្វើអន្តរាយ ហើយនឹងបានរិះគិតការពាររក្សាស្រុកតទៅ។ **ចូឆូ**ឆ្លើយថា អ្នករាល់គ្នានិយាយនេះត្រូវហើយ តែយើងសូមឲ្យបង្អង់ឈប់ចាំពួកអ្នកស្រុកលៀវតាំងយកក្បាល**អ៊្លួនហ៊ី, អ៊្លួនសុង**មកឲ្យយើងសិន រួចសឹមយើងលើកកងទ័ពត្រឡប់ទៅវិញ។ សេនាទាហានទាំងពួងបានស្តាប់ហើយ ក៏មិនមានសេចក្តីជឿដល់តិចសោះ ទាំងអស់គ្នាមើលមុខគ្នាទៅវិញទៅមកក៏ញញឹម។ ខណៈនោះ មានអ្នកបម្រើម្នាក់ចូលមកជម្រាបថា ទាហាន**កងស៊ុនខង**នាំក្បាល**អ៊្លួនហ៊ី, អ៊្លួនសុង**មកជូនលោក។ ក្នុងខណៈនោះ ទីប្រឹក្សានិងសេនាទាហានទាំងអស់ក៏តក់ស្លុតរន្ធត់ក្នុងចិត្ត មើលមុខគ្នាស្រឡាំងកាំងទាំងអស់គ្នា **ចូឆូ**ក៏ឲ្យហៅបម្រើ**កងស៊ុនខង**ឲ្យចូលមក។ ទាហាននោះគំនាប់ហើយជម្រាបថា **កងស៊ុនខង**ឮដំណឹងថា **អ៊្លួនហ៊ី, អ៊្លួនសុង** ជាសត្រូវនឹងមហាឧបរាជ ទើបចាប់ខ្លួនសម្លាប់កាត់យកក្បាលឲ្យខ្ញុំបាទនាំមកជូនលោក។ ឯខ្លួន**កងស៊ុនខង**នោះថា សូមពឹងបុណ្យមហាឧបរាជតមក។

**ចូឆ្វ**ឮហើយក៏មានអំណរពន់ប្រមាណណាស់ សើចហើយនិយាយនឹងទាហានទាំងពួងថា **គុយកែ**នោះក្មេងតែខ្លួនទេ ឯត្រង់តម្រិះប្រាជ្ញាវិញនោះ នឹងសម្គាល់មើលការអ្វីមិនចេះខុសសោះ។ ថាហើយក៏យកមាសប្រាក់និងគ្រឿងសម្លៀកបំពាក់មកឲ្យបម្រើ**កងស៊ុនខង**ជាច្រើន ហើយឲ្យធ្វើត្រា តាំង**កងស៊ុនខង**ជាចៅហ្វាយស្រុកលៀវតាំងជាបំណាច់តាមគុណគាប់។ បម្រើក៏ទទួលរបស់ទ្រព្យនិងត្រាតាំង ហើយលា**ចូឆ្វ**វិលទៅស្រុកលៀវតាំងវិញ។ ទីប្រឹក្សានិងសេនាទាហានទាំងអស់គ្នាក៏ជម្រាបសួរ**ចូឆ្វ**ថា កាលបម្រើ**កងស៊ុនខង**នាំក្បាល**អ៊ួនហ៊ី, អ៊ួនសុង**មកជូនលោកមានប្រសាសន៍សរសើរ**គុយកែ**ថា មានតម្រិះប្រាជ្ញាប្រមាណការអ្វីមិនខុសនោះ **គុយកែ**បាននិយាយថាម្ដេចខ្លះឲ្យលោក? **ចូឆ្វ**ក៏លូកយកសំបុត្រ**គុយកែ**ឲ្យទុកកាលជិតនឹងស្លាប់នោះ មកឲ្យអ្នកទាំងអស់គ្នាមើល ឃើញសេចក្ដីថា ខ្ញុំបាទ**គុយកែ**សូមជម្រាបទុកដល់មហាឧបរាជសូមជ្រាប ព្រោះខ្ញុំបាទដឹងថា **អ៊ួនហ៊ី, អ៊ួនសុង**នោះនឹងរត់ទៅនៅពឹងបុណ្យ**កងស៊ុនខង**ចៅហ្វាយស្រុកលៀវតាំង កុំឲ្យលើកកងទ័ពទៅធ្វើអន្តរាយស្រុកលៀវតាំងនោះ ឲ្យបណ្ដារាស្ត្រអ្នកស្រុកបានសេចក្ដីព្រួយលំបាកក្ដៅក្រហាយឡើយ ព្រោះហេតុថា**កងស៊ុនខង**និង**អ៊ួនហ៊ី, អ៊ួនសុង**នោះ មុខជានឹងប្រទូសរ៉ាយគ្នាមិនខាន ហើយលោកលើកទ័ពទៅវាយស្រុកលៀវតាំងវេលាណា ខ្ញុំបាទឃើញថា**កងស៊ុនខង**និង**អ៊ួនហ៊ី, អ៊ួនសុង**ក៏គង់នឹងរួមគំនិតគ្នាច្បាំងនឹងលោកឲ្យទាហានលោកបានសេចក្ដីលំបាក។ ទីប្រឹក្សាសេនាទាហានទាំងពួងឃើញសេចក្ដីសំបុត្រដូច្នោះ ក៏អស្ចារ្យក្នុងចិត្តនាំគ្នាទះដៃសរសើរ**គុយកែ**ថា មានតម្រិះប្រាជ្ញាសម្គាល់ការអ្វីដូចទេព្ដា មកបញ្ជូលឲ្យថាត្រូវមិនខុសសោះ ហើយនាំគ្នាតែងគ្រឿងសែនមានទៀនធូបអុជបូជាសព**គុយកែ**ទាំងអស់គ្នា។

កាល**គុយកែ**ទៅនៅនឹង**ចូឆ្វ**នោះអាយុ២៧ឆ្នាំ ធ្វើរាជការមានបំណាច់គាប់ប្រសើរ១១ឆ្នាំ កាលស្លាប់នោះអាយុ៣៨ឆ្នាំ។ **ចូឆ្វ**ក៏លើកកងទ័ពទៅតាំងនៅស្រុកគីជីវ ហើយឲ្យទាហាននាំយកសព**គុយកែ**ហែទៅបញ្ចុះទុកឯស្រុកហ៊ូតោ។ **ផៀយ៉ុក**ជម្រាប**ចូឆ្វ**ថា អាណាខេត្តខាងទិសឧត្តរនោះ លោកក៏បានប្រាបប្រាមរាបទាបហើយ សូមឲ្យលោកលើកកងទ័ពត្រឡប់ទៅស្រុកក្រុងវិញ ដើម្បីនឹងបានបម្រុងសេនាទាហានឲ្យមានកម្លាំងហើយនឹងលើកកងទ័ពទៅវាយស្រុក**ស៊ុនគួន**។ **ចូឆ្វ**តបថា ដែលអ្នកដាស់តឿនដូច្នេះ ក៏ត្រូវសមនឹងគំនិតរបស់យើងហើយ។ លុះដល់ពេលយប់ **ចូឆ្វ**ក៏នាំ**ស៊ុនហ៊ីវ**ឡើងលើសើនបន្ទាយ ឃើញផ្កាយខាងទិសទក្សិណមានរស្មីរុងរឿង ក៏ចង្អុលឲ្យ**ស៊ុនហ៊ីវ**មើលផ្កាយហើយថា ដែលយើងនឹងលើកកងទ័ពទៅវាយស្រុកកាំងតាំងនោះ ឃើញថាមិនស្រួលទេ ព្រោះផ្កាយខាងទិសទក្សិណត្រង់ស្រុកកាំងតាំងមានរស្មីជ្រះថ្លាភ្លឺត្រចះណាស់។ **ស៊ុនហ៊ីវ**តបថា មហាឧបរាជមានវាសនាធំទូលាយពេកណាស់ ទោះបីបើផ្កាយខាងទិសទក្សិណមានរស្មីបរិបូរយ៉ាងណាក្តី បើយើងនឹងលើកទ័ពទៅប្រាបប្រាម ក៏គង់នឹងរាបទាបបាន ដោយបុណ្យនិងអំណាចប្រាជ្ញារបស់លោកជាប្រាកដ។ កាលកំពុងនិយាយគ្នានោះ **ចូឆ្វ**និង**ស៊ុនហ៊ីវ**ទទួលក្រឡេកទៅខាងក្រោមសើន ឃើញពន្លឺរស្មីដីជាអណ្តាតភ្លើងឆេះឡើងកម្ពស់ប្រហែលបួនហត្ថ **ចូឆ្វ**ក៏សួរ**ស៊ុនហ៊ីវ**ថា ហេតុម្តេចបានជាកើតភ្លើងភ្លឺដូច្នេះ? **ស៊ុនហ៊ីវ**តបថា ប្រហែលក្រោមដីនោះមានរបស់អ្វីចម្លែកទើបដូច្នេះ។ **ចូឆ្វ**ចុះមកមើលហើយឲ្យទាហានជីកបានរូបក្អែកមាសមួយក្រហម ទំហំប៉ុនផ្លែក្រូចដំបៀតបាន ឬក្រូចឃ្វិច។ **ចូឆ្វ**ក៏យកមកមើលហើយសួរ**ស៊ុនហ៊ីវ**ថា ដែលយើងបានរបស់យ៉ាងនេះជាល្អឬអាក្រក់ប្រការម្តេច? **ស៊ុនហ៊ីវ**ឆ្លើយថា កាលគ្រាមាតាព្រះចៅ**ស៊ុនតេ**នៅជារាស្ត្រចំណុះស្រុកក្រៅនៅឡើយ មានសុបិននិមិត្តថា បានលេបហង្សចម្លាក់ចូលទៅ

ក្នុងពោះ លុះអំណើះតមក ព្រះនាងក៏មានគភ៌ ប្រសូតចេញមកជាបុត្រប្រុស លុះមានវ័យចម្រើនឡើងប្រាកដជាកតញ្ញូដឹងគុណណាស់។ ខណៈនោះ ព្រះចៅ**ង៉ៀវតេ**បាបសោយរាជសម្បត្តិទ្រង់ជ្រាបថា បុត្រព្រះនាងនោះមានសេចក្ដីសុចរិតកតញ្ញូនឹងមាតា ទើបទ្រង់ព្រះរាជទានព្រះធិតា អំណើះតមកក៏បានសោយរាជសម្បត្តិទ្រង់ព្រះនាមព្រះចៅ**ស៊ុនតេ** ដែលលោកបានរូបក្លោកមាសដូច្នេះល្អណាស់។

**ចូឆ្វ**ឮដូច្នោះក៏មានចិត្តសោមនស្សត្រេកអរពន់ប្រមាណ ប្រមូលទាហាន និងអ្នកស្រុកឲ្យរកឥដ្ឋកំបោរមកគរធ្វើជាប្រាសាទ នៅក្បែរមាត់ទន្លេជៀងហោ ត្រង់តំបន់ង៉ៀបគុន។ ប្រាសាទនោះខ្ពស់ធំណាស់ ធ្វើមួយឆ្នាំទើបហើយស្រេច រួចឲ្យយករូបក្លោកមាសទៅតាំងទុកលើប្រាសាទសម្រាប់នឹងបានគោរពបូជា។ **ចៅសិត**ជាប្អូន**ចៅភី**ជម្រាប**ចូឆ្វ**ជាបិតាថា បិតាសាងប្រាសាទនេះហើយ ត្រូវសាងជាទីបន្ទប់ទាំងសងខាង ខាងស្ដាំនោះឲ្យធ្វើជារូបម្កុរ ខាងឆ្វេងឲ្យធ្វើជារូបហង្សទុក ហើយឲ្យធ្វើស្ពានតរហូតចូលទៅជាប់នឹងប្រាសាទធំ ត្រង់ទ្វារដើរចេញចូលបានរហូតទៅសងខាង ទើបនឹងល្អសមគ្នា។ **ចូឆ្វ**ក៏ចូលចិត្តទើបបង្គាប់ឲ្យ**ចៅភី** និង**ចៅសិត**ធ្វើជាមេការត្រួតត្រាការនេះ ឯ**ទៀវអៀវ**នោះក៏លើកទាហានទៅតាំងបម្រុងការពាររក្សាចុងដែនស្រុកគីជីវ។ ខណៈនោះ **ចូឆ្វ**បានទាហានរបស់**អ៊្លួនសៀវ**ប្រហែលហាសិបម៉ឺន និងទាហានឯកជាច្រើន **ចូឆ្វ**ក៏ចាត់ចែងទុកព្រមស្រេចហើយ ក៏លើកទ័ពត្រឡប់ចូលទៅក្រុងហ៊ូតោវិញ តាំងចែករង្វាន់ជាគុណបំណាច់តាមគុណានុរូប ហើយ**ចូឆ្វ**ឲ្យហៅខ្លួន**គុយអេក**ជាបុត្រ**គុយកែ**មកចញ្ចឹមរក្សាទុកឲ្យធ្វើរាជការ ទើបប្រឹក្សានឹងខុំរាជការតូចធំថា យើងនឹងលើកកងទ័ពទៅកម្ចាត់**ឡៅពៀវ** និង**ស៊ុនគួន**ទៀត តើអ្នករាល់គ្នាយល់ឃើញល្អឬអាក្រក់ប្រការម្ដេច? **ស៊ុនហុក**ឆ្លើយថា លោកទៅធ្វើការសង្គ្រាមទើបនឹងវិលមកថ្មី ទាហានទាំងពួងក៏កំពុងតែនឿយហត់នៅឡើយ សូមឲ្យ

ឈប់បង្អង់បម្រុងកម្លាំងទាហានឲ្យស្រួលបួលសិន កាលណាចូលឆ្នាំថ្មីរួចសឹមលើក ទៅធ្វើការ។ **ចូឆ្វ**ក៏យល់ត្រូវផង ទើបតាំងហាត់សមទាហានបម្រុងគ្រឿងសាស្ត្រាវុធទុកព្រមព្រៀង និងឲ្យមានចិត្តក្លាហានក្នុងការសឹកសង្គ្រាម។

ឯ**ឡៅពី**ដែលនៅក្នុងដែនស្រុកកេងជីវនោះ **ឡៅពៀវ**ក៏ទំនុកបម្រុងដល់ខ្នាត សម័យមួយមានបម្រើសេះម្នាក់នាំសេចក្តីចូលមកជម្រាប**ឡៅពៀវ**ថា **ទៀវប៊ូ** និង **តាន់ស៊ូន** ដែលលោកឲ្យលើកទាហានទៅយាមល្បាតផ្លូវគយ នៅស្រុកកាំងហៃ និង ស្រុកកាំងតាំងនោះ ឥឡូវ**ទៀវប៊ូ** និង**តាន់ស៊ូន**នោះលើកទាហានដើររាតត្បាតយក របស់ទ្រព្យអាណាប្រជានុរាស្ត្រជាចលាចលខ្លាំងណាស់ ហើយមានចិត្តកំរើបតាំង រឹងទទឹងនៅស្រុកកាំងហៃ។ **ឡៅពៀវ**ឮហើយក៏តក់ស្លុតក្នុងចិត្ត ទើបប្រឹក្សានឹង សេនាទាហានទាំងពួងថា យើងនឹងរិះគិតប្រការម្តេច? **ឡៅពី**ឆ្លើយថា ដែល**ទៀវប៊ូ** និង**តាន់ស៊ូន**គិតប្រទូសរ៉ាយនឹងលោកនោះ ខ្ញុំបាទនឹងសូមទទួលអាសាទៅកម្ចាត់ ចេញឲ្យបាន។ **ឡៅពៀវ**បានស្តាប់ដូច្នោះក៏យល់ព្រម ទើបប្រមូលពលទាហានបាន បីម៉ឺនប្រគល់ឲ្យ**ឡៅពី** ៗក៏នាំ**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង**លើកទ័ពចេញទៅដល់ដែន ស្រុកកាំងហៃ ហើយឲ្យតាំងបន្ទាយនៅទីនោះ។

ឯ**ទៀវប៊ូ, តាន់ស៊ូន**ដឹងថា **ឡៅពី**លើកទ័ពមក ក៏លើកទាហានចេញមកច្បាំង នឹង**ឡៅពី** ៗក៏នាំទាហានចេញទៅក្រៅបន្ទាយហើយប្រើ**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង** បរសេះចេញទៅមុខទាហានទាំងពួង។ **ឡៅពី**ឃើញសេះដែល**ទៀវប៊ូ**ជិះមាន លក្ខណៈថ្វីជើងរួសរហ័យលឿនណាស់ ក៏និយាយនឹង**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង**ថា សេះដែល**ទៀវប៊ូ**ជិះនោះល្អពេញចិត្តយើង ធ្វើម្តេចយើងនឹងបានយកមកទុកជិះ? **ជូឡុង**ឆ្លើយថា លោកកុំព្រួយឡើយ ខ្ញុំបាទនឹងទទួលយកអាសាចេញទៅចាប់យក សេះនោះជូនលោកឲ្យបាន ហើយក៏បរសេះរាំទួនចេញទៅច្បាំងនឹង**ទៀវប៊ូ**បានបី

ភ្លេង **ជូឡុង**យកទួនចាក់ត្រូវ**ទៀវប៊ូ**ធ្លាក់ពីលើសេះស្លាប់ ហើយចាប់សេះនោះនាំមកឲ្យ**ឡៅពី**។ **តាន់ស៊ូន**ឃើញដូច្នោះក៏ខឹង បរសេះវាំងាវចេញមកតនឹងដណ្តើមយកសេះទៅវិញ ទទួល**តៀវហ៊ុយ**ក្រឡេកឃើញក៏បរសេះចេញទៅស្ទាក់ពីមុខ ហើយយកទួនចាក់ត្រូវ**តាន់ស៊ូន**ធ្លាក់ពីលើសេះស្លាប់ ទាហាន**ទៀវប៊ូ**, **តាន់ស៊ូន**ក៏បែកខ្ចាត់ខ្ចាយទៅខ្លះ នាំគ្នាចូលមកនៅខាង**ឡៅពី**ខ្លះ។

ខណៈនោះ **ឡៅពី**ក៏ប្រាប់ប្រាមបណ្តារាស្ត្រក្នុងស្រុកកាំងហែឲ្យនៅជាប្រក្រតី ហើយលើកទ័ពត្រឡប់មកវិញ **ឡៅពៀវ**ដឹងដំណឹងក៏ចេញទៅទទួល**ឡៅពី**ដល់ទីទ្វារស្រុក ហើយនាំ**ឡៅពី**ចូលមក **ឡៅពី**ក៏អធិប្បាយរ៉ាយរឿងដែលទៅច្បាំងនោះ ឲ្យ**ឡៅពៀវ**ស្តាប់សព្វគ្រប់ប្រការ។ **ឡៅពៀវ**ត្រេកអរណាស់ ឲ្យរៀបតុលៀងភោជនាហារ**ឡៅពី**។ ខណៈកាល**ឡៅពី**កំពុងសេពសុរាបរិភោគនោះ **ឡៅពៀវ**ក៏សរសើរ**ឡៅពី**ថា ប្អូនឯងមានសតិបញ្ញានិងថ្វីដៃខ្លាំងពូកែណាស់ តែបងមានវិតក្កព្រោះស្រុកយើងនេះជាស្រុកមុខគយ។

ខ្លាច**ស៊ុនគួន**ចៅហ្វាយស្រុកកាំងតាំងមួយ ខ្លាច**ទៀវឡូ**ចៅហ្វាយស្រុកតាំងធួនមួយ និងស្រុកឡាំអ៊្លួតដែលនៅក្រៅដែនស្រុកចិន (ស្រុកកេងជីវ)១ នឹងលើកទ័ពមកធ្វើអន្តរាយស្រុកយើង។ **ឡៅពី**ឆ្លើយថា ទាហានខ្ញុំបាទបីនាក់ សុទ្ធតែមានថ្វីដៃខ្លាំងពូកែក្លាហានណាស់ បើលោកឃើញថា នៅទីគយតំបន់ឯណាជាផ្លូវមុខទ័ព នឹងឲ្យទៅឈរការពារស្រុកនៅតំបន់នោះចុះ។

**ឡៅពៀវ**ដឹងច្បាស់ដូច្នោះ ក៏មានសេចក្តីត្រេកអរណាស់ទើបឲ្យហៅទាហានទាំងបីនាក់នោះមកមើលរូប ហើយឲ្យ**តៀវហ៊ុយ**នាំទាហានចេញទៅឈររក្សាគយតដែនស្រុកឡាំអ៊្លួត ឲ្យ**គួនអ៊ូ**នាំទាហានទៅឈរគយតដែនស្រុកតាំងធួន ឲ្យ**ជូឡុង**នាំទាហានទៅឈររក្សាគយតដែនស្រុកកេងជីវ តដែនស្រុកកាំងតាំង។ ខណៈនោះ

**ឡៅពៀរ**ក៏ទុកចិត្ត មិនបានគិតខ្លាចបារម្ភសឹកសត្រូវស្រុកណានឹងលើកមកធ្វើអន្តរាយស្រុកនោះឡើយ។

លុះក្រោយពីនោះមក **ឈួម៉**ក៏ចូលទៅនិយាយប្រាប់**ឈួហ៊ួយិន**ជាបង ដែលជាភរិយា**ឡៅពៀរ**ថា ឥឡូវនេះ**ឡៅពៀរ**ជឿស្តាប់ពាក្យសម្តី**ឡៅពី**ណាស់ ឱ្យសេនា**ឡៅពី**ទាំងបីនាក់លើកទាហានទៅឈររក្សាគយចុងដែនទាំងបីតំបន់ ឯខ្លួន**ឡៅពី**នោះនៅក្នុងស្រុកយូរទៅខ្ញុំឃើញថាគង់នឹងមានភ័យដល់ខ្លួនយើង និង**ឡៅពៀរ**ជាប្រាកដ ហើយ**ឈួម៉**ក៏លាថយចេញទៅវិញ។ លុះវេលាយប់នាង**ឈួហ៊ួយិន** ក៏ក្លែងកលមាយានិយាយនឹង**ឡៅពៀរ**ថា សព្វថ្ងៃនេះខ្ញុំឮដំណឹងថា បណ្តាអ្នកស្រុកក្នុងស្រុកកេងជីវតែងទៅមករក**ឡៅពី**ជាអ៊ូអរណាស់ សូមឱ្យលោកគិតរាំងខ្លួនឱ្យមែនទែន បើមិនដូច្នោះទេ ត្រូវឱ្យ**ឡៅពី**ចេញទៅនៅរក្សាស្រុកខាងក្រៅដែលជាចំណុះស្រុកយើង ស្រួលជាងឱ្យនៅក្នុងស្រុកនេះ បើលោកមិនជឿស្តាប់ខ្ញុំទេ ភ័យអន្តរាយនឹងមានដល់ខ្លួនលោកទៅថ្ងៃក្រោយ។ **ឡៅពៀរ**ឆ្លើយតបថា ឯ**ឡៅពី**នោះជាមនុស្សសត្យសុចរិត មិនមែនប្រទូសរ៉ាយដល់យើងទេ។ នាង**ឈួហ៊ួយិន**ឆ្លើយថា ដែលលោកមកគិតប្រមាណចិត្ត**ឡៅពី**ថាជាត្រង់ល្អនោះ ក្រែងគេមិនមែនត្រង់ដូចប្រសាសន៍លោក។ **ឡៅពៀរ**ក៏នៅស្ងៀមិនថាប្រការម្តេចឡើយ។

លុះក្រោយនោះមកមានថ្ងៃមួយ **ឡៅពៀរ**ជិះសេះនាំទាហានចេញទៅលេងក្រៅស្រុក **ឡៅពី**ក៏ជិះសេះតាមទៅ **ឡៅពៀរ**ក្រឡេកឃើញសេះ**ឡៅពី**ល្អក៏សួរថា សេះនេះឯងបានមកពីណា? **ឡៅពី**ឆ្លើយថា សេះនេះរបស់**ទៀវប៊ូ** កាលម្ចាស់វាស្លាប់ទៅហើយ ខ្ញុំក៏យកទុកជិះ។ **ឡៅពៀរ**ឮដូច្នោះ ក៏ពិនិត្យមើលលក្ខណៈសេះនោះសព្វគ្រប់ សរសើរថាល្អស្អាតសម្បុរពព្រុះ។ **ឡៅពី**យល់ថា **ឡៅពៀរ**មានចិត្តស្រឡាញ់សេះនោះ ក៏ចុះចេញពីលើខ្នងសេះនោះថា លោកចូលចិត្តស្រឡាញ់ឬ ខ្ញុំបាទជូនទុក

ជិះលេង? **ឡៅពៀរ**ក៏ទទួលអំណោយសេះនោះ ហើយឡើងជិះត្រឡប់មកផ្ទះវិញ។ **កេងអ៊្លិត**ឃើញ**ឡៅពៀរ**បានសេះប្លែកក៏សួរ**ឡៅពៀរ**ថា សេះនេះលោកបានមកពីណា? **ឡៅពៀរ**ប្រាប់ថា សេះនេះរបស់**ទៀវប៊ូ** **ឡៅពី**ទៅច្បាំងដណ្ដើមបានមក យកមកឱ្យយើង។ **កេងអ៊្លិត**ក៏ពិនិត្យមើលលក្ខណៈសេះនោះឃើញក្រយ៉ៅកាច ក៏ជម្រាបថា **កេងលៀង**បងខ្ញុំបាទចេះមើលក្ខណៈសេះល្អអាក្រក់ជាប្រាកដណាស់ កាល**កេងលៀង**ជិតស្លាប់បានប្រាប់ខ្ញុំបាទឱ្យរៀនមើលតម្រានៅសព្វថ្ងៃ ខ្ញុំបាទបានពិនិត្យមើលឃើញសេះនេះមានថ្វីជើង និងកម្លាំងរួសរហ័សពូកែណាស់ តែមានក្រយ៉ៅកាចនៅក្បែរភ្នែកទាំងពីរ ខាងក្រោមនោះហៅថា រងទឹកភ្នែក ខាងចិញ្ចើមនោះ មានរោមកាចសម្បុរស៊ែម **ទៀវប៊ូ**ជិះសេះនេះច្បាំងទើបដល់សេចក្ដីស្លាប់ ដែលលោកនឹងយកសេះនេះទុកមកជិះមិនស្រួលទេ ព្រោះលក្ខណៈសេះនេះ ធ្វើទុក្ខឱ្យទោសម្ចាស់របស់វា។

**ឡៅពៀរ**ឮដូច្នោះ ក៏ជឿពាក្យ**កេងអ៊្លិត** លុះវេលាព្រឹកឡើងទើបឱ្យហៅ**ឡៅពី**មកស៊ីលៀងហើយថា ដែលប្អូនឱ្យសេះមកបងនោះ បងអរគុណណាស់ តែខ្លួនបងមិនបានចេញធ្វើសង្គ្រាមទេ ប្អូនត្រូវយកសេះនេះទុកជិះសម្រាប់ដើរច្បាំងចុះ។ **ឡៅពី**មិនបានដឹងហេតុក៏ទទួលយកសេះនោះទៅវិញដោយសេចក្ដីត្រេកអរ ហើយគំនាប់**ឡៅពៀរ** ឱ្យមនុស្សនាំសេះនោះទៅ។ **ឡៅពៀរ**និយាយនឹង**ឡៅពី**ថា ស្បៀងអាហារក្នុងស្រុកស៊ិនអៀក៏បរិបូរព្រម ប្អូនចូរនាំគ្រួសារនិងសេនាទាហានទៅនៅរក្សាស្រុកស៊ិនអៀចុះ។ **ឡៅពី**ក៏ទទួល លុះពេលព្រឹកឡើង ក៏រៀបចាត់ចែងទាហាន និងរបស់ទ្រព្យ ហើយនាំគ្រប់គ្រួចេញទៅ។ **ឡៅពី**ជិះសេះចេញពីស្រុកកេងជីវ ទៅជួបនឹង**អីជៀ**ដែលនៅនឹង**ឡៅពៀរ**។ **ឡៅពី**ក៏ចុះពីលើសេះគំនាប់**អីជៀ**។

ចំណែក**អ៊ីជៀ**ក៏ប្រាប់**ឡៅពី**ថា ពីម្សិលមិញខ្ញុំបានឮ**កេងអ៊្វិត**ប្រាប់**ឡៅពៀវ**ថា សេះនេះឈ្មោះតេកឡៅ លក្ខណៈកាចឲ្យទោសដល់ម្ចាស់របស់ **ឡៅពៀវ**ខ្លាចបានជាបង្វិលឲ្យលោកវិញ លោកមិនជ្រាបទេឬ បានជាយកសេះនេះមកជិះ? **ឡៅពី**ឮហើយក៏ថា ដែលបានឲ្យដំណឹងយើង ៗគាប់ចិត្តណាស់ហើយ ហេតុដែលល្អនិងអាក្រក់នោះក៏តាមបុណ្យ តាមកម្មរបស់ខ្លួនកសាងមក ខ្ញុំមិនត្រូវសង្ស័យអ្វីឡើយ។ ហើយ**ឡៅពី**ក៏លា**អ៊ីជៀ**ទៅដល់ស្រុកស៊ិនអៀ ទំនុកបម្រុងអាណាប្រជានុរាស្ត្រដោយសុចរិតយុត្តិធម៌ បណ្តាមហាជនទាំងពួងក៏មានចិត្តស្រឡាញ់រាប់អាន**ឡៅពី**ជាច្រើន ឯ**អ៊ីជៀ**ក៏តែងទៅមករក**ឡៅពី**ជានិរន្តរ៍។

សម័យនោះ ព្រះចៅ**ហៀនតេ** ស្តេចទៅប្រថាប់គង់ក្នុងក្រុងហ៊្វូតោបានដប់ពីរឆ្នាំ ឯនាង**កាំហ៊្វូយិន** ដែលជាភរិយា**ឡៅពី**ក៏មានគភ៌ចាស់ខែ លុះដល់ខែមាឃខាងខ្នើតពេលកណ្តាលអាធ្រាត្រ នាង**កាំហ៊្វូយិន**បានឮសំឡេងសត្វវាយុភក្ស ស្រែកត្រង់ដំបូលប្រហែលសែសិបម៉ាត់ ហើយហើរស្រែកពីទិសបស្ចិម មានក្លិនគ្រឿងក្រអូបបណ្តាលផុំត្រឡប់អប់ចេញក្នុងទីលំនៅ ហើយនាង**កាំហ៊្វូយិន**ក៏ប្រសូតបុត្រប្រុសចេញមក។ កាលនាង**កាំហ៊្វូយិន**មានគភ៌ជាដំបូងនោះ មាននិមិត្តថា “អាកៅ” ព្រោះពាក្យថា “អាកៅ” នេះភាសាចិនហៅថាផ្កាយក្រពើ។ ខណៈនោះ**ឡៅពី**ដឹងដំណឹងថា**ចូឆូ**លើកទ័ពទៅអាណាខេត្តខាងទិសឧត្តរទៀត **ឡៅពី**ក៏ចូលទៅស្រុកកេងជីវ ហើយប្រាប់**ឡៅពៀវ**ថា ឥឡូវ**ចូឆូ**លើកកងទ័ពទៅអាណាខេត្តខាងទិសឧត្តរទៀត ខ្ញុំចង់ឲ្យលោកកេណ្ឌពលទាហានក្នុងស្រុកកេងជីវ និងស្រុកចំណុះឲ្យអស់រលីងលើកទៅវាយយកស្រុកហ៊្វូតោ ឃើញថានឹងបានដោយងាយ។ **ឡៅពៀវ**តបថា ខេត្តយើងមានស្រុកចំណុះដល់ប្រាំបួនមណ្ឌល ក៏ល្មមជាសុខហើយ ដែលយើងរិះគិតរំលងទៅយកស្រុកឯទៀត ធ្វើឲ្យអន្តរាយដល់សេចក្តីសុខរបស់គេផង មិនគួរទេ បើ

គេលើកមកប្រទូសរ៉ាយយើងមុននោះ សឹមយើងរិះគិតការពាររក្សាស្រុកឲ្យបានសុខសាន្តស្រួលជាង។ **ឡៅពី**ក៏មិនបានឆ្លើយតបថាអ្វី **ឡៅពៀវ**ក៏នាំ**ឡៅពី**ចូលទៅបរិភោគអាហារខាងក្នុង។

ខណៈកាលកំពុងបរិភោគនោះ **ឡៅពៀវ**ក៏ដកដង្ហើមធំ **ឡៅពី**សួរថា លោកមានសេចក្តីព្រួយចិត្តពីអ្វី ទើបដកដង្ហើមធំដូច្នេះ? **ឡៅពៀវ**ឆ្លើយថា បងមានសេចក្តីព្រួយរំខានក្នុងចិត្តជាទីបំផុត ដែលនឹងចាប់ដកយកមកបង្ហាញនោះមិនកើត។ **ឡៅពី**ក៏អង្វរថា សេចក្តីទុក្ខរបស់លោកនោះយ៉ាងណា ចូរមានប្រសាសន៍មកឲ្យខ្ញុំដឹងផងចុះ។ ទទួល**ឡៅពៀវ**ក្រឡេកទៅឃើញនាង**ឈួហ៊្វិយិន**ជាភរិយាអើតមុខចេញមក **ឡៅពៀវ**ក៏ក្រវីក្បាលឲ្យ**ឡៅពី**។ លុះបរិភោគអាហាររួច **ឡៅពី**ក៏លា**ឡៅពៀវ**ត្រឡប់ទៅស្រុកស៊ិនអៀ ទទួលឮដំណឹងថា **ចូឆ្វ**លើកកងទ័ពបកត្រឡប់មកស្រុកហ៊្វូតោវិញ **ឡៅពី**ក៏នឹកស្តាយណាស់អង្គុយដកដង្ហើមធំ ព្រោះ**ឡៅពៀវ**មិនព្រមធ្វើតាមគំនិត ប្រសិនបើលើកកងទ័ពទៅក្នុងវេលាដែលគិតនោះ ក៏នឹងវាយយកស្រុកហ៊្វូតោបានយ៉ាងស្រួល។

ខណៈនោះ មានបម្រើសេះមកប្រាប់**ឡៅពី**ថា **ឡៅពៀវ**ឲ្យអញ្ជើញទៅស្រុកកេងជីវនោះ**ឡៅពី**ក៏ចូលទៅ ដល់ហើយក៏គំនាប់**ឡៅពៀវ**ហើយថា ដែលឲ្យហៅខ្ញុំមកដោយហេតុអ្វី? **ឡៅពៀវ**ប្រាប់ថា កាលប្អូននិយាយឲ្យបងលើកកងទ័ពទៅវាយស្រុកហ៊្វូតោនោះបងក៏មិនយល់ព្រមព្រោះបងគិតខុស ឥឡូវបងឮដំណឹងថា **ចូឆ្វ**លើកទ័ពត្រឡប់ចូលមកស្រុកហ៊្វូតោវិញហើយ កំពុងរិះគិតនឹងលើកទ័ពមកវាយស្រុកយើងទៀត។ **ឡៅពី**តបថា លោកនឹងប្រញាប់តូចចិត្តធ្វើការនោះមិនគួរទេ ព្រោះក្នុងសម័យនេះផែនដីកំពុងតែកើតចលាចលខ្លាំងណាស់ បើ**ចូឆ្វ**លើកទៅធ្វើការសឹកនៅតំបន់ឯណា យើងមើលទៅឃើញបានការហើយ សឹមលើកកងទ័ពទៅចោម

វាយយកស្រុកហ្ស៊ីតោ ក៏គង់តែនឹងបាន។ **ឡៅពៀវ**យល់ឃើញថាស្រួលក៏និយាយថា ប្អូនគិតនេះឃើញថាគួរណាស់ ហើយក៏ឲ្យ**ឡៅពី**ចូលទៅបរិភោគអាហារ។ កាលដែលកំពុងបរិភោគអាហារសេពស្រានោះ**ឡៅពៀវ**ក៏យំសោកា។ **ឡៅពី**ឃើញដូច្នោះក៏សួរថា ហេតុម្ដេចបានជាលោកចេះតែយំសោកសៅច្រើនម្ល៉េះ?

**ឡៅពៀវ**តបថា សេចក្ដីទុក្ខក្ដៅក្នុងទ្រូងបងសព្វថ្ងៃនេះជាទម្ងន់ខ្លាំងណាស់ កាលមុននោះប្អូនសួរសាករៀបតែនឹងនិយាយប្រាប់ ក៏ប្រាប់មិនទាន់។ **ឡៅពី**ថារឿងទុក្ខរបស់លោកនោះជាយ៉ាងម៉េច? ចូរប្រាប់ឲ្យខ្ញុំដឹងផងចុះ ទោះបីបើលោកត្រូវការនឹងប្រើប្រាស់ឲ្យខ្ញុំទៅឯណាក្ដី ខ្ញុំក៏ត្រូវទទួលអាសាត្រាតែអស់ជីវិត។

**ឡៅពៀវ**និយាយថា នាង**កាន់ស៊ី**ជាភរិយាធំរបស់បង ដែលស្លាប់ទៅហើយនោះមានបុត្រម្នាក់ឈ្មោះ**ឡៅគី** មានប្រាជ្ញាឆ្លៀវឆ្លាតណាស់ តែជាមនុស្សចិត្តទន់ បើនឹងគិតការអ្វីក៏មិនរហូតទៅបាន ឯ**ឡៅចុង**បុត្រនាង**ឈួហ៊ូយិន**ជាភរិយាបងសព្វថ្ងៃនេះ មានប្រាជ្ញាស្មារតីឆ្លាត បើនឹងគិតការអ្វីក៏មាំមួន ល្អជាង**ឡៅគី**ជាបង ឥឡូវបងគិតថានឹងឲ្យ**ឡៅចុង**ធ្វើជាចៅហ្វាយស្រុកជំនួសបង តែខ្លាចខុសទម្លាប់ទំនៀមបុរាណ មនុស្សទាំងពួងនឹងគរហានិន្ទាបាន បើនឹងតាំង**ឡៅគី**ជាបងវិញ ឲ្យធ្វើចៅហ្វាយស្រុកតាមប្រពៃណី ក៏ខ្លាចញាតិសន្ដានបងប្អូននាង**ឈួហ៊ូយិន** ដែលធ្វើជានាហ្មឺនមុខមន្ត្រីក្នុងស្រុកនេះច្រើនគ្នា មានអាឃាតព្យាបាទមិនបានសេចក្ដីសុខ ព្រោះបណ្ដាខ្ញុំរាជការតូចទាបក៏នៅក្រោមបង្គាប់ បើអត់ពីបងទៅគង់នឹងកើតអន្តរាយដល់**ឡៅគី** ហេតុដូច្នេះបានជាបងកើតទុក្ខព្រួយពេកណាស់។ **ឡៅពី**តបថា ដែលលោកនឹងឲ្យបុត្រពៅធ្វើចៅហ្វាយស្រុកមុនបុត្រច្បងនោះមិនគួរ បើជាអារម្មណ៍ខ្លាចក្រែងញាតិសាលោហិតនាង**ឈួហ៊ូយិន**នឹងប៉ងប្រទូសរ៉ាយ**ឡៅគី**នោះ ត្រូវរិះគិតផ្លាស់ប្ដូរកម្លាំងមនុស្សពួកនោះចេញខ្លះឲ្យបានស្រាលស្ដើង រួចសឹមតាំង**ឡៅគី**ជាចៅហ្វាយ

ស្រុកជំនួសលោក ទើបមិនមានអន្តរាយ។ **ឡៅពៀវ**បានស្តាប់ហើយក៏ញាក់មុខយំទៀត។

ឯនាង**ឈូហ៊ួយិន**នៅឯបន្ទប់ពីខាងក្នុង លុះបានឮ**ឡៅពៀវ** និង**ឡៅពី**និយាយគ្នាដូច្នោះ ក៏មានសេចក្តីខឹងក្តៅនឹង**ឡៅពី**ពន់ប្រមាណណាស់។ **ឡៅពី**និយាយនឹង**ឡៅពៀវ**ហើយក៏ត្រឡប់គិតឃើញ ខ្លាចនាង**ឈូហ៊ួយិន**មកឯបន្ទប់ឮ ទើបក្លែងធ្វើជាក្រោកឡើងគំនាប់**ឡៅពៀវ**ហើយថា ខ្ញុំបាទសូមលាលោកចេញទៅក្រៅមួយរំពេច។ **ឡៅពី**ធ្វើជាយំហើយក៏ត្រឡប់ចូលមកវិញ។ **ឡៅពៀវ**ឃើញដូច្នោះក៏សួរ**ឡៅពី**ថា ហេតុអ្វីបានជាប្អូនយំ? **ឡៅពី**ក្លែងប្រាប់ថា ខ្ញុំបាទជិះសេះគ្រាណាទីអង្គុយក៏បែកចេញលោហិតហូរជាដរាបរក្សាក៏ជាសះទៅវិញ វេលានេះខ្ញុំបាទជិះសេះមកឈប់ជាយូរពេក ក៏បែករលួយអស់ទៅទៀត ខ្ញុំបាទឃើញថាអាយុនឹងអស់ត្រឹមណេះហើយ ប្រហែលមិនបានរស់នៅទំនុកបម្រុងផែនដីតទៅទៀតទេ បានជាខ្ញុំបាទយំអាណិតខ្លួនដោយហេតុនេះ។ **ឡៅពៀវ**ថា កាលគ្រាប្អូនទៅនៅស្រុកហ៊ូតោនោះ បងឮដំណឹងមកថា មួយថ្ងៃនោះ **ចូឆូ**និងប្អូនទៅផឹកស្រាស៊ីផ្លែស្ពី (ឬកន្ទួត) ជាមួយគ្នាក្នុងសួន **ចូឆូ**សួរថា ចៅហ្វាយស្រុកទេសឯណាមានសតិបញ្ញាខ្លាំងពូកែ? ប្អូនក៏បាននិយាយប្រាប់**ចូឆូ**ថា មានជាច្រើនខេត្ត។ **ចូឆូ**មិនយល់ព្រមផង ហើយថា ក្នុងស្រុកក្រុង និងអាណាខេត្តក្រៅទាំងពួងនោះ នឹងរកអ្នកឯណាឲ្យមានសតិបញ្ញាជ្រៅទូលាយដូច**ចូឆូ**និងប្អូននោះគ្មានសោះ ព្រោះ**ចូឆូ**នោះ មានគំនិតនេះគិតជ្រៅទូលាយទាំងសេនាទាហានក៏មានថ្វីដៃខ្លាំងពូកែច្រើន ក៏នៅតែមិនអាចលើកខ្លួនថាល្អជាងប្អូន ហេតុម្តេចក៏ប្អូននឹងមកគិតកោតញញើតខ្លាច នឹងមិនបានទំនុកបម្រុងផែនដីដូច្នោះ?

ខណៈនោះ **ឡៅពី**ផឹកស្រាស្រវឹងណាស់ លុះ**ឡៅពៀវ**និយាយដូច្នោះក៏មានចិត្តកំរើបដោយអំណាចស្រវឹង ទើបឆ្លើយតបថា ខ្ញុំបាទតាំងភូមិឋានជាទីខ្ជាប់ខ្លួន

បានហើយនឹងទៅខ្លាចអ្វីនែអាណាខេត្តទាំងអស់នោះ ឧបមាដូចកូនមាន់នៅក្នុងកណ្ដាប់ដៃខ្ញុំបាទ។ **ឡៅពៀវ**បានស្ដាប់ ក៏មិនបានតបថាប្រការម្ដេច។ **ឡៅពី**លង់សម្ដីប៉ុណ្ណោះក៏គិតឃើញថា ចរចានេះមិនស្រួលលើសហួសការ ក៏ធ្វើជាស្រវឹងខ្លាំង ហើយក៏លា**ឡៅពៀវ**ទៅកាន់ទីដំណាក់ក្នុងស្រុកកេងជីវ។

កាល**ឡៅពី**ចេញផុតទៅហើយ **ឡៅពៀវ**ក៏គិតឆ្ងល់ក្នុងចិត្តនឹង**ឡៅពី** ហើយចូលទៅខាងល្វែងក្នុង នាង**ឈួហ៊ូយិន**ក្លែងញុះ**ឡៅពៀវ**ថា អម្បាញ់មិញនេះ **ឡៅពី**និយាយប្រមាថមើលងាយអាណាខេត្តទាំងពួង ឯខ្លួនលោកក៏ជាចៅហ្វាយខេត្តធំឈរនៅតំបន់មួយដែរ ដែល**ឡៅពី**និយាយដូច្នោះ លោកឃើញច្បាស់ណាស់ហើយឬ? យូរទៅឃើញថា**ឡៅពី**នឹងគិតយកស្រុកនេះមិនខាន សេចក្ដីអន្ដរាយគង់នឹងមានដល់លោក សូមឲ្យលោកខំរិះគិតកម្ចាត់**ឡៅពី**ចេញ ទើបលោករួចទុក្ខភ័យបាន។ **ឡៅពៀវ**ស្ដាប់ហើយក៏គ្រវីក្បាល មិនបានតបថាអ្វីឡើយ។ នាង**ឈួហ៊ូយិន**ក៏ចូលទៅកាន់ទីដំណេក ប្រើស្រីម្នាក់ឲ្យទៅហៅខ្លួន**ឈួម៉**ចូលមក ហើយរ៉ាយរ៉ាប់រឿងដែល**ឡៅពី**និយាយនោះប្រាប់**ឈួម៉**ស្ដាប់គ្រប់ប្រការ។ **ឈួម៉**ឆ្លើយថា អ្នកកុំវិតក្កឡើយ ឥឡូវ**ឡៅពី**កំពុងស្រវឹងស្រា ខ្ញុំនឹងស្រូតទៅសម្លាប់ចេញរួចសឹមវិលមកជម្រាប**ឡៅពៀវ**ឲ្យជ្រាបជាក្រោយ។ នាង**ឈួហ៊ូយិន**ក៏យល់ត្រូវ ទើបថា ការនេះឲ្យប្អូនខំគិតធ្វើជាឆាប់ទៅចុះ។ **ឈួម៉**ក៏លាថយចេញទៅ លុះពេលព្រលប់ក៏ចាត់ចែងទាហានព្រមគ្នា។

ឯ**ឡៅពី**កំពុងខំអុជទៀនមើលសំបុត្រ អង្គុយទាល់តែដល់យាមមួយប្លាយ ខណៈនោះ**អ៊ីជៀ**ដឹងការណ៍ក៏ចូលទៅប្រាប់**ឡៅពី**ថា **ឈួម៉**ត្រៀមទាហានប្រចាំការខាងក្រៅទុកស្រេច ប៉ងនឹងធ្វើប្រទូសរ៉ាយលោកហើយក្នុងពេលយប់នេះ លោកត្រូវតែរិះគិតរត់ចេញឲ្យរួច (ឯកសារដើមរំលងបាត់ឃ្លាដែល**ឡៅពី**តបទៅ**អ៊ីជៀ**)

**អីជៀ**តបថា លោកនឹងកង្វល់ពីព្រោះ**ឡៅពៀរ**នោះ មុខជា**ឈួម៉**នឹងសម្លាប់លោកបានហើយ។ **ឡៅពី**យល់ឃើញត្រូវ ក៏លា**អីជៀ**នាំទាហានដែលតាមមកនោះរត់ចេញទៅដល់ស្រុកស៊ិនអៀ។

លុះពេលប្រហែលយាមពីរប្លាយ **ឈួម៉**ក៏លើកទាហានមកដល់ទីដំណាក់**ឡៅពី** មានគេប្រាប់ថា **ឡៅពី**រត់ចេញទៅយូរហើយ **ឈួម៉**ឮដូច្នោះក៏មានសេចក្ដីខឹងក្ដៅខ្លាំងណាស់ ទើបក្លែងចូលទៅសរសេរឃ្លោងបួនបទ ទុកនៅជញ្ជាំងផ្ទះសំណាក់**ឡៅពី** បីដូច**ឡៅពី**សរសេរខ្លួនឯង ហើយ**ឈួម៉**ក៏នាំទាហានចេញទៅវិញ។ លុះព្រឹកឡើង **ឈួម៉**ក៏ចូលទៅជម្រាប**ឡៅពៀរ**ថា ខ្ញុំបាទដឹងថា **ឡៅពី**នឹងគិតប្រទូសរ៉ាយដល់លោក កាលនឹងទៅក៏មិនបានលាលោក ហើយសរសេរឃ្លោងទុកនៅជញ្ជាំងក្បែរដំណេកបួនបទ បើលោកមិនជឿសូមអញ្ជើញទៅមើលចុះគង់ឃើញច្បាស់។ **ឡៅពៀរ**ក៏ដើរទៅមើលដល់ទីសំណាក់**ឡៅពី** ឃើញឃ្លោងដែលសរសេរទុកនោះមានសេចក្ដីថា៖

ស៊ូទ្រាំចាំចិត្តរឹតជាទុក្ខ ព្រោះពីទំនុកចង់ឧបដ្ឋាក
មនុស្សក្នុងបរិវេណដែលលំបាក ពុំមានល្ហែស្រាកមកយូរឆ្នាំ។
ប្រសិនបុណ្យជួនបានសម្បត្តិ នៅក្រោមស្វេតឆ័ត្រនិងហត្ថកម្ម
ធ្វើឱ្យរុងរឿងថ្កើងឆ្វេងស្ដាំ មិនឱ្យបែកស្រាំនាំសៅហ្មង។
ធម្មតាជាជាតិម្ករស្រុក មកនៅក្នុងថ្លុកតូចកន្លង
នៅម្ដេចនឹងបានក្សាន្តចិត្តផង ព្រោះមានពួកកងហ្វូងច្រើនណាស់។
បើបានសមុទ្រធំផុតភព នឹងប្រឹងប្រារព្ធឫទ្ធិតបះ
ហោះហើរទៅលើមេឃស្រឡះ ឱ្យគេឃើញច្បាស់នឹងនេត្រា។

**ឡៅពៀរ**មើលហើយក៏ខឹងខ្លាំងណាស់ ទាញហូតគ្រប៊ីមកកាន់ហើយថា អញនឹងសម្លាប់**ឡៅពី**ឱ្យបាន ព្រោះវាជាមនុស្សទុរយសអាក្រក់ណាស់ ហើយដើរចេញទៅក្រៅល្វែង បំណងនឹងបង្គាប់ប្រើទាហាន បានគិតឡើងថា **ឡៅពី**មកនៅស្រុកនេះក៏យូរណាស់ហើយ មិនប្រាកដថា **ឡៅពី**ចេះធ្វើឃ្លោងយ៉ាងនេះបាន ប្រហែលនរណាឯទៀតមានចិត្តឫស្យាខឹងស្អប់ ក្លែងមកធ្វើបទឃ្លោងនេះ ទុកឱ្យយើងមានសេចក្ដីខឹងសង្ស័យនឹង**ឡៅពី** ហើយ**ឡៅពៀរ**ក៏ដើរត្រឡប់ចូលទៅក្នុងវិញ។ **ឈ្លួម៉**ក៏និយាយជម្រាប**ឡៅពៀរ**ថា ទាហានប្រមូលព្រមមូល សូមឱ្យលោកបង្គំលើកកងទ័ពទៅចាប់**ឡៅពី**សម្លាប់ចេញ ទើបនឹងមិនមានភ័យអន្តរាយដល់លោក។ **ឡៅពៀរ**តបថា **ឡៅពី**នឹងវេះទៅឯណាឱ្យផុតពីដៃយើងនោះគ្មានទេ ចាំរិះគិតឱ្យផុតពីសេចក្ដីគរហានិន្ទាសិន។ ហើយក៏បរសេះចូលទៅដល់ទីកន្លែង។ **ឈ្លួម៉**ឃើញ**ឡៅពៀរ**អែអង់ មិនយល់តាមគំនិតរបស់ខ្លួនដូច្នោះ ក៏លបចូលទៅប្រាប់នាង**ឈ្លួហ៊ួយិន**តាមការដែលបានធ្វើមកហើយ នៅបីថ្ងៃទៀតនឹងដល់កំណត់ចូលឆ្នាំថ្មី ចៅហ្វាយស្រុកចំណុះទាំងអស់នឹងមកប្រជុំព្រមគ្នានៅក្នុងស្រុកស៊ុងយ៉ុង ខ្ញុំគិតនឹងរិះគិតសម្លាប់**ឡៅពី**ចេញឱ្យបាន។ នាង**ឈ្លួហ៊ួយិន**ឆ្លើយថា ចៅចូរខំរិះគិតធ្វើការឱ្យសម្រេចជាឆាប់ទៅចុះ។ **ឈ្លួម៉**ទទួលពាក្យហើយក៏ថយចេញមក។ លុះវេលាព្រឹកឡើង**ឈ្លួម៉**ក៏ចូលទៅជម្រាប**ឡៅពៀរ**ថា នៅបីថ្ងៃទៀតនឹងដល់កំណត់ចៅហ្វាយស្រុកចំណុះចូលមកប្រជុំគ្នាគំនាប់នៅស្រុកស៊ុងយ៉ុង លោកនឹងចាត់ចែងការដូចម្ដេចនឹងបានទៅពន្យល់បណ្ដានាហ្មឺននិងចៅហ្វាយស្រុកទាំងពួងឱ្យដឹង? **ឡៅពៀរ**ថា ខ្លួនយើងឈឺប្រហែលជានឹងចេញទៅទទួលគំនាប់មិនបានទេ នឹងឱ្យតែ**ឡៅគី**, **ឡៅចុង**ជាបុត្រទាំងពីរទៅជំនួស។ **ឈ្លួម៉**ថា បុត្រលោកទាំងពីរនោះនៅក្មេងសេចក្ដីណាស់ ដែលនឹងឱ្យទៅទទួលគំនាប់នាហ្មឺនមុខមន្ត្រីទាំងពួងនោះមិនគួរទេ ការប្រវេណីស្រុកក៏នឹង

ខូចទៅ។ **ឡៅពៀវ**ឆ្លើយថា បើដូច្នោះនឹងឲ្យអញ្ជើញ**ឡៅពី**ទៅទទួលគំនាប់ជំនួសយើងចុះ។ **ឈ្លូម៉**បានឮក៏មានអំណរណាស់ គិតថាគ្រានេះ**ឡៅពី**មុខជាមិនរួចនឹងដៃយើង ហើយក៏ថយចេញមក ទើបចាត់ប្រើមនុស្សឲ្យទៅប្រាប់**ឡៅពី**ថា ឥឡូវ**ឡៅពៀវ**មានជំងឺឈឺមានប្រសាសន៍មកថា ពីរថ្ងៃទៀតឲ្យអញ្ជើញលោកទៅទទួលគំនាប់នាហ្មឺនមុខមន្ត្រីទាំងពួងជំនួស**ឡៅពៀវ**ឯស្រុកស៊ុងយ៉ុង។ អ្នកបម្រើក៏លា**ឈ្លូម៉**ទៅប្រាប់**ឡៅពី** ៗក៏ព្រមអរទទួល។

ឯ**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង**ដឹងដំណឹងថា **ឡៅពី**មកឈរក្សាស្រុកស៊ិនអៀ ហើយ ក៏នាំគ្នាលើកទាហានមកសួរ**ឡៅពី**។ ខណៈនោះ **ស៊ុនខៀន**ជម្រាប**ឡៅពី**ថា ពីម្សិលមិញលោកត្រឡប់មកពីស្រុកកេងជីវ ខ្ញុំបានឃើញកិរិយាមិនសូវសប្បាយ លោកមានបរិវិតក្កពីអ្វី ដែល**ឡៅពៀវ**ឲ្យអញ្ជើញលោកទៅទទួលគំនាប់នាហ្មឺនមុខមន្ត្រីជំនួសនោះ លោកកុំអញ្ជើញទៅឡើយ។ **ឡៅពី**ក៏អធិប្បាយសេចក្ដីដែលបាននិយាយនឹង**ឡៅពៀវ**នោះឲ្យ**ស៊ុនខៀន**ស្ដាប់សព្វសេចក្ដី ហើយថា **អីជៀ**មកប្រាប់ថា **ឈ្លូម៉**មកគិតធ្វើប្រទូសរ៉ាយយើង ៗក៏រត់មក។ **គួនអ៊ូ**តបថា ឯស្រុកស៊ុងយ៉ុងនោះ ផ្លូវក៏ជិតនឹងស្រុកនេះដែរ ប្រសិនបើមាននរណានឹងគិតប្រទូសរ៉ាយយ៉ាងម្ដេច ក៏ល្មមនឹងកែខៃបានទេ ដែលលោកនឹងប្រញាប់ជឿស្ដាប់ពាក្យមនុស្ស មកនិយាយនោះ មិនគួរទេ ព្រោះថាមិនបានឃើញនឹងភ្នែក ឮនឹងត្រចៀក បើលោកមិនចូលទៅ**ឡៅពៀវ**នឹងមានសេចក្ដីសង្ស័យ សមប្រកបនឹងពាក្យដែលគេនិយាយទុកមកនោះមែន។



# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣២

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡៅពី** និង**ជូឡុង**រត់ពីស្រុកស៊ិងយ៉ុង ក្នុងឱកាសនាហ្មឺន**មុខមន្ត្រីមក**គំនាប់ ដោយ**ឈ្ហូម៉**គិតសម្លាប់ **ឡៅពី**ទៅជួប**សុម៉ាតេកឆោ** **ឡៅពី**បាន**តាន់ហ៊ុក**មករក្សាទុករហូតដល់**ឡៅពី**ច្បាំងនឹង**ចោយិន**។)*

**ឡៅពី**យល់ឃើញត្រូវក៏ឆ្លើយថា ដែលប្អូនគិតនេះគួរណាស់។ **តៀវហ៊ុយ**ជម្រាបថា លោកមានសេចក្តីសង្ស័យហើយក៏កុំទៅឡើយ។ **ជូឡុង**ឆ្លើយថា បើលោកទៅស្រួលល្អជាង ខ្ញុំបាទនឹងលើកទាហានបីរយទៅជាមួយ ដើម្បីនឹងបានជួយការពាររក្សាលោកមិនឲ្យជាអន្តរាយ។ **ឡៅពី**ទទួលតាមពាក្យ**ជូឡុង** លុះវេលាព្រឹកឡើង **ឡៅពី**ក៏ឡើងជិះសេះតេកឡៅ នាំ**ជូឡុង**លើកទាហានបីរយហែហមទៅជាមួយដល់ស្រុកស៊ិងយ៉ុង។ ឯ**ឈ្ហូម៉**ដឹងថា **ឡៅពី**មកក៏ធ្វើជាត្រេកអររួសរាយចេញទៅទទួលដល់ទ្វារស្រុកហើយក៏នាំចូលទៅ។ **ឡៅគី**, **ឡៅចុង**ក៏គំនាប់**ឡៅពី** ៗឃើញ**ឡៅគី**, **ឡៅចុង**នៅទីនោះផង ក៏អស់សេចក្តីសង្ស័យ។ **ឡៅពី**ក៏ចូលទៅអង្គុយខាងក្នុង **ជូឡុង**និងទាហានបីរយនាក់ក៏អង្គុយឡោមជុំវិញ។ **ឡៅគី**និយាយជម្រាប**ឡៅពី**ថា បិតាខ្ញុំបាទឈឺឲ្យអញ្ជើញលោកមាមកទទួលគំនាប់នាហ្មឺនមន្ត្រី។ **ឡៅពី**ថាសោះតែថានឹងទទឹង**ឡៅពៀវ**ជាបិតាអ្នកមិនបាន។

លុះវេលាព្រឹកឡើង ចៅហ្វាយស្រុកខេត្តទោទាំងប្រាំបួនមណ្ឌល ចៅហ្វាយស្រុកខេត្តត្រី ចត្វាសែសិបពីរមណ្ឌល ដែលជាចំណុះស្រុកកេងជីវក៏មកព្រមគ្នា ក្នុងទីជំនុំនាហ្មឺនមុខមន្ត្រី។ ខណៈនោះ**ឈ្ហូម៉**ក៏លបប្រឹក្សានឹង**កេងអ្វួត**ថា **ឡៅពី**នេះជាមនុស្សអាក្រក់អកតញ្ញូ បើនឹងបង្អង់ទុកឲ្យនៅក្នុងស្រុកកេងជីវតទៅ អន្តរាយក៏នឹង

មានដល់យើងទាំងអស់គ្នាជាប្រាកដ។ ថ្ងៃនេះបានចំណាប់ហើយ យើងត្រូវចាប់**ឡៅពី**សម្លាប់ចេញ ស្រុកយើងទើបនឹងរួចផុតពីភ័យអន្តរាយ។ **កេងអួត**តបថា មនុស្សទាំងពួងឮល្បីថា **ឡៅពី**ជាមនុស្សសុចរិតពិតត្រង់ណាស់ ដែលអ្នកមកគិតនឹងសម្លាប់ចេញនោះ នាហ្មឺនមុខមន្ត្រី និងបណ្ដារាស្ត្រទាំងពួងនឹងមានគរហានិន្ទាដល់អ្នក។ **ឈួម៉**ក្លែងប្រាប់ថា ការនេះមិនមែនយើងនឹងរំលងធ្វើឯងក៏ទេ **ឡៅពៀវ**លបបង្គាប់ឲ្យយើងធ្វើនឹងខ្លាចគេនិន្ទាធ្វើអ្វី? **កេងអួត**ថា បើ**ឡៅពៀវ**បង្គាប់ឲ្យធ្វើមែនក៏ធ្វើទៅចុះ តែដែលនឹងធ្វើការនោះ ត្រូវរិះគិតចាត់ចែងការឲ្យមាំមួនល្អ។ **ឈួម៉**តបថា ការទាំងឡាយយើងបានត្រៀមទុកជាស្រេចហើយ នៅទីភ្នំព្លិសានត្រង់ទ្វារទិសបូព៌នោះ ខ្ញុំឲ្យ**ឈួហោ**ជាប្អូនលើកទាហានទៅចាំស្កាត់ដែរ ទ្វារទិសខាងឧត្តរខ្ញុំក៏ឲ្យ**ឈួហ៊ុន**លើកទាហានទៅចាំស្កាត់ទៀត ទោះបី**ឡៅពី**នឹងចេះរត់ទៅខាងទិសនោះក៏ឆ្លងទឹកទៅមិនរួច។ **កេងអួត**តបថា ដែលអ្នករៀបជើងការទុកនោះក៏ល្អណាស់ តែខ្ញុំបារម្ភព្រោះមាន**ជូឡុង**ទាហានឯករបស់**ឡៅពី**មកជាមួយ។ ឯ**ជូឡុង**នោះមានថ្វីដៃខ្លាំងពូកែណាស់ នៅតែប្រេបខ្លួន**ឡៅពី**មិនទៅណាឆ្ងាយ ក្រែងយើងធ្វើការនេះមិនបានរហូតទេដឹង? **ឈួម៉**តបថា អ្នកកុំព្រួយជាទុក្ខឡើយ យើងបានកេណ្ឌទាហានប្រាំរយឲ្យពួនបង្កប់នៅខាងក្រៅមួយកង។ **កេងអួត**ថាឲ្យបង្គាប់**ប៊ុនផេង** និង**អងអ៊ុយ**ឲ្យជានាយកងប្រចាំបម្រើទាហាន និងនាហ្មឺនមុខមន្ត្រីខាងក្រៅ ហើយឲ្យហៅខ្លួន**ជូឡុង**និងទាហាន**ឡៅពី**ចេញទៅស៊ីលៀងខាងក្រៅ នៅខាងក្នុងយើងនឹងបានធ្វើការចាប់ខ្លួន**ឡៅពី**បានយ៉ាងស្រួល។ **ឈួម៉**យល់ឃើញ ក៏បង្គាប់ឲ្យ**ប៊ុនផេង** និង**អងអ៊ុយ**ធ្វើតាមពាក្យ**កេងអួត**បង្គាប់។

លុះបានពេលវេលាហើយ **ឈួម៉**ឲ្យអញ្ជើញ**ឡៅពី**ចេញទៅទទួលនាហ្មឺនមុខមន្ត្រី។ មន្ត្រីទាំងពួងក៏ធ្វើសេចក្ដីគោរពគំនាប់**ឡៅពី**តាមទម្លាប់ទំនៀម។ **ឡៅពី**

ទទួលគំនាប់ហើយក៏ប្រកាសរំឭកប្រដៅតាមផ្លូវរាជការ គឺឲ្យនាហ្មឺនខ្ញុំរាជការទាំងឡាយខិតខំយកចិត្តទុកដាក់រក្សាសេចក្តីសុខអាណាប្រជានុរាស្ត្រ និងការរាជការឲ្យចម្រើន តាមបុរាណរាជប្រវេណីជាលំដាប់ឲ្យទៅ បណ្តាខ្ញុំរាជការទាំងឡាយក៏ទទួលស្គាល់ឱវាទដោយគោរព ហើយក៏នាំគ្នាបរិភោគភោជនាហារ។ **ជូឡុង**ក៏កាន់គ្រប៊ីឈររក្សា**ឡៅពី**ពីក្រោយ។ **ប៊ុនផេង**និង**អងអ៊ុយ**ក៏ចូលទៅនិយាយនឹង**ជូឡុង**ឲ្យចេញទៅបរិភោគអាហារខាងក្រៅជាមួយនឹងពួកនាហ្មឺនតូច និងទាហាន **ជូឡុង**ក៏ធ្វើព្រងើយបែបមិនឮ មិនទាន់ចេញទៅ។ **ឡៅពី**ឮហើយក៏ប្រាប់**ជូឡុង**ឲ្យចេញទៅបរិភោគនឹងគេចុះ។ **ជូឡុង**មិនអាចទទឹងនឹង**ឡៅពី**ក៏ដើរចេញទៅស៊ីលៀងខាងក្រៅ។ **ឈួម៉**ឃើញបានចំណាប់ស្រួល ក៏ចេញមកនាំទាហានប្រាំរយដែលបង្កប់នោះលបរាយគ្នារៀងចូលទៅចាំមើលកលការ បើឃើញ**ឡៅពី**ស្រវឹងស្រាវេលាណា ឲ្យនាំគ្នាចាប់សម្លាប់ចេញវេលានោះ។

ខណៈនោះ**អ៊ីជៀ**ដឹងថា **ឈួម៉**គិតប្រទូសរ៉ាយ**ឡៅពី** ក៏ធ្វើជាចូលទៅចាក់ស្រាគំនាប់**ឡៅពី** ហើយចោលភ្នែកសម្លឹង**ឡៅពី**ឲ្យដឹងខ្លួន ហើយក្លែងនិយាយនឹង**ឡៅពី**ថា ក្តៅណាស់សូមឲ្យលោកចេញទៅដោះអាវចេញមួយជាន់ចុះ។ **ឡៅពី**ដឹងកលស្គាល់កិរិយាក៏ធ្វើជាក្រោកចូលទៅខាងក្នុងជាមួយនឹង**អ៊ីជៀ** ៗខ្សិបប្រាប់**ឡៅពី**ថា **ឈួម៉**គិតសម្លាប់ឥឡូវហើយ ខាងក្រៅសុទ្ធតែទាហានកាន់អាវុធគ្រប់ដៃស្ទាក់គ្រប់ផ្លូវ ទិសឯកើតឯជើងត្បូង នៅចន្លោះតែទិសខាងលិច បើលោកនឹងរត់ឲ្យរត់ចេញទៅទិសឯលិចទើបរួច។

**ឡៅពី**បានស្តាប់ដូច្នោះ ក៏ស្លុតស្លុងស្មារតីភ័យណាស់ ក៏លបបើកទ្វារចេញទៅតាមផ្លូវខាងក្រោយ ហើយស្រាយយកសេះតេកឡៅឡើងជិះបំផាយចេញទៅតែម្នាក់ឯង ដល់ទ្វារស្រុកខាងទិសបស្ចិម នាយទ្វារក៏សួរ**ឡៅពី**ថា លោកនឹងទៅណា?

**ឡៅពី**ក៏មិនឆ្លើយខំបរសេះផុតទ្វារចេញទៅក្រៅ។ នាយទ្វារឃើញអាការប្លែកដូច្នោះក៏ចូលទៅជម្រាប**ឈ្លូម៉** ៗឮដូច្នោះក៏ឡើងសេះនាំទាហានស្រូតតាម**ឡៅពី**ទៅ។ **ឡៅពី**រត់ទៅចម្ងាយផ្លូវប្រហែលសាមសិបសិន (១២០០ម) ដល់ស្ទឹងតាន់ខេ។ ស្ទឹងនោះទំហំទទឹងប្រហែលដប់ព្យាម (២០ម) ជម្រៅប្រហែលគ្នា។ **ឡៅពី**មិនដឹងនឹងគិតឆ្លងទៅត្រង់ណាបាន ក៏ញាក់សេះថយមកក្រោយបំណងនឹងរកកន្លែងឆ្លង ទទួលក្រឡេកមកក្រោយឃើញទាហានខ្មៅខ្ទួលដេញប្រកិតតាមទៅជាច្រើន។

**ឡៅពី**ក៏ភ័យស្លុតរន្ធត់ចិត្តគិតថា គ្រានេះជីវិតយើងនឹងដល់នូវសេចក្ដីស្លាប់ហើយ។ **ឡៅពី**ក៏ស្រែកយំហើយបរសេះលោតចុះទៅក្នុងស្ទឹង ជើងមុខសេះនោះក៏ជាន់លើទឹកដូចគេអណ្ដែតលឿនទៅ អាវនឹងខោដែលស្លៀកពាក់ក៏ទទឹកជោក។ **ឡៅពី**ក៏យកស៊ែវាយសេះនោះជាច្រើនរំពាត់ហើយស្រែកថា ថ្ងៃនេះតេកឡៅឯងនឹងបំផ្លាញម្ចាស់ហើយឬ? ល្មមផុតពាក្យ សេះនោះក៏លោតកញ្ច្រោលទៅបានប្រហែលប្រាំមួយទៅប្រាំពីរព្យាមដល់ទឹករាល់។ **ឡៅពី**ក៏បរឡើងបង្ហំទៅដល់ច្រាំងបាន មានសេចក្ដីត្រេកអរជាទីបំផុត ឧបមាដូចយល់សប្តិឃើញថាបានឡើងទៅឋានសួគ៌ ក្រឡេកមើលមកក្រោយ ឃើញ**ឈ្លូម៉**លើកទាហានមកដល់មាត់ច្រាំងត្រើយម្ខាង **ឈ្លូម៉**ធ្វើជាស្រែកសួរ**ឡៅពី**ថា ហេតុម្ដេចលោកមិនពិសាក្រយា ក៏បរសេះមកនឹងទៅណា? **ឡៅពី**តបថា អញនិងឯងមិនមានរឿងអ្វីឲ្យខុសទាស់គ្នាសោះ ហេតុម្ដេចបានជាឯងគិតប្រទូសរ៉ាយអញ? **ឈ្លូម៉**ឆ្លើយថា ខ្ញុំមិនមែនគិតធ្វើអ្វីលោកទេ ហេតុម្ដេចលោកមកធ្វើគំនិតស្រាលដូច្នេះ? លោកជឿស្ដាប់តែពាក្យគេញុះញង់ ហើយ**ឈ្លូម៉**ក៏លើកធ្នូឡើងបាញ់**ឡៅពី** ៗឃើញដូច្នោះក៏នឹកខ្លាច ទើបបំផាយសេះវេះរត់ចេញទៅទិសបស្ចិម។ **ឈ្លូម៉**ឃើញ**ឡៅពី**រត់ចេញទៅ ក៏មិនបានឆ្លងតាម បែរមកនិយាយនឹង

**ទៀវអ៊ឹន**ថា ដែល**ឡៅពី**រត់ឆ្លងស្ទឹងទៅគ្រានេះ ប្រហែលទេព្តាជួយនាំឆ្លងទឹកទៅឲ្យរួចហើយ ក៏ញាក់សេះនាំទាហានវិលមកក្នុងកំពែងស្រុកវិញ។

ឯ**ជូឡុង**កាលកំពុងបរិភោគអាហារនោះ បានឮនាហ្មឺនមុខមន្ត្រីទាំងពួងភ្ញាក់ផ្អើលអឺងកងក៏រត់ចូលទៅមើល លុះមិនឃើញ**ឡៅពី**ក៏ភ័យស្លុតស្មារតីត្រឡប់វិលមកវិញ ឮមនុស្សទាំងពួងក្នុងទីនោះនិយាយគ្នាថា **ឡៅពី**រត់ទៅតាមផ្លូវទិសខាងលិចទៅហើយ **ឈួម៉**បានលើកទាហានតាមទៅ **ជូឡុង**ក៏ឡើងសេះនាំទាហានបីរយស្រូតតាមទៅ ចេញទ្វារខាងលិចទទួលប្រះនឹង**ឈួម៉**ត្រឡប់មកដល់ពាក់កណ្តាលផ្លូវ។ **ជូឡុង**ក៏សួរថា **ឡៅពី**ចៅហ្វាយយើងទៅឯណាបានជួបឬទេ? **ឈួម៉**ថា **ឡៅពី**ចេញពីស្រុកបាត់ទៅហើយ នឹងទៅឯណាមិនបានជួបទេ។ ឯ**ជូឡុង**នោះជាមនុស្សចិត្តធ្ងន់មិនបាននិយាយថាអ្វីសោះ បរសេះស្រូតទៅដល់មាត់ស្ទឹងតាន់ខេ មើលទៅមិនឃើញមានទំនងដែលល្មមនឹងឆ្លងទៅបាន ក៏ញាក់សេះវិលត្រឡប់ទៅហៅ**ឈួម៉**ឲ្យឈប់ហើយសួរថា ពីដើម**ឡៅពៀវ**ឲ្យអញ្ជើញចៅហ្វាយយើងមកទទួលគំនាប់នាហ្មឺនមុខមន្ត្រីមកជំនួស ហេតុម្តេចបានជាខ្លួនលើកទ័ពដេញចៅហ្វាយយើងដូច្នេះ? **ឈួម៉**តបថា បណ្តាចៅហ្វាយស្រុកតូចធំ ដែលចូលមកបរិភោគអាហារក៏នៅទាំងអស់ យើងនាំទាហានមកការពាររក្សាសេចក្តីអន្តរាយបំណងនឹងមិនឲ្យសត្រូវបៀតបៀនស្រុកកេងជីវ។ **ជូឡុង**ថា ខ្លួនគិតធ្វើការយ៉ាងម្តេច យើងក៏យល់ថាខ្លួនប៉ងនឹងប្រទូសរ៉ាយ**ឡៅពី** លុះយើងសាកសួរ ខ្លួនយកសេចក្តីឯទៀតមកកែប្រាថ្នានឹងលុបលាងឲ្យបាត់។ **ឈួម៉**តបថា យើងដឹងថា**ឡៅពី**គេចរត់មកពីក្នុងប្រជុំជាប្រាកដ បានជាតាមមករកខ្លួនក៏មិនជួបប្រទះ។ **ជូឡុង**ស្តាប់ហើយក៏នៅតែសង្ស័យ ទើបញាក់សេះវិលទៅដល់មាត់ស្ទឹង ហើយពិចារណាមើលឃើញស្នាមជើងសេះឡើងពីទឹកទៅត្រើយម្ខាង ដល់មាត់ច្រាំងលើ **ជូឡុង**ក៏រឹតតែឆ្ងល់សង្ស័យក្នុងចិត្តថា ស្ទឹងនេះ

ជ្រៅហើយធំណាស់ **ឡៅពី**នឹងឆ្លងបានឬ? លុះពិគ្រោះមើលត្រើយខាងនោះ ក៏ឃើញស្នាមជើងជាន់កប់ទៅក្នុងភក់ចុះទៅ រកសម្គាល់មិនច្បាស់ ក៏ញាក់ថយសេះមកវិញនឹងសួរ**ឈ្លួម៉**ឲ្យបានសេចក្តី ទទួល**ឈ្លួម៉**ចូលទៅក្នុងកំពែងស្រុកបាត់ ហើយក៏ឲ្យចាប់អ្នកចាំទ្វារទិសខាងលិចមកសួរពិចារណាថា ខ្លួនបានឃើញ**ឡៅពី**មកតាមទ្វារផ្លូវនេះទេឬ? បើមិនប្រាប់តាមត្រង់ទេ អញនឹងឲ្យវាយឲ្យស្លាប់។ នាយទ្វារខ្លាចញ័រអស់ទាំងខ្លួនក៏ប្រាប់ថា ឃើញ**ឡៅពី**រត់ចេញមកតាមទ្វារនេះតែម្នាក់ឯង។ **ជូឡុង**បានឮដូច្នោះក៏នឹកខឹង**ឈ្លួម៉** លុះនឹងចូលទៅតវ៉ានឹង**ឈ្លួម៉**ដល់ក្នុងកំពែងស្រុក ក៏នឹកក្រែង ព្រោះជាទីចង្អៀតចង្អល់ ទើបបរសេះនាំទាហានត្រឡប់ទៅស្រុកស៊ិនអៀវិញ។

ឯ**ឡៅពី**ជិះសេះរត់ទៅតាមផ្លូវទិសបស្ចិម មិនបានដឹងផ្លូវមាគ៌ានឹងទៅទីណាក៏នឹកទោសមនស្សតូចចិត្តថា ខ្លួនអញអើយ បានសេចក្តីលំបាកវេទនាអីម្ល៉េះ តែថាមកនៅមានសេចកក្តីសង្ស័យបន្តិច ព្រោះស្ទឹងតាន់ខេនោះធំហើយជ្រៅប្រាំបួនទៅដប់ព្យាម ហេតុម្តេចបានជាសេះនេះលោតឆ្លងតែម្តង ពីត្រើយខាងនោះមកត្រើយខាងនេះបានដល់ទឹករាក់ ប្រហែលជាទេព្តាជួយឧបត្ថម្ភអញទេដឹង ទើបមិនមានអន្តរាយ? លុះបរសេះទៅដល់ដែនស្រុកឡាំចៀង ជួនជាពេលល្ងាច ឃើញក្មេងម្នាក់ជិះក្របី ផ្លុំប៉ីអរមកត្រង់មុខ **ឡៅពី**ដកដង្ហើមធំហើយថា យើងនេះប្រកបទៅដោយសេចក្តីទុក្ខលំបាកក្រៃពេក ចម្លែកអីតែក្មេងឃ្វាលក្របីវាសប្បាយជាងយើងទៅទៀត។ **ឡៅពី**ក៏ឈប់សេះស្តាប់សូរប៉ី ដើម្បីនឹងឲ្យរសាយសេចក្តីទុក្ខវេទនា។ ក្មេងឃ្វាលក្របីក៏ឈប់ផ្លុំប៉ីក្រឡេកមើលរូប**ឡៅពី**សព្វគ្រប់ ឃើញខ្ពស់ធំស្លឹកត្រចៀកយារដល់ស្មា ប្លែកជាងមនុស្សទាំងពួង ក្មេងនោះក៏សួរថា លោកនេះឈ្មោះ**ឡៅពី**ឬ? ដែលបានជួយប្រាបប្រាមពួកចោរជូតក្បាលលឿងគ្រា**តៀវកុក**?

**ឡៅពី**ឮដូច្នោះក៏មានសេចក្ដីសង្ស័យ ទើបសួរថា ខ្លួនឯងក្មេងប៉ុណ្ណោះ ហេតុម្ដេចក៏ដឹងស្គាល់ខ្លួនយើងថា ជួយប្រាបប្រាមពួកចោរជូតក្បាលលឿងគ្រា**តៀវកុក**នោះ? ក្មេងនោះក៏ឆ្លើយថា អាយុខ្ញុំបាទនៅក្មេងមែន មិនបានស្គាល់លោកទេ តែថាគ្រូប្រដៅឲ្យរៀនសំបុត្រមាននៅម្នាក់ ឯពួកម៉ាកគ្រូខ្ញុំបាទនោះមានច្រើន កាលណានឹងមកលេងនឹងគ្រូខ្ញុំបាទ រមែងដំណាលសរសើរដល់ឈ្មោះ**ឡៅពី**ថា ប្រកបទៅដោយលក្ខណៈដ៏ល្អ ថា**ឡៅពី**នោះកម្ពស់ប្រហែលប្រាំមួយហត្ថ ត្រចៀកយារធំដល់ស្មា ដៃវែងដល់ក្បាលជង្គង់ ភ្នែកក្រឡេកទៅខាងឃើញស្លឹកត្រចៀកខ្លួនឯង ហើយទំនាយថាមានសតិបញ្ញា ទៅមុខថានឹងមានបុណ្យ។ ឥឡូវខ្ញុំបាទមកឃើញលោក លោក**ឡៅពី**មែនឬ? **ឡៅពី**ក៏សួរក្មេងនោះវិញថា អាចារ្យរបស់នាងឯងដែលចរចាចេញឈ្មោះយើងនោះឈ្មោះអ្វី? ក្មេងនោះឆ្លើយថា គ្រូខ្ញុំបាទឈ្មោះ**សុម៉ាតេកឆោ**។ **ឡៅពី**សួរថា ភឿនរបស់គ្រូឯងឈ្មោះអ្វី? ក្មេងនោះឆ្លើយថា ភឿនគ្រូខ្ញុំបាទពីរនាក់ ម្នាក់ឈ្មោះ**ប៉ាងតេកកុង**អាយុចាស់ជាងគ្រូខ្ញុំបាទដប់ឆ្នាំ ម្នាក់ទៀតឈ្មោះ**ហាប៉ាងថង** គាត់ក្មេងជាងគ្រូខ្ញុំបាទប្រាំឆ្នាំ មានសតិបញ្ញាវាងវៃណាស់ **សុម៉ាតេកឆោ**ស្រឡាញ់ណាស់ហៅថាប្អូន មានិងក្មួយទាំងពីរនាក់នេះនៅស្រុកស៊ីងយ៉ុងធ្លាប់ទៅមករាប់អានគ្នា និយាយសរសើរពី**ឡៅពី**ជារឿយៗ។

**ឡៅពី**បានឮដូច្នោះក៏សួរថា ឥឡូវអាចារ្យឯងនៅឯណា? ក្មេងនោះចង្អុលប្រាប់ថា អាចារ្យខ្ញុំបាទនៅត្រង់នោះ មើលទៅឃើញព្រៃឈើទង្គំ ផ្លូវពីនេះទៅប្រហែលម្ភៃសិន (៨០០ម)។ **ឡៅពី**ថា ខ្លួនយើងឈ្មោះ**ឡៅពី**មែនហើយ នឹងចង់បានឃើញអាចារ្យនោះ នាងឯងចូរនាំយើងទៅសន្ទនានឹងគ្រូនោះបន្តិចបានទេ? ក្មេងនោះក៏នាំ**ឡៅពី**ទៅ លុះទៅដល់មាត់ទ្វារផ្ទះ**សុម៉ាតេកឆោ**នោះ បានឮសំឡេងពិណដែល **សុម៉ាតេកឆោ**ដេញពីរោះណាស់។ **ឡៅពី**ក៏និយាយហាមក្មេងនោះថា កុំអាលនាំ

សេចក្ដីទៅជម្រាបឲ្យអាចារ្យដឹងសិនចុះ ឲ្យអាចារ្យដេញពិណស្ដាប់ឲ្យសប្បាយចិត្តសិន រួចសឹមចូលទៅ។ **ឡៅពី**ក៏ឈប់ស្ដាប់មួយស្របក់។

ឯ**សុម៉ាតេកឆោ** លុះដេញពិណហើយក៏ក្រោកចេញក្រៅទើបថា ពេលថ្ងៃនេះយើងដេញពិណក្បោះក្បាយដោយខ្សែពិណស្រួលបួល ប្រហែលមានមនុស្សមានសតិបញ្ញាមកលបលួចស្ដាប់ទេដឹង? ក្មេងឃ្វាលក្របីឃើញ**សុម៉ាតេកឆោ**ដើរចេញមក ក៏ប្រាប់**ឡៅពី**ថា នេះហើយគឺ**សុម៉ាតេកឆោ**ជាអាចារ្យរបស់ខ្ញុំបាទ។ **ឡៅពី**ឃើញ**សុម៉ាតេកឆោ**ប្រកបទៅដោយរូបភាពស្អាតបាតល្អ ព្រមទាំងកិរិយាមារយាទល្វន់ល្វាសសមរម្យគួរជាអាចារ្យ ក៏មានសេចក្ដីត្រេកអរណាស់ ក៏ឱនគំនាប់តាមប្រវេណី ឯ**សុម៉ាតេកឆោ**ក្រឡេកឃើញ**ឡៅពី**គំនាប់ ក៏ពិគ្រោះមើលឃើញអាវ និងខោទទឹកជោកក៏សួរថា អ្នកនេះមានបុណ្យវាសនាច្រើនណាស់ ភ័យមកដល់ខ្លួនហើយក៏រត់យករួចខ្លួនបាន។ **ឡៅពី**បានស្ដាប់ដូច្នោះ ក៏ប្លែកក្នុងចិត្តទើបគិតថា ហេតុម្ដេចបានជា**សុម៉ាតេកឆោ**ដឹងហេតុផលដូច្នេះ។

ខណៈនោះ ក្មេងឃ្វាលក្របីក៏ជម្រាប**សុម៉ាតេកឆោ**ថា រូបនេះគឺឈ្មោះ**ឡៅពី**ឲ្យខ្ញុំបាទនាំខ្លួនមកជួបនឹងលោកសូមគំនាប់ស្គាល់។ **សុម៉ាតេកឆោ**ឮដូច្នោះ ក៏អញ្ជើញ**ឡៅពី**ឲ្យឡើងទៅលើផ្ទះចូលទៅខាងក្នុង រៀបចំទីឲ្យអង្គុយហើយក៏សួរថា ខ្លួនអ្នកនេះមកពីណា? **ឡៅពី**ជម្រាបថា ខ្ញុំបាទដើរមកលេង ឃើញភូមិឋានរបស់លោកសប្បាយក៏ឆៀងចូលមកគំនាប់ ជាបុណ្យភ័ព្វរបស់ខ្ញុំបាទ បានមកជួបនឹងលោកក្នុងថ្ងៃនេះ ខ្ញុំបាទមានសេចក្ដីត្រេកអរជាទីបំផុត។ **សុម៉ាតេកឆោ**ឮដូច្នោះក៏និយាយថា អ្នកកុំបាច់ភូតយើងធ្វើអ្វី យើងដឹងអស់ហើយ គ្រានេះគឺអ្នករត់ពីភ័យមកជាប្រាកដ។ **ឡៅពី**បានស្ដាប់ហើយ ក៏អធិប្បាយរ៉ាយរ៉ាប់រឿងរ៉ាវប្រាប់**សុម៉ាតេកឆោ**តាមដំណើរត្រង់ឲ្យស្ដាប់គ្រប់ប្រការ។ **សុម៉ាតេកឆោ**និយាយថា ខ្ញុំបានឮគេនិយាយ

ល្បីល្បាញមកតាំងពីដើមថា ខ្លួនអ្នកមានតម្រិះប្រាជ្ញានិងគំនិតវែវាងណាស់ នឹងរកនរណាប្រៀបស្មើក៏ពុំបាន ហេតុម្តេចក៏បានជាតាំងខ្លួនមិនជាប់? **ឡៅពី**ថា ខ្លួនខ្ញុំបាទសព្វថ្ងៃនេះវាសនាតិចណាស់ ទាំងជតារាសីក៏អន់អាប់អភ័ព្វពន់ពេក ទើបមានតែសេចក្តីព្រួយលំបាកមិនស្រាកស្រាន្តសោះ។ **សុម៉ាតេកឆោ**ថា ដែលអ្នកថាបុណ្យវាសនា តិចបញ្ញាមកធ្វើជាទីប្រឹក្សាមិនបាន។ (ពិបាកស្តាប់ណាស់ ប្រហែលជាបាត់ឃ្លាក្នុងការចរចាគ្នានេះ ប៉ុន្តែច្បាប់ដើមមានតែប៉ុណ្ណឹង)

**ឡៅពី**តបថា ឯទីប្រឹក្សារបស់ខ្ញុំបាទក៏មានដែរ គឺ**ស៊ុនខៀន**, **ប៊ីតុក**, និង**កាន់យ៉ុង** ទាំងបីរនាក់នេះសុទ្ធតែជាមនុស្សគួរទុកចិត្តមកពីដើម ឯ**គួនអ៊ូ**, **តៀវហ៊ុយ**, **ជូឡុង** ទាំងបីនាក់នេះក៏ជាសេនាឯកដែរ ធ្លាប់សុចរិតពិតត្រង់នឹងខ្ញុំបាទ ដូចបងប្អូនរួមឧទរមួយជាមួយគ្នា តែហាក់ថាបុណ្យខ្ញុំបាទគ្មាន ទើបតាំងខ្លួននៅមិនជាប់ដូច្នេះ។ **សុម៉ាតេកឆោ**ឆ្លើយថា ឯ**ស៊ុនខៀន**, **ប៊ីតុក** និង**កាន់យ៉ុង**នោះអ្នកមករាប់ថាមានតម្រិះជាទីប្រឹក្សាផងនោះមិនបានទេ អ្នកទាំងបីនាក់នេះគ្រាន់តែជាមនុស្សចេះអក្សរសំបុត្រចុតហ្មាយ និងទម្លាប់ទំនៀមពីដើមប៉ុណ្ណោះ ទោះនឹងប្រាស្រ័យតម្រិះរិះគិតផ្លាស់ប្តូរ ក្នុងការសឹកសង្គ្រាមមិនបានទេ ទោះបីនឹងមានខ្លួនក៏ដូចជាមិនមាន ឯ**គួនអ៊ូ**, **តៀវហ៊ុយ**, **ជូឡុង**ក៏គ្រាន់តែមានថ្វីដៃខ្លាំងពូកែអង់អាច អាចតនឹងពលយោធាម៉ឺនសែនបានមែន តែថាបើគ្មានអ្នកចេះចាត់ការប្រើប្រាស់ឲ្យស្គាល់ទីក្រ ទីងាយទូលាយចង្អៀត ក៏មិនអាចសម្រេចទៅតាមថ្វីដៃបាន។ **ឡៅពី**តបថា លោកមានប្រសាសន៍នោះត្រូវណាស់ហើយ ព្រោះសព្វថ្ងៃនេះខ្ញុំបាទក៏ខំស៊ើបសួរស្វះស្វែងរកមនុស្សដែលល្អ មានតម្រិះប្រាជ្ញានោះណាស់ដែរ ដើម្បីនឹងបានជួយឧបត្ថម្ភទំនុកបម្រុងតទៅ តែថានឹងទញ់ទាល់នឹងរិះរកមិនបានដូចចិត្តប្រាថ្នា។ **សុម៉ាតេកឆោ**និយាយថា បុរាណលោកពោលទុកពីដើមមកថា ដប់នាក់ត្រូវរកអ្នកខ្លាំងពូកែម្នាក់

ឲ្យបាន មួយរយនាក់ត្រូវជ្រើសរើសរកអ្នកមានតម្រិះប្រាជ្ញាឲ្យបានម្នាក់ ឯមនុស្សទាំងពួងក៏មាននៅជាច្រើនណាស់ បើប្រសិនជាអ្នកត្រូវការនឹងប្រាថ្នារកអ្នកមានតម្រិះប្រាជ្ញានោះ ក៏គង់នឹងបានដូចសេចក្តីប្រាថ្នា។ **ឡៅពី**តបថា លោកមានប្រសាសន៍នោះគួរស្តាប់ណាស់ តែថាខ្ញុំបាទមានតម្រិះរិះគិតតិចកម្រដែលនឹងពិគ្រោះមកឃើញ សូមលោកអនុគ្រោះបំភ្លឺណែនាំឲ្យខ្ញុំបាទដឹងផងចុះ ទោះបីមនុស្សនោះនៅឆ្ងាយជិតក្តីណា ក៏នឹងតាំងចិត្តគិតយាត្រាស្វះស្វែងទៅរក។

**សុម៉ាតេកឆោ**ឆ្លើយថា អ្នកដែលមានតម្រិះប្រាជ្ញានោះ ក៏មាននៅមិនសូវឆ្ងាយជិតប៉ុន្មានទេ បើអ្នកមានសេចក្តីប្រាថ្នានឹងសមាគមផង ក៏ចូរឧស្សាហ៍ព្យាយាមស្វះស្វែងទៅរកគង់តែនឹងជួបប្រទះ។ **ឡៅពី**ថា មនុស្សល្អដែលមានតម្រិះប្រាជ្ញានោះនៅទិសតំបន់ឯណា ខ្ញុំបាទនៅមិនទាន់ដឹង? **សុម៉ាតេកឆោ**ងថា គឺ **ហុកឡុង** និង**ហាងស៊ូ** ពីរនាក់នេះបើបានយកមកទុកជាទីប្រឹក្សាផង សូម្បីតែម្នាក់ណាមួយ ក៏អាចនឹងរិះគិតប្រាបប្រាមសត្រូវផែនដីឲ្យស្ងប់ទាំងអស់បាន។ **ឡៅពី**តបថា ដែលលោកមានប្រសាសន៍ថា **ហុកឡុង, ហាងស៊ូ**នោះ ខ្ញុំបាទមិនយល់ថាឈ្មោះអ្វីសោះ។ **សុម៉ាតេកឆោ**ស្តាប់ហើយក៏ទះដៃសើចថាល្អហើយ។ **ឡៅពី**ក៏ជជីកជដែកសួរទៅទៀតថា លោកចូរអនុគ្រោះប្រាប់ឲ្យខ្ញុំបាទដឹងផងចុះ។ **សុម៉ាតេកឆោ**ថា ពេលថ្ងៃនេះក៏ជួនជាយប់ទៅហើយ បើអ្នកបង្អែបង្អង់នៅមួយយប់សិន ព្រឹកស្អែកខ្ញុំនឹងប្រាប់ឈ្មោះឲ្យដឹង ហើយក៏ឲ្យកូនសិស្សទទួលយកសេះរបស់**ឡៅពី**នាំទៅចងខាងក្រៅផ្ទះ ហើយឲ្យរៀបអាហារឲ្យ**ឡៅពី**បរិភោគ រួចក៏រៀបទីនិទ្រាឲ្យ**ឡៅពី**អាស្រ័យដំណេក។ **ឡៅពី**ក៏ចូលទៅក្នុងល្វែងដំណេក ប្រាសខ្លួនដេកទៅលើខ្នើយឲ្យគិតរំពឹងដល់ពាក្យ**សុម៉ាតេកឆោ**ប្រាប់សេចក្តីមិនឲ្យច្បាស់ ក៏ចេះតែវិតក្កដេកមិនលក់ដល់ពេលយាមមួយមាត់មនុស្សមកគោះទ្វារហៅពីក្រៅ ឲ្យបើកទ្វារ ហើយ

មនុស្សនោះចូលទៅរក**សុម៉ាតេកណោ**ខាងក្នុង។ **សុម៉ាតេកណោ**សួរថា អ្នកមកមានការអ្វី? **ឈីស៊ី**គំនាប់ហើយប្រាប់ថា ខ្ញុំបាទមកនេះមានសេចក្តីប្រាថ្នានឹងសន្ទនានឹងលោកព្រោះខ្ញុំបាទឮគេនិយាយថា **ឡៅពៀវ**នោះមានចិត្តល្អធូរទូលាយរួសរាយរាប់អានអ្នកមានតម្រិះប្រាជ្ញា នឹងឧបត្ថម្ភថែរក្សាមនុស្សឲ្យបានចម្រើនគ្រប់ប្រការ មិនបានសេពគប់នឹងមនុស្សទុច្ចរិត ខ្ញុំក៏គិតឧស្សាហ៍ស្វះស្វែងទៅរកប្រាថ្នានឹងចូលធ្វើរាជការនឹង**ឡៅពៀវ** លុះខ្ញុំទៅនៅសំណាក់នឹង**ឡៅពៀវ**ពិគ្រោះកិរិយា ក៏មិនសមសេចក្តីដែលបានឮមកនោះសោះ ទោះបីនឹងប្រើមនុស្សដែលមានតម្រិះប្រាជ្ញាសោតក៏មិនស្គាល់ច្បាស់ការដែលនឹងបង្គាប់បញ្ជា សូម្បីនឹងរាទៅកម្ចាត់មនុស្សពាលឲ្យប្រាសចាកចេញក៏ពុំបាន ខ្ញុំឃើញថាសន្តានចិត្ត**ឡៅពៀវ**ប្រព្រឹត្តការទាំងពួងមិនបានជាប្រយោជន៍ បានជាខ្ញុំគេចដោះខ្លួនចេញមកវិញ។

**សុម៉ាតេកណោ**បានស្តាប់ក៏ថា ខ្លួនអ្នកជាមនុស្សមានសតិបញ្ញា គួរតែនឹងស្វែងទៅធ្វើការរាជការនៅនឹងអ្នកដែលមានចិត្តល្អ ធូរទូលាយរួសរាយរាប់អានមនុស្សល្អ សព្វថ្ងៃនេះអ្នកដែលមានតម្រិះប្រាជ្ញាជ្រៅទូលាយ ក៏មានប្រាកដនឹងភ្នែកអ្នក ហេតុម្តេចឡើយមិនពិគ្រោះមើលឲ្យជាក់ថា **ឡៅពៀវ**នោះល្អឬអាក្រក់ឲ្យដឹងសិនសឹមចូលទៅនៅផង? **ឈីស៊ី**ឆ្លើយថា លោកមានប្រសាសន៍នេះត្រូវណាស់ហើយ។ ខណៈកាល**ឈីស៊ី**ចូលទៅសន្ទនាគ្នានឹង**សុម៉ាតេកណោ**នោះ **ឡៅពី**ក៏នៅស្តាប់ឮសម្តីក៏ក្រោកឡើងអែបស្តាប់ចប់សព្វសេចក្តី ក៏គិតតែក្នុងចិត្តថា ដែល**សុម៉ាតេកណោ**ប្រាប់ពីថ្ងៃថា មនុស្សដែលមានតម្រិះប្រាជ្ញានៅមិនសូវឆ្ងាយណាស់ជិតណាស់នោះ ប្រហែលជាអ្នកនេះទេដឹង? សម្គាល់ក្នុងចិត្តដូច្នេះហើយ ក៏មានសេចក្តីត្រេកអរណាស់ លុះនឹងចេញមកសន្ទានាផងក្នុងពេលយប់នោះអារម្មណ៍ខ្លាចចិត្ត**សុម៉ាតេកណោ**។

លុះវេលាព្រឹកឡើង **ឡៅពី**សួរ**សុម៉ាតេកនោ** ៗប្រាប់**ឡៅពី**ថាអ្នកដែលមកចរចាយប់មិញនោះ ជាភឿនសំឡាញ់រាប់អានរបស់យើង។ **ឡៅពី**ថា ធ្វើម្ដេចខ្ញុំបាទនឹងបានឃើញស្គាល់ខ្លួនផង? លោកចូរអនុគ្រោះឲ្យបានមកជួបសន្ទនាបន្តិចបានឬទេ? **សុម៉ាតេកនោ**ប្រាប់ថា គេទៅវិញពីយប់មិញទៅហើយ។ **ឡៅពី**សួរថា អ្នកនោះឯងឈ្មោះអ្វី? **សុម៉ាតេកនោ**ស្ដាប់ហើយក៏សើចថាល្អហើយ។ **ឡៅពី**ថា ដែលលោកនឹងអាណិតខ្ញុំបាទប្រាប់ឈ្មោះឲ្យដឹងក៏ចូរប្រាប់មកចុះ គឺ**ហុកឡុង, ហងស៊ូ**នោះជាឈ្មោះអ្នកឯណាសោត? **សុម៉ាតេកនោ**ក៏សើចថាល្អហើយ។ **ឡៅពី**ឃើញថា**សុម៉ាតេកនោ**មិនព្រមប្រាប់ឈ្មោះឲ្យច្បាស់ចេះតែសើចដូច្នោះ ក៏ថា សព្វថ្ងៃនេះខ្ញុំបាទមានសេចក្ដីប្រាថ្នានឹងទំនុកបម្រុងផែនដី ព្រះចៅ**ហៀនតេ**ឲ្យបានសេចក្ដីសុខ ក៏នៅមិនទាន់បានសម្រេច បើបានប្រកបដូចលោកមានប្រសាសន៍ គឺជួបប្រទះនឹងអ្នកមានតម្រិះប្រាជ្ញាណានីមួយ យកទៅធ្វើជាទីប្រឹក្សា ជួយរិះគិតការទាំងពួង ឃើញថាផែនដីព្រះចៅ**ហៀនតេ**នឹងចម្រើន សូមអញ្ជើញលោកទៅជួយធ្វើការរាជការជាមួយនឹងខ្ញុំបាទចុះ ដើម្បីនឹងបានជួយអនុគ្រោះព្រះចៅ**ហៀនតេ**ផង។ **សុម៉ាតេកនោ**ឆ្លើយថា ខ្លួនយើងជាជាតិអ្នកស្រែចម្ការនៅស្រុកក្រៅមានសតិបញ្ញាតិចណាស់ បើនឹងធ្វើរាជការជាមួយនឹងអ្នកនោះឃើញថាមិនបាន ឯអ្នកមានតម្រិះប្រាជ្ញាលើសជាងយើងនោះក៏នៅមាន ចូរអ្នកខំស្វះស្វែងឧស្សាហ៍ទៅរកចុះ។

ក្នុងខណៈដែល**សុម៉ាតេកនោ** និង**ឡៅពី**កំពុងសន្ទនាគ្នានៅទីនោះ **ជូឡុង**ក៏នាំទាហានប្រហែលមួយរយនាក់ ស្វែងមកជាប់តាម**ឡៅពី**ចូលទៅ សំឡេងទាហានក៏គឹកកងរំពង។ **ឡៅពី**ក៏ស្លុតចិត្តក្រោកចេញទៅមើលឃើញ**ជូឡុង**នាំមុខ ក៏មានសោមនស្សក្នុងចិត្តពន់ប្រមាណណាស់ **ជូឡុង**ឃើញ**ឡៅពី**ក៏លោតចុះពីលើសេះចូលទៅគំនាប់**ឡៅពី** ហើយក៏ពណ៌នារឿងដែលស្វះស្វែងតាមរកនោះឲ្យ**ឡៅពី**ស្ដាប់

គ្រប់ប្រការ ហើយថា សូមឲ្យលោកគិតប្រញាប់ត្រឡប់ទៅស្រុកស៊ិនអៀចុះ ខ្លាចសត្រូវនឹងទៅធ្វើប្រទូសរ៉ាយឯក្រោយ។ **ឡៅ**ពីបានស្ដាប់ក៏ចូលទៅសុំលា**ស៊ុម៉ាតេកឆោ** ហើយក៏ឡើងសេះចេញទៅជាមួយនឹង**ជូឡុង** ទៅចម្ងាយពីភូមិនោះប្រហែលម្ភៃសិន (៨០០ម) ទទួលជួប្រទះនឹង**គួនអ៊ូ, តៀវហ៊ុយ** លើកទាហានតាមមក។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣៣

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

**ឡៅពី**ក្រឡេកឃើញក៏ត្រេកអរពន់ប្រមាណ ទើបអធិប្បាយរឿងដែលលំបាកគេចរត់មកនោះឲ្យ**គួនអ៊ូ, តៀវហ៊ុយ**ស្ដាប់គ្រប់ប្រការ ហើយនាំគ្នាទៅ លុះទៅដល់ស្រុក***ស៊ិន***អៀហើយ **ឡៅពី**ក៏ប្រឹក្សានឹងទាហានទាំងពួងថា ដែល**ឈួម៉**រិះគិតបញ្ឆោតយើងថា **ឡៅពៀវ**ឲ្យអញ្ជើញទៅ ហើយ**ឈួម៉**គិតធ្វើអន្តរាយយើងនោះ អ្នកទាំងពួងគិតដូចម្ដេចខ្លះ? **ស៊ុនខៀន**ឆ្លើយថា ដែល**ឈួម៉**គិតធ្វើអន្តរាយលោកដូច្នេះ នឹងស្ងៀមនៅម្ដេចបាន សូមឲ្យលោកមានសំបុត្រទៅដល់**ឡៅពៀវ** តាមខសេចក្ដីឲ្យច្បាស់។ **ឡៅពី**បានស្ដាប់ក៏យល់ឃើញត្រូវ ទើបធ្វើសំបុត្រឲ្យ**ស៊ុនខៀន**កាន់ចូលទៅដល់ស្រុកកេងជីវ នាយទ្វារក៏នាំ**ស៊ុនខៀន**ចូលទៅជម្រាប**ឡៅពៀវ** ៗសួរថា យើងឲ្យអញ្ជើញ**ឡៅពី**ទៅទទួលនាហ្មឺនមុខមន្ត្រី ឯស្រុកសុងយ៉ុងនោះ កំពុងតែលៀងអាហារមិនទាន់សម្រេច ស្រាប់តែ**ឡៅពី**រត់ចេញទៅនោះ តើដោយប្រការហេតុអ្វី?

**ស៊ុនខៀន**ក៏យកសំបុត្រជូនទៅឲ្យ**ឡៅពៀវ** ក្នុងសំបុត្រនោះសេចក្ដីថា "ដែលលោកឲ្យហៅខ្ញុំទៅទទួលគំនាប់នាហ្មឺនមុខមន្ត្រីហើយលៀងភោជនាហារនោះ ខ្ញុំបានទៅជួបក្នុងទីប្រជុំដែលកំពុងលៀងអាហារ **ឈួម៉**គិតប្រទូសរ៉ាយខ្ញុំ នេះហាក់ថាខ្ញុំរត់ទៅរួចទើបផុតពីសេចក្ដីអន្តរាយជីវិត ហេតុផលដូច្នេះខ្ញុំក៏មិនទាន់នឹងជម្រាបលោកឲ្យជ្រាប គិតតែរត់ឲ្យរួចខ្លួនទៅសិន។ **ឡៅពៀវ**បានឮដូច្នោះក៏ខឹងខ្លាំងណាស់ឲ្យហៅ**ឈួម៉**ចូលមកជេរ*ប្រទេ*ចថា ឯងនេះពេញជាបង្កាច់គេដោយអំណា*ច*ចិត្ត គិតនឹងសម្លាប់**ឡៅពី**ជាប្អូនអញ ឯងមិនមានកោតក្រែងអញជាធំ និយាយហើយក៏

បង្គាប់ទាហានឲ្យចាប់ខ្លួន**ឈ្លួម៉**ទៅសម្លាប់។ ខណៈនោះ នាង**ឈ្លួហ៊ួយិន**ជាបង**ឈ្លួម៉** នៅស្តាប់ពីក្នុងឮដូច្នោះ ក៏ចេញមកនិយាយសុំទោស**ឡៅពៀវ**ថា ដែល**ឈ្លួម៉**បង្កាច់ធ្វើការតាមអំណាចចិត្តដូច្នេះ ទោសក៏ខុសជាទម្ងន់ទៅហើយ លោកឲ្យសម្លាប់ចេញនោះក៏គួរ តែខ្ញុំសុំទោសលោកទុកម្តងចុះ។ **ឡៅពៀវ**បានឮភរិយាលន់តួទោសដូច្នោះ ក៏នៅស្ងៀមដោយកម្លាំងក្រោធ មិនតបថាយ៉ាងម្តេចឡើយ។

**ស៊ុនខៀន**ឃើញ**ឡៅពៀវ**ខឹងខ្លាំងណាស់ក៏ជម្រាបថា ដែល**ឈ្លួម៉**ធ្វើខុសលោកនឹងឲ្យប្រហារជីវិតនោះក៏គួរហើយ តែថាខ្ញុំបាទពិគ្រោះឃើញថា បើ**ឈ្លួម៉**ស្លាប់ទៅ**ឡៅពី**នឹងនៅក្នុងដែនស្រុកកេងជីវតទៅក៏មិនបានសេចក្តីសុខ ដែលលោកថាអាណិត**ឡៅពី**នោះក៏ដូចជាឥតប្រយោជន៍។ **ឡៅពៀវ**បានស្តាប់ក៏គិតថា ពាក្យ**ស៊ុនខៀន**និយាយនោះព្រោះឃើញថា**ឈ្លួម៉**មានពួកម៉ាកច្រើន ប្រសិនបើអញសម្លាប់**ឈ្លួម៉**ចេញហើយ មនុស្សទាំងពួងដែលជាស្ម័គ្របក្សពួក**ឈ្លួម៉**នោះ ក៏គង់មានចិត្តគំនុំគុំគួនព្យាបាទ**ឡៅពី** ដោយសេចក្តីកំហឹងជាប្រាកដមិនខាន។ **ឡៅពៀវ**គិតហើយក៏ឲ្យលើកទោស**ឈ្លួម៉**មិនសម្លាប់ គ្រាន់តែព្យួរទោសទុក ហើយឲ្យ**ឡៅគី**ជាបុត្រច្បង និង**ស៊ុនខៀន**ទៅសុំទោស**ឡៅពី**។

**ឡៅគី** និង**ស៊ុនខៀន**ក៏លា**ឡៅពៀវ**ចេញទៅស្រុកស៊ិនអៀ ចូលទៅគំនាប់**ឡៅពី**ហើយជម្រាបថា ឥឡូវបិតាខ្ញុំបាទឲ្យមកសំពះសូមទោសលោក ដោយទើបដឹងសេចក្តីថា **ឈ្លួម៉**គិតប្រទូសរ៉ាយលោកនោះ ទោសខុសជាទម្ងន់ហើយ សុំកុំឲ្យលោកប្រកាន់ខឹងតទៅឡើយ។ **ឡៅពី**បានស្តាប់ហើយក៏មានអំណរណាស់ ហៅ**ឡៅគី**ឲ្យបរិភោគអាហារ ខណៈកាល**ឡៅគី**កំពុងសេពសុរានោះក៏សោកាពិលាប។ **ឡៅពី**ក្រឡេកឃើញ*ក៏សួរ*ថា ហេតុម្តេចបានជាក្លួយសោកយំដូច្នេះ*?* **ឡៅគី**តបថា ខ្ញុំបាទយំសោកនេះព្រោះគិតអាណិតខ្លួនណាស់ ដោយនាង**ឈ្លួហ៊ួយិន**មាតាចុងខ្ញុំបាទមាន

ចិត្តឫស្យាគិតតែនឹងសម្លាប់ខ្ញុំបាទចេញ។ ខ្ញុំបាទក៏មិនដឹងនឹងកែខៃរក្សាខ្លួនដូចម្ដេចសោះ ដើម្បីឱ្យរួចពីសេចក្ដីអន្តរាយនោះបាន ហេតុនេះខ្ញុំបាទសូមពឹងតម្រិះប្រាជ្ញាលោកជួយអនុគ្រោះណែនាំពន្យល់ខ្ញុំបាទផង។ **ឡៅពី**ថា សព្វថ្ងៃនេះបើក្មួយនឹងរក្សាខ្លួនបាន ក៏អាស្រ័យដោយប្រើកិរិយានិងអធ្យាស្រ័យដ៏រៀបរយ។ ក្មួយចូរឧស្សាហ៍ប្រតិបត្តិតាមទំនងចិត្តនាង**ឈ្នួហ៊្វិយិន** កុំឱ្យមានទាស់អធ្យាស្រ័យ ទើបនឹងរួចទោសភ័យអន្តរាយទាំងពួង។ លុះ**ឡៅពី**ពន្យល់ហើយ ព្រឹកឡើង**ឡៅគី**ក៏លាវិលទៅវិញ។ **ឡៅពី**ក៏ឡើងជិះសេះជូនដំណើរទៅដល់ក្រៅទ្វារស្រុក ទើបត្រឡប់មកវិញ ជួបមនុស្សម្នាក់ដើរធ្វើភ្លេងនៅកណ្ដាលផ្លាផ្សារជាសេចក្ដីថា៖

ធម្មជាតិដែនដីបុរីរម្យ    នឹងទ្រេតរលំដួលក្រឡាប់
ដូចភ្លើងរលត់ផុតសែងអ័ព្ទ    សូន្យស័ព្ទពុំភ្លឺពន្លឺឡើយ។
បើមេដំបូលបាក់ស្រយុត    យកឈើកំបុតតូចទល់ហើយ
ក៏ទ្រពុំឈ្នះជ្រុះជាត្រើយ    អ្នកអើយនេះគឺចាស់លោកថា។
អ្នកស្រុកស្រែក្រៅនៅឆ្ងាយក្រុង    មានពង្សពូជជាតិឆ្លាតវោហារ
ត្រូវស្វះរកម្ចាស់ចេះណាស់សា    នរណាក៏គ្មានស្គាល់យើងសោះ។

ឡៅពីបានស្ដាប់មនុស្សធ្វើភ្លេងដូច្នោះ ក៏ប្លែកក្នុងចិត្តគិតថា ពាក្យសម្ដី**សុម៉ាតេកឆោ**ប្រាប់ថា **ហុកឡុង, ហងស្វ៊ូ**នោះប្រហែលជាឈ្មោះនេះទេដឹង? **ឡៅពី**ក៏ចុះពីសេះចូលទៅគំនាប់ ហើយក៏នាំជូលទៅក្នុងទីលំនៅឱ្យអង្គុយក្នុងទីសមគួរ ហើយសួរថា អ្នកឈ្មោះអ្វី? នៅទីតំបន់ឯណា? ឈ្មោះនោះក៏ឆ្លើយ ខ្ញុំបាទឈ្មោះ**តាន់ហុក**ស្រុកនៅតំបន់អេងសុង ខ្ញុំបានដឹងថា លោកនេះមានចិត្តល្អ ជ្រៅទូលាយ រួសរាយរាក់ទាក់នឹងអ្នកទាំងពួង គិតនឹងប្រថុយចូលមករកលោក ក្រែងមិនសមគួរ បានជាខ្ញុំបាទក្លែងធ្វើភ្លេងច្រៀងលេងដូច្នេះ ប្រាថ្នានឹងឱ្យលោកដឹងច្បាស់។ **ឡៅពី**

ឮដូច្នោះក៏សោមនស្សត្រេកអរបបួល**តាន់ហុក**ទុកឲ្យនៅជាមួយ ដើម្បីនឹងជួយធ្វើជាទីប្រឹក្សា **តាន់ហុក**ក៏យល់ព្រមហើយនិយាយនឹង**ឡៅពី**ថា សេះដែលលោកជិះអម្បាញ់មិញនេះ ខ្ញុំបាទនឹងសូមមើលលក្ខណៈបន្តិច។ **ឡៅពី**ក៏ហៅមនុស្សបម្រើឲ្យដឹកសេះនោះមកជិត **តាន់ហុក**ក៏ពិគ្រោះមើលលក្ខណៈឃើញកាច ទើបជម្រាប**ឡៅពី**ថា សេះនេះលក្ខណៈឈ្មោះតេកឡៅ មានកម្លាំងនឹងថ្វីជើងរួសរាន់រហ័សណាស់ តែថា រមែងកើតអន្តរាយដល់ម្ចាស់ បើលោកនឹងជិះសេះនេះតទៅ អន្តរាយនឹងមានដល់លោក។ **ឡៅពី**ថា បើប្រសិនជាសេះនេះចង្រៃកើតអន្តរាយដល់ម្ចាស់ដូចអ្នកថាមែន កាលណាវានឹងនាំយកខ្លួនយើងឆ្លងស្ទឹងតាន់ខេមកបាន? **តាន់ហុក**ថា ទោះបីសេះនេះបាននាំលោករួចមកចាកអំពីសេចក្ដីស្លាប់ក្នុងគ្រានោះក៏មែន តែថាតទៅមុខគង់នឹងឲ្យអន្តរាយទៀតជាប្រាកដ ខ្ញុំបាទដឹងកិច្ចមួយឧបទេសចេញ ដើម្បីនឹងជិះសេះនេះតទៅមុខកុំឲ្យកើតភ័យអន្តរាយបាន។ **ឡៅពី**សួរថា ឡែបខាយរបស់អ្នកប្រការម្ដេចចូរអនុគ្រោះចុះ? **តាន់ហុក**ឆ្លើយថា ដែលមិនឲ្យមានអន្តរាយនោះ នរណាដែលមិនត្រូវចិត្តលោក ៗត្រូវឲ្យសេះនេះទៅអ្នកនោះជិះប្រើទៅចុះ អន្តរាយនោះគង់នឹងមានដល់អ្នកនោះជាមុន រួចសឹមលោកត្រឡប់យកសេះនេះមកវិញ ទើបនឹងមានសេចក្ដីចម្រើនតទៅ អស់មានអន្តរាយទៀតហើយ។ **ឡៅពី**ឮហើយក៏ខឹងណាស់ថាអ្នកនេះមានប្រាជ្ញាមកប្រដៅឲ្យទៅជាអធម៌វិញ ឲ្យយើងបំផ្លាញអ្នកដទៃឲ្យវិនាស ដូច្នេះយើងមិនសូមចង់ឮចង់ស្ដាប់តទៅឡើយ។

**តាន់ហុក**ក៏អស់សំណើចហើយថា ខ្ញុំបាទនិយាយជម្រាបលោកដូច្នេះ មិនមែននឹងឲ្យលោកធ្វើដូច្នេះក៏ទេ ព្រោះខ្ញុំបាទបានឮកិត្តិស័ព្ទដោយគេនិយាយតៗមកថា លោកជាអ្នកមានចិត្តប្រកបដោយសត្យធម៌ តែខ្ញុំបាទមិនទាន់ឃើញច្បាស់នឹងភ្នែកនៅឡើយ ដែលខ្ញុំបាទក្លែងនិយាយដូច្នេះ ដើម្បីនឹងពិសោធន៍ចិត្តលោកមើលទេតើ។

ឥឡូវក៏ឃើញសមប្រកបនឹងរន្ទឹញនោះមែន។ **ឡៅពី**ថា ដែលឮគេនិយាយនោះក៏មែនហើយ តែថាខ្លួនខ្ញុំនេះគ្រាន់តែជាប្រមាណនឹងបានដូចពាក្យគេនិយាយសព្វគ្រប់ដូច្នោះក៏ទេ គ្រានេះអ្នកមកនៅជាមួយនឹងយើងហើយ ចូរជួយរំពឹកពន្យល់ជាផ្លូវទំនុកបម្រុងដែលប្រពៃផងចុះ។ ហើយ**ឡៅពី**ក៏តាំងឲ្យ**តាន់ហុក**ធ្វើជាធំបង្កាប់បញ្ជាទាហានទាំងពួង។

ឯ**ចូឆូ** លុះលើកពលយោធាត្រឡប់ទៅស្រុកគីជីវហើយ ក៏ប្រើឲ្យ**ចោឃិន, លីតៀន, លីកង, លីសៀង** លើកទាហានបីម៉ឺនទៅតាំងនៅស្រុកហ្ស៊ិនសៀ ដែលជាស្រុកចំណុះ បំណងនឹងស្ដាប់កិច្ចការស្រុកទេសក្នុងខេត្តគីជីវនោះ លុះ**លីកង, លីសៀង**ដឹងក៏និយាយនឹង**ចោឃិន**ថា **ឡៅពី**លើកទ័ពមកនៅស្រុកស៊ិនអៀ មុខជានឹងគិតការជាធំឡើងទៀតចាំនឹងកម្ចាត់ចេញឲ្យបាន កុំឲ្យធ្វើការតទៅខាងមុខបាន។ ឯខ្លួនខ្ញុំបាទទាំងពីរនាក់បងប្អូននេះ មកនៅធ្វើការរាជការនឹងមហាឧបរាជ ក៏មិនបានធ្វើសេចក្ដីគាប់ប្រសើរជូននៅឡើយ។ សព្វថ្ងៃក៏តាំងចិត្តគិតធ្វើការតបស្នងសងគុណមហាឧបរាជឲ្យដល់ខ្នាត ឥឡូវ**ឡៅពី**មកតាំងនៅស្រុកស៊ិនអៀ ខ្ញុំបាទបងប្អូននឹងសុំអាសាទៅកាត់ក្បាល**ឡៅពី**មកឲ្យបាន។ **ចោឃិន**និង**លីតៀន**ឮដូច្នោះក៏ត្រេកអរណាស់ ទើបចាត់ទាហានប្រាំពាន់ឲ្យ**លីកង, លីសៀង**លើកទៅដល់ដែនចុងស្រុក*ស៊ិន*អៀ។

ចំណែកបម្រើសេះឃើញកងទ័ពលើកមកដូច្នោះ ក៏ស្រូតទៅប្រាប់**ឡៅពី** ៗក៏ហៅ**តាន់ហុក**មកប្រឹក្សាថា ឥឡូវកងទ័ពលើកមកធ្វើអន្តរាយដល់យើងហើយ អ្នកនឹងជួយគិតយ៉ាងម្ដេច? **តាន់ហុក**ឆ្លើយថា ដែលសត្រូវលើកទ័ពមកប្រទូសរ៉ាយយើងដូច្នេះ នឹងបង្អង់ទុកឲ្យកន្លងមកទៀតមិនគួរទេ ត្រូវតែកម្ចាត់ចេញពីចម្ងាយ សុំឲ្យលោកប្រើ**តៀវហ៊ុយ**លើកពលទាហានវាងទៅស្កាត់ពីក្រោយ ហើយឲ្យ**គួនអ៊ូ**លើក

ពលទៅពួនបង្កប់ស្កាត់កណ្ដាលផ្លូវ ឯខ្លួនលោកនិង**ជូឡុង**ចូរលើកទ័ពជាកងហ្លួងទៅទទួលច្បាំងចំមុខបច្ចាមិត្តកណ្ដាលផ្លូវ ក៏នឹងបានជ័យជម្នះជាប្រាកដ។ **ឡៅពី**ក៏យល់ឃើញត្រូវផង ទើបប្រើ**គួនអ៊ូ** និង**តៀវហ៊ុយ**លើកទាហានទៅតាំងតាមពាក្យ**តាន់ហុក**ថា។ ឯ**ឡៅពី**និង**ជូឡុង**ក៏លើកពលពីរពាន់ចេញពីស្រុកទៅចម្ងាយផ្លូវប្រហែលមួយរយសិន (៤គ.ម) បានជួបនឹង**លីកង, លីសៀង**លើកចូលមក **ឡៅពី**ក៏បញ្ឈប់កងទ័ពហើយបរសេះទៅបញ្ឈរពីមុខទាហានទើបសួរថា អ្នកឯងឈ្មោះអ្វី? ទើបអាចលើកកងទ័ពកន្លងចូលមកដល់ដែនរបស់យើង? **លីកង**ឆ្លើយថា យើងឈ្មោះ**លីកង**ជាទាហានឯករបស់មហាឧបរាជ ឥឡូវនឹងមកចាប់ខ្លួនអ្នកឲ្យបាន។

**ឡៅពី**ខឹងណាស់ ក៏ប្រើ**ជូឡុង**បរសេះចូលទៅតយុទ្ធនឹង**លីកង**បានប្រាំភ្លែង**ជូឡុង**យកទួនចាក់ត្រូវ**លីកង**ធ្លាក់ពីលើសេះស្លាប់។ **ឡៅពី**ឃើញបានចំណាប់ក៏បរពលចូលប្រកាប់ប្រចាក់។ **លីសៀង**ឃើញលើសកម្លាំងនឹងទ្រាំតទល់ពុំបាន ក៏បាក់ទ័ពរត់ថយទៅក្រោយ។ **គួនអ៊ូ**ក៏ចេញមកដេញបណ្ដោយពីសងខាង ចូលចាក់កាប់សម្លាប់រេហ៍ពល**លីសៀង**ស្លាប់ប្រហែលពីរពាន់ប្លាយ។ **លីសៀង**ឃើញពលខ្លួនស្លាប់រត់ខ្ចាត់ខ្ចាយក៏ថយរត់ចេញទៅ **តៀវហ៊ុយ**ដែលនៅចាំស្កាត់ខាងក្រោយផ្លូវឃើញ**លីសៀង**នាំពលរត់បែកមក ក៏បរសេះចេញទៅចាំស្កាត់ពីមុខហើយស្រែកថា អញឈ្មោះ**តៀវហ៊ុយ**មកចាំស្កាត់ឯងនៅទីនេះជាយូរហើយ **លីសៀង**ក្រឡេកឃើញ**តៀវហ៊ុយ**ក៏ស្ដុតស្លាំងក្នុងចិត្ត ញាក់សេះនឹងរត់ **តៀវហ៊ុយ**ក៏ដេញតាមយកទួនចាក់ត្រូវ**លីសៀង**ធ្លាក់ពីលើសេះស្លាប់ ទាហានទាំងពួងក៏បែកខ្ចាត់ខ្ចាយចេញទៅ។ **ឡៅពី**ក៏ដេញចាប់ទាហានបានច្រើនណាស់ ហើយឲ្យលើកកងទ័ពត្រលប់មកស្រុកស៊ិនអៀវិញ។

ឯទាហាន**លីកង**ដែលបែករត់ទៅបាននោះ ក៏នាំព័ត៌មានទៅប្រាប់**ចោយិន**គ្រប់ប្រការ។ **ចោយិន**ឮហើយក៏ភិតភ័យខ្លាំងណាស់ ប្រឹក្សានឹង**លីតៀន** និងទាហានទាំងពួងថា ឥឡូវ**លីកង, លីសៀង**លើកទ័ពទៅក៏បរាជ័យនឹង**ឡៅពី**ទៅហើយ តើយើងនឹងគិតប្រការម្ដេចទៅវិញ? **លីតៀន**ឆ្លើយថា **លីកង, លីសៀង**នោះដល់នូវសេចក្ដីស្លាប់ក្នុងគ្រានេះ ក៏ព្រោះប្រមាថមើលងាយ**ឡៅពី** បើយើងនឹងលើកទ័ពបន្ថែមទៅវាយស្រុក*ស៊ិន*អៀទៀតក៏មិនបាន។ ឯ**ឡៅពី**មានជ័យ ក៏កំរើបចិត្តឡើង*ទៀ*ត សូមឲ្យលោកគិតកែប្រែបង្អែបង្អង់ទាហានទុកសិន ហើយប្ដឹងសំបុត្រចូលទៅដល់មហាឧបរាជឲ្យលើកកងទ័ពមកជួយ។ **ចោយិន**ឆ្លើយថា **ឡៅពី**សម្លាប់សេនាយើងហើយ ចាប់យកទាំងកូនទាហានទៅជាឈ្លើយក៏ច្រើននឹងស្ងៀមនៅម្ដេចបាន? ត្រូវតែលើកកងទ័ពទៅសងសឹក**ឡៅពី**វិញ ឯស្រុកស៊ិនអៀប៉ុនបាតដៃដែរ។ **លីតៀន**ថា ឯ**ឡៅពី**នោះមានតម្រិះប្រាជ្ញាជ្រៅឆ្ងាយទូលាយណាស់ ដែលលើកទ័ពទៅបង្ក្រាបតាមកម្លាំងមិនបានទេ ឲ្យរិះគិតសិន។ **ចោយិន**ថា អ្នកចរចាដូច្នេះមិនអដ្គឹនឹងខ្លាចថ្វីដៃ**ឡៅពី**ហើយឬ? **លីតៀន**ថា ខ្ញុំនិយាយដូច្នេះមិនមែននឹងកោតខ្លាចថ្វីដៃ**ឡៅពី**ដូចម្ដេចទេ ប្រាថ្នានឹងដាស់ស្មារតីលោកទេតើ ព្រោះពាក្យបុរាណក៏មានពោលទុកថា បើនឹងធ្វើការសង្គ្រាម គប្បីឲ្យដឹងលក្ខណៈក្នុងកលសឹកជាមុន ទើបមានជ័យជម្នះដោយងាយ ហេតុដូច្នេះបានជាខ្ញុំឃាត់លោក ក្រែងថ្លោះការនឹងសត្រូវក៏នឹងថែមអាក្រក់ទៅទៀត។

**ចោយិន**ថា អ្នកនិយាយនេះគឺធ្វើការជាចិត្តពីរ មិនមែនជាភក្ដីស្មោះត្រង់ បើដូច្នោះតែកម្លាំងយើងនឹងលើកទៅចាប់ខ្លួន**ឡៅពី**ក៏បានដែរ។ **លីតៀន**ថា ដែលនឹងលើកទ័ពទៅនោះក៏តាមសេចក្ដីគិតលោកចុះ ខ្ញុំនឹងសូមអាសាគ្រងទាហាននៅរក្សាស្រុកហ្ស៊ិនសៀ។ **ចោយិន**ឮដូច្នោះក៏ខឹងណាស់ថា អ្នកចរចាប្រែចិត្តចេញពីយើង

ដូច្នេះ យើងឃើញថា អ្នកចិត្តពីរទៅហើយ បានជាគ្មានសេចក្ដីឈឺចិត្តឆ្អិតថ្លើមសោះ។ **លីតៀន**ថា ខ្ញុំនិយាយដាស់តឿនស្មារតីលោកដោយការពិត នឹងបានប្រែចិត្តចេញពីលោកក៏ទេ បើជាលោកនៅសង្ស័យនឹងខ្ញុំ ៗសូមទៅជាមួយផង។ **ចោយិន**និង**លីតៀន**ក៏លើកទាហានពីរម៉ឺនបួនពាន់ស្រួតតម្រង់ទៅស្រុកស៊ិនអៀដោយកម្លាំងទោសោ មិនបានឈប់សម្រាកកងទ័ព លើកទៅទាំងយប់ទាំងថ្ងៃ ដោយគំនិត និងចិត្ត**ចោយិន**នោះ ប៉ងនឹងទៅជាន់សង្កត់ផែនដីស្រុកអ៊ិនសៀឲ្យលិចទៅក្នុងមហាសមុទ្រតែម្ដង។

ឯ**តាន់ហុក**ចាប់ដើមតាំងពី**ឡៅពី**បានជ័យជម្នះ ត្រឡប់ទៅស្រុកស៊ិនអៀវិញក៏និយាយនឹង**ឡៅពី**ថា **ចោយិន**មកតាំងទ័ពទៅស្រុកហ៊្វួនសៀនោះ ឥឡូវខូចសេនាឯកដល់ពីរនាក់ មុខជាមានចិត្តខឹងក្ដៅ លើកទ័ពមកវាយស្រុកយើងទៀតហើយ។ **ឡៅពី**ឮហើយក៏យល់ថាមែន ទើបសួរ**តាន់ហុក**ថា បើប្រសិន**ចោយិន**លើកទ័ពមកមែន តើយើងនឹងគិតការពារប្រការម្ដេច? **តាន់ហុក**ថា បើ**ចោយិន**លើកមកគ្រានេះ មុខជាប្រមូលទាហានយកមកទាំងអស់ យើងនឹងគិតកលឧបាយលបទៅវាយយកស្រុកហ៊្វួនសៀឲ្យបាន។ **ឡៅពី**សួរថា កលឧបាយអ្នកគិតយ៉ាងម្ដេច? **តាន់ហុក**ក៏ខ្សឹបប្រាប់**ឡៅពី**ជាសេចក្ដីថា ស្រុកហ៊្វួនសៀនោះមនុស្សស្ងួចស្ដើងណាស់ សូមលោកប្រើ**គួនអ៊ូ**លើកទាហានលបទៅវាយយកស្រុកហ៊្វួនសៀជាកំណាន់ទុក មុខជានឹងបានដោយងាយណាស់ ហើយប្រើ**តៀវហ៊ុយ**ឲ្យលើកទាហានទៅបង្កប់នៅក្បែរច្រាំងស្ទឹង បើឆ្លងពីស្រុកហ៊្វួនសៀទៅហើយ ឃើញ**ចោយិន**បែកទ័ពទៅ ត្រូវឲ្យចេញស្កាត់វាយពីមុខ សឹកសង្គ្រាមគ្រានេះខ្ញុំបាទសម្គាល់ថាមុខជាបានជ័យជម្នះទៀតជាប្រាកដ។ **ឡៅពី**ឮដូច្នោះក៏ត្រូវចិត្តណាស់ ទើបប្រើ**គួនអ៊ូ**, **តៀវហ៊ុយ**លើក

ទាហានទៅធ្វើតាមពាក្យ**តាន់ហុក**ថានោះ ហើយ**ឡៅពី**ក៏ត្រួតត្រាត្រៀមទាហានទុកព្រមជាស្រេច។

ទទួលបម្រើសេះម្នាក់ចូលមកប្ដឹង**ឡៅពី**ថា **ចោយិន**លើកកងទ័ពមកដល់ប្រទល់ដែន។ **តាន់ហុក**ឮដូច្នោះក៏នាំ**ឡៅពី**លើកទាហានចេញទៅតាំងបន្ទាយ តទល់នឹងកងទ័ព**ចោយិន**ក្រៅកំពែងស្រុក។ **ឡៅពី**ក៏ប្រើ**ជូឡុង**វាំទូនចូលទៅបញ្ឆោត**ចោយិន**ក្រៅបន្ទាយ **ចោយិន**ឃើញដូច្នោះក៏បណ្ដោញឲ្យ**លីតៀន**ចេញមកតយុទ្ធនឹង**ជូឡុង**បានម្ដៅភ្លេង **លីតៀន**ឃើញកម្លាំង**ជូឡុង**ខ្លាំងលើសលុបនឹងតទល់ពុំបាន ក៏បំផាយសេះរត់ថយក្រោយចូលមកបន្ទាយវិញ។ **ជូឡុង**ឃើញបានចំណាប់ក៏បរសេះប្រញាប់តាមទៅ ទាហានដែលនៅក្នុងបន្ទាយក៏លើកធ្នូឡើងបាញ់ស្ទាក់ពីមុខ **ជូឡុង**នឹងពុំពារចូលទៅពុំបាន ក៏បំផាយសេះវិលមកចូលបន្ទាយវិញ។

**លីតៀន**និយាយនឹង**ចោយិន**ថា ទាហាន**ឡៅពី**មានថ្វីដៃខ្លាំងពូកែណាស់ មុខជាយើងនឹងយកជ័យជម្នះមិនបានទេ សូមឲ្យលោកលើកទ័ពត្រឡប់ទៅស្រុកហ៊្នូនសៀវិញនឹងបានរិះគិតការជាថ្មីឡើងវិញ។ **ចោយិន**បានឮហើយក៏ខឹងណាស់ថា កាលពីដំបូងយើងរៀបលើកទ័ពមក ខ្លួនធ្វើព្រងើយកន្ដើយ យើងក៏ឃើញចិត្តម្ដងទៅហើយ ដល់មកវេលានេះ យើងឲ្យខ្លួនចេញតយុទ្ធនឹង**ជូឡុង** ខ្លួនក៏បែកថយរត់មកវិញឲ្យថ្លោះការនឹងសត្រូវ បើយើងមិនយកទោសខ្លួនក្នុងគ្រានេះ ទាហានទាំងពួងនឹងយកតួយ៉ាងតាម ទើបបង្គាប់ទាហានឲ្យចាប់ខ្លួន**លីតៀន**ទៅប្រហារជីវិត។

នាយទ័ពនាយកងទាំងអស់គ្នាក៏ចូលទៅសូមទោស **ចោយិន**ក៏ព្រមអនុញ្ញាតទោសហើយចាត់ឲ្យ**លីតៀន**ឃុំនាំទាហានជានាយកងក្រោយ សម្រាប់ការពាររក្សាស្បៀង។ លុះវេលាព្រឹកឡើង**ចោយិន**ក៏វាយឈ្មោះគងទូងស្គរឮគឹកកងក្នុងបន្ទាយ ហើយរៀបចាត់ចែងពលទាហានតាំងជាក្បួន*ព្យុ*ហៈដោយក្បួនទ័ពឈ្មោះ ‘ប៉ាក់ប៊ុន

ឃិនឆោរិន្ទ” ប្រែថា “កូនសោមាស” មានទ្វារប្រាំបីទិស ស្រេចហើយឲ្យទាហានជិះសេះចូលទៅស្រែកប្រកាស ក្នុងមុខបន្ទាយ**ឡៅ**ពីថា នាយយើងតាំងទាហានជា*ព្យុហៈ* ទ័ពដូច្នេះ អ្នកឯងដឹងជាកលឧបាយព្យុហៈនោះដូចម្ដេចខ្លះ?

# **រឿង សាមកុក**

អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

កណ្ឌទី ៣៤

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

(តាំងពី**ឡៅពី**និង**តាន់ *ហុក***ឡើងទៅមើលរបៀបទ័ពព្យុហៈ**ចោយិន ជូឡុង**ចូលវាយបន្ទាយ***ចោយិន***បែក លុះដល់**ឡៅពី**ទៅរក**ខុងបេង**មិនជួប ហើយជួបតែ**ស៊ុយបេង** បបួល**ស៊ុយបេង**មិនព្រមទៅ។)

**តាន់ហុក**បានស្គាល់ច្បាស់ ក៏នាំ**ឡៅពី**ឡើងទៅលើកំពូលភ្នំ ហើយក្រឡេកមើលចុះមក ក៏ស្គាល់ច្បាស់ក្នុងកលព្យុហៈ ទើបជម្រាប**ឡៅពី**ថា ដែល**ចោយិន**តាំងពលទាហានជាព្យុហៈទុកដូច្នេះ ឈ្មោះថា "ប៉ាក់ប៊ុនឃិនឆោវិន្ទ" មានទ្វារប្រាំបីទិស បើនរណាចូលចេញមិនត្រូវក៏នឹងបរាជ័យចាញ់ បើចូលត្រូវហើយក៏នឹងមានជ័យជម្នះ **ចោយិន**ធ្វើយ៉ាងនេះល្អមែន តែថាមិនទាន់បានធួនល្មម សូមឲ្យលោកប្រើទាហានឲ្យចូលពីទ្វារទិសទក្សិណវាយទម្លាយចេញទៅខាងទិសបស្ចិម ទាហាន**ចោយិន**ទាំងអម្បាលនោះ ក៏នឹងបែកជាច្រឡំបល់ទៅឯង។

**ឡៅពី**ឮដូច្នោះ ក៏នាំ**តាន់ហុក**ចុះពីលើភ្នំមកវិញ ហើយប្រមូលទាហានឲ្យរក្សាបន្ទាយឲ្យខ្ជាប់ខ្ជួន រួចប្រើ**ជូឡុង**លើកពលប្រាំរយ វាយទម្លាយចូលទៅតាមផ្លូវទ្វារទិសទក្សិណ។ ឯ**ចោយិន**ឃើញ**ជូឡុង**វាយចូលមកក៏ឡើងសេះវាំទូនចេញបញ្ឆោតបំណងនឹងឲ្យ**ជូឡុង**ដេញតាមចេញទៅខាងទិសឧត្តរ **ជូឡុង**ក៏មិនដេញតាមទៅច្បាំងពារទម្លាយចេញទៅខាងទិសបស្ចិម ហើយត្រឡប់ថយក្រោយ វាយត្រឡប់ចូលទៅទៀតចេញតាមទ្វារទិសទក្សិណដដែល ឯទាហាន**ចោយិន**ក៏ផ្អើលជ្រួលច្របល់ កាប់សម្លាប់គ្នាឯងជាច្រឡំបល់។ **ឡៅពី**ឃើញបានចំណាប់ក៏បរពលទាហានចូលមកកាប់ចាក់ សម្លាប់ទាហានស្លាប់អស់ជាច្រើន ហើយទាហានបែកខ្ចាត់ខ្ចាយចេញទៅ **តាន់ហុក**ក៏នាំ**ឡៅពី** និង**ជូឡុង**លើកទ័ពវិលមកបន្ទាយវិញ។

ចំណែក**ចោយិន**ដែលចាញ់ប្រៀបនឹង**ឡៅពី**ដូច្នោះ ក៏នឹកគិតដល់ពាក្យសម្ដី**លីទៀន**រំឭកពីថ្ងៃមុន ទើបអញ្ជើញ**លីទៀន**មកប្រឹក្សាថា ក្បួនសឹកគ្រានេះ ក៏រៀបចំយ៉ាងអស់ពីចិត្ត គិតថានឹងយកជ័យជម្នះឲ្យបាន ប្រហែលជាក្នុងកងទ័ព**ឡៅពី**មានមនុស្សចេះប៉ិនប្រសប់ជាមាំមួន ទើបអង់អាចយកជ័យជម្នះយើងបានវិញ។ **លីទៀន**តបថា ការទាំងនេះខ្ញុំក៏បាននិយាយរំឭកលោកពីដំបូងមកហើយ លោកក៏មិនព្រមជឿស្ដាប់ពាក្យខ្ញុំសោះ ត្រឡប់ចិត្តខឹងទ្រគោះប្រកាន់មកខ្ញុំវិញថា ខ្ញុំប្រែបែកចិត្ត ឯខ្លួនខ្ញុំមកធ្វើសឹកនឹងលោកគ្រានេះ ចិត្តខ្ញុំចេះតែឲ្យមានគិតវិតក្កព្រួយដល់ស្រុកហ៊្វួនសៀរាល់ពេលមិនដែលភ្លេចសោះ ព្រោះទីនោះនឹងរកនរណានៅគ្រប់គ្រងរក្សាជាមាំមួនក៏គ្មាន ខ្លាចក្រែងមានអន្តរាយជាក្រោយយើង។ **ចោយិន**តបថា អ្នកនិយាយនេះត្រូវណាស់ តែថាយើងលើកកងទ័ពមកដល់ប្រទល់ដែនស្រុកស៊ិនអៀហើយ ត្រូវតែចាំច្បាំងគ្នានឹង**ឡៅពី**ឲ្យអស់ចិត្តសិន ពេលយប់នេះ យើងនឹងលើកទាហានជាកងទ័ពចូលលុកបន្ទាយ**ឡៅពី** ប្រសិនបើសមដូចគំនិតយើងគិតនឹងបានធ្វើការឲ្យជាប់តទៅ បើមិនបានសម្រេចទេ សឹមយើងលើកទ័ពត្រឡប់ទៅស្រុកហ៊្វួនសៀវិញ។ **លីទៀន**ឆ្លើយថា **ឡៅពី**ជាមនុស្សមានសតិបញ្ញាណាស់ ទោះបីជាជ័យជម្នះក្ដី ក៏គង់មិនប្រមាថ វេលាថ្ងៃនេះ មុខជាគិតការពាររក្សាបន្ទាយជាមាំមួន ដែលលោកគិតនឹងលើកទៅលុកបន្ទាយ**ឡៅពី**នោះ ក្រែងខូចទាហានអសារឥតការទេដឹង? **ចោយិន**ឆ្លើយឡើងថា ឯការសង្គ្រាមនេះ បើចេះតែគិតខ្លាចបារម្ភក្រែងចាញ់ដូចពាក្យអ្នកថា ហើយនឹងធ្វើសឹកតទៅម្ដេចបាន? **ចោយិន**មិនស្ដាប់ក៏ត្រៀមទាហានទុកព្រមស្រេចហើយបង្គាប់ថា វេលាយាមពីរនឹងលើកចូលលុកបន្ទាយ**ឡៅពី**។

ឯ**ឡៅពី**និង**តាន់ហុក**អង្គុយប្រឹក្សារាជការជាមួយគ្នា ទទួលកើតខ្យល់កំបុតត្បូងគួចឡើងលើបន្ទាយ **តាន់ហុក**ក៏និយាយនឹង**ឡៅពី**ថា ខ្យល់ព្យុះនេះអស្ចារ្យណាស់ ប្រហែលយប់នេះ**ចោយិន**នឹងលើកទ័ពមកលុកបន្ទាយយើងជាប្រាកដ។ **ឡៅពី**តបថា ប្រសិនបើ**ចោយិន**នឹងលើកទ័ពមកលុកមែន យើងរិះគិតការពារប្រការម្ដេច?

**តាន់ហុក**អស់សំណើចហើយថា លោកកុំព្រួយវិតក្កឡើយ ដែលនឹងស៊ូច្បាំងនឹង**ចោយិន**នោះ ខ្ញុំបាទនឹងទទួលធានាជាធុរៈដោយខ្លួនឯង។

លុះដល់ពេលព្រលប់ **តាន់ហុក**ក៏ប្រើ**ជូឡុង**ឲ្យលើកទាហានទៅពួនបង្កប់ស្កាត់នៅកណ្ដាលផ្លូវ ហើយឲ្យគរឧសចំបើងទុកជុំវិញបន្ទាយ ចំណែក**ចោយិន**កាលដល់កំណត់ក៏លើកទាហានចេញពីបន្ទាយ ឲ្យ**លីទៀន**ជានាយកងក្រោយ លើកទៅជិតបន្ទាយ**ឡៅពី** លុះឃើញភ្លើងឆេះជុំវិញបន្ទាយ **ចោយិន**ក៏សម្គាល់ថា **ឡៅពី**ដឹងខ្លួនបានជាការពាររក្សាបន្ទាយជាមាំមួន ក៏ថយទ័ពត្រឡប់មកនឹងចូលបន្ទាយវិញ។ **ជូឡុង**ដែលពួនបង្កប់ស្កាត់ផ្លូវនោះ លុះឃើញទ័ព**ចោយិន**ថយហើយ ក៏ដេញទាហានស្ទុះស្រចេញមក ៗ ទាហាន**ចោយិន**មិនទាន់ដឹងខ្លួនក៏បែកផ្អើលនាំគ្នារត់។ **ជូឡុង**បានចំណាប់ក៏លើកទាហានដេញតាមទៅ។

ចំណែក**ចោយិន**នឹងចូលបន្ទាយមិនទាន់ ក៏គេចលើកទ័ពត្រឡប់តម្រង់ទៅឯស្រុកហ្វ៊ូនសៀ លុះទៅដល់មាត់ស្ទឹងដែនស្រុកហ្វ៊ូនសៀ ក៏ឈប់ទាហានចាត់ឲ្យរកទូកឆ្លង។ **តៀវហ៊ុយ**ដែលតាំងបង្កប់នៅក្បែរមាត់ច្រាំងឃើញដូច្នោះ ក៏លើកទាហានចេញស្កាត់ព័ទ្ធឡោមជុំវិញហើយចូលទៅ **ចោយិន** និង**លីទៀន**មិនទាន់ដឹងខ្លួនក៏ស្លុតស្លន់ស្មារតី នាំគ្នាចុះទូកថែវរត់ឆ្លងទៅត្រើយម្ខាង។ **តៀវហ៊ុយ**ក៏ចាក់កាប់សម្លាប់ទាហាន**ចោយិន**ស្លាប់ដោយអាវុធ និងធ្លាក់លង់លឹកទឹកស្លាប់អស់ជាច្រើន រាប់ប្រមាណប្រហែ*ល*មួយម៉ឺនប្លាយ។

ចំណែក**ចោយិន** និង**លីទៀន**ឆ្លងទៅដល់ត្រើយម្ខាងហើយ ក៏នាំទាហានប្រហែលមួយម៉ឺនប្លាយដែលសល់អំពីស្លាប់នោះ ប្រញាប់ទៅស្រុកហ្វ៊ូនសៀ កាលដល់ហើយហៅទាហានក្នុងស្រុកឲ្យបើកទ្វារទទួល **គួនអ៊ូ**ដែលចូលទៅតាំងនៅក្នុងស្រុកនោះឃើញដូច្នោះ ក៏អុជផាវជាសញ្ញាឡើង ហើយឲ្យទាហានបើកទ្វារស្រុកចេញមក។ **ចោយិន**ក្រឡេកឃើញ**គួនអ៊ូ**ក៏ភ័យស្លុតស្មារតី នាំទាហានរត់គេចទៅតាមជើងកំពែង **គួនអ៊ូ**ក៏ដេញកាប់សម្លាប់ទាហាន**ចោយិន**ស្លាប់ជាច្រើន។ **ចោយិន**ក៏

លើកទ័ព*ស្រូត*ទៅស្រុកហ៊្វិតោ កាលទៅដល់ពាក់កណ្ដាលផ្លូវមានគេប្រាប់ដំណឹងថា **ឡៅពី**ធ្វើការសង្គ្រាមមានជ័យជម្នះដូច្នេះ ព្រោះគំនិត**តាន់ហុក**។

ឯ**ឡៅពី**ឃើញ**ចោយិន**ចាញ់ដៃ**ជូឡុង** *វ័ប*ករត់ទៅដូច្នោះ ក៏នាំ**តាន់ហុក**និងទាហានទាំងពួងលើកតាមទៅដល់ស្រុកហ៊្វិនសៀ ដឹងរឿងរ៉ាវថា **គួនអ៊ូ**វាយបានស្រុកហ៊្វិនសៀហើយ **ចោយិន**និង**លីទៀន**នាំគ្នារត់ទៅស្រុកហ៊្វិតោវិញ។ **ឡៅពី**ក៏លើកទាហាននឹងឆ្លងចូលទៅស្រុកហ៊្វិនសៀ។ ឯ**ឡៅពិត**ដែលជាអ្នករក្សាស្រុកហ៊្វិនសៀ ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** ជាប់សែជាមួយនឹង**ឡៅពី** លុះដឹងថា **ឡៅពី**លើកទ័ពមកក៏មានសោមនស្សណាស់ ទើបចេញមកអញ្ជើញ**ឡៅពី**ចូលទៅក្នុងស្រុក ហើយក៏រៀបចំតែងតុលៀងឲ្យ**ឡៅពី**និងសេនាទាហានបរិភោគ។ ខណៈដែល**ឡៅពី**កំពុងបរិភោគអាហារនោះ ឃើញក្មួយ**ឡៅពិត**នៅជំទង់តូច រូបរាងស្រស់បស់ឈរពីក្រោយ**ឡៅពិត** **ឡៅពី**ក៏សួរថា ដែលឈរពីក្រោយនោះឈ្មោះអ្វី? **ឡៅពិត**ជម្រាបថា ឈ្មោះ **ខៅហង** ជាកូនបងស្រីខ្ញុំបាទ កំព្រាអត់អាពុកម្ដាយ ខ្ញុំបាទយកមកចិញ្ចឹមតាំងពីតូច។ **ឡៅពី**ថា ខ្ញុំឃើញរូបរាងវានេះស្រស់បស់ ក៏មានចិត្តអាណិតណាស់ អ្នកអនុញ្ញាតឲ្យខ្ញុំសុំយកទៅចិញ្ចឹមជាកូនធម៌ចុះ មិនជាអ្វីទេ។ **ឡៅពិត**បានស្ដាប់ដូច្នោះក៏មានអំណរណាស់ ហើយហៅ **ខៅហង**ឲ្យចូលមកគំនា*ប់* **ឡៅពី** ហើយអនុញ្ញាតឲ្យធ្វើជាកូនចិញ្ចឹមរបស់**ឡៅពី** ៗក៏ប្រែឈ្មោះ **ខៅហង**នោះចេញឲ្យឈ្មោះថា **ឡៅហង** វិញ ហើយនាំគ្នាទៅគំនាប់**គួនអ៊ូ, តៀវហ៊ុយ**ឲ្យហៅថាមា។ **គួនអ៊ូ**និយាយនឹង**ឡៅពី**ថា បុត្ររបស់លោកក៏មានដែរ ហេតុម្ដេចទើបយកអ្នកដទៃមកធ្វើជាសាច់ទៀត បីដូចគេចិញ្ចឹមកូនឆ្កែញ៉ាំងយូរទៅនឹងបានសេចក្ដីក្ដៅក្រហាយទេដឹង? **ឡៅពី**តបថា ទោះបីអ្នកដទៃក្រៅសាច់មែន តែយើងស្រឡាញ់ស្មើបុត្រ បានជាយកមកចិញ្ចឹមទុកគង់តែនឹងមានចិត្តកតញ្ញូតទៅ ទោះយ៉ាងណាក៏មិនមានចិត្តនឹងធ្វើអន្តរាយដល់យើង។ **គួនអ៊ូ**ឮដូច្នោះក៏ទាល់គំនិតមិនឆ្លើយថាប្រការម្ដេចឡើយ។

**ឡៅពី**និង**តាន់ហុក**ក៏ប្រឹក្សាគ្នា ឲ្យ**ជូឡុង**នាំទាហានមួយពាន់នៅរក្សាស្រុកហ៊ួនសៀ ហើយ**ឡៅពី**និង**តាន់ហុក**ក៏នាំ**គួនអ៊ូ**, **តៀវហ៊ុយ**ត្រឡប់លើកទ័ពទៅស្រុកស៊ិនអៀវិញ។

ឯ**ចោយិន**និង**លីទៀន**ចូលទៅដល់ស្រុកហ៊ូតោ ក៏នាំគ្នាទៅគំនាប់**ចូឆូ** អធិប្បាយរឿងទាំងពួងជម្រាប**ចូឆូ** ហើយក៏យំអង្វរសូមទោស។ **ចូឆូ**ក៏តបថា អ្នកកុំវិតក្កព្រួយឡើ*យ* ឯធម្មតាសង្គ្រាមនឹងបំណងយកជ័យជម្នះតែមួយយ៉ាងក៏មិនបានរមែងចាញ់ខ្លះឈ្នះខ្លះជាធម្មតា តែយើងគិតសង្ស័យថា **ឡៅពី**ធ្វើការបានដល់ត្រឹមណេះឃើញលើសហួសណាស់ ប្រហែលមានអ្នកឯណាជួយរិះគិតឲ្យ។ **ចោយិន**តបថា ខ្ញុំបានដឹងដំណឹងថា ទីប្រឹក្សាគិតការទាំងពួងឲ្យ**ឡៅពី**នោះឈ្មោះថា **តាន់ហុក**។ **ចូឆូ**សួរថា **តាន់ហុក**នោះគឺនរណាអេះ? ពីដើមឈ្មោះសំឡេងមិនប្រាកដ។ **ផៀយ៉ុក**បានឮក៏អស់សំណើចហើយថា **តាន់ហុក**នោះពីដើមឈ្មោះ**ស៊ីឈី**នៅស្រុកអេងជីវកាលពីកំឡោះនោះជាមនុស្សមានពួកភឿនច្រើនស្វែងរករៀនវិជ្ជា ក្រោយពីនោះមកបានសម្លាប់គេស្លាប់ហើយក្លែងធ្វើអាការៈជាឆ្កួត លុះគេចាប់បានយកខ្លួនទៅវាយពិចារណា ក៏មិនបានឆ្លើយប្រាប់ឈ្មោះ និងហេតុផល ដែលប្រព្រឹត្តដោយពិតក្លែងធ្វើស្ងៀមមិនដឹង អ្នកពិចារណាទើបយកខ្លួនទៅចងដាក់លើរទេះបរទៅជុំវិញស្រុក*ស្រែ*កអាក្រោសវាយគងឃ្មោះសួររកឈ្មោះថា នរណាស្គាល់ឈ្មោះនេះខ្លះ? បណ្ដាអ្នកស្រុកតាមទីផ្សារទាំងពួង ដែលស្គាល់ឈ្មោះ**ឈីស៊ី**ក៏ខ្លាចមិនហ៊ានប្រាប់ឈ្មោះ។ លុះបណ្ដើរទៅជួបនឹងពួកម៉ាក**ឈីស៊ី** ពួកម៉ាកក៏ចូលដណ្ដើមយកខ្លួន**ឈីស៊ី**បាន **ឈីស៊ី**ក៏រត់ទៅរៀនវិជ្ជានៅនឹង**សុម៉ាតេកឆោ** ផ្លាស់ឈ្មោះថា**តាន់ហុក**ដរាបដល់សព្វថ្ងៃនេះ។

**ចូឆូ**ឮដូច្នោះក៏សួរថា **ឈីស៊ី**មានប្រាជ្ញា និងតម្រិះរិះគិតស្មើនឹងអ្នកឬ? **ផៀយ៉ុក**ជម្រាបថា **ឈីស៊ី**មានបញ្ញានិងគំនិតនោះជាជាងខ្ញុំបាទច្រើនណាស់។ **ចូឆូ**ថា **ឡៅពី**បានអ្នកមានប្រាជ្ញានិងគំនិតរិះគិតទៅទុកជាទីប្រឹក្សា ឃើញនឹងមានចិត្តកំរើបធំឡើងទៀត ធ្វើម្ដេចយើងនឹងបានខ្លួន**ឈីស៊ី**មកទុក កុំឲ្យ**ឡៅពី**កំរើបឡើងបាន?

**ផៀយ៉ុក**ឆ្លើយថា បើលោកមានសេចក្ដីប្រាថ្នានឹងចង់បាន**ឈីស៊ី**មកទុកនោះ នឹងក្រអ្វីទោះបីឈ្មោះនេះបានជាទៅនៅនឹង**ឡៅពី**ហើយក្ដី ខ្ញុំបាទនឹងរិះគិតកែខៃយកខ្លួនមកជូនលោកបាន។ **ចូឆ្ង**សួរថា អ្នកនឹងរិះគិតយ៉ាងម្ដេច? **ផៀយ៉ុក**ឆ្លើយថា ដែលខ្ញុំបាទនឹងយក**ឈីស៊ី**មកនោះ ព្រោះខ្ញុំបាទដឹងឫសគល់ចិត្ត**ឈីស៊ី**ថាជាមនុស្សកតញ្ញូណាស់ ឯបិតាស្លាប់ហើយនៅតែមាតាជាមនុស្សចាស់ជរា ខណៈកាល**ឈីស៊ី**នឹងដើរចេញពីមាតានោះ មាន**ឈីខង**ជាប្អូនប្រតិបត្តិមាតាជាជំនួស ឥឡូវ**ឈីខង**ជាប្អូនស្លាប់ទៅទៀត មាតាក៏កំព្រាអនាថាគ្មាននរណា*នៅ*បម្រើសោះ សូមលោកឲ្យទៅហៅមាតា**ឈីស៊ី**ជាបុត្រឲ្យចូលមក ក៏ឃើញថា**ឈីស៊ី**មានកតញ្ញូនឹងមាតា នឹងលះបង់មិនបានគង់នឹងមក។

**ចូឆ្ង**បានឮដូច្នោះក៏មានអំណរត្រូវចិត្ត ទើបប្រើបម្រើឲ្យទៅនាំមាតា**ឈីស៊ី**មកចិញ្ចឹមជាប្រក្រតី ហើយ**ចូឆ្ង**ក៏លួងលោមថ្នមចិត្ត ឥឡូវយើងដឹងថា បុត្ររបស់អ្នកមានតម្រិះប្រាជ្ញាណាស់ ទៅនៅនឹង**ឡៅពី**ដែលជាសត្រូវក្បត់ផែនដីឃើញថាមិនគួរសោះ បីដូចគេយកកែវមណីទៅចោលទុកក្នុងជ្រាំ សម្រាប់តែអាប់រស្មីទៅ សព្វថ្ងៃយើងគិតស្ដាយពេកណាស់ ហើយមានចិត្តអាណិតដល់អ្នកផង ទើបឲ្យទៅទទួលមកប្រាថ្នាឲ្យមានសំបុត្រទៅដល់**ឈីស៊ី**បុត្រអ្នក ឲ្យមកនៅធ្វើរាជការជាមួយនឹងយើងក្នុងស្រុកក្រុង យើងនឹងបានជួយពិតទូលព្រះចៅ**ហៀនតេ** តាំងឲ្យធ្វើជានាហ្មឺនធំតទៅ ហើយ**ចូឆ្ង**ក៏យកថ្មដុសទឹកខ្មៅក្រដាសនិងពិតមកប្រគល់ឲ្យសរសេរសំបុត្រ។ មាតា**ឈីស៊ី**ក្លែងសួរ**ចូឆ្ង**ថា ដែលឈ្មោះ**ឡៅពី**នោះជាបុត្រអ្នកឯណាលោកស្គាល់ច្បាស់ឬទេ?

**ចូឆ្ង**ឆ្លើយថា **ឡៅពី**នោះជាពួកស្រុកទុនគួន ជាមនុស្សអនាថាឥតពូជត្រកូលកុហកចរចាឆបញ្ឆោតឲ្យមនុស្សទាំងពួងជឿថា ពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** ក្លែងធ្វើអាការៈឲ្យឃើញថាជាមនុស្សសុភាពត្រឹមត្រូវតែលំនាំខាងក្រៅ ឯចិត្តថ្លើមមិន*មែន*ទៀងត្រង់នឹងអ្នកឯណា។ មាតា**ឈីស៊ី**ឮដូច្នោះក៏ខឹងណាស់ ស្រែកគំហកឲ្យ**ចូឆ្ង**ថា ឯងនេះជាមនុស្សអាក្រក់ណាស់ មិនមានអៀនខ្មាសសោះ ថែមលើកទោស

**ឡៅពី**ថាជាមនុស្សមិនល្អ ឯ**ឡៅពី**នោះអញស្គាល់យូរមកហើយ គឺជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**ប្រាកដ ទាំងចិត្តថ្លើមគេក៏សុចរិតទៀងត្រង់នឹងផែនដី មានសេចក្តីល្អសុភាពដល់អាណាប្រជានុរាស្ត្រ សូម្បីតែក្មេងបៅដៃក៏ដឹងស្គាល់ថា **ឡៅពី**ជាមនុស្សល្អ ឥឡូវកូនអញទៅនៅនឹង**ឡៅពី**ក៏ជាទីសំណាក់ដ៏ធំទូលាយណាស់ហើយ ឯខ្លួនឯងដែលថាជាមនុស្សសុចរិតទៀងត្រង់ នឹងជួយទំនុកបម្រុងផែនដីព្រះចៅ**ហៀនតេ**នោះ អញក៏ដឹងថាឯង*ជា*សត្រូវរាជសម្បត្តិវិញទៀត ដែលនឹងឲ្យកូនអញប្រាសចាក**ឡៅពី**មកនៅធ្វើរា*ជ*ការនឹងឯងវិញនោះ ក៏បីដូចចេញពីទីភ្លឺមកចូលនៅក្នុងទីងងឹតមិនគួរសោះ ថាហើយក៏កន្ត្រាក់ថ្មដុសទឹកខ្មៅចោលសំដៅ**ចូឆូ** ៗឃើញមាតា**ឈីស៊ី**ធ្វើអាការៈមើលងាយប្រមាថដូច្នោះ ក៏ខឹងណាស់ស្រែកបង្គាប់ឲ្យទាហានចាប់យកខ្លួនមាតា**ឈីស៊ី**ទៅសម្លាប់ចេញ។ **ធៀយ៉ុក**ឃើញទាហានយកមាតា**ឈីស៊ី**ទៅដូច្នោះក៏ចូលទៅឃាត់ហាមទាហានឲ្យបង្អង់ ហើយចូលទៅជម្រាប**ចូឆូ**ថា ដែលមាតា**ឈីស៊ី**ប្រមាថមើលងាយលោកដូច្នោះ ព្រោះប្រាថ្នានឹងចង់ស្លាប់ឲ្យប្រាកដកេរ្តិ៍ឈ្មោះទុកជាស្រីទាហានអង់អាច បានជាមើលងាយប្រមាថមហាឧបរាជ មិនមានកោតក្រែងបើថាលោកនឹងសម្លាប់ចេញគ្រានេះ ក៏នឹងមានសេចក្តីគរហានិន្ទាជាច្រើន ថាសម្លាប់ស្រីដូចសម្លាប់កូនក្មេង មិនត្រូវការសោះ។ មួយទៀតបើមាតា**ឈីស៊ី**ស្លាប់ហើយ ដឹងទៅដល់**ឈីស៊ី**ក៏នឹងមានចិត្តអាឃាតព្យាបាទលោកជាខ្លាំងថែមទៀត នឹងជួយ**ឡៅពី**គិតធ្វើការជាមាំមួនដោយកិរិយាសងសឹក សូមកុំឲ្យលោកសម្លាប់ស្ត្រីនោះឡើយ គួរនឹងចិញ្ចឹមទុកសិន ទោះ**ឈីស៊ី**នឹងធ្វើការជួយ**ឡៅពី**តទៅមុខក៏ជាការរវាំងដល់មាតា ឃើញថានឹងមិនគិតការពេញដៃ ក្រោយនេះខ្ញុំបាទនឹងគិតកលឧបាយយកខ្លួន**ឈីស៊ី**មកឲ្យទាល់តែបាន។ **ចូឆូ**បានស្តាប់ក៏យល់ត្រូវ ទើបឲ្យលើកលែងមាតា**ឈីស៊ី**ចេញទៅ មិនឲ្យសម្លាប់ ទើបចាត់ចែងទីលំនៅតាមសមគួរ ហើយឲ្យចិញ្ចឹមព្យាបាលឲ្យនៅជាសុខ។

ថ្ងៃមួយ **ធៀយ៉ុក**ក៏ចូលទៅសួរសុខទុក្ខមាតា**ឈីស៊ី** ហើយប្រាប់ថា បុត្រអ្នកនឹងខ្ញុំជាមិត្តសំឡាញ់នឹងគ្នាមកពីដើម អ្នកដែលជាមាតា**ឈីស៊ី**ក៏ដូចជាមាតាខ្ញុំដែរ។

មាតា**ឈីស៊ី**ឮដូច្នោះក៏សម្គាល់ថាពិត មានសេចក្ដីត្រេកអរណាស់ តាំងពីថ្ងៃនោះមក **ផៀយ៉ុក**ក៏ឱ្យយកចំណីអាហារ និងរបស់គួរសមទៅឱ្យមាតា**ឈីស៊ី**រឿយៗ ហើយសរសេរសំបុត្រទៅគំនាប់រាល់ដង មាតា**ឈីស៊ី**ក៏សរសេរមកវិញជាសេចក្ដីតបគួរសមតាមប្រវេណី។ **ផៀយ៉ុក**បានសំបុត្រមកហើយ ក៏ហាត់សរសេរឱ្យចំណាន ដូចលាយដៃមាតា**ឈីស៊ី** ហើយក៏តាំងសរសេរសំបុត្រសំណួរមួយច្បាប់សេចក្ដីថា៖

“យើងជាមាតាប្រាប់មក**ឈីស៊ី**ជាបុត្រឱ្យដឹង ដ្បិត**ឈីខង**ជាប្អូនរបស់ឯងនោះមានជំងឺឈឺខ្លាំងស្លាប់ទៅហើយ។ ខ្លួនម៉ែក៏កាន់តែជរា នឹងរកអ្នកឯណាមកចិញ្ចឹមព្យាបាលរក្សាម៉ែក៏គ្មាន **ចូឆ្វ**ចាប់យកម៉ែទៅធ្វើទោសហើយនឹងឱ្យយកទៅសម្លាប់ថា ពីព្រោះកូនមកនៅនឹង**ឡៅពី**គិតប្រទូសរ៉ាយ**ចូឆ្វ** នេះហាក់តែ**ផៀយ៉ុក**មេត្ដាដោយឃើញជរាអនាថា ជួយនិយាយឱ្យលើកទោសទើបម៉ែមិនស្លាប់ ប្រសិនបើកូននៅមានកតញ្ញូអាណិតម៉ែ មករក**ចូឆ្វ**ហើយ ជីវិតម៉ែក៏មិនមានអន្ដរាយ។ បើមិនអាឡោះអាល័យដល់ម៉ែ កូនមិនបានទៅតាមសំបុត្រនេះទេ ម៉ែក៏នឹងស្លាប់ដោយអាជ្ញា**ចូឆ្វ**ជាប្រាកដ”។

កាល**ផៀយ៉ុក**តែងសំបុត្រហើយ ក៏ចាត់បម្រើនាំទៅឱ្យ**ឈីស៊ី**ឯស្រុកស៊ិនអៀ ប្រាប់ថាម្ដាយជួលឱ្យកាន់សំបុត្រនេះមកឱ្យ**ឈីស៊ី** លុះបម្រើទៅដល់ហើយក៏ឱ្យសំបុត្រទៅ**ឈីស៊ី**តាមបណ្ដាំសព្វគ្រប់។

**ឈីស៊ី**ទទួលសំបុត្រយកមកលាមើល ឃើញសេចក្ដី និងអក្សរប្រាកដជាលាយដៃមាតា។ ចាំបានច្បាស់ដូច្នោះ ក៏សោកាពិលាប ទើបនាំយកដើមសំបុត្រនោះចូលទៅបង្ហាញ**ឡៅពី** ហើយជម្រាបថា សព្វថ្ងៃនេះខ្ញុំបាទតាំងចិត្តស្វាមីភក្ដិ មកពឹងពាក់ជួយធ្វើរាជការលោកក៏យូរហើយ ខ្ញុំបាទមិនទាន់បានសម្ដែងរឿងរ៉ាវពីដើមឱ្យលោកជ្រាប ហើយ**ឈីស៊ី**ក៏ពណ៌នាខ្លួនឱ្យ**ឡៅពី**ស្ដាប់គ្រប់ប្រការ ហើយខ្ញុំបាទមកនៅធ្វើរាជការនឹងលោក ៗក៏មានសេចក្ដីមេត្ដាករុណាខ្ញុំបាទ “ក៏គិតថានឹងតបស្នងសង្គុណឱ្យអស់តម្រិះប្រាជ្ញា ឥឡូវមានកម្មតាមមកផ្ដល់ **ចូឆ្វ**ដឹងថា ខ្ញុំបាទមកនៅនឹងលោក ក៏រករឿងខឹងចាប់យកមាតាខ្ញុំបាទទៅធ្វើទោសហើយ នឹងឱ្យសម្លាប់

ចេញ។ មាតាខ្ញុំបាទជួលមនុស្សឲ្យនាំសំបុត្រនេះមកឲ្យខ្ញុំបាទថា ឲ្យទៅនៅនឹង**ចូឆ្ង** បើខ្ញុំបាទមិនទៅឥឡូវនេះទេ មុខជា**ចូឆ្ង**នឹងសម្លាប់មាតាពុំខាន។ ទោសក៏នឹងមានដល់ខ្ញុំបាទទៅអនាគតជាច្រើន មាតាបង្កើតមក រក្សាបីបាច់នៅមិនទាន់បានតបស្នងគុណលោកសោះ មកថែមទាំងនាំឲ្យមានទោសព្រោះខ្លួនទៅទៀត មិនគួរសោះ។ សូមលោកមានសេចក្ដីអនុគ្រោះឲ្យខ្ញុំបាទបានទៅជួបនឹង**ចូឆ្ង**ចុះ ដូចបានតបគុណមាតាកុំឲ្យលោកអន្តរាយជីវិតឡើយ។ បើខ្ញុំបាទទៅហើយបានរិះគិតឲ្យស្រួលវេលាណានឹងរកឧបាយវិលមកវិញ ដើម្បីនឹងតបស្នងសងគុណលោកតទៅ។

**ឡៅពី**បានស្ដាប់ក៏ស្រាលក្នុងខ្លួនដូចគ្មានព្រលឹងវិញ្ញាណ មានសេចក្ដីស្ដាយនិងអាណិត**ឈីស៊ី**ពន់ប្រមាណ ក្នុងប្រាណ**ឡៅពី**ក៏អាក់អួលក្ដួលសោកាហើយថា ធម្មតាកើតមកជា*ម្ដា*យនិងកូន ក៏ដូចជីវិតជាមួយគ្នា បើមានហេតុភេទដូច្នេះហើយ ក៏ជាប្រវេណីនៃបុត្រនឹងសង្គ្រោះមាតា នរណាក៏នឹងអាចចោលមាតាបាន ដែលអ្នកនឹងទៅរក**ចូឆ្ង**នោះក៏តាមចិត្តចុះ តែថាបើមាតាអ្នកបានរួចពីទុក្ខភ័យហើយ ចូរអ្នករិះគិតត្រឡប់ជួយណែនាំពន្យល់យើងតទៅទៀត ឥឡូវខ្លួនអ្នកនិងយើងត្រូវនិរាសប្រាសចាកគ្នាទៅហើយ អ្នកអើយសូមឲ្យអ្នកនៅបង្អង់មួយរាត្រីនឹងយើងចុះ វេលាព្រឹកស្អែកនេះ យើងនឹងរៀបលៀងអាហារឲ្យអ្នកបរិភោគជាទីកំសាន្តចិត្តរួចសឹមទៅ។ **ឈីស៊ី**ទទួលពាក្យហើយ ក៏លាទៅកាន់គេហដ្ឋាន។ ក្រោយនោះ**ស៊ុនខៀន**ក៏និយាយនឹង**ឡៅពី**ថា **ឈីស៊ី**នេះជាមនុស្សមានសតិបញ្ញាច្រើនណាស់ ហើយក៏បានមកនៅនឹងលោកក្នុងស្រុកស៊ិនអៀ ដឹងជាក់កិច្ចរាក់ជ្រៅធ្ងន់ស្រាលគ្រប់ប្រការ បើជាលោកបើកឲ្យទៅនៅនឹង**ចូឆ្ង**គ្រានេះ **ចូឆ្ង**ក៏នឹងមានសេចក្ដីត្រេកអរ ទទួលចិញ្ចឹមរក្សាជាយ៉ាងក្រៃពេក ការរាក់ជ្រៅធ្ងន់និងស្រាលយ៉ាងម្ដេចនោះ **ឈីស៊ី**ក៏នឹងណែនាំពន្យល់**ចូឆ្ង**ឲ្យយល់អ្វីទាំងអស់ អំណឹះទៅមុខគង់នឹងមានភ័យអន្តរាយមកដល់លោកជាប្រាកដ ការនេះសូមឲ្យលោកឃាត់ខ្លួន**ឈីស៊ី**ទុកកុំបើកឲ្យទៅឡើយ។ ឯ**ចូឆ្ង**បើឃើញថា **ឈីស៊ី**មិនទៅហើយក៏នឹងសម្លាប់មាតាចេញ **ឈីស៊ី**ក៏គង់នឹងមានចិត្តទោម្នេញក្ដៅក្រហាយរកឧបាយនឹងសងសឹកដោយសេចក្ដីព្យាបាទ**ចូឆ្ង** តាំងចិត្តនឹង

ជួយធ្វើការលោកពេញដៃដោយសុចរិត។ **ឡៅពី**តបថា អ្នកនិយាយនោះយើងមិនយល់ឃើញផងសោះ ព្រោះនឹងឲ្យគេព្រាត់ប្រាសម្ដាយ និងកូនមិនឲ្យទៅមករកគ្នាឲ្យមាតាចាំស្លាប់ពីព្រោះកូននោះក៏នឹងមានបាបកម្មខាងអនាគត មួយទៀតយើងក៏បានចេញសម្ដីអនុញ្ញាតបើកឲ្យគេទៅហើយ ទោះបីខ្លួនយើងនឹងស្លាប់ពីព្រោះផ្ដាយគំនិត ត្រង់រឿងនេះក៏មិនជាអ្វី ត្រូវរក្សាតែសេចក្ដីសត្យកតញ្ញូទុកជាបង្គោលចារឹកយើងមិននឹកប្រាថ្នាពាក្យសម្ដីដែលអ្នកនាំមកអធិប្បាយនោះទេ ព្រោះមិនមែនជាសេចក្ដីសត្យានុសត្យពិតត្រង់ល្អ ៗ បណ្ដាសេនាទាហានបានឮពាក្យ**ឡៅពី**និយាយដូច្នោះ ក៏បង្កើតចិត្តបីតិប្រាមោជ្ជព្រួចព្រើរោម នាំគ្នាសរសើរ**ឡៅពី**មានសេចក្ដីសត្យសុចរិតមាំមួនណាស់។

លុះវេលាព្រឹកឡើង **ឡៅពី**ក៏ឲ្យទៅអញ្ជើញ**ឈីស៊ី**មកបរិភោគអាហារ ខណៈកាល**ឈីស៊ី**លើកពែងស្រាឡើងផឹកនោះ ក៏និយាយនឹង**ឡៅពី**ថា ខ្ញុំបាទដឹងថា ***ចូឆូ*** ចាប់មាតាទៅធ្វើទោសឃាត់ឃុំទុកនោះ ចិត្តខ្ញុំបាទក្ដៅដូចភ្លើងឆេះងំក្នុងឱ*រា* នោះបើលោកនឹងយកអាហារដែលមានឱជារសស្មើរបស់ទិព្វមកបញ្ចុក ក៏លេបទៅមុខមិនចូលដល់បំពង់កឡើយ។ **ឡៅពី**តបថា ដែលអ្នកកើតទុក្ខនឹកដល់មាតាដូច្នោះហើយក៏ជាប្រវេណីមានមកដូច្នេះ តែទុក្ខរបស់យើងដែលនិរាសប្រាសចាកអំពីអ្នកខាងនេះតាំងពីថ្ងៃនេះទៅ ក៏រមែងក្ដៅក្ដួលឆ្អួលឆេះស្មើរនឹងប្រេះប្រម៉ាត់ដូចគ្នា បើនរណានឹងយកថ្មើមហង្សនិងថ្មើមម្កុរ ដ៏មានឱជារសទិព្វមកឲ្យបរិភោគក្ដី ក៏មិនអាចនឹងដឹងថាមានឱជារសនោះដូចម្ដេចឡើយ។

**ឡៅពី** និង**ឈីស៊ី**និយាយគ្នាទៅវិញទៅមកដូច្នេះហើយ ក៏តាំងតែយំសោកអាឡោះអាល័យគ្នា លុះបរិភោគរួចហើយ **ឈីស៊ី**ក៏គំនាប់លា**ឡៅពី** ៗក៏ឲ្យរៀបចងសេះមួយដោយប្រដាប់ស្រេចហើយ ក៏ឡើងជិះសេះជូនដំណើរបរទឹមគ្នាចេញទៅលុះទៅផុតមាត់ទ្វារស្រុក **ឈីស៊ី**ក៏ចុះពីលើសេះគំនាប់**ឡៅពី**ថា លោកចេញមកជូនដំណើរខ្ញុំបាទដល់ទីនេះ អរព្រះតេជព្រះគុណជាទីបំផុត អញ្ជើញលោកវិលទៅនៅសុខសម្រាន្តចុះ។ **ឡៅពី**ក៏ចុះពីលើសេះទូលគំនាប់**ឈីស៊ី** ៗចាប់ដៃ*ខិ*ប ហើយ**ឡៅពី**

ថា ខ្លួនខ្ញុំវេលានេះឃើញថាជាមនុស្សមានវាសនាតិចណាស់ ទើបមិនបានអ្នកទុកជាគ្នានឹងបានណែនាំពន្យល់ធ្វើការតទៅ។ **ឈើស៊ី**យំហើយតបថា ខ្លួនខ្ញុំបាទក៏មានកម្មតាមមកផ្តល់ ឲ្យព្រាត់*ប្រាស*និរាសចេញពីលោកកណ្តាលការព្រោះមាតាមួយជាធំ ទោះបី***ចូឆូ***នឹងបានខ្លួនខ្ញុំបាទទៅនៅផងក្តី ខ្ញុំបាទក៏សូមស្បថស្បែទុកនឹងលោកថា បើខ្ញុំបាទធ្វើការអ្វីតទៅមុខ ខ្ញុំបាទក៏មិនបានគិតកលឧបាយអ្វីនីមួយ ឲ្យ**ចូឆូ**ធ្វើអន្តរាយដល់លោកបានឡើយ។

**ឡៅពី**ថា ខ្លួនអ្នកមានសតិបញ្ញាណាស់ បានជួយណែនាំយើងមកពីថ្ងៃមុន ឥឡូវអ្នកនៅឃ្លាតឆ្ងាយពីយើងហើយ ខ្លួនយើងម្នាក់ឯងរកអ្នកណាជួយទំនុកបម្រុងគ្មាន ក៏នឹងស្វែងទៅលាក់ខ្លួនពួននៅក្នុងព្រៃ មិនមានតាំងចិត្តនឹងគិតធ្វើការអ្វីតទៅទៀតទេ។ **ឈើស៊ី**តបថា លោកនឹងមកតូចចិត្តគិតលះបង់សេចក្តីព្យាយាមនោះមិនគួរសោះឡើយ ទោះបីខ្លួនខ្ញុំបាទនឹងឃ្លាតចេញពីលោកសោត ក៏មិនមែននឹងអស់ផុតអ្នកមានតម្រិះប្រាជ្ញានោះទេ ចូរឧស្សាហ៍ស្វែងរកតទៅទៀត គង់ជួបប្រទះនឹងអ្នកមានតម្រិះប្រាជ្ញា ហើយ**ឈើស៊ី**ក៏ក្រឡេកមើលទៅក្រោយ ផ្តែផ្តាំនឹងទាហានទាំងពួងថា អ្នកទាំងឡាយនៅធ្វើរាជការ ត្រូវខំយកចិត្តទុកដាក់ស្វាមីភក្តិចៅហ្វាយនាយដោយសុចរិតកុំគិតនឿយហត់ឡើយ បើបានសម្រេចការដូចប្រាថ្នាហើយ គង់នឹងបានចម្រើននូវសេចក្តីសុខសប្បាយរាល់គ្នា ព្រោះចៅហ្វាយនាយនេះគង់នឹងបានជាទីគំនាប់ដល់មនុស្សទាំងពួង អ្នករាល់គ្នាកុំបីយកយើងជាតួយ៉ាង ដែលធ្វើរាជការមិនបានរហូតដូច្នេះឡើយ។ ទាហានទាំងពួងបានឮពាក្យ**ឈើស៊ី**និយាយដូច្នោះហើយ ក៏នាំគ្នាសោកវិយោគទាំងអស់គ្នា។

**ឡៅពី**ក៏មិនអាចត្រឡប់ចូលទៅក្នុងស្រុកបាន ឲ្យមានតែចិត្តល្ហិតល្ហៃអាល័យអាឡោះពុំអស់ឡើយ ក៏បរសេះជូនដំណើរ**ឈើស៊ី**ទៅទៀត។ **ឈើស៊ី**ក៏និយាយនឹង**ឡៅពី**ថា លោកឧស្សាហ៍មកជូនដំណើរខ្ញុំបាទក៏ឆ្ងាយណាស់ហើយ ចូរនាំទាហានអញ្ជើញវិលទៅវិញចុះ ខ្ញុំបាទសូមលាលោកហើយ។ **ឡៅពី**ក៏បរសេះស្រូតទៅទឹមចាប់ដៃ**ឈើស៊ី**ហើយថា អ្នកនិងខ្ញុំពីថ្ងៃនេះទៅនឹងត្រូវរាប់តែថ្ងៃ-ខែ-ឆ្នាំ ឆ្ងាយពីគ្នា

ណាស់ហើយ កាលណាឡើយនឹងបានវិលមកជួបឃើញមុខគ្នាទៀត? និយាយហើយក៏យំសោកាល័យជ្រប់លើខ្នងសេះ។ **ឈីស៊ី**ឃើញ**ឡៅពី**យំជ្រប់ដូច្នោះ ក៏អត់ទឹកភ្នែកពុំបានញាក់សេះគំនាប់ ហើយក៏បំផាយសេះលឿនទៅ **ឡៅពី**ឃើញ**ឈីស៊ី**បំផាយសេះទៅក្រឡេកទៅបាំងនឹងគុម្ពឈើមើលមិនឃើញ ក៏យកស៊ែសេះចង្អុលឲ្យទាហានកាប់រំលំឈើនោះចេញ។ ទាហានទាំងពួងសួរថា លោកឲ្យកាប់គុម្ពឈើធ្វើអ្វី? **ឡៅពី**ប្រាប់ទៅវិញថា ព្រោះកំបាំងយើងមើល**ឈីស៊ី**មិនឃើញ។

ខណៈដែល**ឡៅពី**កំពុងឲ្យទាហានកាប់គុម្ពឈើនោះ ទទួលឃើញ**ឈីស៊ី**បំផាយសេះវិលមកវិញ **ឡៅពី**ត្រេកអរណាស់ គិតទុកក្នុងចិត្តថា ប្រហែល**ឈីស៊ី**មានចិត្តអាល័យយើងនឹងមិនទៅទេដឹង បានជាត្រឡប់មកវិញ? លុះ**ឈីស៊ី**មកដល់ជិត ក៏ស្រែកសួរថា អ្នកត្រឡប់មកវិញធ្វើអ្វី? **ឈីស៊ី**បំបៀតសេះចូលមកជិតហើយថា ខ្ញុំបាទប្រុងនឹងជម្រាបសេចក្ដីដល់លោក ក៏នៅមិនទាន់បានចរចាដោយសារមានទុក្ខប្រាសចាកគ្នាថ្មើមប្រម៉ាត់ខ្ញុំបាទបីដូចគេលីងលាជ ក៏ភ្លេចអស់ទៅ ឥឡូវនឹកឃើញបានជាវិលត្រឡប់មកវិញបំណងនឹងជម្រាបលោក ព្រោះមានមនុស្សម្នាក់នៅក្រៅស្រុកសុងយ៉ុង មានបញ្ញានិងតម្រិះរិះគិតជ្រៅទូលាយវាងវៃណាស់ សូមឲ្យលោកអញ្ជើញខ្លួនអ្នកនោះមក នឹងបានជួយគិតការតទៅ។

**ឡៅពី**ឮហើយសួរថា បើដូច្នោះអ្នកអាណិតជូនយើងទៅឲ្យស្គាល់ខ្លួនបន្តិចសិនចុះ។ **ឈីស៊ី**តបថា ដែលលោកនឹងឲ្យនាំទៅនោះក៏បាន តែថាដែលនឹងទៅរកដោយរួសរាន់នោះមិនបានទេ ត្រូវលោកទៅគំនាប់ដោយសុចរិតយ៉ាងសុភាពទើបគួរ បើបានអ្នកនោះមកហើយ ក៏ដូចព្រះចៅ**ហាន់កោចោ** បាន**ទៀវលៀង**ដ៏មានប្រាជ្ញាមកជាទីប្រឹក្សា។ **ឡៅពី**សួរថា ដែលថាមនុស្សនោះនឹងមានសតិបញ្ញាស្មើប្រហែលនឹងអ្នកដែរឬទេ? **ឈីស៊ី**តបថា ដែលនឹងយកគំនិតគិតនិងប្រាជ្ញាខ្ញុំបាទទៅប្រៀបផ្ទឹមនោះ ឆ្ងាយគ្នាពេកណាស់ ខ្លួនខ្ញុំបាទឧបមាដូចជាក្អែក នឹងយកទៅផ្ទឹមនឹងស្ដេចហង្សមិនគួរ មួយទៀតសេះអាជានេយ្យមានកម្លាំងដ៏តិច នឹងយកទៅប្រៀបនឹង

ស្ដេចរាជសីហ៍មិនបាន ឯមនុស្សដែលមានប្រាជ្ញាជ្រៅទូលាយនោះ អាចទ្រទ្រង់និងញ៉ាំងឲ្យដឹងក្រោមផែនដី និងលើអាកាសជាឯកម្នាក់ឯងនឹងរកអ្នកឯណាមកប្រៀបផ្ទឹមឲ្យស្មើជាពីរនោះគ្មាន។ **ឡៅពី**ឮដូច្នោះក៏មានអំណរណាស់ ទើបសួរថា អ្នកនោះឈ្មោះអ្វី? **ឈីស៊ី**ប្រាប់ថា ឈ្មោះ**ខុងបេង** (ហៅ**ខុងម៉ុង**ក៏បាន) សែ**ជូកាត់** ឥឡូវអត់ពីមាតាបិតានៅជាមួយនឹង**ជូកាត់កិន**ជាប្អូនប្រុស ធ្វើស្រែចម្ការចិញ្ចឹមជីវិតនៅលើភ្នំង៉ោឡាំកាំង ឯតំបន់ឡុងសៀ អ្នកស្រុកទាំងពួងហៅឈ្មោះ**ខុងបេង**ជាអាចារ្យ**ហុកឡុង** ប្រសិនបើលោកឧស្សាហ៍*ទៅ*អញ្ជើញ**ខុងបេង**ឲ្យជួយរិះគិតការលោក នឹងប្រាបប្រាមស្រុកទេសទាំងពួងឲ្យរាបទាបជាសុខសាន្តបាន។

**ឡៅពី**ថា កាលយើងទៅឈប់សំណាក់នឹង**សុម៉ាតេកឆោ**នោះ គាត់ក៏បានដំណាលប្រាប់យើងថា **ហុកឡុង, ហងស៊ូ** ពីរនាក់នេះមានសតិបញ្ញាវាងវៃណាស់ ប្រសិនបើបានអ្នកឯណានីមួយមកជួយធ្វើការរាជការ ក៏នឹងប្រាបប្រាមស្រុកទេសឲ្យរាបទាបបាន ដែលអ្នកថានេះនឹងជា**ហុកឡុង**ឬ**ហងស៊ូ**? ដែល**សុម៉ាតេកឆោ**ប្រាប់យើងនោះឬមែនទេ? **ឈីស៊ី**ឆ្លើយថា អ្នកនោះឈ្មោះ**ហុកឡុង**នោះឯង ឯ**ហងស៊ូ**នោះគឺ**បាំងថង**នៅស្រុកសុងយ៉ុង។ **ឡៅពី**ក៏មានចិត្តសោមនស្សពេកណាស់ ទះដៃសើចហើយថា មនុស្សល្អនៅជិតបង្កើយ ដូចជាឃើញនឹងភ្នែក យើងក៏មិនអាចដឹងសោះហាក់តែអ្នកមកនិយាយប្រាប់ទើ*ប*បានដឹងច្បាស់ថា **ហុកឡុង, ហងស៊ូ**នៅតំបន់នេះ។ **ឈីស៊ី**ពន្យល់សេចក្ដីឲ្យ**ឡៅពី**ដឹងដូច្នោះហើយ ក៏គំនាប់លា**ឡៅពី**បំផាយសេះចេញទៅ។

ឯ**ឡៅពី**បានស្ដាប់ពាក្យដែល**ឈីស៊ី**ប្រាប់ ត្រូវគ្នានឹងពា*ក្យ***សុម៉ាតេកឆោ**ដូច្នោះរួចក៏នាំទាហានទាំងពួងត្រឡប់ទៅស្រុកស៊ិនអៀវិញ។ ឯ**ឈីស៊ី**ក៏លា**ឡៅពី**ទៅហើយក៏នឹកគិតដល់គុណឧបការ ដែល**ឡៅពី**អាណិតស្រឡាញ់ដោយស្មោះត្រង់

ហើយគិតបរិវិតក្កថា **ឡៅពី**នឹងទៅអញ្ជើញ**ខុងបេង** ៗនឹងមិនមកធ្វើការរាជការផង ក៏នឹងខូចសេចក្តីប្រាថ្នា ទើបបំផាយសេះគេចចូលទៅត្រង់ភ្នំង៉ោឡាំកាំង ចូលទៅគំនាប់**ខុងបេង** ៗក៏សួរថា អ្នកមកដោយធុរៈអ្វី? **ឈីស៊ី**ក៏ជម្រាបតាមដំណើរដើមរហូតដល់ចុងឲ្យស្តាប់គ្រប់ប្រការ ហើយថា កាលខ្ញុំលា**ឡៅពី**មកនេះ បានផ្តាំទុកថា អ្នកជាមនុស្សមានតម្រិះប្រាជ្ញានៅក្នុងទីនេះ។ **ឡៅពី**មានសេចក្តីត្រេកអរណាស់ ប្រសិនបើ**ឡៅពី**មកអញ្ជើញអ្នក ៗកុំព្រងើយកន្តើយ ចូរទៅជួយ**ឡៅពី**ជាទីឧបត្ថម្ភណែនាំ ពន្យល់ឲ្យធ្វើការបានសម្រេចប្រយោជន៍ គឺជួយប្រាបប្រាមសឹកសត្រូវក្នុងផែនដី ឲ្យរាបទាប ជាសុខក្សេមក្សាន្ត ដោយតម្រិះប្រាជ្ញារបស់អ្នកផងចុះ កុំឲ្យខូចប្រយោជន៍បំណាច់បានរៀនសូត្រវិជ្ជាសិល្បសាស្ត្រចេះដឹងមក។ **ខុងបេង**បានស្តាប់ដូច្នោះ ក៏ខឹងណាស់ ឆ្លើយតបទៅ**ឈីស៊ី**ថា ខ្លួនអ្នកឯងដើរចេញពី**ឡៅពី**ទៅហើយ មិនមានរបស់អ្វីនឹងទុកកំជាប់ចិត្ត**ឡៅពី**ឬ? បានជាមករកយើងទៅធ្វើជាគ្រឿងសំណែនឲ្យ**ឡៅពី**វិញ? **ខុងបេង**ថាតែប៉ុណ្ណោះហើយ ក៏ឱបដៃដើរចូលទៅក្នុងផ្ទះ។ **ឈីស៊ី**ឃើញ**ខុងបេង**ទាស់ចិត្តក៏នឹកអៀនខ្មាសពន់ប្រមាណ ទើបឡើងសេះស្រូតទៅស្រុកហ៊ូតោ។

**ចូឆូ**ឮថា **ឈីស៊ី**មកដល់ក៏សោមនស្សក្នុងចិត្តពន់ពេកណាស់ ប្រើឲ្យ**ជៀយ៉ុក**និង**ស៊ុនហុក**ចេញទៅទទួលដល់ក្រៅស្រុក។ **ស៊ុនហុក** និង**ជៀយ៉ុក**ក៏នាំ**ឈីស៊ី**ទៅគំនាប់**ចូឆូ** ៗក៏សួរថា ខ្លួនអ្នកជាមនុស្សមានសតិបញ្ញា ហេតុម្តេចបានជាទៅនៅនឹង**ឡៅពី**ដែលជាមនុស្សគ្មានបណ្តាសក្តិវិញ? **ឈីស៊ី**ក៏ឆ្លើយតបថាដែលខ្ញុំបាទទៅនៅនឹង**ឡៅពី**នោះព្រោះពីដើមខ្ញុំបាទប្រព្រឹត្តសេចក្តីខុសជាធំ ខ្លាចក្រែងគេចាប់បាន ទើបផ្លាស់ឈ្មោះ ចេញហើយស្វែងរត់ទៅជ្រកពួននៅក្នុងស្រុកស៊ិនអៀ ទទួលជួបនឹង**ឡៅពី**បាននិយាយត្រូវពាក្យសម្តីគ្នា ព្រោះជាមិត្តភក្តិពីដើម ខ្ញុំបាទក៏នៅធ្វើការ

ជាមួយ ឥឡូវខ្ញុំបាទបានដឹងថា មហាឧបរាជយកមាតាខ្ញុំបាទមកទុក ខ្ញុំបាទក៏មានសេចក្ដីត្រេកអរណាស់ បានជាចូលមកគំនាប់លោក។ **ចូឆ្វ**ថា យើងក៏គាប់ចិត្តនឹងអ្នកដែលមានសេចក្ដីកតញ្ញូ ហើយមកក្នុងសម័យនេះក៏ជាហើយ នឹងបានថែរក្សាមាតារបស់អ្នកតាមប្រវេណី យើងក៏នឹងជួយទំនុកបម្រុងតទៅ។ **ឈីស៊ី**គំនាប់ហើយលា**ចូឆ្វ**ទៅរកមាតា លុះទៅដល់ក៏លុតជង្គង់គំនាប់ហើយយំសោកចំពោះមុខមាតា។

ឯមាតាលុះឃើញ**ឈីស៊ី**មកដល់ក៏តក់ស្លុតក្នុងចិត្ត ទើបសួរថា ហេតុម្ដេចបានជាឯងមកដូច្នេះ? **ឈីស៊ី**ឮមាតាថាដូច្នោះក៏ភ្ញាក់ខ្លួន ទើបនាំសេចក្ដីមកអធិប្បាយជម្រាបមាតាតាមដំណើរ ដែលទៅនៅនឹង**ឡៅពី** ទាល់តែត្រឡប់មក ឲ្យមាតាស្ដាប់គ្រប់ប្រការ។ មាតាបានស្ដាប់សព្វសេចក្ដីក៏ខឹងញ័រអស់ទាំងខ្លួន យកដៃតប់ទះតុហើយជេរថា អាចោរចង្រៃឆោតអប្បឥតប្រាជ្ញាណាស់ ទំនៀមមានមកពីណាកើតមកជាប្រុសមិនចេះគិតពិគ្រោះពិចារណា ឃើញសំបុត្រហើយ ក៏ប្រញាប់ជឿស្ដាប់បង់កម្លាំងដែលអញបានបង្កើតឯងមក ហើយដើររៀនវិជ្ជាចំណេះតាំងពីតូចទាល់ធំ អញគិតថា នឹងល្អគ្រាន់បើស្មើមនុស្សនឹងគេ មិនដឹងជាត្រឡប់មកធ្វើជាមនុស្សខូចដូច្នេះសោះ! អញនឹងនៅឲ្យឃើញមុខគេរាល់គ្នាក៏អៀនខ្មាស មិនដឹងនឹងយកមុខទៅលាក់ទុកឯណា! ជេរដូច្នេះហើយ ក៏ក្រោកចូលទៅចងកស្លាប់នៅក្នុងផ្ទះ។ **ឈីស៊ី**ក្រាបខ្ទប់មុខនៅទីនោះមិនបានដឹង មនុស្សបម្រើក្នុងផ្ទះក៏រត់ចេញមកប្រាប់**ឈីស៊ី**ថា មាតាអ្នកចងកស្លាប់ទៅហើយ **ឈីស៊ី**ភ័យស្លុតក៏រត់ចូលទៅនឹងស្រាយ ក៏មិនទាន់ទទួលដាច់ខ្យល់ស្លាប់ **ឈីស៊ី**ក៏យំដួលសន្លប់នៅទីនោះ លុះ**ឈីស៊ី**ភ្ញាក់ដឹងខ្លួនឡើងក៏រៀបចាត់ចែងការសពដែលនឹងកប់មាតា។

**ចូឆ្វ**ដឹងដំណើរថា មាតា**ឈីស៊ី**ស្លាប់ហើយ ក៏ឲ្យរៀបរបស់គួរសមនាំទៅជួយការសព។ **ឈីស៊ី**ក៏មិនព្រមទទួលយក បង្វិលរបស់ទាំងនោះឲ្យយកទៅជូន**ចូឆ្វ**វិញ

ដោយមិនបានតាំងចិត្តភក្តី ដែលនឹងនៅធ្វើការជាមួយនឹង**ចូឆូ**ដោយសុចរិត។ **ឈីស៊ី**ក៏រៀបចំហែសពមាតាទៅបញ្ចុះទុកខាងទិសទក្សិណក្រៅស្រុកហ៊ូតោ ហើយក៏ទៅនៅរក្សាសពមាតាក្នុងទីនោះជានិរន្តរ៍។

ក្រោយពីនោះមក **ចូឆូ**លើកទ័ពទៅវាយអាណាខេត្តទិសឧត្តរ **ស៊ុនហុក**ដឹងការណ៍ ក៏ចូលទៅជម្រាប**ចូឆូ**ថា ដែលលោកនឹងលើកទ័ពទៅច្បាំងគ្រានេះ ជាទេសកាលត្រូវលើរដូវរងា ទាហានទាំងពួងនឹងបានសេចក្តីលំបាកណាស់ សូមឲ្យលោកបង្អង់ឈប់កងទ័ពសិនចុះ បើដល់រដូវប្រាំងវេលាណាសឹមលើកទ័ពទៅ នឹងស្រួល។ **ចូឆូ**បានឮដូច្នោះក៏យល់ឃើញត្រូវ ទើបឲ្យបង្អង់កងទ័ពតាំងតែហ្វឹកហាត់សេនាទាហានឲ្យស្ទាត់ស្ទាញក្នុងក្បួនទ័ពទូក។

ឯ**ឡៅពី**កាលជូនដំណើរ**ឈីស៊ី**ទៅហើយ ក៏វិលមកក្នុងស្រុកវិញ ទើបចាត់ចែងរបស់ទ្រព្យដែលនឹងយកទៅគំនាប់**ខុងបេង**។ ខណៈនោះទទួលអ្នកចាំទ្វារចូលមកជម្រាប**ឡៅពី**ថា ឥឡូវមានអាចារ្យម្នាក់មានរូបរាងធំស្អាតបាត តែងខ្លួនជាមនុស្សសុភាពមករកលោក។

**ឡៅពី**ឮដូច្នោះក៏សម្គាល់ថា ប្រហែល**ខុងបេង**ទេដឹង នឹកអរណាស់ ក៏រលះរលាំងចេញទៅទទួល ឃើញ**សុម៉ាតេកឆោ**។ **ឡៅពី**អរណាស់ក៏អញ្ជើញឡើងទៅលើផ្ទះ ហើយគំនាប់សួរថា តាំងពីខ្ញុំបែកចាកលោកពីថ្ងៃនោះមក ក៏មានចិត្តនឹករឭកដល់លោកជារឿយៗគិតនឹងទៅសួរ ដែលលោកអញ្ជើញមកវេលានេះដោយកិច្ចធុរៈអ្វី? **សុម៉ាតេកឆោ**ឆ្លើយថា ខ្ញុំមកនេះនឹងមានទុក្ខធុរៈរឿងអ្វីក៏ទេ ព្រោះដឹងឮថា**ឈីស៊ី**បានមកនៅធ្វើការរាជការជាមួយនឹងលោក មានចិត្តនឹករឭកក៏មកសួរលេង។ **ឡៅពី**ក៏អធិប្បាយសេចក្តីដែល**ឈីស៊ី**មកនៅ ហើយបែកទៅឲ្យ**សុម៉ាតេកឆោ**ស្តាប់គ្រប់ប្រការ។

**សុម៉ាតេកឆោ**ឮដូច្នោះក៏ថា ដែល**ឈីស៊ី**ទៅសួរម្តាយឯស្រុកហ៊្សូតោនោះ ព្រោះមិនដឹងកលរបស់**ចូឆូ** ឯម្ដាយ**ឈីស៊ី**ជាមនុស្សប្រកបដោយសត្យសុចរិតមាំមួនណាស់ ទោះបី**ចូឆូ**នឹងចាប់ខ្លួនយកទៅឃាត់ឃុំធ្វើទោសប្រការម្តេច ក៏ឃើញថាមិនឲ្យដឹងដំណឹងអ្វីមកដល់កូន នឹងស៊ូស្លាប់តែម្នាក់ឯង ដែលមានសំបុត្រមកនោះប្រហែលជាកលឧបាយរបស់**ចូឆូ**ទេ ដែល**ឈីស៊ី**ទៅក្នុងគ្រានេះ បីដូចទៅសម្លាប់មាតាឲ្យស្លាប់ បើ**ឈីស៊ី**មិនទៅស្រុកហ៊្សូតោតាមសំបុត្រនោះទេ ម្តាយ**ឈីស៊ី**ក៏នៅមានអាយុជីវិតទៅទៀត។ **ឡៅពីឮសុម៉ាតេកឆោ**ថាដូច្នោះ ក៏តក់ស្លុតស្មារតីសួរថា ហេតុម្តេចបានជាលោកនិយាយដូច្នេះ?

**សុម៉ាតេកឆោ**ឆ្លើយថា ដែលខ្ញុំនិយាយដូច្នេះ ព្រោះសម្លឹងឃើញចិត្តម្តាយ**ឈីស៊ី**នោះស្រឡាញ់ ចង់ឲ្យកូនបាននៅនឹងលោកតទៅ ដែលឥឡូវកូនត្រឡប់ទៅនៅនឹង**ចូឆូ**វិញក៏មិនពេញចិត្តទេ ទើបសម្លាប់ខ្លួនដូចខ្ញុំស្មានមិនខុសទេ។ **ឡៅពី**ថា លោកនិយាយក៏គួរហើយ តែថាបើខ្ញុំមិនឲ្យ**ឈីស៊ី**ទៅជួបនឹងម្ដាយ ក៏ឃើញមិនគួរ កាលបើ**ឈីស៊ី**នឹងទៅនោះបានផ្តាំទុកនឹងខ្ញុំថា មានមនុស្សម្នាក់ឈ្មោះអាចារ្យ**ខុងបេង** នៅប្របស្រុកសុងយ៉ុង មានតម្រិះប្រាជ្ញាវាងវៃណាស់ លោកបានជ្រាបឬទេ? **សុម៉ាតេកឆោ**ឮ**ឡៅពី**ថាដូច្នោះ ក៏ថា**ឈីស៊ី**នឹងទៅតែខ្លួនម្តេចនឹងបាន ចាំនាំព័ត៌មានដល់**ខុងបេង** ឲ្យ**ខុងបេង**រំខានចិត្តទៀត មុខជាក្អួតឈាមនឹងមានមកជាក្រោយ មិនគួរសោះ។ **ឡៅពី**សួរថា ហេតុម្តេចបានជាលោកមានប្រសាសន៍ដូច្នេះ?

**សុម៉ាតេកឆោ**ឆ្លើយថា ខ្ញុំនឹងយល់ថាបើ**ខុងបេង**មកនៅធ្វើរាជការនឹងលោកនោះជាការធំពន្លឹកក្រៃពេក មុខជាត្រូវគិតកែខៃដោយតម្រិះប្រាជ្ញាគ្រប់វេលានឹងក្រុំដើមទ្រូងជាទម្ងន់ បានជាខ្ញុំថាដូច្នេះ ព្រោះ**ខុងបេង**នោះមានប្រាជ្ញាច្រើនណាស់ បីដូច**ខ្វាន់តុង, ង៉ាកយ៉េ** ដែលបានទំនុកបម្រុងកាលគ្រា**សុនស៊ីវ**នោះឯង។

**គួនអ៊ូ**បានឮ**សុម៉ាតេកឆោ**សរសើរ**ខុងបេង**ដូច្នោះក៏ឆ្លើយថា លោកមានប្រសាសន៍នោះ ខ្ញុំមិនទាន់យល់ឃើញផងសោះ ព្រោះ**ខ្វាន់តុង, ង៉ាកយ៉េ** *ពីរ*នាក់នេះមានតម្រិះប្រាជ្ញានឹងរកនរណាស្មើគ្មាន ដែលនឹងយក**ខុងបេង**ទៅប្រៀបផ្ទៀបនោះឃើញថាលើសណាស់។ **សុម៉ាតេកឆោ**អស់សំណើចហើយថា ខ្ញុំនិយាយនេះគ្រាន់តែជាការប្រមាណទេ យើងនឹងពិគ្រោះមើលតម្រិះប្រាជ្ញា**ខុងបេង**នោះ នឹងប្រៀបបាននឹង**កេងសុង**ដែលជាអ្នកទំនុកបម្រុងផែនដីព្រះចៅ**ជីវប៊ុនអង** ដែលសោយរាជសម្បត្តិមកបានដល់ប្រាំបីរយឆ្នាំនោះទៀត។ **សុម៉ាតេកឆោ**និយាយតែប៉ុណ្ណោះហើយក៏លា**ឡៅពី**ក្រោកដើរចេញទៅ។ **ឡៅពី**ឃាត់ក៏ពុំស្ដាប់ លុះដើរទៅដល់មាត់ទ្វាររបងភូមិ ក៏ងើយមើលលើហើយសើចថា **ហុកឡុង**នឹងបានចៅហ្វាយដូច្នេះក៏សមគួរហើយ តែមុខគួរឲ្យស្ដាយពេកណាស់ ព្រោះជាមនុស្សអភ័ព្វគ្មានបុណ្យ ថាហើយក៏ដើរចេញទៅ។

លុះវេលាព្រឹកឡើង **ឡៅពី**ក៏នាំ**គួនអ៊ូ** ចេញចាកស្រុកស៊ិនអៀនឹងទៅរក**ខុងបេង**ឯភ្នំង៉ោឡាំកាំង លុះទៅដល់បានជួបនឹងមនុស្សប្រាំនាក់ធ្វើចម្ការនៅជើងភ្នំមួយ **ឡៅពី**ក៏សួរថា អាចារ្យម្នាក់ឈ្មោះថា **ហុកឡុង**នោះនៅតំបន់ឯណា? អ្នកទាំងឡាយដឹងដែរឬទេ? អ្នកចម្ការក៏ឆ្លើយថា អាចារ្យ**ហុកឡុង**នៅត្រង់ច្រមុះភ្នំខាងទិសទក្សិណ មានព្រៃឈើដង្គុំជាសម្គាល់ខាងមុខផ្ទះ។ **ឡៅពី**បានឮដូច្នោះ ក៏ត្រេកអរពន់ប្រមាណ នាំ**គួនអ៊ូ, តៀវហ៊ុយ** ដើរវាងចូលទៅចម្ងាយផ្លូវប្រហែលសាមសិបសិន (១២០០ម) ដល់ឈើដង្គុំពីមុខផ្ទះ**ខុងបេង**។ ឯ**ខុងបេង**លុះដឹងថា **ឡៅពី**នឹងចូលមករកក៏នឹកក្នុងចិត្តថា ឮល្បីគេនិយាយថា **ឡៅពី**នេះមានសតិបញ្ញាប្រកបដោយអធ្យាស្រ័យ និងសេចក្ដីព្យាយាមជាច្រើន នឹងពិត ឬប្រការម្ដេច? កាលនឹងឲ្យជួបខ្លួនគ្រានេះក៏មិនច្បាស់ថា **ឡៅពី**មានសេចក្ដីព្យាយាមយ៉ាងណា ដែលយើងនឹងទៅ

នៅផងនោះ ក៏នឹងត្រូវជួយគិតការជាធំពេកណាស់ មិនដឹងជាមានប្រយោជន៍ឬមិនជាប្រយោជន៍តទៅ ត្រូវតែពិសោធន៍ឲ្យដឹងដួងចិត្ត**ឡៅពី**សិន។ គិតហើយក៏បង្គាប់ក្មេងទុកថា បើឃើញនរណាមកសួររកអញ ចូរប្រាប់ថាអញមិននៅទេ ផ្ដាំហើយ**ខុងបេង**ក៏ចូលទៅពួនក្នុងផ្ទះ។

ឯ**ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**ក៏ចុះពីលើសេះដើរចូល*ទៅ*មាត់ទ្វាររបងផ្ទះ **ឡៅពី**ក៏ពិគ្រោះមើលភូមិឋានផ្ទះសម្បែង ឃើញរៀបចំស្អាតបាត គួរជាអ្នកមានរបៀបត្រឹមត្រូវ ប្រសិនបើដល់រដូវក្ដៅក៏មិនបានក្ដៅ ព្រោះមានចន្លោះខ្យល់បក់ចូលមកបាន កាលបើដល់រដូវភ្លៀងក៏ជាទីម្លប់បិទបាំងមិនឲ្យភ្លៀងទទឹក បើដល់រដូវរងាក៏មិនបានជារងាណាស់ ព្រោះមានទីបាំងមិនឲ្យទឹកសន្សើមបក់ចូលបាន គួរសមជាទីលំនៅនៃអ្នកដ៏មានតម្រិះប្រាជ្ញាមែន។

**ឡៅពី**ឃើញដូច្នោះក៏រឹតតែមានចិត្តសោមនស្សត្រេកអរច្រើន ហើយក៏ដើរចូលទៅដល់ជើងជណ្ដើរផ្ទះ។ មានក្មេងម្នាក់ដែលនៅចាំផ្ទះនោះក៏សាកសួរមកថា លោកឈ្មោះអ្វី? មកពីណាទៅណា? **ឡៅពី**ឆ្លើយថា យើងឈ្មោះ**ហ្បួនចុងកុនឃីសេងតេងហោឡៅពី** ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** នឹងមកគំនាប់អាចារ្យអ្នកឯង។ ក្មេងនោះក៏ឆ្លើយថា លោកប្រាប់ឈ្មោះនោះច្រើនណា ខ្ញុំចាំមិនបានទេ។ **ឡៅពី**ឆ្លើយថា បើចាំឈ្មោះយើងមិនបាន ចូរទៅជម្រាបអាចារ្យអ្នកឯងថាតែ**ឡៅពី**មករកចុះ។ ក្មេងនោះក៏ឆ្លើយថា ឥឡូវអាចារ្យខ្ញុំបាទមិននៅ នឹងទៅទីឯណាខ្ញុំបាទក៏មិនដឹង។ **ឡៅពី**ថា កាលណានឹងត្រឡប់មកវិញ? ក្មេងនោះក៏ជម្រាបថា អាចារ្យខ្ញុំបាទទៅនោះនឹងកំណត់ថាមកឆាប់ឬយូរមិនបានទេ ជួនកាលបីថ្ងៃ ជួនកាលប្រាំថ្ងៃ ជួនកាលដប់ថ្ងៃក៏មានទើបបានត្រឡប់មកវិញ។

**ឡៅពី**បានឮដូច្នោះក៏នឹកតូចចិត្តណាស់ **គួនអ៊ូ, តៀវហ៊ុយ**ក៏និយាយនឹង**ឡៅពី**ថា ឥឡូវអាចារ្យមិននៅហើយ យើងត្រូវត្រឡប់ទៅវិញសិនចុះ សឹមប្រើមនុស្សមកចាំស្តាប់មើល បើដឹងថាវិលមកវេលាណា សឹមយើងទៅរកវេលានោះ។ **ឡៅពី**យល់ឃើញត្រូវ ទើបផ្តាំនឹងក្មេងនោះទុកថា បើប្រសិនអាចារ្យអ្នកឯងមកវិញចូរជម្រាបថា យើងឈ្មោះ**ឡៅពី**មកចាំគំនាប់មិនបានជួប ឥឡូវយើងត្រឡប់ទៅសិនហើយ **ឡៅពី**ក៏នាំគ្នាត្រឡប់មកវិញ ហើយឡើងជិះសេះចេញពីទីនោះទៅចម្ងាយផ្លូវប្រហែលបីរយសិន (១២០០ម) ទទួលជួបនឹង**ស៊ុយបេង**ដើរមក **ឡៅពី**ឃើញកិរិយារូបរាងសមគួរជាអាចារ្យក៏សម្គាល់ថា**ខុងបេង** ទើបចុះពីលើសេះទៅគំនាប់ ហើយសួរថា លោកនេះឬឈ្មោះអាចារ្យ**ហុកឡុង**? **ស៊ុយបេង**ក៏ឆ្លើយថា ខ្ញុំបាទមិនមែនឈ្មោះ**ហុកឡុង**ទេ ខ្ញុំបាទឈ្មោះ**ស៊ុយបេង** ជាភឿនរបស់**ខុងបេង**ដែរ អ្នកមកពីណា? ឈ្មោះអ្វី? **ឡៅពី**ឆ្លើយថា ខ្ញុំឈ្មោះ**ឡៅពី**នឹងមករក**ខុងបេង**ក៏មិនជួបប្រទះ ដែលមកជួបប្រទះនឹងអ្នកក្នុងថ្ងៃនេះក៏ជាបុណ្យរបស់ខ្ញុំខ្លាំងណាស់ អញ្ជើញអ្នកឡើងអង្គុយលើទីសមគួរ នឹងបានសន្ទនាផង។ **ស៊ុយបេង**អង្គុយចុះហើយសួរថា លោកមករក**ខុងបេង**គ្រានេះដោយកិច្ចធុរៈអ្វី? **ឡៅពី**ឆ្លើយថា ខ្ញុំមករកគ្រានេះ ព្រោះផែនដីកើតចលាចលមិនបានជាប្រក្រតី ប្រាថ្នានឹងអញ្ជើញ**ខុងបេង**ទៅជួយធ្វើរាជការជាមួយនឹងខ្ញុំ ដើម្បីនឹងទំនុកបម្រុងផែនដីឲ្យជាសុខតទៅ។ **ស៊ុយបេង**អស់សំណើចឆ្លើយថា ដែលផែនដីកើតចលាចល ហើយមករក**ខុងបេង**ទៅជួយទំនុកបម្រុងឲ្យជាសុខនោះ ឃើញថា លោកមានចិត្តសុចរិតទៀងត្រង់ល្អហើយ តែថាប្រវេណីផែនដីនេះរមែងកើតចលាចលហើយក៏ជាសុខ ហើយក៏កើតកលិយុគទៅវិញ នេះជាធម្មតាមកពីដើមដូច្នេះ ដែលលោកនឹងរិះគិតប្រាបប្រាមផែនដីដល់កំណត់ចលាចលគ្រានេះ ឲ្យត្រឡប់បានជាសុខនោះ ខ្លាចក្រែងមិនសមនឹងតម្រិះគិតតាមប្រាថ្នា ក៏នឹងនាំឲ្យខូច

ការទទេ ឯដែលកើតជាមនុស្សសព្វថ្ងៃនេះ ក៏បំផុតហើយនៅបុណ្យនិងកម្មនឹងសម្គាល់ថាអ្វីក្រៅពីវាសនានោះមិនបានទេ។

**ឡៅពី**តបថា អ្នកនិយាយដូច្នេះត្រូវហើយ តែថាខ្លួនខ្ញុំនេះបានជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**មកហើយ នឹងព្រងើយកន្តើយស្ងៀមនៅមិនជួយឈឺឆ្អាលទំនុកបម្រុងមិនបាន ដូចជាមិនមានកតញ្ញូ សូម្បីវា*សទៅ*ខ្ញុំតិច ក៏ស្រេចហើយនៅព្យាយាមយកចិត្តទុកដាក់ខំធ្វើរាជការតបស្នងសងគុណព្រះចៅ**ហៀនតេ** តាមសតិកម្លាំង។ **ស៊ុយបេង**តបថា បើដូច្នេះចូរលោកខំរិះគិតទៅចុះ។ **ឡៅពី**តបថា ដែលអ្នកបានដាស់តឿនពន្យល់ស្មារតីខ្ញុំដូច្នេះ ខ្ញុំមិនមែនរំលុបគុណអ្នកក៏ទេ តែថាខ្ញុំខំសង្វាតមកគ្រានេះ ប្រាថ្នាឲ្យជួបនឹង**ខុងបេង** អ្នកចូរអនុគ្រោះឲ្យដំណឹងផងចុះ។ **ស៊ុយបេង**តបថា **ខុងបេង**នឹងនៅទីកន្លែងណាខ្ញុំក៏មិនបានដឹង ខ្ញុំមកគ្រានេះក៏តាំងចិត្តចង់ជួបនឹង**ខុងបេង**ដែរ។ **ឡៅពី**ថា បើដូច្នោះសូមអ្នកអញ្ជើញទៅជាមួយនឹងខ្ញុំឯស្រុកស៊ិនអៀចុះ។ **ស៊ុយបេង**តបថា ខ្លួនខ្ញុំជាមនុស្សស្រុកស្រែចម្ការ ប្រាថ្នាតែសេចក្ដីសប្បាយដោយទម្លាប់រាស្ត្ររកស៊ីធ្វើការ នឹងទៅនៅធ្វើការរាជការជាមួយនឹងលោក ប្រាថ្នាយកឋានន្តរសក្តិនោះ ចិត្តក៏មិនសូវត្រេកអរ បើវេលាណាខ្ញុំបាទទំនេរសឹមឆៀងចូលទៅលេងនឹងលោក។ ហើយស៊ុយបេងក៏លាទៅ។

ឯ**ឡៅពី, គួនអ៊ូ, តៀវហ៊ុយ** ក៏ឡើងសេះនាំគ្នាទៅស្រុកស៊ិនអៀ។ នៅបួនប្រាំថ្ងៃ **ឡៅពី**ក៏ប្រើបម្រើឲ្យទៅមើល**ខុងបេង** លុះបម្រើត្រឡប់មកវិញក៏ប្រាប់ថា **ខុងបេង**ត្រឡប់មកលំនៅវិញហើយ។ **ឡៅពី**ក៏ចាត់ចែងទ្រព្យរបស់នឹងយកទៅគំនាប់**ខុងបេង**។ **តៀវហ៊ុយ**ឆ្លើយថា លោកនឹងមករង្វេងរាប់អានថា **ខុងបេង**ជាមនុស្សមានសតិបញ្ញា ហើយខំឧស្សាហ៍ស្វែងទៅរកដោយធ្វើកាយឲ្យលំបាកនោះមិនគួរសោះ ព្រោះ**ខុងបេង**ជាមនុស្សអ្នកស្រុកស្រែចម្ការនៅស្រុកក្រៅ បើនឹងឲ្យតែ

ទាហានទៅហៅយកមកក៏បាន។ **ឡៅពី**បានឮដូច្នោះក៏ខឹងណាស់ ឆ្លើយឡើងថា **ខុងបេង**ជាមនុស្សមានសតិបញ្ញា ខ្លួនមកមើលងាយប្រមាថដូច្នេះមិនគួរសោះ ថាហើយក៏ឡើងជិះសេះចេញទៅនឹងមនុស្សបម្រើ។ **គួនអ៊ូ, តៀវហ៊ុយ**ឃើញដូច្នោះ ក៏ឡើងសេះបរតាមទៅចម្ងាយផ្លូវប្រហែលសាមសិបសិន (១២០០ម) មានទឹកសន្សើមធ្លាក់ជោកអស់ទាំងខ្លួនរងាខ្លាំងណាស់ **តៀវហ៊ុយ**និយាយថា ទេសកាលនេះរដូវរងាគង់គិតសម្រាកឈប់បាន ចុះនេះគួរហើយ មករាប់អាន**ខុងបេង**ដែលជាអ្នកស្រែលើសការអាសន្នទៅទៀតនឹងប្រយោជន៍អ្វី? សូមឲ្យលោកត្រឡប់វិលទៅស្រុកសិនចុះ។ **ឡៅពី**តបថា ធម្មតាអ្នកនឹងប្រាថ្នារករបស់ល្អ ក៏រមែងប្រកបទៅដោយសេចក្ដីឧស្សាហ៍ ទើបនឹងរករបស់នោះបាន ដែលយើងទូន្មានកាយមកទាំងម៉្លេះ ក៏ប្រយោជន៍ប្រាថ្នានឹងរក**ខុងបេង**ឲ្យបាន មួយទៀត ដើម្បីឲ្យ**ខុងបេង**ដឹងថាយើងមានសេចក្ដីស្រឡាញ់ដោយស្មោះត្រង់ ទើបព្យាយាមទៅរកទាំងម៉្លេះ បើខ្លួនខ្លាចនឿយព្រួយលំបាកដោយធន់រងាមិនបាន ក៏ឲ្យវិលត្រឡប់ទៅស្រុកវិញចុះ។ **តៀវហ៊ុយ**ឆ្លើយថា ខ្ញុំបាទគិតឃើញលោកនឿយលំបាក ទើបថាទទឹងទាស់ដូច្នេះ។ **ឡៅពី**ឆ្លើយថា ពីថ្ងៃនេះទៅយើងហាមកុំឲ្យខ្លួននិយាយដូច្នេះទៀតឡើយ ហើយក៏បរសេះទៅ។

លុះទៅដល់តៀមលក់ស្រាជិតភូមិ ដែល**ខុងបេង**នៅនោះក៏បានឮសំឡេងមនុស្សនិយាយគ្នា មុនពេលផឹកស្រាខាងក្នុងផ្ទះ ឆ្លើយឆ្លងគ្នាពីរនាក់ **ឡៅពី**ឮសូរសម្ដីប្លែកក៏ទាញសេះឈប់ស្ដាប់ ឮពាក្យដោះសារវាងវៃណាស់ ក៏សម្គាល់ថា**ខុងបេង** ទើបចុះពីសេះដើរទៅអែបស្ដាប់ប្របមាត់ទ្វារ ឃើញមនុស្សម្នាក់មុខមាត់ស្អាតបាតសជ្រះ ពុកមាត់វែង ម្នាក់ទៀតមុខមាត់មានស្វាហាប់ រូបរាងក៏ស្រស់ចំណាប់ធំដំបង **ឡៅពី**ក៏ចូលទៅគំនាប់ហើយសួរថា លោកទាំងពីរនេះជាអាចារ្យ**ហុកឡុង**ឬ?

**ចោះកុងងួន**ឆ្លើយតបថា យើងទាំងពីរនាក់នេះជាមិត្តសំឡាញ់នឹង**ខុងបេង**។ **ឡៅពី**បានឮដូច្នោះ ក៏នឹកអៀនខ្មាសណាស់ លាត្រឡប់ទៅទៀត លុះទៅដល់ផ្ទះ**ខុងបេង**ហើយ ចុះពីលើសេះដើរចូលទៅសួរក្មេងថា ថ្ងៃនេះអាចារ្យអ្នកឯងនៅទេឬ? ក្មេងនោះប្រាប់ថា អាចារ្យខ្ញុំបាទកំពុងសម្រាន្តមើលសំបុត្រឯក្នុង។ **ឡៅពី**ឱ្យក្មេងនោះនាំចូលទៅ បានឃើញមនុស្សកម្លោះម្នាក់ដើរចេញមកពីខាងក្នុង **ឡៅពី**សម្គាល់ថា**ខុងបេង** មានសេចក្ដីត្រេកអរណាស់ ក៏ចូលទៅគំនាប់ហើយជម្រាបថា ខ្ញុំបាទនេះឈ្មោះ**ឡៅពី** តាំងពីបានឮគេនិយាយតមកជាយូរហើយ ខ្ញុំបាទជាមនុស្សវាសនាតិច តាំងចិត្តនឹងមកគំនាប់លោកក៏មិនដឹងទីលំនៅ តមក**ឈីស៊ី**ណែនាំបង្ហាញ ទើបដឹងតម្រុយខ្លះ ខំស្វះស្វែងមករកលោកម្ដងរួចហើយមិនបានជួប ថ្ងៃនេះជាបុណ្យភ័ព្វខ្ញុំល្អ ខំលុយកាត់ទឹកសន្សើមទទឹកជោកអស់ទាំងខ្លួន ក៏បានមកជួបនឹងលោកមានចិត្តត្រេកអរណាស់។

**ជូកាត់កិន**បានឮដូច្នោះក៏ឆ្លើយថា លោកនេះឈ្មោះ**ឡៅពី** ជាពូជព្រះរាជវង្សព្រះចៅ**ហៀន**តេឬ? ឯខ្លួនខ្ញុំឈ្មោះ**ជូកាត់កិន**ជាប្អូន**ខុងបេង**ទេ បងប្អូនខ្ញុំទាំងអស់បីនាក់ ម្នាក់ទៀតក៏ឈ្មោះ**ជូកាត់កិន**ដូចខ្ញុំដែរ ជាបងបង្អស់ តែទៅធ្វើរាជការនៅនឹង**ស៊ុនគួន**ចៅហ្វាយស្រុកកាំងតាំង។ **ឡៅពី**បានឮដូច្នោះក៏អៀនខ្មាសណាស់ ទើបភ្លយសួរថា ឥឡូវនេះ**ខុងបេង**បងអ្នកនៅឯណា? **ជូកាត់កិន**ឆ្លើយថាបងខ្ញុំមិននៅទេ ភឿនសំឡាញ់មកបបួលទៅដើរលេងតាំងពីព្រឹក។ **ឡៅពី**ក៏សួរទៀតថា បងអ្នកទៅលេងឯណា? **ជូកាត់កិន**ឆ្លើយថា ជួនកាលទៅទូក ជួនកាលទៅគោក នឹងកំណត់ថាទៅដោយអ្វី ទៅរកនរណាក៏មិនប្រាកដ។ **ឡៅពី**ថា ខ្ញុំពេញជាអភ័ព្វពន់ប្រមាណណាស់ ព្រោះវាសនាតិច បានមករកបងអ្នកដល់ពីរដងនេះហើយ មិនបានជួបប្រទះសោះ។

**តៀវហ៊ុយ**ក៏និយាយនឹង**ឡៅពី**ថា លោកឧស្សាហ៍ព្យាយាមមករក**ខុងបេង**មិនចេះជួបនឹងនៅធ្វើឲ្យយូរសោត ពេលក៏កាន់តែល្ងាចណាស់ហើយ ក្រែងភ្លៀងខ្យល់ធ្លាក់មករងាខ្លាំងណាស់ សូមអញ្ជើញត្រឡប់វិលទៅវិញជាប្រញាប់ចុះ។ **ឡៅពី**តបថា យើងមកនេះមិនទាន់បានចរចាពាក្យមួយម៉ាត់ពីរមាត់សោះ ខ្លួនមកបង្ខំឲ្យប្រញាប់វិលទៅវិញនោះនឹងមានប្រយោជន៍អ្វី ហើយក៏សួរ**ជូកាត់កិន**ថា ខ្ញុំបានឮគេនិយាយថា បងអ្នកមានតម្រិះប្រាជ្ញា ដោយបានរៀនវិជ្ជាសិល្បសាស្ត្រចេះចំណាប់ណាស់ ខ្លួនអ្នកជាប្អូនម្ដេចក៏មិនដឹងថា សព្វថ្ងៃនេះបងអ្នកចេះដឹងអ្វីខ្លះ? **ជូកាត់កិន**ឆ្លើយថា បងខ្ញុំមានតម្រិះប្រាជ្ញាក៏មែនហើយ តែខ្ញុំនឹងបានដឹងច្បាស់ថា បងខ្ញុំរៀនវិជ្ជាអ្វីខ្លះនោះ ខ្ញុំមិនអាចដឹងដល់ទេ។

**ឡៅពី**និយាយថា ខ្ញុំមកដល់ទីនេះពីរដងហើយមិនជួបសោះ លុះនឹងនៅឲ្យយូរហួសវេលា ពេលក៏ល្ងាចណាស់ទៅហើយ ខ្ញុំសូមលាអ្នកទៅសិន តែខ្ញុំសូមក្រដាសនិងពិតមកសរសេរកំណត់គំនាប់ទុកជូនបងអ្នក តែល្មមជ្រាបថា ខ្ញុំបាទបានឧស្សាហ៍មករកលោកអាចារ្យ**ហុកឡុង** ព្រោះខ្ញុំដឹងដំណឹងថា លោកជាអ្នកមានតម្រិះប្រាជ្ញាវិជ្ជាគុណដ៏ប្រសើរ នឹងរកអ្នកឯងណាផ្ទឹមស្មើគ្មាន ខ្ញុំមានសេចក្ដីប្រាថ្នាទ្រាំនឿយហត់ ដោយសេចក្ដីលំបាកមករកលោកដល់ពីរដងហើយ មិនបានជួបសោះ ខ្ញុំនេះជាមនុស្សអភ័ព្វអប្បឥតវាសនាណាស់ សូមឲ្យលោកមានសេចក្ដីមេត្តាករុណាដល់ខ្លួនខ្ញុំផង កុំឲ្យសូន្យសេចក្ដីប្រាថ្នាឡើយ បើលោកអនុគ្រោះខ្ញុំហើយ សូមឲ្យខ្ញុំបានមកជួបចំពោះមុខតែម្ដងចុះ ដែលមកក្នុងគ្រានេះប្រាថ្នានឹងពឹងប្រាជ្ញាវិជ្ជាគុណរបស់លោក សូមអញ្ជើញលោកទៅជួយធ្វើការរាជការទំនុកបម្រុងផែនដីដែលចលាចល ឲ្យបានរៀបរយជាសុខក្សេមក្សាន្តតទៅ នឹងបានប្រាកដកេរ្តិ៍ឈ្មោះ ដោយកម្លាំងតម្រិះប្រាជ្ញានិងគំនិតគិតគូររបស់លោក លុះចប់ហើយក៏ប្រគល់ឲ្យ**ជូកាត់កិន**

រួចក៏គំនាប់លាវិលមកវិញ ទទួលឡើងលើខ្នងសេះបានឮសំឡេងក្មេងស្រែកថា លោកតាអាចារ្យមកពីនោះហើយ។ **ឡៅពី**ក្រឡេកទៅឃើញអាពុកក្មេក**ខុងបេង**ជិះអូដ្ឋ មានក្មេងតូចម្នាក់ដើរតាមផ្លូងស្ពានមក ក៏សប្បាយរួសរាយក្នុងចិត្តក៏សម្គាល់ថា**ខុងបេង**។ **ឡៅពី**ក៏ចុះពីសេះចូលទៅគំនាប់ថា អាចារ្យទូន្មានកាយទ្រាំកាត់ទឹកសន្សើម អញ្ជើញមកពីណា ខ្ញុំឧស្សាហ៍ស្វះស្វែងមករក ទើបនឹងបានជួបថ្ងៃនេះ **ជូកាត់កិន**ប្រឡេកឃើញ**ឡៅពី**គំនាប់ដូច្នោះ ក៏ស្រែកប្រាប់ពីក្រោយថា មិនមែន**ខុងបេង**ទេ អ្នកនេះគឺឈ្មោះ**អុយស៊ីង៉ាន**ជាអាពុកក្មេក**ខុងបេង**ទេតើ។

**ឡៅពី**បានឮដូច្នោះក៏ទ្រាំ តែអៀនខ្មាសក្នុងចិត្ត គំនាប់ហើយក៏ឡើងសេះបរទៅលុះទៅដល់ស្រុកស៊ិនអៀ **ឡៅពី**មានសេចក្ដីទុក្ខកាយទោមនស្សនឹងរក**ខុងបេង**នោះមិនមានដាច់មួយវេលា ទទួលចូលឆ្នាំថ្មីក៏ងូតទឹកជម្រះកាយ រួចតែងខ្លួនស្លៀកពាក់ដោយសមគួរសង្រួមកាយគ្រប់បីថ្ងៃហើយ ក៏រៀបចាត់ចែងរបស់ទ្រព្យដែលនឹងយកទៅគំនាប់**ខុងបេង**។ **គួនអ៊ូ**ឃើញដូច្នោះ ក៏និយាយនឹង**តៀវហ៊ុយ**ថា អ្នកបងនេះមានសេចក្ដីកង្វល់ពីរដងហើយមិនចេះជួប ឥឡូវនឹងទៅធ្វើអ្វីទៀតនាំឲ្យព្រួយលំបាកទោះបីយ៉ាងណាក៏គួរឲ្យជួបតែម្ដងចុះ នេះប្រហែលគ្រាន់តែឮល្បីទទេៗទេ បើ**ខុងបេង**នោះប្រាកដជាអ្នកមានតម្រិះប្រាជ្ញាមែន ដូចពាក្យគេថា ក៏គង់នឹងទៅរកបានជួបខ្លះ នឹងជឿថាពិតជាចេះដូចជាមិនមែនសោះ។ **តៀវហ៊ុយ**បានឮដូច្នោះក៏ឆ្លើយឡើងថា ដែលបង**គួនអ៊ូ**ស្មាននោះក៏ដូចគំនិតខ្ញុំគិតដែរ បើប្រាថ្នាចង់ជួប**ខុងបេង**ឲ្យបាន ខ្ញុំនឹងទទួលជាធុរៈគ្រាន់តែប្រើបម្រើឲ្យទៅហៅខ្លួនយកមកក៏បាន បើប្រសិន**ខុងបេង**មិនព្រមមក ខ្ញុំនឹងយកពួរមួយខ្សែទៅចងដឹកយកមកជូនលោក ៗ កុំបាច់ទៅឲ្យព្រួយឡើយ។

**ឡៅពី**បានស្តាប់ក៏ខឹងណាស់ ស្រែកគំហកឲ្យ**តៀវហ៊ុយ**ថា ចៅចរចានេះជាមនុស្សគ្មានអធ្យាស្រ័យអ្វីសោះ រំលុហំលាងកេរ្តិ៍ឈ្មោះ**ខុងបេង** ដូចជាគេគ្មានតម្រិះប្រាជ្ញា ចៅមិនដឹងទេឬ អម្បាលដល់ព្រះចៅ**ជីវប៊ុនអង**លោកជាក្សត្រដ៏ប្រសើរ ម្តេចនៅទ្រង់ព្រះឧស្សាហ៍យាងទទួល**កេងសុង**ដល់ក្រៅព្រះនគរ ឯខ្លួនយើងប៉ុណ្ណេះក៏គួរតែនឹងទៅចំណុះ**ខុងបេង** បើខ្លួនមិនយល់ឃើញថាសមគួរនឹងទៅ ក៏នៅតាមចិត្តចុះ ខ្លួនយើង**គួនអ៊ូ**ត្រូវតែស៊ូព្យាយាមទៅម្តងទៀត។ **តៀវហ៊ុយ**ឆ្លើយថា ខ្ញុំបាទនឹងចោលបងម្តេចបាន ត្រូវតែទៅដែរ។ **ឡៅពី**ថា បើទៅជាមួយនឹងយើងក៏តាមចិត្ត សេចក្តីអ្វីដែលយើងបានហាមប្រាមហើយ មិនត្រូវចរចាទៀតឡើយ។ ថាហើយ**ឡៅពី**ក៏នាំគ្នាចេញទៅ លុះទៅដល់ជិតទីលំនៅ**ខុងបេង**ប្រហែលម្ភៃសិន (៨០០ម) ជួបនឹង**ជូកាត់កិន**ដើរមក **ឡៅពី**គំនាប់ហើយសួរថា បងអ្នកនៅទេឬ? **ជូកាត់កិន**គំនាប់ហើយឆ្លើយថា បងខ្ញុំត្រឡប់មកពីម្សិលមិញហើយ ថ្ងៃនេះមុខជាបានជួប លោកអញ្ជើញទៅចុះ។ ថាតែប៉ុណ្ណេះហើយក៏ដើរហួសទៅ។ **ឡៅពី**មានសេចក្តីត្រេកអរខំស្រូតដើរចូលទៅ លុះទៅដល់ទ្វារផ្ទះក៏និយាយនឹងក្មេងតូចឲ្យនាំសេចក្តីចូលទៅប្រាប់**ខុងបេង**ថា **ឡៅពី**មករក។ ក្មេងនោះក៏ចូលទៅជម្រាបថា ដ្បិត**ឡៅពី**មករក។ **ខុងបេង**ពន្យល់ហើយក៏ឲ្យក្មេងនោះចេញមកវិញប្រាប់ថា អាចារ្យខ្ញុំបាទនៅផ្ទះក៏មែន តែថាកំពុងសម្រាន្តលក់នៅឡើយ ខ្ញុំមិនហ៊ានដាស់ទេ។ **ឡៅពី**ថា អាចារ្យអ្នកឯងសម្រាន្តក៏កុំអាលទៅរីវរឡើយ ហើយក៏បង្គាប់**គួនអ៊ូ, តៀវហ៊ុយ**ឲ្យនៅចាំខាងក្រៅផ្ទះ **ឡៅពី**ក៏លបដើរចូលទៅខាងក្នុង ឃើញ**ខុងបេង**ដេកបែរមុខទៅខាងជញ្ជាំង **ឡៅពី**ក៏ឈរនៅពីថ្នាក់ទាប។ **តៀវហ៊ុយ**ឃើញ**ឡៅពី**ចូលទៅយូរណាស់ មិនបានឮសំឡេងនិយាយគ្នាថាអ្វីសោះក៏ខឹងណាស់ ត្រឡប់ចេញទៅប្រាប់**គួនអ៊ូ**ថា **ខុងបេង**នោះអាក្រក់ណាស់ គ្មានសេចក្តីគួរសមនឹងបងយើងសោះ ថែមធ្វើជាដេកលក់ទៅទៀត

ខ្ញុំចង់យកភ្លើងទៅដុតផ្ទះពីខាងក្រោយឲ្យភ័យភ្ញាក់ឡើងឲ្យបាន។ **គួនអ៊ូ**គិតឃើញខុសក៏និយាយឃាត់**ទៀវហ៊ុយ**។

ឯ**ខុងបេង**ដឹងដែរ តែធ្វើជាដេកលក់នៅប្រហែលបួនម៉ោង ក៏ក្រោកភ្ញាក់ឡើង ធ្វើអាការៈបីដូចជាទើបនឹងភ្ញាក់ពីដេក ហើយត្រឡប់ធ្វើជាដេកទៅវិញ។ ក្មេងបម្រើ ឃើញ**ឡៅពី**ឈរទូន្មានកាយយូរណាស់ ក៏កើតវេទនាក្នុងចិត្តនឹងចង់ចូលទៅដាស់ **ខុងបេង**ឲ្យភ្ញាក់ឡើង។ **ឡៅពី**ឃាត់ថា កុំអាលធ្វើឲ្យវីវរឲ្យអាចារ្យសម្រាន្តឲ្យសប្បាយចុះ។ ឯ***ខុងបេង***ធ្វើជាដេកក្នុងថ្ងៃនោះយូរណាស់ ទាល់តែរសៀលម៉ោងប្រាំ ហើយទើបប្រែខ្លួនភ្ញាក់ឡើង។ និយាយពាក្យឃ្លោងបួនបទ សេចក្តីថា៖

ធម្មតាជាមនុស្សនោះដេកស្និទ្ធ សឹងលក់ទាំងចិត្តទាំងសញ្ញា
លក់ទាំងរូបរស់អស់កាយា លក់ទាំងនេត្រាមាត្រាផង។
ទីល្វែងដំណេកដែលដេកនេះ តូចតែបើរិះឲ្យម៉ត់ហ្មង
គួរដេកសប្បាយកាយកន្លង បានត្រិះរិះត្រង់ជាងផ្ទះធំ។
ទោះបីរដូវត្រូវភ្លៀងផ្គរ ខ្យល់ព្យុះបក់មក*លើ*ជំរំ
មិនឲ្យព្រួយចិត្តគិតទុក្ខធំ និយមតែសោយដោយសុខា។
ឱព្រះអាទិត្យមានឫទ្ធិរុង កុំអាលបាត់វង់បាំងបព្វតា
ចូរនៅចាំ*ឆ័*ចងសែងសុរិយា ឲ្យយើងសេយ្យនាជាសុខអើយ។

លុះថាឃ្លោងចប់ហើយ ក៏ហៅក្មេងតូចនោះចូលទៅសួរថា មាននរណាមករកយើងខ្លះឬទេ? ក្មេងតូចនោះជម្រាបថា ឥឡូវ**ឡៅពី**មករកលោកឈរចាំនៅខាងក្រៅជាយូរហើយ។ **ខុងបេង**ក៏ធ្វើជាខឹងកំហែងក្មេងនោះថា ហេតុម្តេចបានជាមិនប្រាប់អំពីដំបូង ចេះតែនៅស្ងៀមទាល់តែ*ថ្ងៃ*ល្ងាចដូច្នេះ ថាដូច្នេះហើយ ក៏ក្រោកដើរចូលទៅល្វែងក្នុង សិតសក់ស្លៀកពាក់ខោអាវរៀបខ្លួនហើយក៏ចេញមក។

**ឡៅពី**ក្រឡេកឃើញ**ខុងបេង** មានរូបធំខ្ពស់ប្រហែលប្រាំមួយហត្ថ មុខមាត់ស្អាតបាតសម្បុរសដូចបណ្ដូលចេក តែងខ្លួនស្រស់បស់បែបជាអាចារ្យអ្នកធំ ក៏ចូលទៅគំនាប់ហើយថា ខ្ញុំបាទតាំងចិត្តមករកលោកវេលានេះ ព្រោះមានសេចក្ដីប្រាថ្នានឹងសុំតម្រិះប្រាជ្ញាលោកឲ្យជួយ ដោយដែនដីសព្វថ្ងៃនេះកើតចលាចលជិតនឹងសាបសូន្យទៅហើយ ខ្លួនខ្ញុំបាទនេះជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** តែថាមានសតិបញ្ញាតិចណាស់ ហើយក៏ជាអ្នកស្រុកស្រែក្រៅ*នៅ*ស្រុកទុនគួន ដឹងថា លោកជាមនុស្សត្រឹមត្រូវមានតម្រិះប្រាជ្ញាដ៏សំខាន់លាន់ឮល្បីចប់ដែនដីគ្រប់កន្លែង ដូចសំឡេងផ្គររន្ទះ ខ្ញុំបាទត្រេកអរណាស់ ខំស្វះស្វែងមកគំនាប់លោកដល់ពីរដងហើយ តែមិនដែលបានជួបប្រទះសោះ បានជាសរសេរកំណត់ទុកជម្រាបឲ្យលោកបានជ្រាប។ **ខុងបេង**តបថា ខ្ញុំបាទបានឃើញក្នុងសេចក្ដីកំណត់ក៏ដឹងអស់ហើយ តែខ្ញុំបាទគិតថា ខ្លួនខ្ញុំបាទនៅ*ក្មេង*សេចក្ដីខ្លីគំនិតណាស់ ទាំងតម្រិះប្រាជ្ញានឹងរិះគិតក៏នៅទន់ថយ បើនឹងទៅនៅធ្វើរាជការជាមួយនឹងលោក ក៏ខ្លាចក្រែងខូចបង់ការជាអសាររបស់លោកទៅ។ **ឡៅពី**បានឮ**ខុងបេង**និយាយបន្ទាបខ្លួនដូច្នោះក៏ថា ដែលលោកមានប្រសាសន៍ថា តម្រិះប្រាជ្ញាទន់ខ្សោយនោះ ខ្ញុំបាទក៏យល់ហើយដោយ**សុម៉ាតេកឆោ**និង**ឈីស៊ី**បានឲ្យដំណឹងពីថ្ងៃមុនគ្រប់ប្រការ សូមលោកកុំបោះបង់ឲ្យខ្ញុំខូចបំណងប្រាថ្នាឡើយ ចូរជួយយកអាសាផែនដីផងចុះ។ **ខុងបេង**ឮដូច្នោះក៏តបថា ដែលលោកនឹងឲ្យខ្ញុំបាទទៅជួយរិះគិតធ្វើរាជការនោះ គំនិតរបស់លោកនឹងចង់គិតដូចម្ដេចខ្លះ? ចូរបំភ្លឺឲ្យខ្ញុំបាទដឹងច្បាស់សិន។ **ឡៅពី**ក៏កិលចូលទៅជិត**ខុងបេង**ហើយថា សព្វថ្ងៃនេះព្រះចៅ**ហៀនតេ**គ្រងរាជសម្បត្តិជាក្សត្រាធិរាជ តែទ្រង់សាបសូន្យអំណាច ព្រោះមានរាជសត្រូវទៅបៀតបៀនធ្វើឲ្យព្រួយព្រះហឫទ័យក្រៃពេក ខ្ញុំបាទមានចិត្តឈឺក្ដៅជាអនេក ដោយការដែនដីនោះណាស់ បានខំស្វះស្វែងរកអ្នកមាន

តម្រិះប្រាជ្ញា ដែលល្មមនឹងជួយគិតការកម្ចាត់សត្រូវរាជសម្បត្តិនោះចេញបាន ក៏នៅមិនទាន់សម្រេចសេចក្តីប្រាថ្នានៅឡើយ តែពលយោធាក៏បានប្រុងប្រៀបទុកខ្លះហើយ ទើបមករកលោកគ្រានេះ ប្រាថ្នានឹងចង់ឲ្យជួយទំនុកបម្រុង លោកគួរមានសេចក្តីអាណិតខ្ញុំបាទផងចុះ។

**ខុងបេង**តបថា ឯផែនដីដែលកើតចលាចលដរាបមកដល់វេលានេះ ក៏ព្រោះ**តាំងតុះ**ជាដើមហេតុ ឯ**ចូឆូ**សោតក៏បានប្រុងប្រៀបពលទាហានទាំងពួង លើកទៅកម្ចាត់**អ៊ួនសៀវ**នោះ មិនមែននឹងសម្រេចដោយកម្លាំងទាហានច្រើន ក៏ឥតអង្គឹមានគឺទាហាន**ចូឆូ**តិចជាងទាហាន**អ៊ួនសៀវ**ទៀត ដែលនឹងអាចធ្វើការដ៏ធំពន្លឹក ឲ្យសម្រេចបាននោះ ក៏ព្រោះបញ្ញា និងគំនិតរិះគិតរបស់ខ្លួន ទោះបីបើ**ចូឆូ**អាក្រក់ មិនមានសេចក្តីកតញ្ញូនឹងព្រះចៅ**ហៀនតេ** គិតតែធ្វើការបៀតបៀនដោយចិត្តប្រទូសរ៉ាយយ៉ាងណាក្តី ក៏កម្រនឹងកម្ចាត់**ចូឆូ**បានដោយងាយ។

ឯ**ស៊ុនគួន**ចៅហ្វាយស្រុកកាំងតាំងសោត សូម្បីមានកម្លាំងតិចក៏បីដូចជាមានកម្លាំងច្រើន ព្រោះអាណាប្រជានុរាស្ត្រទាំងពួង មានសេចក្តីរាប់អានស្រឡាញ់បីដូចជាចិត្តមួយខ្លួនមួយនឹងគ្នា លោកកុំគប្បីមើលងាយប្រមាថ**ស៊ុនគួន**ឡើយ គួរហើយតែនឹងស្រឡាញ់រាប់អានឲ្យបានជាមេត្រីនឹងគ្នា ឯស្រុកកេងជីវនោះសោត ក៏ជាស្រុកមុខសឹកដូចសត្រូវមាននៅជុំទាំងបួនទិស បើអ្នកឯណាមានតម្រិះប្រាជ្ញាអាចនឹងរក្សាការពារយ៉ាងម្តេច អំណឹះទៅមុខក៏គង់នឹងបានជារបស់លោក ដូចយ៉ាងស្រុកសែឈ្នួនជាស្រុកមាំមួន ប្រកបដោយទ្រព្យសម្បត្តិជាច្រើននោះ កាលគ្រាព្រះចៅ**ហាន់កោចោ**ក៏តាំងខ្លួនក្នុងស្រុកនោះជាមុន។ ឥឡូវ**ឡៅជៀវ**ចៅហ្វាយស្រុកសែឈ្នួនក៏ជាមនុស្សឡេះឡោះនឹងយកជាការមិនបាន ហើយក៏គ្មានមេត្រីរាប់អានបណ្តាពួកពលទាំងពួងក៏ចាំពេលតែនឹងប្រែបែកចិត្តចេញ។ ខ្លួនលោកក៏ជាពូជព្រះរាជវង្ស

ព្រះចៅ**ហៀនតេ** ហើយប្រកបទៅដោយសតិបញ្ញាក៏ឆ្លៀវឆ្លាត បើនឹងគិតសង្វាតយកស្រុកកេងជីវហើយ ស្រុកសែឈ្នួនក៏នឹងបានដោយងាយ តែថាបើបានហើយចូរធ្វើមេត្រីឲ្យរួសរាយទៅដល់បណ្ដាអាណាខេត្តទាំងពួង ឯ**ស៊ុនគួន**នោះក៏នឹងបានជាទីពំនាក់របស់លោកតទៅ នឹងបានតាំងទំនុកបម្រុងសេនាទាហានឲ្យព្រមព្រៀង បើឃើញថាផែនដីរៀវរោយទៅកាលណា ក៏នឹងបានរិះគិតធ្វើការទៅបានស្រួល ឯ អាណាប្រជានុរាស្ត្រទាំងពួង ក៏នឹងមានចិត្តស្រឡាញ់លោកជាច្រើន ដែលលោកមានសេចក្ដីប្រាថ្នានឹងឲ្យជួយទំនុកបម្រុងនោះ ខ្ញុំបាទក៏នឹងបានណែនាំពន្យល់ឲ្យលោកបានផ្លូវចម្រើនតម្រិះប្រាជ្ញាតែប៉ុណ្ណោះ ប្រសិនបើលោកមានសេចក្ដីឧស្សាហ៍ធ្វើតាមពាក្យសម្ដីខ្ញុំបាទហើយ ក៏នឹងបានសម្រេចដូចសេចក្ដីប្រាថ្នាជាឆាប់។

**ខុងបេង**សន្ទនានឹង**ឡៅពី**ដូច្នោះហើយ ក៏ហៅឲ្យក្មេងលើកយកផែនទីតំបន់ស្រុកសែឈ្នួន ដែលមានស្រុកឡើងហាសិបមណ្ឌលមកលាឲ្យមើល ហើយ**ខុងបេង**និយាយថា បើលោកមានសេចក្ដីឧស្សាហ៍ព្យាយាមរិះគិតធ្វើការបានស្រុកសែឈ្នួននេះកាលណាហើយក៏នឹងបានជាធំសមដូចសេចក្ដីប្រាថ្នាកាលណោះ។ **ឡៅពី**បានស្ដាប់**ខុងបេង**ប្រាប់ដូច្នោះក៏និយាយថា ដែលលោកមានសេចក្ដីណែនាំពន្យល់ឲ្យខ្ញុំបាទបានយល់ដូច្នេះ ខ្ញុំបាទក៏មានសេចក្ដីត្រេកអរណាស់ បានភ្លឺស្វាងជ្រះក្នុងដួងចិត្ត បីដូចព្រះអាទិត្យដ៏មានបរិមណ្ឌល ប្រាសចាកពពកបិទបាំង ចែងចាំងទូទៅក្នុងលោកទាំងពួង តែថាស្រុកសែឈ្នួននិងស្រុកកេងជីវនោះ សុទ្ធតែជាក្រសែលោហិតព្រះបរមរាជវង្ស*នៃ*ព្រះចៅ**ហៀនតេ** ធ្វើចៅហ្វាយស្រុកទាំងអស់ បើខ្ញុំបាទនឹងគិតធ្វើការយកស្រុកទាំងពីរនោះ ក៏ហាក់បីដូចជាក្បត់ផែនដី ជាមនុស្សអកតញ្ញូនឹងព្រះមហាក្សត្រាធិរាជ។

**ខុងបេង**ឆ្លើយថា លោកមានប្រសាសន៍នោះក៏គួរហើយ តែខ្ញុំបាទពិគ្រោះមើលឃើញថា **ឡៅពៀវ**នោះជាមនុស្សអាយុមិនយឺនយូរអង្វែងទេ ឯ**ឡៅ*ជៀង***នោះសោតក៏ជាមនុស្សឡេះឡោះមិននឹងនួនក្នុងកាយ សូម្បីតែអាណាប្រជានុរាស្ត្រទាំងឡាយ ក៏មិនសូវមានចិត្តស្រឡាញ់ ទោះបីលោកនឹងមានចិត្តកតញ្ញូដល់ព្រះចៅ**ហៀនតេ**ពិត ក៏មិនបានតាំងចិត្តប្រទូសរ៉ាយអ្នកទាំងពីរនោះឡើយ លុះយូរទៅយើងក៏នឹងកើតអន្តរាយទៅឯង ស្រុកទាំងពីរនោះក៏នឹងបានដល់លោកជាប្រាកដ។

ដែល**ខុងបេង**និយាយដូច្នោះ ដោយបានពិគ្រោះឃើញក្នុងក្បួនតម្រាថា តទៅមុខ**ឡៅពី**នឹងបានជាធំសម្រេចផែនដីក្នុងកុកមួយ **ចូឆូ**កុកមួយ **ស៊ុនគួន**កុក១ ជាសាមកុក ដូច្នេះបានជាស្រុកចិនទាំងពួងនោះ សេចក្តីរាប់អានថា **ខុងបេង**ជាអ្នកប្រាជ្ញមានតម្រិះប្រាជ្ញាចេះដឹងមើលតម្រាវហូតទៅខាងមុខ ជាទីសរសើរពេញស្រុកដរាបមកដល់សព្វថ្ងៃនេះ។

ខណៈកាល**ឡៅពី**ស្តាប់**ខុងបេង**ប្រាប់ដូច្នោះ ក៏គំនាប់ហើយថា បើដូច្នោះខ្ញុំសូមអញ្ជើញលោកទៅនៅជួយធ្វើរាជការ ជួយទំនុកបម្រុងណែនាំពន្យល់ខ្ញុំតទៅ។ **ខុងបេង**ឆ្លើយថា ខ្លួនខ្ញុំបាទជាមនុស្សស្រុកស្រែក្រៅមានតម្រិះប្រាជ្ញាតិច ធ្លាប់ធ្វើការតែដោយបែបទាបថោក ដែលលោកនឹងហៅយកទៅធ្វើរាជការ រំឭកប្រដៅលោកនោះ ជាការល្អិតសុខុមណាស់ ក្រែងធ្វើទៅមិនបាន ក៏នឹងនាំឲ្យខូចការរបស់លោក។ **ឡៅពី**បានឮដូច្នោះក៏អង្វរថា បើលោកមិនបានទៅជួយទំនុកបម្រុងផែនដីហើយ អាណាប្រជានុរាស្ត្រទាំងពួងក៏នឹងបានសេចក្តីក្តៅក្រហាយ **ឡៅពី**និយាយហើយក៏សោកាពិលាប ឱនបន្ទាបជ្រុលជ្រប់សញ្ជប់សញ្ជឹងមិនងើបមុខសោះ។ **ខុងបេង**ឃើញដូច្នេះក៏យល់ថា **ឡៅពី**មានសេចក្តីប្រាថ្នាស្រឡាញ់ពេញចិត្តដោយពិតត្រង់មែន ទើបនិយាយថា បើលោកមានសេចក្តីស្ម័គ្រស្រឡាញ់ខ្ញុំបាទជាប្រាកដមែន

ហើយ ក៏កុំយំសោកជាទុក្ខព្រួយឡើយ ខ្លួនខ្ញុំក៏នឹងទ្រាំទៅជួយធ្វើការរាជការជូនលោកតទៅ ទោះបីបើខ្ញុំបាទនឹងយល់ឃើញការធ្ងន់ស្រាលប្រការម្ដេចក្ដី ក៏នឹងជួយទំនុកបម្រុងទៅតាមសតិបញ្ញានិងកម្លាំង កុំឲ្យលោកព្រួយឡើយ។ **ឡៅពី**ឮហើយក៏មានអំណរណាស់ ទើបហៅ**គួនអ៊ូ, តៀវហ៊ុយ**ឲ្យចូលមកគោរពគំនាប់**ខុងបេង**តាមសេចក្ដីសមគួរ ហើយយកទាំងរបស់ទ្រព្យគឺព្រែ និងមាសប្រាក់ដែលយកមកនោះជូនទៅ**ខុងបេង**ជាបណ្ណាការ។

**ខុងបេង**ទទួលយករបស់ទ្រព្យនោះហើយ ក៏ឃាត់**ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**ឲ្យនៅទទួលដំណេកមួយយប់ លុះព្រឹកឡើងទើបហៅ**ជូកាត់កិន**ជាប្អូនមកហើយប្រាប់ថា ដ្បិត**ឡៅពី**មានសេចក្ដីឧស្សាហ៍ស្វះស្វែងមករកបងដល់បីគ្រាហើយ បាននិយាយអង្វរករឲ្យបងទៅជួយធ្វើរាជការទំនុកបម្រុង លុះបងនឹងកាត់ប្រយោជន៍ឲ្យខូចទទេសោះ ក៏មានចិត្តអាណិត ពីព្រោះ**ឡៅពី**មកនិយាយដោយសុចរិត ហេតុនេះទើបផ្ដាច់ចិត្តទៅនៅជាមួយនឹង**ឡៅពី**។ ចៅនៅឯក្រោយចូរមើលរក្សាក្របីគោស្រែចម្ការនឹងបណ្ដាទ្រព្យរបស់ទាំងពួងទុកឲ្យល្អចុះ កុំបីឲ្យខូចខាតអន្តរាយជាអសារឥតការ។ បើបងទៅជួយ**ឡៅពី**បានសម្រេចការជាប្រយោជន៍ក្នុងផែនដីហើយ ក៏នឹងត្រឡប់មកនៅធ្វើស្រែចម្ការរកស៊ីជាមួយគ្នាដូចដើមវិញ។ លុះ**ខុងបេង**ផ្ដែផ្ដាំទុកដាក់ឲ្យ**ជូកាត់កិន**ជាប្អូនទទួលសព្វគ្រប់ហើយ **ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**ក៏គំនាប់លា**ជូកាត់កិន** នាំ**ខុងបេង**ទៅស្រុកស៊ិនអៀ។ លុះទៅដល់ហើយ **ឡៅពី**ក៏ធ្វើសេចក្ដីគារវៈនិងឧបត្ថម្ភទំនុកបម្រុង**ខុងបេង**ទុកជាទីគ្រូអាចារ្យ សម្រាប់ឲ្យទូន្មានប្រៀបប្រដៅតាមត្រូវការ នឹងបរិភោគអាហារក៏រួមសម្រាប់ជាមួយគ្នាជានិច្ចកាល ទោះបីមានការដូចម្ដេចៗ ក៏ពិគ្រោះប្រឹក្សាគ្រប់កិច្ចការទាំងពួង ស្រេចលើ**ខុងបេង**ទាំងអស់។

លុះនៅមកថ្ងៃមួយនោះ **ខុងបេង**និយាយនឹង**ឡៅពី**ថា ឥឡូវ**ចូឆ្វ**ជីកស្រះមួយធំទុកក្នុងស្រុកគីជីវហៅថា ស្រះហៀនមូទី ហើយហ្វឹកហាត់សេនាទាហានទាំងពួងឲ្យជំនាញស្ទាត់ស្ទាញក្នុងចម្បាំងជើងទឹក មុខជានឹងលើកទៅវាយយកស្រុកកាំងតាំងជាប្រាកដហើយ សូមឲ្យលោកប្រើបម្រើឲ្យទៅស៊ើបស្តាប់ការរាជការក្នុងស្រុកកាំងតាំង នឹងដឹងឮដំណឹងបានប្រុងប្រៀបរៀបស្រុកទេសឲ្យមាំមួនហើយ ឬនៅឡើយ។ **ឡៅពី**ឮហើយក៏យល់ឃើញផង ទើបប្រើបម្រើឲ្យចេញទៅស៊ើបស្តាប់ការឯស្រុកកាំងតាំង។

ឯ**ស៊ុនគ្វន**មានចិត្តមេត្រីស្រឡាញ់អស់អាណាប្រជានុរាស្ត្រទាំងពួង ទើបឲ្យសាងផ្ទះថ្មកំពែង ជាលំនៅនៃអ្នករាជការទុកជាទីសម្រាប់អាណាប្រជានុរាស្ត្រទាំងទាំង ដែលមានទុក្ខក្តៅក្រហាយចូលមកពិភាក្សា តាំងឲ្យ**កៅយ៉ុង, ទៀវហៀន** ជាធំសម្រាប់ទទួលអ្នកមានតម្រិះប្រាជ្ញាដែលទៅមក ហើយប្រុងប្រៀបរៀបចំសេនាទាហានបញ្ចុះបញ្ចូលមនុស្សទាំងពួងបានជាច្រើន ឯ**ខតតេក**ជាពួកស្រុកហួយខេ **យៀមជុន**ជាពួកស្រុកផេងសៀ **ឃីចង**ពួកស្រុកផៃគួន **ទៀវប៉េង**ពួកស្រុកយីឡា **ជូហ្វន, ឡុកចេក** និង**ទៀវអ៊ុន**ជាពួកស្រុកតង់ង៉ **ឡេងថង** និង**ង៉ាសាន់**ជាពួកស្រុកហួយខេ ប្រាំបួននាក់នោះ **ស៊ុនគ្វន**តាំងទុកជាទីប្រឹក្សា ឯ**លីបង**ជាពួកស្រុកយីអេង **ឡុកស៊ុន**ជាពួកស្រុងតង់ង៉ **ស៊ីសេង**ពួកស្រុកឡុកសៀ **ភួជៀង**ពួកស្រុកងតកុន **តេងអង**ពួកស្រុកលោកាំង ប្រាំនាក់នេះ**ស៊ុនគ្វន**តាំងទុកជាសេនាទាហាន។ កាលព្រះចៅ**ហៀនតេ**សោយរាជសម្បត្តិបានប្រាំពីរឆ្នាំនោះ **ចូឆ្វ**ចាត់ចែងទាហានឲ្យទៅវាយស្រុកអ៊ួនសៀវ ទើបមានសំបុត្រទៅដល់**ស៊ុនគ្វន**ជាសេចក្តីថា សូមឲ្យបញ្ជូនកូនប្រុសម្នាក់មកថ្វាយព្រះចៅ**ហៀនតេ** ឲ្យធ្វើរាជការក្នុងស្រុកក្រុងជាសេចក្តីគាប់ប្រសើរ។

ខណៈនោះ **ស៊ុនគួន**ក៏ប្រឹក្សានឹងមាតា ៗទើបហៅ**ទៀវជៀវ**និង**ជីវយី**ទាំងពីរនាក់ចូលមកប្រឹក្សាតាមដែលមានសំបុត្រទៅនោះ **ទៀវជៀវ**ឆ្លើយថា ដែល**ចូឆូ**ឲ្យមានសំបុត្រមកដូច្នេះ ក៏តាមប្រវេណីស្រុកទេសដូចទំនៀមពីដើម បើនឹងមិនបញ្ជូនកូនលោកទៅធ្វើរាជការក្នុងស្រុកក្រុងទេ ក៏នឹងខុសដោយទម្លាប់ទំនៀម គង់តែ**ចូឆូ**នឹងមានចិត្តព្យាបាទលើកកងទ័ពមកធ្វើអន្តរាយដល់យើង ហើយយើងក៏កម្លាំងនៅតិច ឃើញថានឹងតស៊ូមិនបាន។ **ជីវយី**បានឮ**ទៀវជៀវ**និយាយដូច្នោះ ក៏និយាយនឹង**ស៊ុនគួន**ថា សព្វថ្ងៃនេះ ខ្លួនលោកបានជាធំក្នុងស្រុកកាំងតាំងមានស្រុកឡើងដល់ប្រាំមួយមណ្ឌល ទាហានក៏ព្រមព្រៀងសុទ្ធតែស្ម័គ្រស្រឡាញ់លោក មួយទៀតស្បៀងអាហារក៏មានបរិបូរ ដែលនឹងគិតកោតញញើតខ្លាច**ចូឆូ**នោះមិនគួរសោះ សូម្បីបើលោកបញ្ជូនកូនទៅហើយ ក៏ដូចជាយកកូនទៅទុកជារបស់បញ្ចាំ តទៅមុខក៏នឹងបានសេចក្ដីក្ដៅក្រហាយជាច្រើន សូមលោកកុំអាលបញ្ជូនទៅ ទោះបី**ចូឆូ**នឹងលើកកងទ័ពមកវាយស្រុកយើង ក៏នឹងស៊ូតគ្នាត្រាតែអស់តម្រិះប្រាជ្ញា។

ឯនាង**ង៉ហ៊ូយិន**ដែលជាមាតានឹង**ស៊ុនគួន**បានស្ដាប់**ជីវយី**និយាយដូច្នោះ ក៏យល់ឃើញត្រូវផង ទើបនិយាយនឹងបម្រើកាន់សំបុត្រថា ដែល**ចូឆូ**នឹងឲ្យបញ្ជូនកូនទៅថ្វាយនោះមិនបានទេ អ្នកឯងត្រូវទៅប្រាប់**ចូឆូ**វិញចុះ។ គ្រាកាលដែលអ្នកនាំសំបុត្រវិលទៅប្រាប់**ចូឆូ** ៗខឹងណាស់ ក៏រៀបចំកងទ័ពលើកទៅវាយស្រុកកាំងតាំង ទទួលកងទ័ពខាងទិសឧត្តរលើកមកវាយស្រុកហ៊ូតោ ក៏បានតតាំងច្បាំងគ្នាជាប់ដៃ ទើបមិនបានលើកទៅវាយស្រុកកាំងតាំង បង្អង់ឈប់ទៅវិញ។

លុះព្រឹកឡើងចូលឆ្នាំថ្មី ជាខែកត្តិក **ស៊ុនគួន**ក៏រៀបលើកកងទ័ពទូកទៅវាយ**ហាងច**បានតតាំងច្បាំងគ្នាកណ្ដាលទន្លេជាពន្លឹក **ហាងច**តទល់មិនបាន ក៏បែកចូលទៅស្រុកឡេងឆោវិញ ទាហាន**ស៊ុនគួន**ក៏ចុះទូករហ័សដេញចូលទៅដល់មាត់ព្រែកស្រុក

កាំងហែ **កាំឡេង**ជាទាហាន**ហងចច**ច្បាំងទល់គ្នា ដោយបាញ់ធ្នូទៅ**ឡេងឆោ**ស្លាប់ **ឡេងចង**ជាកូនអាយុដប់ប្រាំឆ្នាំមានកម្លាំងអង់អាចខ្លាំងពូកែ ក៏ចូលដណ្ដើមយកសព **ឡេងឆោ**ជាបិតាបាន។ ខណៈនោះ មានខ្យល់ជំនោរបក់មកខ្លាំងណាស់ កងទ័ពទូក **ស៊ុនគួន**នឹងពារទម្លាយចូលទៅពុំបាន ក៏លើកថយត្រឡប់វិលមកស្រុកកាំងតាំង វិញ។

ឯ**ស៊ុនសៀង**ជាប្អូន**ស៊ុនគួន** ដែលទៅឈរនៅស្រុកតាំងអៀងនោះ មានគំនិត អាក្រក់ផឹកតែស្រា ស្រវឹងកាចសាហាវ មិនបានប្រណីមេត្តានាហ្មឺន និងបណ្ដារាស្ត្រ ទាំងពួង ចេះតែវាយដំច្រំផាក់ធ្វើទោសផ្ដន្ទាផ្សេងៗ **អ៊ីឡាំ** និង**តែអ៊្វន**ជាបាឡាត់មាន ចិត្តខឹងគុំគួនក៏ទៅគប់គិតគ្នានឹង**ចៀនហង** ដែលជាមនុស្សស្និទ្ធស្នាលនឹង**ស៊ុនសៀង** គិតនឹងសម្លាប់**ស៊ុនសៀង**ចេញ លុះមកដល់កំណត់ចូលឆ្នាំថ្មី ជាប្រវេណីទំនៀម ទម្លាប់ នាហ្មឺនមុខមន្ត្រីទាំងពួងត្រូវចូលទៅគំនាប់**ស៊ុនសៀង** ៗក៏ឲ្យរៀបតុលៀង អាហារបណ្ដាមន្ត្រីទាំងពួង នាង**ឈីហ៊្វយិន**ជាភរិយារបស់**ស៊ុនសៀង** ដឹងកិច្ចកល ដែលនឹងទាយទស្សន៍គ្រោះថ្នាក់អាក្រក់ល្អ ក៏វាយមើលឃើញថា វេលាព្រឹកនេះស្វាមី នឹងមានគ្រោះកាចណាស់ ទើបជម្រាប**ស៊ុនសៀង**ជាស្វាមីថា ពេលព្រឹកនេះ អ្នកកុំ ចេញទៅទទួលលៀងពួកមន្ត្រីខ្ញុំរាជការនៅទីសាលាកណ្ដាល ដូចពេលសព្វដងនោះ ឡើយ ដ្បិតអ្នកនឹងមានគ្រោះកាចណាស់។

**ស៊ុនសៀង**ឮភរិយាឃាត់ហាមដូច្នោះក៏មិនជឿ លុះព្រឹកឡើងជួបជុំមន្ត្រីខ្ញុំ រាជការ **ស៊ុនសៀង**ក៏ចេញទៅលៀងអាហារនៅសាលាកណ្ដាល លុះនាហ្មឺនគំនាប់ បរិភោគអាហារហើយ ទាំងអស់គ្នាក៏លាចេញទៅ **ស៊ុនសៀង**ក៏ត្រឡប់វិលមកផ្ទះ វិញ លុះដើរដល់មាត់ទ្វារនឹងចូលទៅក្នុងផ្ទះ **ចៀនហង**ជាមនុស្សស្និទ្ធដែលដើរជិត តាមមកពីក្រោយ ឃើញ**ស៊ុនសៀង**ប្រហែសខ្លួនមិនបានរវាំង ក៏ហូតដាវ ដែល

សៀតបង្កប់នោះកាប់**ស៊ុនសៀង**ដួលចុះដាច់ខ្យល់ស្លាប់នៅទីនោះមួយរំពេច។ **អ៊ីឡាំ**និង**តែអ៊ួន**ក៏ចាប់**ចៀនហាង**ចាជាក្បត់ ធ្វើប្រទូសរ៉ាយដល់**ស៊ុនសៀង**ចៅហ្វាយឯង ឲ្យនាំទៅសម្លាប់ចេញ ហើយក៏រើយកទ្រព្យរបស់**ស៊ុនសៀង**មកប្រមូលទុក រួច**អ៊ីឡាំ**ឲ្យអញ្ជើញនាង**ឈីហ៊្វយិន**មកជម្រាបថា ឥឡូវ**ចៀនហាង**ប្រែចិត្តក្បត់សម្លាប់ស្វាមីអ្នកក្ស័យជីវិតទៅហើយ ខ្ញុំក៏បានសងសឹកជំនួសអ្នក ឲ្យយក**ចៀនហាង**ទៅសម្លាប់ជីវិតចេញ ខ្លួនអ្នកជាស្រីគួរប្រតិបត្តិតាមយើងទៅចុះ បើប្រសិនមិនព្រមធ្វើភរិយាយើង ៗក៏ត្រូវតែប្រហារជីវិតឲ្យស្លាប់ទៅតាមគ្នា។ នាង**ឈីហ៊្វយិន**ក៏ធ្វើកលឧបាយតបថា ខ្លួនខ្ញុំជាស្រីអត់អំពីស្វាមីទៅហើយ ក៏ជាមនុស្សអភ័ព្វរូបកាយ ប្រុសទាំងឡាយរមែងមើលងាយប្រមាទណាស់ ដែលអ្នកមានមេត្តានឹងទទួលយកខ្ញុំម្ចាស់ទុកជាភរិយាតទៅនោះ ខ្ញុំក៏មានសេចក្តីត្រេកអរពន់ប្រមាណ តែថាវេលានេះ ខ្លួនខ្ញុំកំពុងមានសេចក្តីសោកសៅថ្មីៗ កំពុងតែកាន់ទុក្ខប្តីមុនពុំទាន់លែង សែនសំពះតាមទំនៀមប្រវេណី ជាទីគោរពដូច្នេះ ខ្ញុំនឹងចេះតែធ្វើបំពានត្រឡប់ទៅរាប់អានស្រឡាញ់អ្នកភ្លាមៗទៅ ក៏ខ្លាចគេគរហានិន្ទា បើខ្ញុំរួចធុរៈនេះតែពីរបីវេលាទៅទៀត ក៏នឹងប្រតិបត្តិអ្នកតាមត្រូវការ។ **អ៊ីឡាំ**បានឮវាចានាង**ឈីហ៊្វយិន**ថាដូច្នោះ ក៏សោមនស្សរីករាយពន់ប្រមាណណាស់ ទើបត្រឡប់ទៅកាន់ទីលំនៅវិញ។

នាង**ឈីហ៊្វយិន** ក៏ឲ្យមនុស្សជាទីស្និទ្ធស្នាលម្នាក់លបចេញទៅរក**ស៊ុនកោ, ប៉ៅអេង**ដែលជាខ្ញុំរាជការចាស់របស់**ស៊ុនសៀង**ចូលមក ហើយយំសោកថា ឥឡូវ**អ៊ីឡាំ**និង**តែអ៊ួន**ទាំងពីរនាក់នេះ រិះគិតដោយគំនិតទុច្ចរិតប្រើ**ចៀនហាង**ឲ្យសម្លាប់**ស៊ុនសៀង**ស្លាប់ទៅហើយ ហើយរើជញ្ជូនយករបស់ទ្រព្យទាំងប៉ុន្មានទុកជាប្រយោជន៍ខ្លួន ថែមរុកគួនបង្ខំខ្ញុំយកទៅធ្វើជាភរិយាឲ្យបាន។ ខ្ញុំក៏ព្រួយប្រាណដោយគិតខ្លាចអំណាចគេ ធ្វើជាអង្វរមិនឲ្យទាស់អធ្យាស្រ័យ សន្មតថ្ងៃនឹងឲ្យគេមក

ជួបហើយ តើអ្នកទាំងពីរដែលជាទុកចិត្តស្និទ្ធរាប់អាននឹងបានជួយសង្គ្រោះខ្ញុំកើតឬទេ? បើអ្នកអាណិតខ្ញុំក៏ដូចជាអាណិតដល់**ស៊ុនសៀង**ជាប្តីខ្ញុំដែលស្លាប់ដែរ សូមឲ្យមានសំបុត្រជាប្រញាប់ទៅដល់**ស៊ុនគួន**ជាបងថ្លៃ ឲ្យជ្រាបហេតុផលទាំងអម្បាលនេះផងចុះ ឯខ្លួនយើងនៅឯណោះ ក៏នឹងគិតឧបាយសម្លាប់**អ៊ីឡាំ, តែអ៊្វិន**ឲ្យបានទាំងពីរនាក់ចេញ។ ឯ**ស៊ុនកោ, ប៉ៅអេង**បានឮដូច្នោះ ក៏ឆ្លើយតបថា ខ្ញុំបាទនេះជាខ្ញុំរាជការចាស់របស់**ស៊ុនសៀង** ៗបានអាណិតអាសូរមេត្តាករុណាព្រះគុណក៏រកទីបំផុតគ្មានឡើយ ដែលបានដឹងថា**អ៊ីឡាំ, តែអ៊្វិន**ធ្វើប្រទូសរ៉ាយដល់ស្វាមីនៃអ្នក ក៏គិតតែនឹងសងសឹកតបគុណវិញជាដរាប និយាយហើយក៏លាចេញមកកាន់ទីលំនៅវិញ ទើបតែងសំបុត្រតាមរឿងហេតុសព្វគ្រប់ ចាត់បម្រើទៅទាំងយប់ទាំងថ្ងៃឲ្យយកទៅឲ្យ**ស៊ុនគួន**។

លុះព្រឹកឡើងថ្ងៃមួយ នាង**ឈីហ៊្វូយិន**ឲ្យហៅ**ស៊ុនកោ, ប៉ៅអេង** ចូលមកអែបបង្កប់នៅក្បែរគ្រែដំណេក ទើបចាត់ឲ្យតែងតុសែនរំឭកទៅស្វាមីតាមប្រវេណីស្រេចហើយ ក៏ងូតទឹកជម្រះកាយតែងខ្លួនស្លៀកពាក់ធ្វើកិរិយាបីដូចជាមានសេចក្តីស្នេហាស្រឡាញ់ចង់បានស្វាមីថ្មី។ ឯ**អ៊ីឡាំ**លុះដឹងដំណឹងថា នាង**ឈីហ៊្វូយិន**តែងគ្រឿងសែនខ្មោចប្តីដូច្នោះក៏ទៅរង់ចាំនៅក្បែរទីនោះ។ លុះដល់ពេលយប់ នាង**ឈីហ៊្វូយិន**ក៏ឲ្យបម្រើទៅអញ្ជើញ**អ៊ីឡាំ**ចូលមកបរិភោគអាហារ។ នាងក៏ចាក់ស្រាឲ្យ**អ៊ីឡាំ**ផឹកស្រវឹងហើយ ក៏ធ្វើបីដូចជាមានចិត្តស្រើបស្រឡាញ់ប្របអែបខ្លួនឲ្យពានពាល់ទៅលើ**អ៊ីឡាំ**ជាអ្នកនាំពា ហើយដើរចូលទៅខាងក្នុងដំណេក។ **អ៊ីឡាំ**ក៏ដើរតាមទៅ។ ខណៈនោះ**ស៊ុនកោ, ប៉ៅអេង**ក៏ស្ទុះចេញមកកាប់**អ៊ីឡាំ**ដួលស្លាប់នៅប្របមាត់ទ្វារ ហើយនាង**ឈីហ៊្វូយិន**ក៏ឲ្យបម្រើទៅជម្រាប**តែអ៊្វិន**ទៀតថា ថ្ងៃនេះជាថ្ងៃល្អ សូមអញ្ជើញលោកទៅពិសាក្រយា។ **តែអ៊្វិន**សម្គាល់ថាពិតក៏រៀបខ្លួនចូលទៅ លុះទៅដល់ប្រប

ទ្វារខាងក្នុង **ស៊ុនកោ, ប៉ៅអេង**ក៏ព្រួតគ្នាចាប់ខ្លួន**តៃអ៊្វន**បាន ហើយនាំទៅប្រហារជីវិតទៀត រួចលើកទាហានទៅចាប់ភរិយាបុត្រ និងស្ម័គ្របក្សពួក**អ៊ុឡាំ**និង**តៃអ៊្វន**សម្លាប់ចេញទាំងអស់។ នាង**ឈីហ៊្វយិន**ក៏ឲ្យកាត់ក្បាល**អ៊ុឡាំ** និង**តៃអ៊្វន**ទៅសែនគំនាប់នៅចំពោះមុខម៉ុងដែលបញ្ចុះសពស្វាមី។

ឯ**ស៊ុនគួន**លុះបានទទួលសំបុត្រដឹងសេចក្ដីហើយ ក៏មានសេចក្ដីក្រេវក្រោធពន់ប្រមាណណាស់ ទើបលើកទាហានស្រូតទៅដល់ស្រុកតាន់អៀង ឮថានាង**ឈីហ៊្វយិន**ប្រើឧបាយកលសម្លាប់**អ៊ុឡាំ** និង**តៃអ៊្វន**បានហើយ ក៏មានសេចក្ដីត្រេកអរណាស់ ទើបតាំងឲ្យ**ស៊ុនកោ, ប៉ៅអេង**នៅឈររក្សាស្រុកតាន់អៀង បានរៀបចំស្រុកជាស្រួលបួលស្រេចហើយក៏នាំយកនាង**ឈីហ៊្វយិន**ជាប្អូនថ្លៃ លើកទ័ពត្រឡប់ទៅស្រុកកាំងតាំងវិញ ហើយតាំង**ជីវយី**ជាមេទ័ពធំ បង្គាប់បញ្ជាលើសេនាទាហានទាំងពួងសម្រាប់ខាងទូកចម្បាំងប្រាំពីរជាន់។ តាំងពីនោះក៏នៅជាសុខសប្បាយក្សេមក្សាន្តមក រហូតព្រះចៅ**ហៀនតេ**សោយរាជសម្បត្តិបានដប់ពីរឆ្នាំ។

ដល់ខែកត្តិកខាងខ្នើត នាង**ង៉ហ៊្វយិន**ជាមាតា**ស៊ុនគួន**កើតរោគឈឺធ្ងន់ជាប់ ទើបឲ្យហៅខ្លួន**ជីវយី** និង**ទៀវជៀវ**ចូលមកផ្ដាំថា កាលពីដើមខ្លួនយើងពួកស្រុកតង់ង៉ បិតាមាតាស្លាប់នៅកំព្រា ចិញ្ចឹមរក្សាគ្នាតែបងប្អូនបីនាក់ លុះតមកបាន**ស៊ុនកៀន**ជាស្វាមី ក៏បង្កើតបុត្របានបួននាក់ កាលយើងមានផ្ទៃពោះទម្ងន់**ស៊ុនសេក**ជាបុត្រច្បង បានយល់សប្តិឃើញថា ដួងព្រះចន្ទ្រចូលមកនៅក្នុងផ្ទៃ លុះដល់ទម្ងន់**ស៊ុនគួន**យល់សប្តិឃើញទៀតថា ដួងព្រះអាទិត្យចូលមកនៅក្នុងផ្ទៃវិញ ត្រូវទំនាយថា បុត្រយើងទាំងពីរនាក់នេះអំណើះតទៅនឹងបានជាធំ តែ**ស៊ុនសេក**នោះអាយុខ្លីដល់នូវសេចក្ដីស្លាប់មុនប្អូន កាលជិតនឹងស្លាប់បានលើកប្រគល់ស្រុកកាំងតាំងទុកឲ្យ**ស៊ុនគួន**ជាប្អូនធ្វើចៅហ្វាយស្រុកនេះ។ ឥឡូវខ្លួនយើងឈឺជាទម្ងន់ណាស់ មុខជាមិន

រួចរស់ជីវិតទេ យើងសូមលាអ្នកទាំងពីរឲ្យហើយ បើប្រសិនយើងនឹងស្លាប់ហើយ ចូរអ្នកមានសេចក្តីអាណិតអាសូរជួយណែនាំ**ស៊ុនគួន**ឲ្យបានសេចក្តីសុខក្នុងរាជការ រក្សាខេត្តខណ្ឌកុំបោះបង់ចោលគ្នាឡើយ ហើយនាង**ង៉ហ៊្វយិន**ក៏ផ្តាំនឹង**ស៊ុនគួន**ទៀតថា ប្រសិនតទៅមុខកូននឹងធ្វើការអ្វី ចូរពិគ្រោះប្រឹក្សានឹង**ជីវយី**ហើយនិង**ទៀវជៀវ**ជាធំ កូនកុំប្រមាទត្រូវឲ្យដឹងសេចក្តីធ្ងន់ស្រាលខុសត្រូវ កុំប្រកាន់ទិដ្ឋិសេចក្តី គារវៈកោតខ្លាចអ្នកទាំងពីរជាទីគ្រូអាចារ្យធំ កុំគិតធ្វើការអ្វីសម្រេចតែនឹងគំនិតរបស់ខ្លួនម្នាក់ឯងឡើយ មួយទៀតនាង**ង៉កុកថៃ**ប្អូនម៉ែដែលជាម្តាយចុង និងម្តាយមីងកូននោះ បើម៉ែស្លាប់ទៅ កូនក៏ត្រូវគោរពប្រតិបត្តិកោតខ្លាចកុំបីល្មើសមើលងាយ ត្រូវទុកដាក់ខ្លួនជាកូននិងម្តាយបង្កើតដូចម៉ែនេះដែរ មួយទៀតនាង**ស៊ុនហ៊្វយិន**ជាប្អូនរួមបិតាជាមួយនឹងកូននោះ វាក៏នៅក្រមុំ ត្រូវកូនខិតខំមើលរក្សាឲ្យជាប្រក្រតី បើប្រសិនជានឹងឲ្យមានស្វាមី ក៏ត្រូវឲ្យកូនពិគ្រោះរើសរកអ្នកដែលមានសតិបញ្ញារក្សាវង្សត្រកូលឲ្យគួរសម សឹមលើកឲ្យជាភរិយាគេចុះ។ លុះនាង**ង៉ហ៊្វយិន**ផ្តែផ្តាំ**ស៊ុនគួន**អស់ហើយ ក៏ទទួលមរណភាពក្នុងខណៈនោះ **ស៊ុនគួន**ក៏តាក់តែងរៀបចំការសពតាមទម្លាប់ប្រវេណីជាទីរុងរឿង ហើយហែទៅបញ្ចុះនៅទីគួរសម។

លុះចូលឆ្នាំនៅខែមេឃខាងខ្នើត **ស៊ុនគួន**ក៏ជួបជុំប្រឹក្សានឹង**ជីវយី**, **ទៀវជៀវ**នូវអស់នាយទាហានទាំងពួងថា យើងនឹងលើកកងទ័ពទៅវាយ**ហាងច**ចៅហ្វាយស្រុកកាំងហែម្តងទៀត ជាទីសងសឹកគ្នានឹង**ហាងច** ដែលបានតតាំងច្បាំងនឹង**ស៊ុនគៀន**ជាបិតាយើងរហូតមក។ ខណៈនោះទីប្រឹក្សាទាំងអស់ក៏យល់មិនព្រមព្រៀងគ្នា ទទួល**លីបង**ដែលទៅនៅឈររក្សាគយប៉ាកណាមឡុងជីវមកប្រាប់**ស៊ុនគួន**ថា ឥឡូវ**កាំឡេង**ទាហាន**ហាងច**មកសុំចំណុះចុះចូលធ្វើរាជការជាមួយនឹងលោក ខ្ញុំបាទបានស៊ើបដឹងច្បាស់ថា **កាំឡេង**នេះជានាយទន្លេតំបន់លិមកាំង ពីដើមនោះ

**កាំឡេង**គប់ពួកភឿនធ្វើចោរកម្ម ដើររាតត្បាតឆក់ដណ្ដើមប្លន់វាយយកទំនិញរបស់ទ្រព្យអ្នកជំនួញកណ្ដាលទន្លេ ឯពួកចោរទាំងនោះក៏យកពួរនិងកណ្ដឹងវាយចងភ្ជាប់នឹងខ្លួនរៀងគ្នា ហើយ**កាំឡេង**ឲ្យយកព្រែទាំងផាប់លាយខ្សែមាសដែលវាយបានក្នុងទូកទំនិញស្រុកសែឈ្នួន មកធ្វើជាស្ពាបក្ដោង ឯកូនឈ្នួលដង្ហៅឃើញទូកសំខាន់ដូច្នោះ ក៏កោតខ្លាចមិនអាចនឹងតស៊ូ។ លុះយូរមក **កាំឡេង**ក៏លះបង់សេចក្ដីទុច្ចរិតនោះចេញ ទើបនាំពួកភឿនទៅនៅនឹង**ឡៅពៀវ**ជាច្រើនខែ។ **កាំឡេង**ឃើញថា**ឡៅពៀវ**ជាមនុស្សមិនចេះគិតការអ្វីឲ្យត្រូវចិត្តសោះ ក៏រត់ដោះខ្លួនឆ្លងឈូងសមុទ្របំណងមកនៅនឹងលោក ទទួលជួបនឹង**ហាងច**កណ្ដាលផ្លូវ **ហាងច**ក៏និយាយល្បួងលួងលោមយក**កាំឡេង**ទៅនៅផង។ កាលគ្រាលោកលើកទ័ពទូកទៅច្បាំងនឹង**ហាងច**នោះ បើ**ហាងច**មិនមាន**កាំឡេង**ទៅទុកជាកម្លាំងទេ **ហាងច**នឹងបរាជ័យក្ស័យជីវិតកាលណោះទៅហើយ គ្រានេះ**ហាងច**ក៏មិនបានឲ្យបំណាច់រង្វាន់ដល់**កាំឡេង** តាមគុណានុភាពដែលនឿយហត់ ថែមទាំងសង្កត់សង្កិនលើកទោសនិន្ទាថាជាចោរ ទើប**កាំឡេង**ខ្មាសអៀនតូចចិត្តគិតដោះខ្លួនចេញពី**ហាងច** មកចូលនៅនឹងលោក។

ឯ**សោហ៊ុយ** ដែលជាទាហាន**ហាងច** ឃើញ**កាំឡេង**តូចចិត្តមិនសប្បាយដូច្នោះ ក៏ចូលទៅនិយាយនឹង**ហាងច**ថា សូមឲ្យលោកយកចិត្ត**កាំឡេង** ទុកឲ្យនៅធ្វើការជានាយទាហានក្នុងស្រុកអៀនគួន ដែលឡើងចំណុះស្រុកកាំងហែតទៅ **ហាងច**ក៏ព្រម។ **សោហ៊ុយ**ក៏ហៅ**កាំឡេង**ទៅស៊ីលៀងហើយប្រាប់ថា យើងជួយនិយាយស្នើសេចក្ដីគាប់ប្រសើរឲ្យអ្នក ឥឡូវ**ហាងច**ឲ្យអ្នកទៅធ្វើជានាយទាហាននៅស្រុកអៀនគួន ដូចខ្លួនអ្នកក៏ជាជាតិទាហានស្រាប់ ចូរពិគ្រោះមើលឲ្យជាក់ក្នុងចិត្តចុះ មិនមែនជាថ្ងៃខែនេះនឹងនៅវង់ចាំក៏ទេ លុះនឹងស្ងៀមនៅអ្នកក៏កាន់តែចាស់ជរាគ្រប់ថ្ងៃដែលអ្នកនឹងទៅធ្វើជានាយទាហាននោះ ចូររិះគិតតាំងខ្លួនឲ្យបានខ្ជាប់ចុះ។

កាល**កាំឡេង**ទៅនៅស្រុកអៀនគួន ក៏បានកលការទើបចូលមកប្រាថ្នានឹងនៅធ្វើការជាមួយនឹងលោក ឥឡូវ**កាំឡេង**ក៏មកហើយ តែក្រែងថាលោកមានចិត្តព្យាបាទ កាលគ្រាលោកលើកទ័ពទៅចាប់**ហាងច**នោះ **កាំឡេង**ក៏ជួយការពារយកធ្នូបាញ់**ឡេងឆោ** ដល់នូវសេចក្តីស្លាប់។ **កាំឡេង**ក៏នាំ**ហាងច**រត់ពីក្នុងចំណោមព័ទរួសរាន់ ឥឡូវខ្ញុំបាទបានប្រាប់**កាំឡេង**ថា ឯចិត្តលោកនោះគ្មានសេចក្តីព្យាបាទទេ ប្រការមួយទៀត ការដែលធ្វើសឹកសង្គ្រាមក្នុងចំណោមទ័ពទាំងអស់គ្នា រមែងនឹងជួយការពារយកអាសានាយចៅហ្វាយដើម្បីនឹងយកជ័យជម្នះ សេចក្តីទាំងអម្បាលនេះ ខ្ញុំបាទក៏បានទទួលពាក្យនឹង**កាំឡេង**មកហើយ សូមឲ្យលោកមានសេចក្តីករុណាឈ្វេងយល់មកខ្ញុំបាទចុះ កុំឲ្យបង់ពាក្យសម្តី។ **ស៊ុនគួន**បានស្តាប់សព្វគ្រប់ ក៏មានចិត្តត្រេកអរណាស់ ទើបឆ្លើយថា ការទាំងពួងដែលអ្នកបានទទួលពាក្យ**កាំឡេង**មកហើយនោះ កុំបីអ្នកព្រួយបារម្ភជាទុក្ខឡើយ ប្រសិនបើយើងបាន**កាំឡេង**មកទុកផង ឃើញថា**ហាងច**នោះក៏គង់នៅក្នុងកណ្តាប់ដៃយើង។ និយាយហើយក៏ឲ្យ**លីបង**ទៅនាំ**កាំឡេង**ចូលមក។ **កាំឡេង**គំនាប់**ស៊ុនគួន** ៗសួរទៅ**កាំឡេង**ថា ដែលអ្នកស្ម័គ្រមកនៅនឹងយើងនេះ ក៏សមនឹងសេចក្តីប្រាថ្នាដែលយើងបានគិតទុកមកនោះ ការអ្វីនីមួយដែលបានធ្វើឲ្យទាស់ខុសនឹងគ្នាមកពីថ្ងៃមុននោះ យើងក៏លើកលែងអាឃាតព្យាបាទនឹងអ្នក ៗចូរតាំងចិត្តធ្វើការរាជការដោយសុចរិតចុះ យើងតាំងចិត្តចិញ្ចឹមរក្សាអ្នកឲ្យដល់ខ្នាត ចូរអ្នករិះគិតកម្ចាត់**ហាងច**ចេញឲ្យបាន។ **កាំឡេង**តបថា គ្រានេះ**ចូឆូ**ក៏តាំងខ្លួនជាធំក្រៃលែង ឯ**ឡៅពៀវ**នោះក៏ជាមនុស្សផ្តេសផ្តាស មិនចេះគិតការអ្វីឲ្យត្រូវសោះ។ ខ្លួនខ្ញុំបាទក៏កាន់តែចាស់ជរាណាស់ហើយ លោកចូរខំរិះគិតលើកទ័ពទៅវាយយកស្រុកកេងជីវឲ្យបានសិន បើលោកលះបង់បង្អង់ទុកឲ្យយូរ មុខជា**ចូឆូ**នឹងលើកកងទ័ពទៅវាយយកស្រុកកេងជីវបានមុននយើង ការទាំងពួងដែលយើងបាន

គិតទុកនោះ ក៏មិនព្រួយលំបាកដល់ពួកពលទាហាន បើលោកយល់ឃើញដូចខ្ញុំបាទគិត ក៏សូមឲ្យលើកទ័ពទៅវាយយកស្រុកកេងជីវ តែត្រូវវាយយកស្រុកកាំងហែដែលនៅដើមផ្លូវឲ្យបានជាមុន ព្រោះ**ហាងច**ចៅហ្វាយស្រុកកាំងហែនោះ មិនសូវមានតម្រិះប្រាជ្ញា ហើយប្រកបដោយចិត្តលោភច្រើនរមែងធ្វើទុក្ខបុកម្នេញបណ្ដារាស្ត្រចំណុះស្រុកឲ្យបានសេចក្ដីក្ដៅក្រហាយ រាស្ត្រទាំងឡាយក៏នាំគ្នាស្អប់មិនចូលចិត្តនឹង**ហាងច**នោះសោះ ចិត្ត**ហាងច**នោះក៏ច្រើនធ្វេសប្រហែសមិនបានប្រុងប្រៀបពលទាហាន និងចាត់ចែងឲ្យមានទូកចម្បាំង និងគ្រឿងសាស្ត្រាវុធទុករក្សាការពារស្រុកទេសសោះ បើលោកយល់ឃើញ ខ្ញុំបាទនឹងលើកទ័ពចេញទៅគ្រានេះ ក៏នឹងបានស្រុកកាំងហែនោះដោយស្រួល ប្រសិនបានស្រុកកាំងហែហើយ ទើបយើងនឹងលើកទៅវាយយកស្រុកសែឈ្នួនជាខាងក្រោយ កាលបើវាយស្រុកសែឈ្នួនបានហើយ លោកនឹងគិតការយ៉ាងធំលើសលុបជាងនេះតទៅទៀត ក៏គង់នឹងបានសម្រេចដូចសេចក្ដីប្រាថ្នា។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣៥

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ស៊ុនគួន**លើកទ័ពទៅវាយស្រុកកាំងហែបែក សម្លាប់**ហាងច**ចៅហ្វាយស្រុកស្លាប់ រហូតដល់**ខុងបេង**ប្រើឧបាយឲ្យ**គួនអ៊ូ**, **តៀវហ៊ុយ**, **ជូឡុង**លើកទ័ពទៅវាយឈ្នះហែហ្វិទុននៅតំបន់វាលកុកបេង)។*

**ស៊ុនគួន**បានស្តាប់ដូច្នោះក៏មានអំណរណាស់ ឆ្លើយថា គំនិតរបស់អ្នកដែលគិតទាំងអម្បាលនេះ ឧបមាដូចគេយកមាសមករងចម្លាក់ក្បាច់ ទើបកេណ្ឌប្រមូលទាហានបានដប់ម៉ឺន ឲ្យ**ជីវយី**ជាមេទ័ពបង្គាប់បញ្ជាទាំងកងទ័ពគោក និងទ័ពទឹក ឲ្យ**លីបង, កាំឡេង, តាំងស៊ិន** លើកទាហានជាទ័ពស្រួច **ស៊ុនគួន**ជាទ័ពហ្លួង ហើយលើកកងទ័ពទូកទៅវាយស្រុកកាំងហែ ឲ្យកងទ័ពគោកលើកទៅតាម។

ឯទាហានកងក្រវែលឃើញកងទ័ពលើកមកច្រើនណាស់ ក៏ស្រូតចូលទៅប្រាប់**ហាងច**ថា ឥឡូវ**ស៊ុនគួន**លើកព្យុហៈយោធាទាំងទ័ពគោក និងទ័ពទឹកមកជាច្រើន។ **ហាងច**បានឮដូច្នោះ ក៏ប្រុងប្រៀបទាហានក្នុងស្រុកកាំងហែទាំងអស់ ឲ្យ**សោហ៊ុយ**ជាមេទ័ពគោក ឲ្យ**តាន់ជីវ** និង**តេងឡុង**ជាមេទ័ពមុខ លើកទ័ពទូកចេញទៅតាំងរងទទួលនៅមាត់ទន្លេប៉ាកណាមស្រុកកាំងហែ។ ឯ**តាន់ជីវ** និង**តេងឡុង**កាលលើកទៅដល់មាត់ទន្លេប៉ាកណាមនោះហើយ ក៏ឲ្យទូកចម្បាំងទាំងពួងបោះយុថ្ការៀងលំដាប់គ្នាជាប៉ែកឆ្វេងស្តាំ ទើបយកពួរធំចងយោងតៗគ្នា គ្រប់ទូកទាំងឡាយនោះអណ្តែតឃ្លាតទៅបាន ហើយឲ្យយកធ្នូកាន់គ្រប់ដៃ។

ឯកងទ័ពទូកខាង**ស៊ុនគួន** លុះលើកទៅដល់មាត់កំពង់ប៉ាកណាមនោះ **តាន់ជីវ** និង**តេងឡុង**ឃើញដូច្នោះ ក៏ឲ្យទាហានបាញ់ចម្រុះតទល់គ្នាជាពន្លឹក ពួកទាហានទ័ពទឹកខាង**ស៊ុនគួន**ឃើញថានឹងចូលមិនបាន ក៏ថយក្រោយមកវិញ ចម្ងាយផ្លូវប្រហែលហាសិបសិន (២ គ.ម) ហើយក៏បោះយុថ្កាឈប់នៅទីនោះ។

**កាំឡេង**ទើបប្រឹក្សានឹង**តាំងស៊ិន**ថា ខ្លួនយើងមេទ័ពកងមុខ នឹងបង្អង់ទុកឲ្យនៅស្ងៀមដូច្នេះក៏មិនគួរ ត្រូវតែចាត់ទូកតូចយ៉ាងរហ័សឲ្យបានប្រហែលមួយរយ ផ្ទុកទាហានទូកមួយចំនួនហាសិបនាក់ ទុកម្ភៃនាក់ឲ្យចែវទូកនោះ នៅសាមសិបនាក់កាន់គ្រឿងសាស្ត្រាវុធ ចាំច្បាំងពារទម្លាយចូលទៅកាត់ពួរដែលចងយោងទូកនោះឲ្យដាច់ចេញ នោះឃើញថាកងទ័ពទូកស្រុកកាំងហែនឹងបែកខ្ចាត់ខ្ចាយមិនខាន។ **តាំងស៊ិន**យល់ឃើញត្រូវក៏ចាត់ចែងទូកតូច និងទាហានបានគ្រប់គ្រាន់តាមពាក្យ**កាំឡេង**និយាយ ហើយក៏ពារទម្លាយចូលទៅ។

ឯទាហាន**តាន់ជីវ** និង**តេងឡុង**ក៏តាំងតែច្បាំងតទល់ជាច្រឡំបល់គ្នា។ ឯបណ្ដាទាហាន**កាំឡេង** និង**តាំងស៊ិន**ក៏បង្ខំចែវទូកទាំងអស់ចូលបំពារទៅ ខ្លះយកពូថៅកាំបិតកាត់ខ្សែពួរធំនោះដាច់ ទូកចម្បាំងទាំងអស់នោះក៏អណ្ដែតខ្ចាត់ខ្ចាយអស់ទៅ តែ**កាំឡេង**នៅជាមនុស្សអង់អាច លោតឡើងលើទូក**តេងឡុង**បាន ហើយកាប់សម្លាប់ទាហាននិងខ្លួន**តេងឡុង**ស្លាប់លើទូកនោះ។ ឯ**តាន់ជីវ**ឃើញដូច្នោះក៏ភ័យខ្លាចលោតចុះទូកតូចចែវរត់រួចទៅឡើងលើគោក។ ខណៈនោះ **លីបង**ឃើញ**កាំឡេង**បានចំណាប់ ក៏ចុះទូកតូចឲ្យចែវស្រូតទៅជួយ ហើយយកភ្លើងគប់ចោលតម្រង់ទៅក្នុងទូកចម្បាំងស្រុកកាំងហែ ឆេះឆាលដាលលិចលង់ជាច្រើនណាស់ ទទួលក្រឡេកឃើញ**តាន់ជីវ**ចុះទូកតូចរត់ឡើងគោក **លីបង**ឲ្យទាហានដេញតាមទៅទាន់ប៉ះទូកគ្នា

ក្បែរមាត់ច្រាំង ពួក**លីបង**ក៏ព័ទ្ធចាប់យកខ្លួន**តាន់ជីវ**បាន កាត់ក្បាល**តាន់ជីវ**នាំមកដាក់លើទូក។

ឯ**សោហ៊ុយ**ដឹងដូច្នោះ ក៏នាំពួកពលស្រួតចុះមកប្រាថ្នានឹងរកទូកចម្បាំងចែវចេញទៅជួយ ទទួលក្រឡេកឃើញ**ស៊ុនគួន**ចែវទូកធំតូចតម្រង់ចូលមកខ្ទាន់ខ្ទាប់ ខ្លះក៏ស្ទុះឡើងលើកគោកព័ទ្ធជុំវិញ។ **សោហ៊ុយ**ក៏ឲ្យទាហានទាំងពួងចែវទូករត់ចេញពីក្នុងចំណោមឡើងគោកទៅវិញ ប្រទះនឹង**ថូជៀង**បរទេះសេះដេញពីក្រោយទាន់ **សោហ៊ុយ** ក៏ប្រយុទ្ធគ្នាបានដប់ភ្លែង **ថូជៀង**ក៏ចាប់ខ្លួន**សោហ៊ុយ**បាន ហើយចងនាំខ្លួនទៅជូន**ស៊ុនគួន**ក្នុងទូក។ **ស៊ុនគួន**ក៏បង្គាប់ឲ្យយកខ្លួន**សោហ៊ុយ**ទៅដាក់គុកទុកសិន បើចាប់ខ្លួន**ហាងច**បានវេលាណានឹងឲ្យសម្លាប់ព្រមគ្នាតែម្តង រួច**ស៊ុនគួន**ក៏លើកទ័ពឡើងគោកស្រួតចូលទៅ។

ខណៈនោះ **កាំឡេង**មកនឹកគិតក្នុងចិត្តថា គ្រានេះ**ហាងច**នឹងតទល់មិនបាន ហើយមុខជានឹងរត់ទៅរក**ឡៅពៀវ**ឯស្រុកកេងជីវ។ **កាំឡេង**ក៏នាំទាហានទៅពួនបង្កប់ស្កាត់ផ្លូវនៅទិសខាងកើត ផ្លូវដែលនឹងទៅលើស្រុកកេងជីវ។ ឯ**ហាងច**លុះដឹងថា ខូចកងទ័ពគោក និងទ័ពទឹក ទាហានក៏ស្លាប់វិនាសអស់ជាច្រើន បើនឹងនៅតទល់នឹងកងទ័ព**ស៊ុនគួន**ឃើញជាមិនបាន ដូច្នេះត្រូវតែដោះខ្លួនគេចវេះចោលស្រុកកាំងហែ រត់ទៅនៅស្រុកកេងជីវ ទើបនឹងរួចរស់ជីវិត លុះគិតឃើញក៏នាំទាហានដែលស្និទ្ធស្នាលប្រហែលសាមសិបនាក់រត់ចេញពីស្រុកកាំងហែ ទៅតាមទ្វារទិសខាងកើត ទទួលឮសំឡេងទាហានស្រែកហ៊ោស្ទាក់ផ្លូវពីមុខ ហើយឃើញ**កាំឡេង**ជិះសេះរាំងទទឹងផ្លូវ។ **ហាងច**ក៏និយាយថា យើងបានធ្វើគុណចិញ្ចឹមរក្សាអ្នកមកពីថ្ងៃមុនជាល្អនឹងគ្នា ហេតុម្តេចក៏មិនគិតដល់គុណយើង ត្រឡប់មកប្រទូសរ៉ាយយើងវិញដូច្នេះ?

**កាំឡេង**ឆ្លើយតបថា កាលគ្រាដែលយើងទៅនៅនឹងអ្នកនោះ យើងបានធ្វើសេចក្ដីគាប់ប្រសើរឲ្យអ្នកជាច្រើនហើយ អ្នកក៏មិនបានឲ្យបំណាច់រង្វាន់អ្វីជាទីពេញចិត្តសោះ ហើយថែមនិន្ទាថា យើងជាចោរ ដើរឆក់ដណ្ដើមយករបស់ទ្រព្យគេកណ្ដាលទន្លេ ឲ្យយើងបានសេចក្ដីអប្បយសដល់ទាហាននិងបណ្ដាពលរដ្ឋទាំងពួង ហេតុម្ដេចអ្នកអាចចេញមកតវ៉ាថា មានគុណនឹងយើងទៀត គួរហើយឬ? **ហងច**បានស្ដាប់ដូច្នោះក៏គិតឃើញថា **កាំឡេង**នេះនិយាយស្ដីជាទីហានក្លាខ្លាំងណាស់ មុខជាធ្វើអន្តរាយយើងបាន បើយើងនឹងស៊ូតច្បាំងក៏លើសកម្លាំងណាស់ គិតដូច្នោះហើយក៏ចោលទាហានទាំងអស់ ដោះគេចរត់យកតែខ្លួនទៅម្នាក់ឯង។

**កាំឡេង**ឃើញដូច្នោះ ក៏បរសេះស្រូតទៅតាម ទទួលឮសំឡេងស្រែកហ៊ោខ្លាន់ៗមកពីក្រោយ លុះក្រឡេកភ្នែកមើលក៏ឃើញ**ទៀនកោ**លើកទាហានតាមទៀត **កាំឡេង**ជាមនុស្សលោភគិតក្នុងចិត្តថា បើនឹងបង្អង់ឲ្យយូរ **ទៀនកោ**និងទាហានទាំងពួងក៏នឹងតាមចាប់**ហងច**បាន សេចក្ដីគាប់ប្រសើរក៏នឹងបានទៅគេ ដូច្នោះត្រូវតែយើងខំស្រូតទៅធ្វើការឲ្យបានមុន ហើយ**កាំឡេង**ក៏បំផាយសេះតាមទៅជិត**ហងច**យកធ្នូបាញ់ត្រូវ**ហងច**ធ្លាក់ពីលើសេះស្លាប់ ហើយកាត់យកក្បាលត្រឡប់មកឲ្យ**ស៊ុនគួន** ៗមានសេចក្ដីត្រេកអរណាស់ ទើបឲ្យយកក្បាល**ហងច**ដាក់ចាំងព្យួរទុក ហើយថា បើយើងត្រឡប់ទៅដល់ស្រុកនឹងឲ្យយកក្បាល**ហងច**សែនសពបិតាយើងឲ្យបាត់សេចក្ដីខឹងក្ដៅ។ ទើបតាំង**កាំឡេង**ឲ្យពេញយសជានាយទាហាន ហើយប្រឹក្សានឹង**ទៀវជៀវ**ថា យើងនឹងគិតធ្វើការតទៅ ត្រូវបែងទាហានឲ្យនៅរក្សាស្រុកកាំងហែខ្លះ ឬប្រការម្ដេច?

**ទៀវជៀវ**ឆ្លើយថា ឯស្រុកកាំងហែនេះ ជាផ្លូវកោងឆ្ងាយដាច់ស្រយាលណាស់ នឹងបែងទាហានឲ្យនៅរក្សានោះ ឃើញជាមិនបានទេ។ ប្រការមួយទៀត

ដែលលោកនឹងលើកទ័ពទៅវាយស្រុកកេងជីវនោះឃើញថា ទាហាននឹងបានសេចក្ដីលំបាកជាច្រើន ពីព្រោះ**ឡៅពៀវ**ដឹងខ្លួនក៏នឹងប្រុងប្រៀបរៀបចំទាហានទុករក្សាស្រុកជាមាំមួន សូមឲ្យលោកលើកកងទ័ពត្រឡប់ទៅស្រុកកាំងតាំងសិន ដើម្បីនឹងបម្រុងទាហានឲ្យមានកម្លាំង មួយទៀតបើ**ឡៅពៀវ**ដឹងថា**ហាងច**ស្លាប់ហើយ ក៏នឹងខឹងលើកទ័ពមកវាយស្រុកកាំងតាំង ប្រាថ្នានឹងសងសឹកព្រោះ**ហាងច**ស្លាប់ យើងនឹងលើកទ័ពចេញមកតទល់ខាងក្រៅស្រុក ហើយរិះគិតជាកលឧបាយឃើញថា នឹងចាប់ខ្លួន**ឡៅពៀវ**បាន។ **ស៊ុនគួន**យល់ឃើញត្រូវផង ក៏លើកកងទ័ពត្រឡប់ទៅស្រុកកាំងតាំង ហើយបង្គាប់ទាហានឲ្យសម្លាប់**សោហ៊ុយ**ចេញ ដើម្បីនឹងកាត់យកក្បាលទៅដាក់ជាមួយនឹង**ហាងច** នឹងតែងជាគ្រឿងព្លីការ សែនសពបិតាយើង។ **កាំឡេង**ឮដូច្នោះ ក៏ចូលទៅគំនាប់**ស៊ុនគួន**ហើយអង្វរថា កាលខ្ញុំបាទនៅនឹង**ហាងច**នោះ ខ្ញុំបាទជាមនុស្សតូចចិត្ត **សោហ៊ុយ**បានជួយនិយាយឲ្យខ្ញុំបាទចេញទៅឈរជានាយទាហាននៅស្រុកអៀនគួន ទើបបានខ្ញុំបាទគេចខ្លួនមកនៅធ្វើការរាជការជាមួយនឹងលោក ដែលលោកនឹងឲ្យសម្លាប់**សោហ៊ុយ**ចេញនោះ ខ្ញុំបាទអង្វរលោកឲ្យរួចជីវិតចុះ នឹងឲ្យនៅធ្វើការរាជការនឹងលោកជាមួយនឹងខ្ញុំបាទ។

**ស៊ុនគួន**តបថា ដែល**សោហ៊ុយ**មានឧបការដល់អ្នកនោះ យើងនឹងលើកទោសឲ្យ តែថាក្រែង**សោហ៊ុយ**មិនស្ម័គ្រចិត្តនៅនឹងយើង នឹងរិះគិតរត់ទៅទីឯទៀត។ **កាំឡេង**ថា ដែលលោកមិនសម្លាប់ជីវិត**សោហ៊ុយ**នោះ ព្រះគុណធ្ងន់រកទីបំផុតគ្មាន **សោហ៊ុយ**ក៏នឹងមានចិត្តត្រេកអរតាំងនៅធ្វើរាជការនឹងលោកដោយសុចរិត បើប្រសិន**សោហ៊ុយ**គិតប្រែចិត្តចេញពីលោកកាលណា ហើយរត់ទៅនៅទីឯទៀត ខ្ញុំបាទនឹងសូមទទួលយកក្បាលខ្ញុំបាទធានាជូនលោកជំនួស។ **ស៊ុនគួន**ក៏ព្រមលើកទោស**សោហ៊ុយ**ឲ្យ**កាំឡេង** ហើយឲ្យយកក្បាល**ហាងច**ទៅតែងគ្រឿងអុជទៀន

អប់ព្លីការ សែនសព**ស៊ុនគៀន**ជាបិតា ហើយឲ្យតែងតុរៀបលៀងអាហារបណ្តានាហ្មឺនមុខមន្ត្រី និងទាហានទាំងពួង។

កាលដែលទាហានទាំងពួង កំពុងសេពសុរាបរិភោគអាហារនោះ **ឡេងថង** ខឹងគុំគួននឹង**កាំឡេង**ដែលសម្លាប់បិតា យំសោកហើយចាប់គ្រប៊ីរត់ចូលទៅក្នុងទីប្រជុំទាហានទាំងពួង ប្រាថ្នានឹងប្រហារជីវិត**កាំឡេង** ៗផឹកស្រាហើយក្រឡេកទៅឃើញ**ឡេងថង**លើកគ្រប៊ីនឹងកាប់ ភ័យណាស់ក៏លើកកៅអីឡើងរង។ **ស៊ុនគួន**ឃើញដូច្នោះក៏ស្ទុះទៅឃាត់**ឡេងថង**ថា ដែលអ្នកនឹងខឹងគុំគួនព្យាបាទ**កាំឡេង**នោះមិនគួរទេ ព្រោះកាល**កាំឡេង**សម្លាប់បិតាអ្នកនោះ **កាំឡេង**ជាទាហានស៊ីបាយក្រហមរបស់ **ហាងច** ត្រូវតែយកអាសាចៅហ្វាយនាយឲ្យដល់ខ្មាត ទោះខ្លួនយើងវិញក៏ត្រូវតែធ្វើដូច្នោះដែរ។ ឥឡូវ**កាំឡេង**បានមកនៅនឹងយើងហើយ អ្នកក៏ត្រូវយល់ឃើញដល់យើង កុំបីគិតព្យាបាទ**កាំឡេង**តទៅឡើយ។

**ឡេងថង**បានឮ**ស៊ុនគួន**ឃាត់ហាមដូច្នោះក៏លុតជង្គង់ចុះ គំនាប់ហើយយំសោកសម្លឹងមុខ**កាំឡេង**ដោយកំហឹងមិនដាច់សោះ តែខ្លាចអាជ្ញា**ស៊ុនគួន** ទើបមិនបានឆ្លើយថាប្រការម្តេច។ **ស៊ុនគួន**ឃើញ**ឡេងថង**នៅតែមានចិត្តព្យាបាទគុំគួន **កាំឡេង**ដូច្នោះ ទើបគិតឧបាយឲ្យ**កាំឡេង**លើកទាហានប្រាំពាន់ និងទូកចម្បាំងមួយរយទៅតាំងជាកងក្រវែលនៅមាត់កំពង់ស្រុកកាំងហែ ហើយតាំង**ឡេងថង**ជានាយទាហានធំ ប្រាថ្នានឹងឲ្យរសាយសេចក្តីកំហឹងព្យាបាទ**កាំឡេង**នោះ។

រួច**ស៊ុនគួន**ក៏ចាត់ចែងទូកចម្បាំង និងហាត់ទាហានឲ្យព្រមព្រៀងគ្នា ទើបឲ្យ**ជីវយី**លើកទាហានជាកងទ័ពទឹក ទៅតាំងរក្សាគយនៅមាត់កំពង់អេងហា។

ពេលដែល**ជីវយី**ទៅតាំងទ័ពនៅទីនោះ តែងតែហ្វឹកហាត់សេនាទាហានគ្មានដាច់មួយថ្ងៃ ប្រាថ្នានឹងឱ្យស្ទាត់ជំនាញ ឯ**ស៊ុនគួន**ក៏លើកទាហានទៅតាំងនៅតំបន់ឈើសងក្រៅស្រុកកាំងតាំង ប្រាថ្នានឹងចាំការពារសឹកសត្រូវ។

ឯទាហានដែល**ឡៅពី**ប្រើឱ្យលបទៅស្តាប់ការណ៍ខាងស្រុកកាំងតាំង បានសេចក្តីនាំមកប្រាប់**ឡៅពី**ថា ឥឡូវ**ស៊ុនគួន**លើកកងទ័ពទៅវាយស្រុកកាំងហែសម្លាប់**ហាងច**ចៅហ្វាយស្រុកស្លាប់ហើយ រួចលើកកងទ័ពត្រឡប់ទៅស្រុកកាំងតាំងសម្រាំងនឹងត្រៀមពលទាហានឱ្យ**ជីវយី**លើកកងទ័ពទូកទៅនៅកំពង់អេងហ ខ្លួន**ស៊ុនគួន**លើកទាហានទៅតាំងការពាររក្សាស្រុកនៅតំបន់ឈើសង។ **ឡៅពី**ដឹងដូច្នោះ ទើបឱ្យអញ្ជើញ**ខុងបេង**មក ហើយអធិប្បាយរ៉ាយរឿងឱ្យស្តាប់គ្រប់ប្រការ។ **ខុងបេង**នៅស្ងៀម មិនទាន់ឆ្លើយថាប្រការម្តេច ទទួលមានបម្រើមកប្រាប់**ឡៅពី**ថា **ឡៅពៀវ**ឱ្យអញ្ជើញលោកទៅស្រុកកេងជីវ នឹងបានប្រឹក្សាការរាជការផង។ **ខុងបេង**បានឮដូច្នោះទើបនិយាយនឹង**ឡៅពី**ថា ដែល**ឡៅពៀវ**ឱ្យមកអញ្ជើញលោកទៅប្រឹក្សាការរាជការនោះ ព្រោះហេតុថា **ស៊ុនគួន**សម្លាប់**ហាងច**ចៅហ្វាយស្រុកកាំងហែស្លាប់ ដែលលោកនឹងទៅនោះខ្ញុំបាទក៏សូមទៅជាមួយផង នឹងបានជួយគិតការទាំងពួង។ **ឡៅពី**ថា បើយើងទៅដល់**ឡៅពៀវ**ហើយ លោកនឹងឱ្យខ្ញុំនិយាយដូចម្តេច?

**ខុងបេង**តបថា បើលោកទៅដល់ហើយ ត្រូវទទួលសារភាពទោសឱ្យ**ឡៅពៀវ**មុនថា ដែលមិនបានទៅទទួលគំនាប់ពួកខ្ញុំរាជការឱ្យចប់ចុងចប់ដើម ជាជំនួសលោកនោះឃើញថាខុសណាស់ទៅហើយ។ បើ**ឡៅពៀវ**ប្រើលោកឱ្យលើកកងទ័ពទៅវាយស្រុកកាំងតាំង លោកកុំអាលទទួលពាក្យ ចូរនិយាយរារែកបែបព្រងើយថានឹងសូមត្រឡប់ទៅចាត់ចែងការឯស្រុកស៊ិនអៀងសិន។ **ឡៅពី**ក៏ទទួលពាក្យហើយនាំ**ខុងបេង** និង**តៀវហ៊ុយ**នូវអស់ទាហានប្រហែលប្រាំរយនាក់ ទៅដល់ស្រុកកេងជីវ

ទើបឲ្យ**តៀវហ៊ុយ**ត្រៀមទាហាននៅចាំខាងក្រៅ ហើយ**ឡៅពី**នាំ**ខុងបេង**ចូលទៅ។ **ឡៅពី**ក៏គំនាប់**ឡៅពៀវ**ហើយថា ដែលខ្ញុំបាទមិនបានទៅទទួលគំនាប់ខ្ញុំរាជការទាំងពួងជំនួសលោកឲ្យចប់ចុងចប់ដើមនោះ ជាទោសខុសលើខ្ញុំបាទណាស់ហើយ។

**ឡៅពៀវ**បានស្តាប់ហើយក៏ឆ្លើយថា ដែលកើតហេតុទាំងអម្បាលនោះ ព្រោះតែយើងមិនបានរិះគិតផង លុះឯក្រោយទើបយើងបានដឹងសេចក្តី យើងនឹងឲ្យកាត់ក្បាល**ឈួម៉**ជាមនុស្សមានទោសនាំមកស្នាលាទោសនឹងអ្នក តែទីប្រឹក្សានិងទាហានទាំងពួងនាំគ្នាសូមទោស ឲ្យលើកទោសចោលចេញ។ បើប្អូនមានសេចក្តីខឹងក្តៅក្នុងរឿងនេះ បងសូមកុំឲ្យប្អូនប្រកាន់ទោសខឹងតទៅឡើយ។ **ឡៅពី**ក្លែងតបថា ដែលកើតហេតុទាំងអម្បាលនេះ ក៏មិនមែនត្រឹម**ឈួម៉**នឹងគិតធ្វើតែនៅខ្លួនឯងទេ ព្រោះ**ឈួម៉**ជាធំ មានចិត្តសុចរិតទៀងត្រង់ ខ្លាចក្រែងមានបក្សពួកបាវព្រាវ**ឈួម៉**គប់គិតគ្នាធ្វើផង។ ខ្ញុំបាទក៏ឥតប្រកាន់ទោសពៃរ៍អ្វីឡើយ។ **ឡៅពៀវ**ឆ្លើយថា ឥឡូវ**ស៊ុនគួន**លើកកងទ័ពទៅវាយបែកស្រុកកាំងហែ សម្លាប់**ហាងច**ជាចៅហ្វាយស្រុកស្លាប់ហើយ បានជាបងឲ្យអញ្ជើញប្អូនមកប្រឹក្សាការរាជការ ប្រាថ្នានឹងឲ្យប្អូនលើកទ័ពទៅវាយស្រុកកាំងតាំង ដើម្បីសងសឹកវិញ។

**ឡៅពី**ឮដូច្នោះក៏ឆ្លើយថា **ហាងច**ជាមនុស្សអាក្រក់មិនដឹងរិះគិតការអ្វី ទាំងមិនស្គាល់មនុស្សល្អ និងអាក្រក់ ទើបមានទុក្ខមកដល់ខ្លួន ដែលលោកនឹងឲ្យលើកទ័ពទៅវាយស្រុកកាំងតាំងនោះ ប្រសិនបើដឹងដំណឹងទៅដល់ស្រុកហ៊ូតោ **ចូឆ្ងូ**ក៏នឹងលើកកងទ័ពមកវាយស្រុកកេងជីវ លុះលើកទាហានមកជួយវិញ ក៏មិនទាន់ការ។ ឯកងទ័ព**ស៊ុនគួន**ក៏នឹងលើកតាមមកជាប់គ្នាទាំងសងខាង មុខជាយើងនឹងបានសេចក្តីលំបាកមិនដឹងបើនឹងវេខ្លួនទៅខាងណា សូមឲ្យលោកត្រិះរិះមើលសិន។

**ឡៅពៀរ**យល់ឃើញត្រូវផងក៏ឆ្លើយថា ខ្លួនបងសព្វថ្ងៃក៏កាន់តែចាស់ជរាណាស់ហើយ ទាំងរោគក៏បៀតបៀនរឿយៗណាស់ ប្អូនចូរមកនៅជួយធ្វើរាជការក្នុងស្រុកកេងជីវផង បើយើងអស់បុណ្យវាសនាកាលណា ខ្លួនប្អូនត្រូវធ្វើជាចៅហ្វាយស្រុកកេងជីវតែម្តងទៅចុះ។ **ឡៅពី**តបថា ខ្ញុំបាទមានតម្រិះប្រាជ្ញាក៏តិច ទាំងកម្លាំងក៏ទន់ខ្សោយ ដែលបានមកជ្រកកោនទីពឹងបុណ្យលោកនៅទីនេះ មានគុណធ្ងន់រកទីបំផុតគ្មាន ដែលលោកនឹងឱ្យខ្ញុំបាទទទួលស្ដីទីរាជការជំនួសលោកតទៅនោះ មិនគួរឡើយ។ តែគុណរបស់លោកគ្រាន់តែខ្ញុំបាទនៅប៉ុណ្ណេះ ក៏ជាទម្ងន់ណាស់ទៅហើយ។ ខ្ញុំបាទគ្រាន់តែជួយទំនុកបម្រុងទៅតាមសតិបញ្ញា។ លុះនិយាយហើយក៏នាំ**ខុងបេង**លា**ឡៅពៀរ**ចេញទៅ នៅសំណាក់អាស្រ័យខាងក្រៅ។

**ខុងបេង**សួរ**ឡៅពី**ថា ដែល**ឡៅពៀរ**និយាយទាំងអម្បាលនេះ ប្រាថ្នានឹងឱ្យកេងជីវមកលោក ហេតុម្ដេចបានជាលោកមិនទទួល ព្រងើយដូច្នេះ? **ឡៅពី**តបថា **ឡៅពៀរ**មានគុណនឹងខ្ញុំច្រើនណាស់ កូនចៅរបស់គេក៏មាននៅជាច្រើន បើខ្ញុំទៅត្រេកអរទទួលយក សេចក្ដីគរហានិន្ទានឹងមានដល់ខ្លួនខ្ញុំផ្សេងៗ។ **ខុងបេង**ឆ្លើយថា ខ្លួនលោកមានសេចក្ដីសុចរិតពិតត្រង់ណាស់។ ទទួល**ឡៅគី**ជាបុត្រច្បងរបស់**ឡៅពៀរ**ចូលមកសួរ**ឡៅពី** ៗក៏ហៅឱ្យចូលមកអង្គុយក្នុងទីសមគួរ។ **ឡៅគី**គំនាប់ហើយក៏យំពណ៌នារឿងរ៉ាវឱ្យ**ឡៅពី**ស្ដាប់ថា សព្វថ្ងៃនេះនាង**ឈ្ហួហ៊ួយិន**ជាម្ដាយចុងខ្ញុំបាទ មានចិត្តឫស្យាប្រាថ្នានឹងប្រទូសរ៉ាយ ឱ្យខ្ញុំបាទដល់នូវសេចក្ដីស្លាប់ លោកចូរអនុគ្រោះជួយរិះគិត កុំឱ្យភ័យមកដល់ខ្លួនខ្ញុំបាទផងចុះ។

**ឡៅពី**ឃើញ**ខុងបេង**ញញើមដូច្នោះ ក៏និយាយនឹង**ខុងបេង**ថា សូមឱ្យលោកជួយរិះគិតឱ្យ**ឡៅគី**ផង។ **ខុងបេង**ឆ្លើយថា ដែលនឹងឱ្យរិះគិតការក្នុងផ្ទះផងនោះ ឃើញថាមិនបានទេ។ **ឡៅគី**ក៏លាចេញមកវិញ។ **ឡៅពី**ក៏ចេញមកតាម ហើយខ្សឹប

ប្រាប់**ឡៅគី**ថា ព្រឹកស្អែកយើងនឹងក្លែងឲ្យ**ខុងបេង**ទៅសួររក អ្នកចូរអង្វរសាកសួរឲ្យ**ខុងបេង**ជួយគិតប្រាប់ដំណើរទំនងឲ្យបាន។ **ឡៅគី**ទទួលពាក្យហើយក៏លាទៅវិញ។

លុះព្រឹកឡើង**ឡៅពី**ក្លែងធ្វើជាឈឺ ឲ្យអញ្ជើញ**ខុងបេង**ចូលមកនិយាយថា ពេលម្សិលមិញ**ឡៅគី**មកគំនាប់យើង ថ្ងៃនេះត្រូវតែយើងទៅសួរវិញតាមប្រវេណី ទទួលខ្ញុំមិនសូវសប្បាយ លោកចូរទៅជួសខ្លួនខ្ញុំម្តងចុះ។ **ខុងបេង**ទទួលពាក្យហើយក៏ទៅផ្ទះ**ឡៅគី**។ លុះទៅដល់ក៏ទទួលបដិសណ្ឋារៈតាមទម្លាប់ទៅវិញទៅមក **ឡៅគី**ក៏អធិប្បាយរ៉ាយរឿងឲ្យ**ខុងបេង**ស្តាប់ហើយថា ខ្លួនខ្ញុំបាទសព្វថ្ងៃនេះ ម្តាយចុងគិតប្រទូសរ៉ាយជាដរាប សូមលោកជួយអាណិតអាសូរណែនាំពន្យល់ កុំឲ្យមានភ័យមកដល់ខ្លួន ព្រោះខ្ញុំបាទសព្វថ្ងៃមានសេចក្តីព្រួយខ្លាំងណាស់។

**ខុងបេង**ឆ្លើយតបថា ខ្លួនខ្ញុំជាភ្ញៀវមកពីក្រៅ មិនត្រូវចង់ដឹងកិច្ចការខាងក្នុងទីលំនៅ ឲ្យញាតិសន្តានបងប្អូនរបស់អ្នកបែកបាក់គ្នានោះមិនគួរសោះ បើប្រសិនសេចក្តីនោះជ្រួតជ្រាបទៅដល់**ឡៅពៀវ**ជាបិតាអ្នក យើងក៏មិនរួចពីសេចក្តីខុស ហើយ**ខុងបេង**ក៏ក្រោកឡើងលាចេញមកវិញ។ **ឡៅគី**ក៏ក្លែងបញ្ឆោតថា លោកកុំអាលអញ្ជើញទៅ សំបុត្របុរាណរបស់ខ្ញុំបាទមាននៅមួយច្បាប់ អញ្ជើញលោកឡើងទៅមើលលេងលើល្វែងលើសិន ទើបដឹងដៃ**ខុងបេង**ឡើងទៅលើឡៅ ហើយ**ឡៅគី**ក៏យំអង្វរ**ខុងបេង**ថា "ជីវិតខ្ញុំបាទនឹងដល់នូវសេចក្តីវិនាសព្រោះមាតាចុងម្តងនេះហើយ ហេតុម្តេចបានជាលោកមិនអាណិតជួយដោះទុក្ខឲ្យខ្ញុំបាទបានរួចពីសេចក្តីស្លាប់ផង? បើលោកមិនប្រោសប្រណីទេ ខ្ញុំបាទក៏សូមស្លាប់ក្នុងទីនេះឲ្យហើយទៅ" ហើយ**ឡៅគី**ក៏ហូតយកគ្រប៊ីចេញមកនឹងអារ-កសម្លាប់ខ្លួន។

**ខុងបេង**ឃើញដូច្នោះ ក៏ភ័យស្លុតស្មារតីស្ទុះទៅកន្ត្រាក់គ្រប៉ីពីដៃ**ឡៅគី**មកទុក ហើយឃាត់ថា "អ្នកកុំអាលធ្វើជីវិតរបស់ខ្លួនឲ្យអន្តរាយដូច្នេះ ខ្ញុំនឹងជួយសង្គ្រោះអ្នកឲ្យរួចពីភ័យឲ្យបាន"។ ហើយថាខ្លួនអ្នកក៏បានរៀនសំបុត្រដែរ មិនដឹងឬ ក្នុងនិទានស្តេចដប់ប្រាំបីអង្គបានគ្រងរាជសម្បត្តិដប់ប្រាំបីនគរនោះ? ព្រះចៅ**ជិនហៀនកុង**បានគ្រងស្រុកចិន ព្រះមហេសីនោះមានព្រះរាជបុត្រពីរព្រះអង្គ ឈ្មោះ**ស៊ិនសេង១, តុងយី១** ឯនាង**លីគី**ជាព្រះស្នំក៏មានបុត្រពីរព្រះអង្គដែរ ឈ្មោះ**ហ៊ីចេ១, តុកជូ១**។ លុះអំណឹះតមកព្រះមហេសីសុវណ្ណគត រាជសម្បត្តិក៏នឹងបានដល់**ស៊ិនសេង** និង**តុងយី**។ នាង**លីគី**គិតថា កូនយើងទាំងពីរក៏នឹងនៅក្នុងកណ្តាប់ដៃគេ បើដូច្នេះយើងត្រូវគិតកលឧបាយឲ្យព្រះចៅ**ជិនហៀនកុង**សម្លាប់**ស៊ិនសេង** និង**តុងយី**ចេញ រាជសម្បត្តិក៏នឹងបានដល់កូនយើង។

សម័យមួយ ពេលយប់ប្រហែលយាមបីប្លាយ នាង**លីគី**ភ្ញាក់ពីដំណេក ក៏ធ្វើជាទួញយំដំឱរាមានប្រការផ្សេងៗ។ ព្រះចៅ**ជិនហៀនកុង**ទ្រង់ឃើញ ក៏ត្រាស់សាកសួរនាង**លីគី**ថា "ហេតុម្តេចបានជាយំសោកដូច្នេះ?" នាង**លីគី**ទូលថា ខ្ញុំម្ចាស់យល់សប្តិឃើញថា ព្រះមហេសីនៃព្រះអង្គដែលសុគតទៅនោះ ដើរចូលមកដល់ទីខាងក្នុង ហើយយំថា អត់បាយទឹកចំណីអាហារបរិភោគ ខ្ញុំម្ចាស់ភ្ញាក់ឡើងឲ្យមានសេចក្តីអាណិតខ្លោចចិត្តបានជាយំសោកដូច្នេះ។ ព្រះចៅ**ជិនហៀនកុង**មិនដឹងកលឧបាយនៃស្ត្រី ទើបត្រាស់ថា ប្អូនកុំយំសោកសៅឡើយ យើងនឹងតែងតុទៅសែនឲ្យមហេសីនៃយើងបានបរិភោគអាហារ។

លុះវេលាព្រឹក ស្តេចឲ្យហៅ**ស៊ិនសេង** និង**តុងយី**ជាព្រះរាជឱរសចូលមក ហើយប្រាប់សេចក្តីទាំងពួងឲ្យស្តាប់ ឲ្យរៀបតែងតុដាក់ចំណីអាហារយកទៅសែនសពព្រះមាតា។ **ស៊ិនសេង** និង**តុងយី**មានសេចក្តីអាណិតមាតាណាស់ ទើបនាំគ្នាធ្វើ

តាមព្រះរាជឱង្ការបង្គាប់ ហើយយករបស់ដែលសែននោះមកថ្វាយព្រះបិតាសោយតាមទំនៀម។ ឯនាង**លីគី**ក៏យកថ្នាំពិសទៅលបដាក់ក្នុងចំណីទាំងពួង លុះព្រះចៅ**ជិនជៀនកុង**នឹងរៀបសោយ នាង**លីគី**ក៏ទូលទាស់ថា ព្រះអង្គកុំអាលសោយ ព្រោះរបស់នេះធ្វើនាំមកពីខាងក្រៅ នឹងទុកចិត្តមិនទាន់បាន ក្រែងមានអន្តរាយ សូមឲ្យទ្រង់ពិសោធន៍មើលសិនសឹមសោយ។ ព្រះចៅ**ជិនហៀនកុង**ទ្រង់យល់ឃើញផង ទើបឲ្យយកអ្នកទោសអស់អាយុ ដែលនៅក្នុងគុកមកស៊ីចំណីនោះចំពោះព្រះភក្ត្រ លុះអ្នកទោសនោះបរិភោគចូលទៅ ក៏ដល់នូវសេចក្តីស្លាប់មួយរំពេច។ ព្រះចៅ**ជិនហៀនកុង**ឃើញដូច្នោះក៏ទ្រង់ព្រះពិរោធ ទើបទ្រង់ត្រាស់ថា **ស៊ុនសេង** និង**តុងយី**ដាក់ថ្នាំពិសក្លែងឲ្យយើងស្លាប់ ប្រាថ្នានឹងដណ្តើយយករាជសម្បត្តិ ទើបបង្គាប់ឲ្យនាហ្មឺនទាំងពួងទៅចាប់យកខ្លួន**ស៊ុនសេង** និង**តុងយី**សម្លាប់ចោល។ នាហ្មឺនទាំងពួងក៏ចេញទៅ។

ខណៈនោះ មានមនុស្សស្និទ្ធស្នាលលបទៅទូលព្រះរាជឱរសទាំងពីរព្រះអង្គតាមដំណើរដែលព្រះវរបិតាខ្ញាល់គ្រប់ប្រការ។ ឯ**តុងយី**ជាព្រះអនុជដឹងដូច្នោះ ក៏ប្រឹក្សានឹង**ស៊ិនសេង**ជាព្រះរៀមថា ឥឡូវភ័យមកដល់ខ្លួនយើងហើយ យើងត្រូវតែរត់ឲ្យរួចខ្លួនទៅសិន។ **ស៊ិនសេង**តបថា ខ្លួនយើងជាបុត្រ ព្រះរាជបិតានឹងដាក់ទោសប្រហារជីវិត បើនឹងរត់ទៅឲ្យផុតពីភ័យ ក៏ដូចជាគ្មានសេចក្តីកតញ្ញូនឹងព្រះបិតាប្រការមួយសោត ធម្មតាដែលធ្វើជាសេនាបតីជាខ្ញុំរាជការនោះ បើទោះបីធ្វើសេចក្តីខុសដោយប្រការឯណាមួយក្តី សូម្បីព្រះមហាក្សត្រនឹងដាក់ទោសនោះ នឹងរត់ឲ្យរួចពីព្រះរាជទណ្ឌនោះក៏ពុំគួរ ដូចជាគ្មានសេចក្តីសត្យសុចរិតនឹងផែនដីនៃព្រះមហាក្សត្រ ដូចខ្លួនបងនេះនឹងចង់សូមចូលទៅទទួលព្រះរាជអាជ្ញា ត្រាតែអស់ជីវិតទៅចុះ។ **តុងយី**បានស្តាប់**ស៊ិនសេង**ជាព្រះរៀមថាដូច្នោះ ក៏ថា ខ្លួនខ្ញុំមិនព្រមស្តាប់ទេ

ព្រោះខ្ញុំមិនមានសេចក្ដីទុច្ចរិតអ្វីសោះ ថាហើយក៏លបចេញពីស្រុកក្រុង។ ឯ**សុិនសេង**ក៏ចូលទៅទទួលទោស ឲ្យបណ្ដានាហ្មឺនមុខមន្ត្រីចាប់ខ្លួនយកទៅប្រហារជីវិតតាមតម្រាស់។

អំណើះតមក ព្រះចៅ**ជិនហៀនកុង**ទ្រង់ទិវង្គត។ **ហឺចេ** និង**តុកជូ**ក៏បានសោយរាជសម្បត្តិដល់ដប់ប្រាំបួនឆ្នាំ។ ឯ**តុងឃី**ដែលរត់ទៅនៅក្រៅដែននោះ ក៏ជ្រើសរើសទាហានប្រុងប្រៀបរៀបក្បួនទ័ពជាច្រើន ហើយលើកចូលមកដល់ទីក្រុង ក៏ច្បាំងវាយយកស្រុកចាប់**ហឺចេ** និង**តុកជូ**សម្លាប់ចោល។ **តុងឃី**ក៏បានសោយរាជសម្បត្តិជំនួសព្រះបិតាជាតំណតមក។ និទាននេះអ្នកក៏បានដឹងអស់ហើយថា ដែលនឹងនៅក្នុងស្រុកនោះ ក៏រមែងមានភ័យអន្តរាយដូចរឿងនេះ បើចេញទៅនៅស្រុកក្រៅគង់ត្រឡប់បានការជាក្រោយ ឥឡូវស្រុកកាំងហែក៏នៅទំនេរគ្មានខ្លួនចៅហ្វាយស្រុក ចូរអ្នករិះគិតអង្វរ**ឡៅពៀវ**ជាបិតា សូមទៅនៅរក្សាស្រុកកាំងហែស្រួលជាងនៅក្នុងទីនេះ ហើយត្រូវឧស្សាហ៍ធ្វើសេចក្ដីព្យាយាមឲ្យដូច**តុងឃី**ទៅចុះ តទៅអនាគតនោះ គង់នឹងបានសេចក្ដីសុខតទៅ។ **ឡៅគី**បានស្ដាប់ដូច្នោះ ក៏មានសេចក្ដីសោមនស្សត្រេកអរ ក្រោកឡើងលុតជង្គង់គំនាប់**ខុងបេង**ហើយថា ដែលលោកមានប្រសាសន៍ណែនាំពន្យល់ខ្ញុំបាទឲ្យដឹងដូច្នេះ មានគុណធ្ងន់ជាទីបំផុត ខ្ញុំបាទនឹងសូមរិះគិតធ្វើតាមប្រសាសន៍លោកគ្រប់ប្រការ។ **ខុងបេង**ក៏លា**ឡៅគី**ទៅរក**ឡៅពី**ពណ៌នាសេចក្ដីឲ្យ**ឡៅពី**ស្ដាប់ តាមដែលបានណែនាំពន្យល់**ឡៅគី**នោះសព្វគ្រប់ប្រការ។

លុះវេលាព្រឹកឡើង **ឡៅគី**ក៏ចូលទៅនិយាយនឹងបិតាថា ឥឡូវ**ស៊ុនគួន**ក៏សម្លាប់**ហាងច**ស្លាប់ទៅហើយ ឯស្រុកកាំងហែក៏នៅទំនេរ ខ្ញុំបាទនឹងសូមចេញទៅ

ឈររក្សា។ **ឡៅពៀវ**នៅស្ងៀមមិនទាន់តបថាប្រការម្ដេច ក៏ឲ្យ**ឡៅពី**ទៅប្រឹក្សាជាមួយ**ឡៅគី**។

**ឡៅពី**ឆ្លើយថា ឯស្រុកកាំងហែនោះ ក៏ជាទីមាំមួនដែរ ដែល**ឡៅគី**នឹងសូមទៅឈររក្សានោះគួរណាស់ ព្រោះជាទីជាយទន្លេដែល**ស៊ុនគួន**នឹងមកបានដោយងាយ។ សូមឲ្យលោកចាត់**ឡៅគី**ទៅជួយរក្សា កុំឲ្យសឹកសត្រូវកន្លងទៅមកបាន។ ឯខាងជើងគោកជាផ្លូវ**ចូឆូ**នឹងមកនោះ ជាភ្នាក់ងារលើខ្លួនខ្ញុំបាទស្រាប់ហើយ។ **ឡៅពី**ក៏លា**ឡៅពៀវ**ទៅស្រុកស៊ិនអៀវិញ។ ខណៈនោះ **ឡៅពៀវ**ក៏ចាត់ចែងទាហានបានបីពាន់ឲ្យ**ឡៅគី**លើកចេញទៅរក្សាស្រុកកាំងហែ។

ឯ**ចូឆូ** លុះបាន**សុម៉ាអ៊ី**មកទុកជាទីប្រឹក្សា **សុម៉ាអ៊ី**នោះជាកូន**សុម៉ាហង**ចៅហ្វាយស្រុកហោឡោ។ **ចូឆូ**មានចិត្តកំរើបឲ្យនាហ្មឺនមុខមន្ត្រីនិងសេនាទាហានប្រឹក្សាថា នឹងលើកកងទ័ពទៅវាយអាណាខេត្តខាងជាយសមុទ្រ ឲ្យនៅក្នុងកណ្ដាប់ដៃយើងទាំងអស់ អ្នកទាំងពួងនឹងយល់ឃើញប្រការម្ដេច? **ហែហ៊ូទុន**ឆ្លើយថា ឥឡូវខ្ញុំបាទបានឮដំណឹងថា **ឡៅពី**នៅស្រុកស៊ិនអៀ បញ្ចុះបញ្ចូលទាហានបានច្រើន ហើយហ្វឹកហាត់ឲ្យស្ទាញស្ទាត់ចំណានគ្រប់ខ្លួន បើនឹងបង្អង់ទុកឲ្យយូរនឹងកម្ចាត់**ឡៅពី**ចេញដោយកម្រណាស់ សូមឲ្យលោកចាត់កងទ័ពទៅវាយស្រុកស៊ិនអៀជាមុន ហើយសឹមគិតការតទៅទៀត។ **ចូឆូ**យល់ឃើញត្រូវ ទើបប្រើ**ហែហ៊ូទុន**ជាមេកងទ័ពធំ ឲ្យ**លីទៀន, អ៊ីគឹម, ហែហ៊ូអាន**និង**ហាន់ហោ**នាយទាហានទាំងបួននេះជាបាឡាត់ទ័ព លើកពលដប់ម៉ឺនទៅវាយស្រុកស៊ិនអៀ។ **ឈីស៊ី**និយាយនឹង**ហែហ៊ូទុន**ទុកថា អ្នកនឹងលើកទ័ពទៅគ្រានេះ កុំប្រមាថមើលងាយ**ឡៅពី** ព្រោះ**ឡៅពី**បាន**ខុងបេង**មកទុកជាទីប្រឹក្សា ឧបមាដូចខ្លាដ៏សាហាវនៅក្នុងព្រៃធំ អ្នកចូររវាំងខ្លួនឲ្យល្អចុះ។

**ចូឆូ**ឮដូច្នោះក៏មានសេចក្ដីសង្ស័យ ទើបសួរថា **ខុងបេង**នោះគឺនរណាអេះ? **ឈីស៊ី**ឆ្លើយថា **ខុងបេង**នោះមានតម្រិះប្រាជ្ញាណាស់ ក្នុងការអាកាសនិងក្រោមដី ក៏ដឹងយល់ស្គាល់បានទាំងអស់ ស្មើទេវតាបញ្ចូលចិត្ត។ **ចូឆូ**សួរថា **ខុងបេង**មានតម្រិះប្រាជ្ញានោះ នឹងប្រៀបប្រហែលខ្លួនអ្នក តើនរណានឹងមានប្រៀបជាងគ្នា។ **ឈីស៊ី**តបថា ឯសេចក្ដីត្រិះរិះ និងគំនិតប្រាជ្ញារបស់ខ្ញុំបាទនេះ ឧបមាបីដូចអំពិលអំពែក ឯតម្រិះប្រាជ្ញា**ខុងបេង**ប្រហែលពន្លឺព្រះចន្ទ្រ។

**ហែហ៊ូទុន**បានឮដូច្នោះក៏អស់សំណើច ហើយជម្រាបទៅ**ចូឆូ**ថា **ឈីស៊ី**ក្លែងលើកតម្កើង**ខុងបេង** ប្រាថ្នានឹងឲ្យលោកកោតញញើតទេ ខ្ញុំបាទលើកទ័ពទៅគ្រានេះ នឹងចាប់ខ្លួន**ឡៅពី** និង**ខុងបេង**ឲ្យបានមក បើមិនបានពិតដូចមាត់ថា សូមឲ្យលោកកាត់ក្បាលខ្ញុំបាទជាជំនួសចុះ។ **ចូឆូ**ថា បើអ្នកលើកទ័ពទៅវាយស្រុកស៊ិនអៀនោះ ទោះបានការ មិនបានការប្រការម្ដេច ចូរមកសុំសំបុត្រតាមខរាជការមកដល់យើងឲ្យរឿយៗ។ **ហែហ៊ូទុន**ទទួលពាក្យ ហើយក៏លាចេញទៅចាត់ចែងទាហានទាំងពួងតាមក្បួនទ័ព លុះរៀបរួចហើយក៏លើកចេញចាកក្រុងហ៊ូតោទៅ។

ឯ**ឡៅពី**តាំងពីបាន**ខុងបេង**មកទុក ក៏ប្រតិបត្តិជាគ្រូអាចារ្យគ្រប់វេលាមិនដែលដាច់ **គួនអ៊ូ, តៀវហ៊ុយ**ឃើញដូច្នោះ ក៏មានសេចក្ដីទាស់តូចចិត្តនិយាយនឹង**ឡៅពី**ថា **ខុងបេង**មានអាយុ២៧ឆ្នាំ ក្មេងជាងលោកច្រើនណាស់ ហើយនៅមិនទាន់ដឹងប្រាកដជាមានតម្រិះប្រាជ្ញាយ៉ាងណា ហេតុម្ដេចក៏លោកមកគោរពប្រណិប័តន៍ស្មើគ្រូអាចារ្យធំដូច្នេះ? **ឡៅពី**តបថា ខ្លួនយើងនេះមានឧបមាដូចត្រីននៀលទៅលើគោក ដែលបាន**ខុងបេង**មកទុក បីដូចយើងននៀលចុះទៅដល់ទឹកបាន បើចៅទាំងពីរមិនដឹងក៏កុំអាលនិយាយថាអ្វីឡើយ ប្រសិនបើដឹងដល់**ខុងបេង**ហើយ ក៏នឹងមានសេចក្ដីតូចចិត្ត ទទួលមានគេយករោមចាមរីមកជូន**ឡៅពី**ដោតម្ជុកលេង **ខុងបេង**

ដើរចូលមកឃើញ**ឡៅពី**អង្គុយដោតរោមចាមរីដូច្នោះ ក៏ខឹងណាស់ទើបថា ការដែលនឹងការពាររក្សាខ្លួនមិនគិតរវាំងរក្សា លោកមកអង្គុយដោតរោមចាមរីលេងដូច្នោះមិនគួរសោះ។

**ឡៅពី**បានឮដូច្នោះក៏បោះម្ជុលចេញហើយគំនាប់**ខុងបេង**ថា ខ្ញុំមិនសប្បាយចិត្តទើបយករោមចាមរីមកដោតមួយលេង ប្រាថ្នានឹងឲ្យល្ហែសេចក្តីទោមនស្សជាទុក្ខ។ **ខុងបេង**ថា សព្វថ្ងៃនេះ ទាហានយើងមានប្រហែលមួយម៉ឺនប្លាយ ដែលលោកនឹងនៅស្ងៀមមិនខំរិះគិតការពាររក្សាខ្លួនយ៉ាងនេះ ប្រសិនបើ**ចូឆ្វូ**លើកទ័ពមក លោកនឹងរិះគិតប្រការម្តេច? **ឡៅពី**តបថា សព្វថ្ងៃនេះ ខ្ញុំក៏គិតវិតក្កទុក្ខព្រួយពេកណាស់ បើលោកនឹងឲ្យរិះគិតការពារយ៉ាងណា ក៏សូមឲ្យជួយពន្យល់មកចុះ។ **ខុងបេង**ថា ឥឡូវទាហានយើងក៏តិចពេកណាស់ ឲ្យលោកខំបញ្ចុះបញ្ចូលមនុស្សឲ្យចូលមកធ្វើទាហានឲ្យច្រើនឡើងទៀត ប្រសិនកងទ័ព**ចូឆ្វូ**លើកមក ខ្ញុំបាទនឹងទទួលចាត់ចែងតស៊ូនឹង**ចូឆ្វូ**មិនឲ្យថ្លោះការ។

**ឡៅពី**ឮហើយ ក៏ឲ្យបញ្ចុះបញ្ចូលទាហានថ្មីបានបីពាន់នាក់ បញ្ចូលគ្នានឹងទាហានចាស់ហើយ ក៏ប្រគល់ឲ្យ**ខុងបេង**ហ្វឹកហាត់មិនដាច់មួយវេលា។ ខណៈនោះឮដំណឹងថា **ហែហ៊្វូទុន**លើកពលដប់ម៉ឺនចេញពីស្រុកហ៊្វូតោ នឹងមកវាយយកស្រុកស៊ិនអៀ **តៀវហ៊ុយ**ក៏និយាយនឹង**គួនអ៊ូ**ថា កងទ័ព**ហែហ៊្វូទុន**លើកមកគ្រានេះ យើងធ្វើជាស្ងៀមសិន ឲ្យ**ខុងបេង**រិះគិតចេញច្បាំងចុះ ល្បងថ្វីដៃនិងស្មារតីប្រាជ្ញាដែលចេះដឹងម្តងមើល ឲ្យជាក់ច្បាស់នឹងភ្នែកជាល្អ ឬអាក្រក់។ **ឡៅពី**ទើបឲ្យអញ្ជើញ**ខុងបេង**មកប្រឹក្សាថា ឥឡូវកងទ័ព**ចូឆ្វូ**លើកមកហើយ លោកនឹងរិះគិតប្រការម្តេច? **ខុងបេង**ឆ្លើយថា ដែលកងទ័ព**ចូឆ្វូ**លើកមកមិនមែនជាអ្វីទេ ល្មមនឹងរិះគិតកែខៃយកជ័យជម្នះបាន។ តែប្អូនលោកទាំងពីរនោះចិត្តរឹងរូសណាស់ មិនបានជឿស្តាប់រាប់

អានក្នុងពាក្យសម្ដីរបស់ខ្ញុំបាទសោះ ប្រសិនបើលោកនឹងឲ្យខ្ញុំចាត់ចែងតស៊ូនឹងកងទ័ព**ចូឆ្វ**គ្រានេះ ខ្ញុំបាទត្រូវសូមគ្របី និងត្រាអាជ្ញាសិទ្ធិទុកនៅក្នុងខ្លួន នឹងបានបង្គាប់បញ្ជាសេនាទាហានទាំងពួងឲ្យសិទ្ធិដាច់អហង្ការ។ **ឡៅពី**ឮដូច្នោះក៏ប្រគល់គ្របី និងត្រាអាជ្ញាសិទ្ធិឲ្យ**ខុងបេង**ហើយពន្យល់ថា បណ្ដាពួកទាហានទាំងអស់គ្នា ទាំងធំទាំងតូចត្រូវនៅក្រោមបង្គាប់ ស្ដាប់បញ្ជាការ**ខុងបេង**ទាំងអស់។ បើអ្នកឯណារឹងទទឹងមិនព្រមធ្វើតាមពាក្យ**ខុងបេង**ទេ ត្រូវឲ្យ**ខុងបេង**កាត់ក្បាលចេញ។ **តៀវហ៊ុយ**ឮ**ឡៅពី**ផ្ទុកការស្រេចដាច់ខាតដូច្នោះ ក៏និយាយនឹង**គួនអ៊ូ**ថា ឥឡូវបងយើងឲ្យអាជ្ញាសិទ្ធិទៅ**ខុងបេង**ហើយ ប្រសិនបើ**ខុងបេង**បង្គាប់បញ្ជាកិច្ចការអ្វី យើងកុំគប្បីរឹងទទឹងសិនចុះ ចូរធ្វើតាមល្បងមើលមួយគ្រាសិន នឹងបានឃើញគំនិតប្រាជ្ញា**ខុងបេង**។

ឯ**ខុងបេង**ក៏និយាយនឹងសេនាទាហានទាំងពួងថា តំបន់វាលកុកបេងក្នុងដែនស្រុកស៊ិនអៀនេះជាទីចំណាប់ចំនួនណាស់ មានភ្នំអ៊ីសាន់នៅខាងស្ដាំ ព្រៃអានលឹមនៅខាងឆ្វេង មុខជាយើងនឹងបង្កប់ទាហានបាន។ **ខុងបេង**ក៏ឲ្យមានសំបុត្រទៅ**ជូឡុង**មកពីស្រុកហ៊្វិនសៀ ហើយទើបចាត់ប្រើ**គួនអ៊ូ, តៀវហ៊ុយ**លើកទាហានម្នាក់មួយពាន់ ឲ្យ**គួនអ៊ូ**លើកទៅពួនបង្កប់នៅភ្នំអ៊ីសាន់ ឲ្យ**តៀវហ៊ុយ**លើកទៅពួនបង្កប់នៅព្រៃអានលឹម ហើយផ្ដាំផ្ដាច់ថា បើឃើញកងទ័ព**ហែហ៊្វូទុន**លើកមកហើយ អ្នកទាំងពីរសំងំទាហានទុកកុំអាលលើកចេញមកវាយសិន បណ្ដោយឲ្យកងទ័ពកន្លងហួសចូលមក បើឃើញពន្លឺភ្លើងខាងទិសទក្សិណកាលណា សឹមឲ្យលើកទាហានចេញមកវាយខ្ទប់ទាំងសងខាងកាត់កន្ទុយទ័ព ហើយដុតបំផ្លាញស្បៀងអាហារឲ្យបាន។ ចាត់**គួនបេង** និង**ឡៅហង**ពីរនាក់លើកទាហានប្រាំរយមានគប់ភ្លើងគ្រប់ដៃឲ្យទៅពួនបង្កប់នៅចុងវាលកុកបេង ហើយកំណត់ថា បើឃើញ**ហែហ៊្វូទុន**លើក

ទាហានមកដល់ទីនោះហើយ ពេលយាមមួយឲ្យអុជភ្លើងឲ្យឆេះឡើង។ ចាត់ឲ្យ**ជូឡុង**លើកទាហានចេញទៅជាកងមុខ ហើយបង្គាប់ថា អ្នកឯងត្រូវច្បាំងតដៃនឹង**ហែហ៊្វូទុន**ចុះ។ រួច**ខុងបេង**កំជាប់ថា ដែលពាក្យយើងបង្គាប់ទាំងអស់នេះ អ្នកទាំងអស់គ្នាកុំបីធ្វើល្មើស ចូរទទួលធ្វើតាមពាក្យយើងគ្រប់ប្រការ ហើយឲ្យ**ឡៅពី**លើកទាហានទៅដាក់ជាជំនួយពីក្រោយ**ជូឡុង**។

**គួនអ៊ូ**ក៏សួរ**ខុងបេង**ថា លោកចាត់ចែងយើងរាល់គ្នាឲ្យលើកទៅធ្វើការសព្វគ្រប់ដូច្នេះក៏ជាការប្រពៃណាស់ហើយ ចុះខ្លួនលោកនឹងត្រូវធ្វើអ្វីទៅវិញលោក? **ខុងបេង**ឆ្លើយប្រាប់**គួនអ៊ូ**ថា អ្នកទាំងអស់គ្នាលើកទ័ពទៅហើយ យើងត្រូវនៅរក្សាស្រុក។ **តៀវហ៊ុយ**ទះដៃសើចហើយថា ដែលលោកមានប្រសាសន៍ដូច្នេះ ក៏ឃើញថាលោកមានតម្រិះប្រាជ្ញាមែន គិតយកសុខតែខ្លួនឯង ឯយើងរាល់គ្នាត្រូវចេញទៅតស៊ូនឹងសេចក្ដីស្លាប់។ លោកចូរនៅរក្សាស្រុកតែងតុពិសាក្រយាលេងឲ្យសប្បាយចិត្តចុះ។

**ខុងបេង**ថា ឥឡូវ**ឡៅពី**បានអាជ្ញាសិទ្ធិគ្រប់នៅនឹងដៃយើងហើយ បើអ្នករាល់គ្នាមកធ្វើព្រងើយកន្តើយរឹងទទឹងនឹងអាជ្ញាដែលយើងបង្គាប់ដូច្នេះ ក៏មិនបាន បើយើងមិនធ្វើតាមអាជ្ញាសិទ្ធិជាពិតប្រាកដទេ ដំណទៅមុខនរណានឹងបង្គាប់បញ្ជាទាហានបាន ត្រូវតែខូចអសារទៅឯង។

**ឡៅពី**ឆ្លើយតបទៅ**គួនអ៊ូ, តៀវហ៊ុយ**ថា អ្នកទាំងពីរមិនដឹងឬថា អ្នកមានតម្រិះប្រាជ្ញានោះ ទោះបីនឹងដេកអង្គុយធ្មេចភ្នែកនៅក្នុងផ្ទះ មិនបានឃើញកិច្ចការឯណាក្តី ក៏អាចនឹងគិតយកជ័យជម្នះដល់សឹកសត្រូវរយពាន់បាន។ ប្អូនយើងទាំងពីរកុំអាលរឹងទទឹង**ខុងបេង**ឡើយ។ **គួនអ៊ូ**បានឮដូច្នោះហើយ ក៏និយាយនឹង**តៀវហ៊ុយ**ថា បើយើងរឹងទទឹងក្នុងគ្រានេះ ក៏នឹងទាស់ចិត្តបងយើង ៗត្រូវធ្វើតាមពាក្យ**ខុងបេង**ទៅ

ចុះ បើមិនសមប្រកបដូចគំនិតប្រាជ្ញាដែលចាត់ការនេះទេ តទៅមុខសឹមបន្ទោសតាមចិត្តយើងចុះ។ **គួនអ៊ូ, តៀវហ៊ុយ**ក៏លាទៅកាន់ទីលំនៅរៀងខ្លួន។

**ខុងបេង**និយាយនឹង**ឡៅពី**ថា វេលាព្រឹកនេះ កងទ័ព**ហែហ៊្វូទុន**នឹងលើកមកដល់ហើយ សូមឲ្យលោកលើកទាហានយើងទៅតាំងនៅជាកងជំនួយ**ជូឡុង**នៅជើងភ្នំអ៊ីសាន់ចុះ ខ្ញុំបាទនិង**ប៊ីតុក** និង**ប៊ីហាង**នឹងភ្ជុំទាហាននៅរក្សាស្រុក ហើយនឹងតែងតុឲ្យ**ស៊ុនខៀន**និង**កាន់យ៉ុង**លើកចេញទៅទទួលលោកនៅកណ្ដាលផ្លូវ ឲ្យទាហានស៊ីលៀងលេងសប្បាយចិត្ត។ **ឡៅពីឮខុងបេង**ថាដូច្នោះ ក៏លើកទ័ពចេញទៅ តែថានៅមិនអស់សង្ស័យជឿចុះជាប្រាកដ។

ឯកងទ័ព**ហែហ៊្វូទុន**លើកមកជិតដល់វាលកុកបេងហើយ ក៏ចាត់ចែងពលទាហានទាំងពួងលើកមកជាលំដាប់គ្នា ឲ្យពលស្បៀងលើកតាមមកជាក្រោយទទួលពេលព្រលប់ទើបដល់វាលកុកបេង ក្រឡេកទៅមុខឃើញផង់ធូលីហុយទ្រលោមដូចផ្សែងលើអាកាស ទើបឲ្យឈប់កងទ័ពស្ដាប់ការ ហើយឲ្យ**អ៊ីគឹម**ឃុំរក្សាទាហាន ឯ**ហែហ៊្វូទុន**ក៏បរសេះស្រូតចេញទៅខាងមុខ ក្រឡេកឃើញកងទ័ព**ជូឡុង**លើកមក**ហែហ៊្វូទុន**ក៏អស់សំណើច។ ទាហានទាំងពួងសួរថា ហេតុម្ដេចបានជាលោកសើច? **ហែហ៊្វូទុន**ឆ្លើយថា យើងគិតដល់ពាក្យ**ឈីស៊ី**អួតសរសើរតម្រិះប្រាជ្ញា**ខុងបេង** នៅចំពោះមុខមហាឧបរាជ យើងក៏បានឮដែរក្នុងថ្ងៃនោះ ថាបីដូចជាដឹងយល់ស្គាល់រហូតទៅក្នុងអាកាសនិងក្រោមផែនដី។ ឥឡូវយើងឃើញបែប**ខុងបេង**រៀបរបៀបកងទ័ព លើកមកប្រហែលនឹងទារក ដែលល្ងង់គ្មានប្រាជ្ញាសោះ ពុំនោះបីដូចគេដេញហ្វូងម្រឹកឲ្យរត់ចូលទៅក្នុងមាត់ខ្លា។ ពាក្យដែលយើងបានពោលទុកនឹងមហាឧបរាជថា នឹងចាប់យកខ្លួន**ឡៅពី**និង**ខុងបេង**ឲ្យបាននោះ ឃើញនឹងសមប្រកបរបស់យើងគ្រានេះជាប្រាកដហើយ។ **ហែហ៊្វូទុន**ក៏បរពលស្រូតលើកចូលទៅ។

ឯ**ជូឡុង**ឃើញដូច្នោះ ក៏បរសេះស្ទុះចេញមកមុខទាហានទាំងពួង **ហៃហ្ស៊ូទុន**ស្រែកជេរថា ឯងនេះឆោតល្ងង់គ្មានប្រាជ្ញាសោះ មកនៅជាទាហាន**ឡៅពី**បីដូចជាខ្មោចដាច់សង្វែង ស្វែងរកស៊ីតែគ្រឿងសំណែនដែលគេសែនស្ទើរអត់ស្ទើរឃ្លាន។ **ជូឡុង**ឮដូច្នោះក៏ខឹងណាស់ បរសេះចូលប្រយុទ្ធគ្នានឹង**ហៃហ្ស៊ូទុន**បានប្រហែលប្រាំភ្លែង ក៏ធ្វើជាទាញសេះថយក្រោយ នាំទាហានទាំងពួងរត់ថយទៅ។ **ហៃហ្ស៊ូទុន**បានចំណាប់ក៏ដេញប្រផាប់ចូលទៅ ចម្ងាយផ្លូវប្រហែលប្រាំរយសិន (២០ គ.ម) **ហាន់ហោ**ក៏បរសេះទៅស្កាក់ពីមុខ**ហៃហ្ស៊ូទុន**ហើយឃាត់ថា សូមឲ្យលោករង់បង្អង់ឈប់នៅទីនេះសិនចុះ ព្រោះ**ជូឡុង**នោះមានថ្វីដៃខ្លាំងពូកែណាស់ តស៊ូនឹងលោកមិនទាន់នឿយហត់ប៉ុន្មាន ញាក់សេះរត់ចេញដូច្នោះជាការប្លែកពេកណាស់ មុខជាធ្វើកលឧបាយបង្កប់ទាហានទុកចាំវាយខ្ទប់ប្រសព្វយកជ័យជម្នះលោកទេដឹង? **ហៃហ្ស៊ូទុន**ឆ្លើយថា ទោះបីជា**ជូឡុង**នឹងធ្វើកលបង្កប់ទាហានទុកប៉ុន្មានអន្លើក្ដី យើងក៏មិនត្រូវញញើតខ្លាច។ **ហៃហ្ស៊ូទុន**ក៏បរសេះនាំទាហានស្រូតទៅ ចម្ងាយផ្លូវប្រហែលហាសិបសិនទៀត (២ គ.ម)។

**ឡៅពី**ឃើញ**ហៃហ្ស៊ូទុន**លើកទាហានជាប់តាមមកជិតនឹងទាន់**ជូឡុង**ដូច្នោះ ក៏ឲ្យអុជផាវជាសញ្ញាឡើង ហើយក៏លើកទ័ពជំនួយចូលទៅជួយបំពេញទាហាន**ជូឡុង**ទៀត។ ខណៈនោះ**ហៃហ្ស៊ូទុន**ឃើញកងទ័ព**ឡៅពី**លើកកងទ័ពជំនួយមកដូច្នោះ ក៏អស់សំណើច ហើយប្រាប់**ហាន់ហោ**ថា **ខុងបេង**រៀបរបៀបកងទ័ពបង្កប់ទុកដូច្នេះអ្នកឃើញហើយឬ? មុខគួរឲ្យខ្លាចណាស់ណា ពេលនេះយើងត្រូវស្រូតលើកទៅជាន់សង្កត់ស្រុកស៊ិនអៀឲ្យបាន បើមិនបានយើងក៏មិនសូមត្រឡប់ទៅឲ្យមហាឧបរាជឃើញមុខឡើយ។ ហើយ**ហៃហ្ស៊ូទុន**ក៏បរពលស្រូតរុកទម្លាយចូលទៅទៀត។

**ឡៅពី**និង**ជូឡុង**ក៏មិនបានតស៊ូ ធ្វើជារត់ថយត្រឡប់ទៅក្រោយវិញ។ ប្រហែលចូលក្នុងយាមបីប្លាយ កើតព្យុះខ្យល់ងងឹតមេឃដូចជានឹងធ្លាក់ភ្លៀង។

ឯ**អ៊ីគឹម**និង**លីទៀន** ដែលឃុំនាំស្បៀងលើកតាម**ហែហ៊្វូទុន**មកជាក្រោយនោះ **លីទៀន**ក៏ប្រឹក្សាគ្នាថា ឥឡូវកងទ័ពនាយយើងលើកកន្លងហួសចូលទៅក្នុងដែនស្រុកស៊ិនអៀហើយ ពេលនេះក៏យប់ងងឹត ផ្លូវនឹងដើរទៅក៏លំបាកមិនស្រួលសោះ សុទ្ធតែលុយភក់លុយល្បាប់ដូច្នោះ បើសឹកសត្រូវលបមកដុតភ្លើងឲ្យឆេះពីក្រោយយើង ៗ នឹងមិននាំគ្នាស្លាប់ទាំងអស់ទេឬ? **អ៊ីគឹម**ឆ្លើយតបទៅ**លីទៀន**វិញថា អ្នកនិយាយនេះត្រូវណាស់ បើដូច្នោះអ្នកចូរនាំអ្នករែកសែងស្បៀងឲ្យឈប់នៅទីនេះសិន ខ្លួនខ្ញុំនឹងស្រូតទៅតាមឃាត់**ហែហ៊្វូទុន**កុំឲ្យចូលទៅ។ **លីទៀន**យល់ឃើញត្រូវ ក៏ឃាត់ទាហានដែលរែកសែងទាំងអស់គ្នាឲ្យឈប់បង្អង់។ **អ៊ីគឹម**ក៏បរសេះស្រូតទៅទាន់**ហែហ៊្វូទុន**ហើយឃាត់ថា លោកលើកពលទាហានរំលងដែនចូលមកក្នុងស្រុកស៊ិនអៀហើយដូច្នេះ ពេលនេះជាយប់អាធ្រាត្រស្ងាត់នឹងរកផ្លូវដើរពុំឃើញ លំបាកណាស់ ច្រកម្ខាងមានភ្នំ ម្ខាងមានព្រៃស្តុក ប្រសិនបើមានសឹកសត្រូវនៅពួនបង្កប់លបដុតភ្លើង យើងក៏នឹងថ្លោះការមិនខាន សូមឲ្យលោកបញ្ឈប់ទ័ពនៅទីនេះសិន។

**ហែហ៊្វូទុន**បានឮដូច្នោះ ក៏ភ័យស្តុតស្មារតីនឹករឭកឃើញត្រូវ ទើបឲ្យឈប់ទ័ពនៅទីនោះ ខណៈនោះ**ឡៅហង** និង**គួនបេង** ដែលលើកទាហានម្នាក់ប្រាំរយនាក់ទៅសងខាងផ្លូវនោះ ក៏អុជភ្លើងឆេះឡើង ឯ**គួនអ៊ូ**ដែលលើកទាហានទៅបង្កប់នៅពីក្រោយ ឃើញពន្លឺភ្លើងពីទិសទាំងបួនដូច្នោះ ព្រោះកម្លាំងខ្យល់ព្យុះខ្លាំង ក៏ស្រែកហ៊ោលើកទាហានចេញមករុកបំពានចូលទៅ ទាហាន**ហែហ៊្វូទុន**ក៏តក់ស្លុតទាំងអស់គ្នារត់បាក់បែកជាន់គ្នាស្លាប់ជាច្រឡំបល់ ខ្លះរត់ចេញពីភ្លើងមិនទាន់ក៏ឆេះរោលស្លាប់រាប់តែស្លាប់ក្នុងភ្លើងនោះច្រើនណាស់។ **ជូឡុង**ឃើញបានចំណាប់ ក៏ដេញទាហាន

ត្រឡប់ចូលមកវិញ **ហែហ្ស៊ូទុន**ផ្ដោះការ នឹងមកតស៊ូវិញក៏មិនទាន់ ទើបបរសេះស្ទុះពារទម្លាយថយទៅ ឯ**លីទៀន**ដែលនាំស្បៀងជាកងក្រោយ ក្រឡេកឃើញ**គួនអ៊ូ**តាមវាយខ្ទប់មកពីក្រោយក៏បានតស៊ូជាយូរណាស់ ប៉ះកម្លាំងមិនបានក៏បរសេះថយរត់ទៅ។

**ហែហ្ស៊ូអាន** និង**ហាន់ហោ**ដែលនៅក្នុងកងមុខ ក៏ញាក់សេះវិលត្រឡប់មកក្រោយប្រាថ្នានឹងជួយការពារស្បៀងឲ្យផុតពីភ្លើង ទទួលឃើញ**តៀវហ៊ុយ**យកទួនចាក់**ហែហ្ស៊ូអាន**ធ្លាក់ពីលើសេះស្លាប់ **ហាន់ហោ**យល់ថានឹងតទល់ពុំបាន ក៏ញាក់សេះវេះរត់ចេញទៅ ឯពលទាហានខាង**ឡៅពី**ក៏លើកគ្នាដេញចាក់កាប់សម្លាប់ទាហាន**ហែហ្ស៊ូទុន** ក្នុងពេលយប់នោះឈាមហូរបែកពពុះពេញទាំងព្រៃដីវាល ខ្មោចក៏ស្លាប់ដូចគេក្រាលគរលើគ្នា បីដូចគំនរឈើឧស លុះព្រឹកភ្លឺស្វាង**ហែហ្ស៊ូទុន**បានទាហានដែលនៅសល់ពីស្លាប់បែកទៅនោះ ក៏នាំគ្នាលើកត្រឡប់ទៅស្រុកហ្ស៊ូតោវិញ ឯ**គួនអ៊ូ, តៀវហ៊ុយ, ជូឡុង** លុះមានជ័យជម្នះ**ហែហ្ស៊ូទុន**ដូច្នោះ ក៏នាំគ្នាកោតសរសើរតម្រិះប្រាជ្ញា**ខុងបេង**ថា ចេះរិះគិតប្រាកដពិតមែនហើយ។

ឯ**ខុងបេង**លុះព្រឹកព្រាងស្វាងព្រះសុរិយា ក៏តែងខ្លួនយ៉ាងសុភាពឡើងជិះរទេះតូចទាបមួយ ហើយនាំទាហានឲ្យរែកសែងតុតាំង នឹងគ្រឿងអាហារចេញមកតាម**ឡៅពី**។ លុះ**ឡៅពី, គួនអ៊ូ, តៀវហ៊ុយ, ជូឡុង**លើកទ័ពត្រឡប់មកជួបនឹង**ខុងបេង**កណ្ដាលផ្លូវ ក៏មានសេចក្ដីត្រេកអរសាទរណាស់ នាំគ្នាទាំងអស់ចូលទៅគំនាប់**ខុងបេង** ៗក៏ឲ្យរៀបចំណីអាហារឲ្យបណ្ដាពួកទាហាននោះបរិភោគទាំងអស់គ្នាជាទីសប្បាយ រួចក៏លើកត្រឡប់ចូលទៅក្នុងស្រុកស៊ិនអៀវិញ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា នូ-កន ប្រែរៀបរៀង

## កណ្ឌទី ៣៦

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡៅពី, ខុងបេង** ប្រឹក្សាគ្នា ហើយ**ហែហ៊្វូទុន**ទៅដល់**ចូឆូ** ៗលើកទោស គិតលើកទ័ពមកវាយ**ឡៅពី**ទៀត **ឡៅពៀវ**ស្លាប់ **ចូឆូ**លើកទ័ពមកវាយស្រុកស៊ិនអៀ... **ឡៅពី**រត់ចេញទៅស្រុកសុងយ៉ុង)*

**ខុងបេង**ក៏និយាយនឹង**ឡៅពី**ថា លោកមានជ័យជម្នះ**ហែហ៊្វូទុន**គ្រានេះ លោកកុំអាលត្រេកអរសប្បាយឡើយ ព្រោះខ្ញុំយល់ថា **ចូឆូ**នឹងលើកទ័ពមកទៀត តបកំហឹងនឹងសងសឹកលោកវិញជាប្រាកដ។ **ឡៅពី**ក៏សួរថា បើដូច្នោះលោកនឹងគិតប្រការម្តេចទៅទៀត? **ខុងបេង**ថា ដែលខ្ញុំរិះគិតតស៊ូនឹង**ចូឆូ**នោះ ក៏ល្មមនឹងកែខៃបានទេ តែមកឃើញថាស្រុកស៊ិនអៀនេះតូចចង្អៀតណាស់ នឹងគិតការពារបានដោយក្រ ឥឡូវ**ឡៅពៀវ**ក៏ឈឺធ្ងន់ណាស់ទៅហើយ ដើមឡើយក៏បានអនុញ្ញាតទុកថានឹងឲ្យស្រុកកេងជីវមកលោក គ្រានេះបានចម្លោះស្រួលហើយ បើប្រសិនជាលោកនឹងលើកទៅស្រុកកេងជីវគ្រានេះ ទោះបី**ចូឆូ**នឹងលើកកងទ័ពមកយ៉ាងណា ក៏នឹងរិះគិតការផ្លាស់ប្តូរតស៊ូច្បាំងបានយ៉ាងមាំ ព្រោះស្រុកកេងជីវនោះធំទូលាយស្រួលណាស់។

**ឡៅពី**តបថា លោកមានប្រសាសន៍នោះត្រូវហើយ តែថា**ឡៅពៀវ**មានឧបការនឹងខ្ញុំមកពីដើមជាច្រើន បើនឹងលើកទៅគ្រានេះ ក៏ដូចទៅដណ្តើមយកស្រុកគេនៅ។ **ខុងបេង**តបថា ដែលខ្ញុំជម្រាបមកនេះ មិនមែនឲ្យលោកទៅធ្វើអាក្រក់**ឡៅពៀវ**នោះទេ ព្រោះស្រុកកេងជីវមុខជានឹងបានមកលោកជាប្រាកដ។ ទោះបីលោកមិនលើកទៅតាមខ្ញុំជម្រាប យូរទៅក៏នឹងមានអន្តរាយ កាលណាមានហេតុ

ឡើង លោកទើបនឹងជ្រាបតាមការដែលខ្ញុំរំឭកជាពិត។ **ឡៅពី**ថា ទោះបីភ័យអន្តរាយមកដល់ខ្លួនយើងដោយប្រការម្តេចៗក្តី យើងក៏ស៊ូតែស្លាប់តាមកម្មផលដែលនឹងទៅរមិលគុណគេនោះមិនត្រូវសោះឡើយ។ **ខុងបេង**តបថា ដែលលោកមិនពេញចិត្តនឹងធ្វើការតាមខ្ញុំបាទ ក៏តាមតែអធ្យាស្រ័យលោកចុះ សឹមខ្ញុំបាទនឹងរិះគិតប្រែប្រួលទៅទៀត។

ឯ**ហៃហ៊្វទុន** លុះលើកពលទៅដល់ក្រុងហ៊្វតោ ក៏ចងខ្លួនឯងចូលទៅដល់**ចូឆ្វ** ដោយគំនាប់ថា ឥឡូវទោសខ្ញុំបាទដល់នូវសេចក្តីវិនាសជីវិតហើយ ព្រោះខ្ញុំបាទមានសេចក្តីប្រមាថមិនបានដឹងកលឧបាយ**ខុងបេង** ទើបខាតបង់ពលរេហ៍ច្រើនទាំងម៉្លេះ កាលខ្ញុំបាទនឹងលើកចូលទៅនោះក៏បានសញ្ញាទុកថា បើមិនបានខ្លួន**ឡៅពី, ខុងបេង** មកជូនលោកទេ នឹងឲ្យលោកកាត់ក្បាលខ្ញុំបាទជំនួស។ ខ្លួនខ្ញុំបាទក៏ឃើញថាខុសមែនហើយ តាមតែលោកនឹងធ្វើទោសចុះ។

**ចូឆ្វ**ឃើញ**ហៃហ៊្វទុន**ធ្វើទោសខ្លួនឯងដូច្នោះ ក៏នឹកគួរឲ្យមានចិត្តអាណិតណាស់ ទើបឲ្យស្រាយចំណងដែលចងនោះចេញហើយថា ដែលអ្នកទៅធ្វើសង្គ្រាមឲ្យថ្លោះការសឹកសត្រូវដូច្នេះ ទោសអ្នកក៏ដល់ថ្នាក់ស្លាប់ តែថាខ្លួនអ្នកមានគុណគាប់ផ្លាប់ធ្វើការសង្គ្រាមមកពីមុនជាច្រើន ទោសនោះយើងត្រូវលើកឲ្យរួចម្តងទៅចុះ។ ព្រោះធម្មតាជាតិទាហានធ្វើការសឹកសង្គ្រាម ក៏រមែងមានចាញ់មានឈ្នះជាទៀងដូច្នេះ **ហៃហ៊្វទុន**ឮដូច្នោះក៏សោមនស្សរីករាយឱនគំនាប់ហើយថា ខ្ញុំបាទលើកទ័ពទៅគ្រានេះ **អ៊ីគឹម**និង**លីទៀន**ក៏បានរំឭកដាស់តឿនស្មារតីដែរ តែខ្ញុំបាទជាមនុស្សអប្រិយរឹងរូសប្រទូសយកតែតាមអំពើចិត្តឯង ទើបថ្លោះការដូច្នេះ ព្រោះមើលងាយប្រមាថ។

**ចូឆ្វ**ឮដូច្នោះ ក៏ឲ្យបំណាចរង្វាន់ដល់**អ៊ីគឹម**និង**លីទៀន**ជាច្រើន ហើយថា សព្វថ្ងៃនេះយើងមានសេចក្ដីបរិវិតក្កណាស់ ព្រោះ**ឡៅពី**និង**ស៊ុនគួន** ពីរនាក់នេះមានកម្លាំងលើសលុប ក្រៅពីនេះយើងគ្មានព្រួយបារម្ភសោះ។ ឥឡូវនេះការសឹកសង្គ្រាមក៏បានធ្វើជាប់ដៃគ្នាមកហើយ នឹងគិតកម្ចាត់**ឡៅពី**និង**ស៊ុនគួន**ចេញឲ្យបាន ទើបផែនដីនឹងបានរាបទាបជាសុខតទៅ។ គ្រានោះ**ចូឆ្វ**ក៏ឲ្យកេណ្ឌប្រមូលទាហានបានហាសិបម៉ឺន តាំងឲ្យ**ចោយិន** និង**ចោហង**លើកពលដប់ម៉ឺនចេញទៅជាកងទីមួយ ឲ្យ**តៀវលៀវ, ទៀវខាប់** លើកពលដប់ម៉ឺនចេញទៅជាកងទីពីរ ឲ្យ**ហែហ៊ូទុន** និង**ហែហ៊ូអៀន**លើកពលដប់ម៉ឺនចេញទៅជាកងទីបី ឲ្យ**អ៊ីគឹម**និង**លីទៀន**លើកពលដប់ម៉ឺនចេញទៅជាកងទីបួន ឲ្យ**ខៅធូ**លើកពលបីពាន់ចេញទៅជាទ័ពស្រួចសម្រាប់ស៊ើបស័ព្ទស្ដាប់ការ ឯ**ចូឆ្វ**នោះលើកពលប្រាំមួយម៉ឺនជាទ័ពហ្លួង។

ខណៈកាល**ចូឆ្វ**កំពុងកេណ្ឌកងទ័ពនឹងលើកទៅ គ្រានោះព្រះចៅ**ហៀនតេ**សោយរាជសម្បត្តិបានដប់បីឆ្នាំ ជារដូវខែស្រាពណ៍ខាងខ្នើត បានឫក្សល្អនឹងឲ្យលើកកងទ័ពចេញទៅ ទទួល**ខុងយ៉ុង**ចូលមកជម្រាបថា ដែលលោកនឹងលើកកងទ័ពទៅកម្ចាត់**ឡៅពី**គ្រានេះ **ឡៅពី**ក៏ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**ជាការមិនគួរសោះឡើយ ឯ**ស៊ុនគួន**ទៀតសោតក៏បានតាំងភូមិឋានមានទាហានពលរេហ៍ជាមាំមួន ហើយមានចំណុះស្រុកសម្រាប់ឯកប្រាំមួយមណ្ឌល ពលយោធាជាច្រើន ឯផ្លូវនឹងទៅនោះក៏ឆ្ងាយដាច់ស្រយាល ដែលមហាឧបរាជនឹងលើកទៅគ្រានេះ ខ្លាចមិនបានកលការជាឱកាសល្អនឹងខូចខាតរេហ៍ពលជាច្រើន។ សូមឲ្យលោកត្រិះរិះគិតមើលតាមគួរសិនចុះ។

**ចូឆ្វ**បានឮដូច្នោះក៏ឆ្លើយតបថា ដែលអ្នកមកឃាត់យើង មិនឲ្យលើកទៅកម្ចាត់**ឡៅពី**និង**ស៊ុនគួន**នោះមិនត្រូវសោះ ព្រោះមនុស្សទាំងពីរនេះជាអកតញ្ញូ

អាក្រក់ណាស់ ថាហើយក៏បណ្ដេញ**ខុងយ៉ុង**ចេញថា អ្នកឯងកុំមកចរចាដូច្នោះតទៅទៀត បើមិនស្ដាប់ យើងនឹងកាត់ក្បាលចេញ។ **ខុងយ៉ុង**ឃើញ**ចូវឆ្វ**ខឹងបណ្ដេញដូច្នោះក៏ក្រោកចេញទៅផុតហើយដកដង្ហើមធំថា មហាឧបរាជនេះជាមនុស្សមិនតាំងនៅក្នុងសត្យសុចរិតសោះ បើទទូចតែទៅធ្វើប្រទូសអ្នកដែលត្រង់ល្អ ក៏គង់នឹងវិនាសទៅឯង។

ខណៈនោះ**ខុងស៊ី**ដែលជាទោសហរិក្ខានឹង**ខុងយ៉ុង**នោះ បានឮ**ខុងយ៉ុង**និយាយដូច្នោះក៏យកសេចក្ដីនោះទៅប្រាប់**ចូវឆ្វ**ថា **ខុងយ៉ុង**នេះជាមនុស្សមិនល្អសោះ លបនិយាយដើមពីលោកអាក្រក់ផ្សេងៗ ហើយកាលគ្រា**យីអេង**មើលងាយប្រមាថលោកនោះ ក៏ព្រោះ**ខុងយ៉ុង**ញុះញង់ឲ្យនិយាយ។ **ចូវឆ្វ**ឮដូច្នោះក៏ចូលចិត្តជឿ មានសេចក្ដីខឹងក្ដៅណាស់ ទើបប្រើទាហានទៅចាប់ខ្លួន**ខុងយ៉ុង**ប្រហារជីវិត។ មនុស្សស្និទ្ធរបស់**ខុងយ៉ុង**ឃើញដូច្នោះ ក៏រត់ទៅប្រាប់ដល់បុត្រ**ខុងយ៉ុង**ទាំងពីរនាក់ថា ឥឡូវមហាឧបរាជចាប់យកបិតាអ្នកទៅសម្លាប់ហើយ ហេតុម្ដេចអ្នកនៅលេងបាស្កាព្រងើយដូច្នេះ មិនខ្លាចស្លាប់ទេឬ បានជាមិនគិតរត់ចេញ? បុត្រ**ខុងយ៉ុង**ទាំងពីរនាក់ឆ្លើយតបថា ដែលអ្នកអាណិតនាំដំណឹងមកឲ្យយើងដឹងដូច្នេះ ជាគុណគាប់របស់អ្នកជាទម្ងន់ខ្លាំងណាស់ តែជាធម្មតាសត្វបក្សីទាំងពួង ដែលសម្រាលពងមកនៅក្នុងសំបុកហើយ បើសំបុកនោះធ្លុះធ្លាយអន្តរាយទៅវេលាណា ពងនោះក៏ត្រូវធ្លាក់បែកទៅវេលានោះ មិនអាចនឹងតាំងនៅបាន ដូចបិតាយើងដែលដល់នូវសេចក្ដីស្លាប់ដោយសារទោសគ្រានេះ ខ្លួនយើងជាបុត្រនឹងវេះរត់ឲ្យផុតទៅបាន ថាដូច្នោះមិនទាន់ផុតមាត់ ទទួលទាហាន**ចូវឆ្វ**ចូលមកព័ទ្ធជុំវិញផ្ទះ ចូលចាប់យកបុត្រ និងភរិយា**ខុងយ៉ុង**ទាំងអស់គ្នាទៅជូន**ចូវឆ្វ** ៗក៏យកទៅប្រហារជីវិតអស់គ្មានសល់ ហើយឲ្យ

យកសព**ខុងយ៉ុង**ទៅដោតផ្កាលនៅផ្លូវបំបែក មិនឲ្យមនុស្សទាំងពួងយកជាតួយ៉ាងតទៅទៀត។

ខណៈនោះ**ឈើស៊ិប** ដែលជាសម្លាញ់គ្នានឹង**ខុងយ៉ុង** ដឹងថា**ចូឆូ**ឲ្យយកសព**ខុងយ៉ុង**ទៅផ្កាលដូច្នោះ ក៏ដើរទៅមើលឃើញសពហើយក៏ឱបទួញយំអាណិត មានមនុស្សឃើញក៏ទៅប្រាប់**ចូឆូ** ៗខឹងណាស់បង្គាប់ទាហានឲ្យទៅចាប់យកខ្លួន**ឈើស៊ិប**ទៅសម្លាប់ចេញទៀត។ **ស៊ុនហុក**ក៏និយាយនឹង**ចូឆូ**ថា ដែលលោកនឹងឲ្យយកខ្លួន**ឈើស៊ិប**ទៅសម្លាប់ទៀតនោះមិនគួរទេ ព្រោះ**ឈើស៊ិប**នេះជាមនុស្សស្រឡាញ់រាប់អាននឹង**ខុងយ៉ុង**ក៏មែន តែថានឹងបានដឹងឃើញចិត្តជាមួយផងនឹង**ខុងយ៉ុង**ក៏ទេ ពីដើមក៏បាននិយាយរំឭក**ខុងយ៉ុង**ថា ខ្លួន**ខុងយ៉ុង**ជាមនុស្សអាក្រក់កាចសាហាវគ្មានអធ្យាស្រ័យសោះ បើប្រព្រឹត្តដូច្នេះយូរទៅ នឹងមានភ័យដល់ខ្លួន **ឈើស៊ិប**និយាយដូច្នោះ ខ្ញុំបាទក៏បានឮនឹងត្រចៀក ដែលមកទួញយំអាឡោះអាល័យ**ខុងយ៉ុង**នោះ ព្រោះគិតថាជាមិត្តភក្តិនឹងគ្នា។ **ចូឆូ**បានស្តាប់ក៏រសាយកំហឹង ទើបឲ្យ**ឈើស៊ិប**យកសព**ខុងយ៉ុង**ទៅបញ្ចុះតាមត្រូវការ។ លុះ**ចូឆូ**សម្លាប់**ខុងយ៉ុង**ចេញដូច្នោះហើយ ក៏ចាត់**ស៊ុនហុក**ទៅរក្សាស្រុកហ៊ូតោ ហើយលើកពលហាសិបម៉ឺនទៅវាយស្រុកស៊ិនអៀ។ ទទួល**ឡៅពៀវ**ចៅហ្វាយស្រុកកេងជីវឈឺធ្ងន់ថែមម្តងទៀត ក៏ឲ្យហៅ**ឡៅពី**ចូលទៅប្រាថ្នានឹងផ្ដែផ្ដាំផ្ញើការរាជការទាំងពួង។ **ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**ក៏នាំគ្នាទៅរក**ឡៅពៀវ**ឯស្រុកកេងជីវ។

**ឡៅពៀវ**ឃើញមុខ**ឡៅពី**ត្រេកអរណាស់ ក៏និយាយថា ខ្លួនយើងសព្វថ្ងៃនេះដូចដើមឈើក្បែរច្រាំងរាប់ថ្ងៃខែតែនឹងរលំចុះ ដែលយើងឲ្យហៅប្អូនមកនេះ ប្រាថ្នានឹងផ្ញើស្រុកកេងជីវឲ្យប្អូន ព្រោះកូនបងទាំងពីរនាក់មានតម្រិះប្រាជ្ញាខ្សោយណាស់ ប្រសិនបើបងអស់បុណ្យវាសនាហើយ កូននោះនឹងរក្សាស្រុកទេសបានដោយក្រក្រៃ

ពេកណាស់ ខ្លួនប្អូនជាចាស់ មានតម្រិះប្រាជ្ញា ចូរជួយរក្សាស្រុកទេសកុំឲ្យអន្តរាយបានទៅអ្នកដទៃឡើយ។

**ឡៅពី**បានស្តាប់ក៏ឱនគំនាប់ ហើយយំសោកាប្រាប់ថា ខ្លួនខ្ញុំបាទសព្វថ្ងៃនេះមានសេចក្តីសុចរិតត្រង់នឹងលោកដោយផ្លូវកតញ្ញូ មិនមានប្រាថ្នាការអ្វីសោះ ទោះបីលោកអស់បុណ្យទៅហើយក្តី ខ្ញុំបាទនឹងជួយទំនុកបម្រុងកូនលោកទាំងពីរតទៅ។ កាល**ឡៅពៀវ**និយាយផ្តែផ្តាំគ្នានឹង**ឡៅពី**មិនទាន់ផុតមាត់ មានបម្រើសេះម្នាក់ចូលមកជម្រាបថា កងទ័ព**ចូឆូ**លើកមកដល់ហើយ។ **ឡៅពី**ក៏លានាំ**គួនអ៊ូ, តៀវហ៊ុយ**ត្រឡប់ទៅស្រុកស៊ិនអៀវិញ។

ឯ**ឡៅពៀវ**បានឮដំណឹងសឹកសង្គ្រាមមកដល់ដូច្នោះ ក៏រឹតតែតក់ស្លុតខ្លាំងឡើងទៀត ជំងឺនោះក៏កាន់តែធ្ងន់ចុះ កាល**ឡៅពៀវ**ចរចាផ្តែផ្តាំ**ឡៅពី**នោះ នាង**ឈួហ៊ូយិន**ជាភរិយា**ឡៅពៀវ**លបស្តាប់ដឹងទាំងអស់ ក៏នឹកខឹងខ្លាំងណាថា **ឡៅពៀវ**ស្រឡាញ់រាប់អាន**ឡៅពី**ច្រើន នឹងលើកស្រុកទេសប្រគល់ឲ្យ**ឡៅពី** មិនមានសេចក្តីអាណិតដល់បុត្ររបស់ខ្លួន ទើបឲ្យ**ឈួម៉** និង**ទៀវអ៊ុន**ទាំងពីរនាក់ជាទីទុកចិត្ត ឲ្យនៅរក្សាទ្វារផ្ទះ កំជាប់ត្រួតត្រាមិនឲ្យនរណាប្លែកចូលចេញបាន។

ឯ**ឡៅគី**ជាបុត្រ**ឡៅពៀវ** ដែលនៅឈរស្រុកកាំងហែនោះ លុះឮថាបិតាឈឺធ្ងន់ក៏ស្រូតរូតទៅសួរ លុះឡើងទៅដល់មាត់ទ្វារ **ឈួម៉, ទៀវអ៊ុន**ឃាត់ហាមមិនឲ្យ**ឡៅគី**ចូលទៅជួប ថាខ្លួនអ្នកនេះបិតាប្រើឲ្យទៅឈររក្សាស្រុកកាំងហែហើយ មិនបានហៅឲ្យមកទេ ដែលអ្នកមកចោលទីកន្លែងដូច្នេះ ប្រសិនបើ**ស៊ុនគួន**នឹងលើកទ័ពមកវាយយកស្រុកកាំងហែនោះជាអសារឥតការ។ មួយទៀតបិតាអ្នកឈឺធ្ងន់ បើអ្នកនឹងចូលទៅឥឡូវនេះ ក៏ឃើញថាបិតាអ្នកនឹងខឹងថាលះបង់ទីកន្លែង រោគនោះក៏នឹងជាស្តែងឡើងទៀតលើសកម្លាំង គង់នឹងដល់សេចក្តីស្លាប់ ដូចជាអ្នកមកធ្វើឲ្យ

បិតាអ្នកអស់ជីវិតទៅទៀត។ **ឡៅគី**បានស្ដាប់ដូច្នោះ ក៏អង្គុយយំសោកអាណិតបិតាណាស់ នៅតែពីក្រៅទ្វារ នឹងចូលទៅសួររកពុំបាន ហើយក៏ឡើងសេះត្រឡប់ទៅស្រុកកាំងហៃវិញ។

ឯ**ឡៅពៀវ**កាន់តែឈឺជាប់ តាំងចិត្តគិតដល់**ឡៅគី**ជាបុត្រច្បងមិនឃើញចូលមក លុះដល់ខែភត្របទបីកើត រោគកម្រើកខ្លាំងស្រែកបានតែពាក្យមួយម៉ាត់ ក៏ដាច់ខ្យល់ស្លាប់។ នាង**ឈួហ៊ុយិន**ឃើញថា**ឡៅពៀវ**មរណភាពហើយ ក៏ឲ្យ**ឈួម៉, ទៀវអ៊ុន** ចូលទៅសរសេរសំបុត្របណ្ដាំ**ឡៅពៀវ**ទុកមួយច្បាប់ សេចក្ដីថា បើប្រសិនយើងអស់បុណ្យវាសនាកាលណា ត្រូវឲ្យ**ឡៅចង**ទទួលរក្សាខេត្តស្រុកកេងជីវតទៅចុះ។ នាង**ឈួហ៊ុយិន**ក៏ឲ្យហៅនាហ្មឺនមុខមន្ត្រីទាំងអស់មើល រួចក៏តាំង**ឡៅចង**ឡើងជាចៅហ្វាយស្រុកកេងជីវជំនួសបិតា ហើយទើបចាត់ចែងតែងការសព**ឡៅពៀវ**តាមប្រវេណី។

ខណៈ**ឡៅចង**អាយុដប់បួនឆ្នាំ មានតម្រិះប្រាជ្ញាឆ្លៀវឆ្លាតណាស់ និយាយនឹងមន្ត្រីខ្ញុំរាជការទាំងពួងថា បិតាខ្ញុំមរណភាពទៅហើយ **ឡៅពី**ជាមាខ្ញុំ និង**ឡៅគី**ជាបងក៏នៅមានជីវិតរស់នៅឡើយ ដែលអ្នករាល់គ្នាមកតាំងខ្ញុំជាធំនោះមិនគួរទេ បើប្រសិន**ឡៅពី** និង**ឡៅគី**ដឹងនឹងមានសេចក្ដីតូចចិត្ត លើកកងទ័ពមកធ្វើអន្តរាយយើងអ្នកទាំងពួងនឹងរិះគិតប្រការម្ដេច? **លីគុយ**ដែលជានាហ្មឺនខាងក្រសួងរដ្ឋបាលឆ្លើយថា ដែលលោកមានប្រសាសន៍នេះគួរណាស់ ត្រូវតាមទំនៀមទម្លាប់ច្បាប់ប្រវេណីបុរណាមក ហើយឲ្យអញ្ជើញ**ឡៅពី**មកជួយរិះគិតការរក្សាស្រុកទេស នឹងបានជួយគ្នាការពារ**ស៊ុនគួន**និង**ចូឆូ**តទៅ។

**ឈួម៉**បានឮដូច្នោះក៏ស្រែកគំហកឲ្យ**លីគុយ**ថា **ឡៅពៀវ**ជិតស្លាប់បានសរសេរសំបុត្របណ្ដាំជាសម្គាល់ទុក យើងរាល់គ្នាសុទ្ធតែជាមន្ត្រីធំ ត្រូវជួយគ្នា

រិះគិតទំនុកបម្រុងស្រុកទេសប៉ុណ្ណោះមិនបានឬ? **លីគុយ**ឮដូច្នោះក៏ទាល់គំនិតស្រែកជេរ**ឈ្លូម៉**ថា ឯងជាមនុស្សមិនមានចិត្តអធ្យាស្រ័យអ្វីសោះ មិនធ្វើតាមទំនៀមទម្លាប់ពីបុរាណ ចាត់ចែងយកតាមអំពើចិត្តឯងដូច្នេះ ឯងនឹងធ្វើឲ្យផែនដីស្រុកកេងជីវនិងអាណាខេត្តដែលជាចំណុះវិនាសអន្តរាយ នៅក្នុងកណ្ដាប់ដៃអ្នកដទៃឬ? ឯងខឹងចិត្តនឹងអ្នកដែលមានវាសនាហើយស្លាប់ទៅនោះ មិនវិលមកកាច់កឯងឲ្យស្លាប់តាមទៅឬ? **ឈ្លូម៉**បានឮដូច្នោះខឹងណាស់ ទើបបង្គាប់ឲ្យទាហានចាប់ខ្លួន**លីគុយ**ទៅសម្លាប់ចេញ។ **លីគុយ**ក៏ស្រែកជេរ**ឈ្លូម៉**មិនដាច់ពាក្យមួយម៉ាត់សោះ ទាល់តែទាហានកាប់ដាច់កស្លាប់។

កាល**ឈ្លូម៉** តាំង**ឡៅចង**ឡើងជាចៅហ្វាយស្រុកកេងជីវជំនួស**ឡៅពៀវ**នោះ ក៏ចាត់ចែងស្ម័គ្របក្សពួកដែលជាសែជាមួយគ្នានោះ ឲ្យលើករបាំពលសកលយោធាចេញទៅរក្សាគ្រប់តំបន់ ក្នុងស្រុកកេងជីវទាំងមូល ហើយឲ្យ**ទៀនយី**និង**ឡៅសៀង**ដែលជានាហ្មឺនធំនៅក្នុងស្រុកកេងជីវ។ **ឈ្លូម៉**ក៏នាំនាង**ឈ្លូហ៊ូយិន** និង**ឡៅចង** នូវអស់នាហ្មឺនទាំងពួងទៅតាំងទីក្រុងនៅស្រុកសុងយ៉ុង ប្រាថ្នានឹងបានតស៊ូនឹង**ឡៅពី**នូវ**ឡៅគី**។

ខណៈនោះមានបម្រើសេះម្នាក់ប្រាប់ថា ឥឡូវ**ចូឆូ**លើកទ័ពធំពីស្រុកហ៊ូតោនឹងឆ្លងមកតាមផ្លូវលើស្រុកសុងយ៉ុងនេះ។ **ឡៅចង**បានឮដូច្នោះក៏ភ័យណាស់ ទើបប្រឹក្សានឹង**ឈ្លូម៉** និង**កេងអ្វួត**ថា ឥឡូវ**ចូឆូ**លើកកងទ័ពមកហើយ អ្នករាល់គ្នានឹងជួយរិះគិតការពារប្រការម្ដេច? **ហ៊ូស្វួន**ឆ្លើយថា នេះដោយសារ**ចូឆូ**លើកទ័ពមក លោកក៏បានដឹងខ្លួនទាន់នឹងការពារអន្តរាយ បើប្រសិនជា**ចូឆូ**មិនលើកទ័ពមកទេ គង់តែ**ឡៅពី**និង**ឡៅគី**លើកទ័ពមកជាប្រាកដ ព្រោះយើងធ្វើការល្មើសតាមអំពើចិត្ត មិនបានប្រាប់ឲ្យ**ឡៅពី** និង**ឡៅគី**ដឹងផង បើសិនណា**ឡៅពី**, **ឡៅគី**មានសេចក្ដីតូចចិត្ត

ក៏នឹងលើកកងទ័ពមកវាយខ្ទប់ពីម្ខាង មុខជាលោកនឹងបានសេចក្តីអន្តរាយ ឧបាយកលរបស់ខ្ញុំគិតឃើញមួយយ៉ាង បើលោកធ្វើតាម បណ្តាអ្នកស្រុកក៏មិនមានទុក្ខក្តៅក្រហាយ។

**ឡៅចង**សួរថា កលឧបាយរបស់អ្នកនឹងធ្វើប្រការម្តេច? **ហ៊ូសួន**ឆ្លើយថា សូមឲ្យលោកលើកស្រុកកេងជីវ និងអាណាខេត្តឯកទាំងប្រាំបួនមណ្ឌលឲ្យទៅ**ចូឆ្វ**ចុះ មុខជា**ចូឆ្វ**នឹងមានសេចក្តីត្រេកអរ នឹងជប់លៀងរក្សាលោកឲ្យបានជាសុខវែងឆ្ងាយ។ **ឡៅចង**ឮដូច្នោះក៏ខឹងណាស់ ស្រែកគំហកឲ្យ**ហ៊ូសួន**ថា បិតាខ្ញុំទើបតែនឹងអនិច្ចកម្មទៅថ្មីៗ ឥឡូវខ្ញុំបានគ្រងស្រុកជំនួសមិនទាន់បានប៉ុន្មានថ្ងៃផង លោកមកនាំចង្រៃឲ្យលើកស្រុកឲ្យទៅ**ចូឆ្វ**ទទេ នោះព្រោះហេតុអ្វី? **កេងអួត**ឆ្លើយតបទៅ**ឡៅចង**ថា ដែល**ហ៊ូសួន**និយាយនោះត្រូវណាស់ ព្រោះកើតមកជាមនុស្ស ត្រូវតែពិគ្រោះឲ្យដឹងការធ្ងន់ការស្រាលទើបគួរ ដូចសព្វថ្ងៃនេះ **ចូឆ្វ**បានជាមហាឧបរាជមានឫទ្ធិអំណាចនឹងធ្វើការអ្វីយកព្រះតម្រាស់ព្រះចៅ**ហៀនតេ**ជាប្រមាណ ស្វែងប្រាបប្រាមបានស្រុកជាចំណុះច្រើនណាស់មកហើយ។ ឥឡូវទើបនឹងមកតាំងខ្លួនឡើងជាធំ សូម្បីតែការខាងក្នុងបងប្អូនរបស់លោក ក៏នៅមិនទាន់ជាប្រក្រតីនឹងគ្នាសោះ ដែលនឹងរិះគិតធ្វើសឹកសង្គ្រាមខាងក្រៅ ក៏ឃើញថាជាទម្ងន់ណាស់ទៅហើយ បើ**ចូឆ្វ**លើកទ័ពមកដល់ហើយ មុខជាបណ្តារាស្ត្រទាំងពួងនឹងកោតខ្លាចបបួលគ្នារត់ទៅចូលនឹង**ចូឆ្វ**ទាំងអស់ ឃើញថាលោកនឹងតស៊ូម្តេចបាន?

**ឡៅចង**បានស្តាប់ហើយថា ដែលលោកនិយាយនេះត្រូវហើយ តែថាបិតាខ្ញុំប្រគល់ស្រុកទុកឲ្យមិនទាន់បានប៉ុន្មានថ្ងៃ នឹងលើកទៅឲ្យអ្នកដទៃទៀតនោះ ក៏ឃើញដូចជារក្សាកេរ្តិ៍មរតកមាតាបិតាមិនបាន នឹងមិនជាទីគរហានិន្ទាដល់យើងឬ? **អងសាន**ដែលជាទីប្រឹក្សាក៏ឆ្លើយទៅ**ឡៅចង**ថា ដែល**ហ៊ូសួន** និង**កេងអួត**និយាយ

នោះត្រូវណាស់ ហេតុម្ដេចបានជាលោកមិនយល់ព្រមធ្វើតាម? លោកប្រមាណចិត្តរបស់លោកឃើញថា តស៊ូនឹង**ចូឆ្វ**បានឬ? ឥឡូវ**ចូឆ្វ**ក៏មានទីប្រឹក្សានិងសេនាទាហានមានថ្វីដៃច្រើនណាស់ សូម្បីតែ**លីប៉ោ, អ៊្វិនសៀវ** និង**អ៊្វិនសុត**ដែលមានសតិប្រាជ្ញានិងកម្លាំងគ្រាន់បើ ម្ដេច**ចូឆ្វ**ច្បាំងទាល់តែអន្តរាយកម្ចាត់ចេញអស់ វេលានេះរឹតតែមានចិត្តកំរើបឡើងទៀត។ ឥឡូវ**ចូឆ្វ**លើកទ័ពមកកម្ចាត់អាណាខេត្តខាងទិសទក្សិណ ដែលលោកនឹងរិះគិតច្បាំងតស៊ូមិនបាន ចំណុះចុះចូល**ចូឆ្វ**នោះ យូរទៅលោកនឹងដឹងច្បាប់ប្រាកដ ព្រោះលោកមិនបានស្ដាប់ទីប្រឹក្សាទាំងពួង។ **ឡៅចង**តបថា ដែលលោកនិយាយតឿនរំឭកស្មារតីខ្ញុំនោះត្រូវណាស់ហើយ តែខ្ញុំនឹងសូមនាំសេចក្ដីយល់របស់អស់លោកទៅពិគ្រោះនឹងមាតាខ្ញុំសិន។

ខណៈនោះ ទទួលនាង**ឈ្មហ៊ូយិន**ដើរចេញមកពីខាងក្នុង បានឮហើយក៏សួរ**ឡៅចង**ថា អ្នកទាំងបីប្រឹក្សាគ្នាឃើញត្រូវគ្នាហើយឬ បានជានិយាយដូច្នេះ? ចៅមិនបាច់នាំយកសេចក្ដីនោះមកពិគ្រោះនឹងម៉ែធ្វើអ្វីទៀតទេ ចូរប្រព្រឹត្តទៅតាមអធ្យាស្រ័យនៃអ្នករាល់គ្នាចុះ។ **ឡៅចង**ឮមាតាថាដូច្នោះក៏ត្រេកអរ ទើបសរសេរសំបុត្រសូមចំណុះ**ចូឆ្វ**មួយច្បាប់ ស្រេចហើយក៏ប្រើ**សុងតុង**កាន់ទៅឲ្យ**ចូឆ្វ** ទទួលជួបនឹង**ចូឆ្វ**លើកទ័ពមកដល់ដែនស្រុកអ៊្វិនសៀ **សុងតុង**ក៏ជូនសំបុត្រទៅឲ្យ**ចូឆ្វ** ៗទទួលមើលដឹងសេចក្ដីក៏មានអំណរណាស់ ទើបឲ្យបំណាចរង្វាន់ដល់**សុងតុង**តាមសមគួរហើយផ្ដាំថា បើអ្នកឯងត្រឡប់ទៅវិញ ឲ្យប្រាប់**ឡៅចង**ថា ដែលមានសំបុត្រមកនោះ យើងបានទទួលព្រមហើយ ត្រូវឲ្យ**ឡៅចង**ចេញមកគំនាប់យើងតាមប្រវេណី យើងនឹងជួយទំនុកបម្រុងឲ្យបានសេចក្ដីសុខតទៅ។ **សុងតុង**ទទួលបណ្ដាំហើយ ក៏លា**ចូឆ្វ**ចេញទៅ លុះទៅដល់ទន្លេនឹងឆ្លង ក៏ប្រទះនឹងពួកទាហាន**គួនអ៊ូ** ៗក៏ចាប់ខ្លួន**សុងតុង**បានទើបសួរថា ក្នុងផ្លូវរាជការស្រុកកេងជីវនោះ ជាប្រការម្ដេច?

**សុងតុង**ក៏ឆ្លើយអឹមអៀនមិនស្តី លុះ**គួនអ៊ូ**បង្ខំសួរខ្លាំង ឃើញថាលាក់មិនបានក៏ប្រាប់ដោយពិតថា ឥឡូវ**ឡៅពៀវ**ដល់នូវសេចក្តីស្លាប់ហើយ ឯស្រុកទេសទាំងពួង នាង**ឈួហ៊ួយិន**និង**ឈួម៉**រិះគិតគ្នានឹង**ឡៅចង**លើកទៅឲ្យ**ចូឆូ**ទាំងអស់ហើយ។ **គួនអ៊ូ**ឮដូច្នោះក៏តក់ស្លុតស្មារតី ទើបនាំខ្លួន**សុងតុង**ទៅស្រុកស៊ិនអៀ ហើយអធិប្បាយជម្រាប**ឡៅពី**តាមពាក្យ**សុងតុង**គ្រប់ប្រការ។

**ឡៅពី**ដឹងថា**ឡៅពៀវ**ស្លាប់ដូច្នោះ ក៏យំសោកាល័យទាល់តែដួលសន្លប់។ លុះ**ឡៅពី**ភ្ញាក់ដឹងខ្លួនឡើង **តៀវហ៊ុយ**ក៏និយាយថា លោកនឹងមកទោមនស្សដូច្នេះមិនគួរទេ សុំឲ្យយក**សុងតុង**ទៅសម្លាប់ចេញទើបត្រូវ រួចសឹមលើកទ័ពទៅវាយយកស្រុកសុងយ៉ុង សម្លាប់**ឡៅចង**និង**ឈួម៉**ឲ្យបាន ទើបធ្វើការសង្គ្រាមទៅមុខទៀត។ **ឡៅពី**ក៏ឃាត់ថា ខ្លួនឯងនៅក្មេងសេចក្តីណាស់ នឹងចេះដឹងជាងចាស់មិនគួរទេ ចូរបិទមាត់កុំអាលនិយាយសិន ឯកិច្ចការទាំងអម្បាលនេះ បងក៏បានត្រិះរិះអស់ហើយ រួច**ឡៅពី**ក៏សួរ**សុងតុង**ថា ខ្លួនអ្នកឯងក៏មានតម្រិះប្រាជ្ញាដែរ បើអ្នកឯទៀតគិតមិនត្រូវ ហេតុម្តេចមិនយកសេចក្តីនោះមកប្រាប់ឲ្យយើងដឹងសិន? បើយើងនឹងសម្លាប់ខ្លួនឥឡូវនេះ គ្របីយើងក៏ប្រឡាក់ឈាមទទេឥតប្រយោជន៍ ចូរអ្នកឯងស្រូតរូតទៅស្រុកសុងយ៉ុងឲ្យឆាប់ ហើយប្រាប់ថា យើងចាប់បានខ្លួនលែងមកវិញ។ **សុងតុង**មានសេចក្តីត្រេកអរណាស់ គំនាប់**ឡៅពី**ហើយក៏លាចេញទៅ។

ខណៈនោះ នាយទ្វារបានចូលមកប្រាប់**ឡៅពី**ថា ឥឡូវ**ឡៅគី**ប្រើ**អ៊ីចៀ**មកគំនាប់លោក។ **ឡៅពី**ឮដូច្នោះក៏ត្រេកអរណាស់ គិតដល់គុណ**អ៊ីចៀ**ដែលបានប្រាប់ហេតុផលមកពីថ្ងៃមុននោះ ក៏ចេញទៅទទួលដល់ក្រៅទ្វារនាំចូលមកខាងក្នុង។ **អ៊ីចៀ**គំនាប់**ឡៅពី**ហើយជម្រាបថា ព្រោះ**ឡៅពៀវ**ជាបិតាទទួលអនិច្ចកម្មទៅហើយ នាង**ឈួហ៊ួយិន** និង**ឈួម៉**គិតគំនិតត្រូវគ្នាបិទបាំងសេចក្តីនេះទុកមិនបានជម្រាប

លោកឲ្យជ្រាបនិងប្រាប់**ឡៅគី**ឲ្យដឹងសោះ រួចលើក**ឡៅចង**ឲ្យធ្វើជាចៅហ្វាយស្រុកតាមអំពើចិត្ត ខុសអំពីទម្លាប់ទំនៀមពីបុរាណ សុំឲ្យលោកលើកកងទ័ពទៅបញ្ចូលគ្នានឹង**ឡៅគី**វាយយកស្រុកកេងជីវឲ្យបាន។ **ឡៅពី**បានស្តាប់ក៏ប្រាប់**អ៊ីចៀ**ថា សេចក្តីនេះ អ្នកដឹងតែត្រឹម**ឡៅចង**អង់អាចតាំងខ្លួនឡើងធ្វើធំ ដែល**ឈួម៉** និងនាង**ឈួហ៊ួយិន**គិតត្រូវគំនិតគ្នា លើកយកស្រុកទាំងប្រាំបួនមណ្ឌលទៅឲ្យ**ចូឆ្ង**អស់រលីងនោះ អ្នកមិនដឹងសោះទេ។ **អ៊ីចៀ**ឮដូច្នោះក៏ភ័យស្តុតស្មារតីឆ្លើយថា សេចក្តីទាំងអម្បាលនេះហេតុម្តេចបានជាលោកជ្រាប? **ឡៅពី**ប្រាប់ថា **គួនអ៊ូ**ចាប់ខ្លួន**សុងតុង**បានយកមកសាកសួរឆ្លើយប្រាប់រឿងរ៉ាវទាំងអស់ បានជាយើងដឹង។ **អ៊ីចៀ**ថា ដូច្នោះក៏ឃើញថាជាការត្រូវហើយ សូមឲ្យលោកលើកទាហានទៅប្រាប់ថា នឹងលើកមកគំនាប់សព**ឡៅពៀវ**តាមប្រវេណី បញ្ឆោតឲ្យ**ឡៅចង**ចេញមកទទួល រួចត្រូវចាប់ខ្លួនសម្លាប់ឲ្យស្លាប់ចេញ ក៏នឹងបានស្រុកនោះដោយងាយ។

**ខុងបេង**ជម្រាប**ឡៅពី**ថា ដែល**អ៊ីចៀ**និយាយនោះក៏ឃើញថាត្រូវមែនហើយ សូមឲ្យលោកធ្វើតាមចុះ។ **ឡៅពី**បានឮ**ខុងបេង**និយាយដូច្នោះក៏យំសោកាល័យថា **ឡៅពៀវ**បងខ្ញុំ កាលកំពុងឈឺធ្ងន់បានហៅខ្ញុំទៅនិយាយផ្តាំផ្ញើកូនចៅទាំងពួង។ ឥឡូវអស់ពី**ឡៅពៀវ**ទៅមិនទាន់បានប៉ុន្មានថ្ងៃ ខ្ញុំនឹងទៅកែខៃប្រទូសរ៉ាយដល់បុត្រភរិយាដណ្តើមយកស្រុកទេសនោះមិនគួរសោះ បើជីវិតនៅមិនទាន់ស្លាប់ក៏នឹងមើលមុខគេមិនពេញភ្នែក។ **ខុងបេង**ឆ្លើយថា ឥឡូវនេះ **ចូឆ្ង**ក៏លើកកងទ័ពមកដល់ស្រុកអ៊ួនសៀហើយ ដែលលោកនឹងគិតការនៅអល់អែកមិនទៅវាយយកស្រុកសុងយ៉ុងនោះ លោកនឹងគិតការពារប្រការម្តេច? **ឡៅពី**ថា បើដូច្នោះយើងត្រូវរត់ទៅពួននៅក្នុងស្រុកអ៊ួនសៀ។ កាល**ឡៅពី**កំពុងចរចាដូច្នោះ មានបម្រើសេះចូលមកប្រាប់ថា **ចូឆ្ង**លើកទ័ពមកដល់តំបន់វាលកុកបេងហើយ។ **ឡៅពី**ដឹងដូច្នោះ ក៏បង្គំឲ្យ**អ៊ីចៀ**

ត្រឡប់ទៅស្រុកកាំងហៃ **ឡៅពី**និង**ខុងបេង**ក៏ចាត់ចែងត្រៀមពលសេហ៍ដែលត្រូវតែតាំងច្បាំងនឹង**ចូឆូ**។

**ខុងបេង**ជម្រាប**ឡៅពី**ថា ដែល**ចូឆូ**លើកទ័ពមកគ្រានេះ ជាធុរៈរបស់ខ្ញុំបាទចុះ លោកកុំព្រួយបារម្ភឡើយ គ្រាកាល**ហៃហ៊្វទុន**លើកមកមុនតែគប់ភ្លើងមួយ យើងក៏ដុតទាហានទាំងអស់ឲ្យវិនាសយកជ័យជម្នះបាន **ចូឆូ**មកគ្រានេះ គង់តែខ្ញុំបាទនឹងធ្វើកលឲ្យ**ចូឆូ**នៅក្នុងកង្វល់របស់ខ្ញុំបាទជាប្រាកដ។ តែថាយើងនឹងតាំងនៅក្នុងស្រុកស៊ិនអៀនេះមិនបាន សូមលោកឲ្យទៅប្រកាសប្រាប់បណ្ដាអ្នកស្រុកទាំងប្រុសស្រីក្មេងចាស់ទាំងប៉ុន្មានថា ឥឡូវកងទ័ព**ចូឆូ**លើកមកនឹងធ្វើអន្តរាយហើយ យើងនឹងនៅក្នុងទីនេះមិនបានទេ នឹងទៅនៅស្រុកអ៊្វនសៀ បើនរណានឹងទៅជាមួយនឹងយើងក៏ឲ្យបម្រុងខ្លួនទុកជាស្រេច បើយើងលើកទៅវេលាណា ក៏នឹងបានទៅជាមួយគ្នា បើនរណាមិនចូលចិត្តទៅទេ នឹងនៅក្នុងស្រុកស៊ិនអៀនេះចុះ បើមានទុក្ខភ័យប្រការម្ដេចទៅថ្ងៃមុខ ក៏កុំឲ្យបន្ទោសយើងថា រត់យកតែខ្លួនឯងឡើយ។ **ឡៅពី**យល់ឃើញត្រូវផង ក៏ប្រើឲ្យមនុស្សទៅស្រែកប្រកាសប្រាប់អាណាប្រជានុរាស្ត្រក្នុងស្រុកនោះឲ្យបានដឹងគ្រប់គ្នា ហើយចាត់ប្រើ**ប៊ីតុ**ជាអ្នកសម្រាប់បញ្ជូនគ្រប់គ្រួសារទាហានទាំងពួង លើកទៅស្រុកអ៊្វនសៀ។

**ខុងបេង**ក៏ចាត់ឲ្យ**គួនអ៊ូ**លើកទាហានមួយពាន់ លើកទៅនៅលើដើមទឹកព្រែកប៉ែះហោ ឲ្យយកការុងច្រកដីខ្សាច់ទម្លាក់ទប់ធ្វើទំនប់ បិទទប់ទឹកទុកឲ្យខាងចុងទឹកនោះរាក់ ហើយបង្គាប់ថា បើទាហាន**ចូឆូ**បែកទ័ពមកចុះឆ្លងទឹកស្ទឹងនោះ បើបានឮសំឡេងអឺងកងឡើងហើយ ចូរបើកទំនប់ចេញឲ្យទឹកបាក់ចុះទៅត្រូវលើទាហានដែលកំពុងដើរឆ្លងនោះលិចលង់ស្លាប់ រួចត្រូវលើកទាហានតាមខ្សែទឹកនោះវាយខ្ទប់ចុះទៅ ហើយឲ្យ**តៀវហ៊ុយ**នាំទាហានមួយពាន់នាក់ លើកទៅពួនបង្កប់នៅតំបន់

ធាក់ឡើងខាងក្រោមទឹក ហើយបង្គាប់ទុកថា បើឃើញទាហាន**ចូវឆ្វ**លើកឆ្លងត្រើយមក ឲ្យវាយខ្ទប់ឡើងទៅប្រសព្វគ្នានឹង**គួនអ៊ូ** ទើបចាត់**ជូឡុង**ឲ្យនាំទាហានបីពាន់ញែកគ្នាជាបីកង បង្គាប់ឲ្យយករំសេវបាចទៅលើដំបូលផ្ទះ អាណាប្រជានុរាស្ត្រដែលរត់ចោលជាច្រើននោះ ហើយលើកទាហានទៅបង្កប់នៅក្រៅស្រុកខាងទិសឯជើង ទិសឯត្បូង និងឯលិច ជាបីកង ឯព្រួញធ្នូនោះ ឲ្យចងប្រឆេះរំសេវគ្រប់ព្រួញ បើឃើញទាហាន**ចូវឆ្វ**ចូលស្រុកក្នុងពេលកណ្ដាលយប់ព្រមហើយ ក៏ឲ្យទាហានអុជប្រឆេះនៅចុងព្រួញបាញ់ទៅក្នុងស្រុក ឲ្យភ្លើងឆេះឡើង ហើយឲ្យស្រែកហ៊ោពីក្រៅស្រុក ទាហាន**ចូវឆ្វ**ក៏នឹងបែកទៅសំដៅឆ្លងស្ទឹងប៉ែះហោដូចយើងគិតទុក អ្នកចូរស្រួតលើកទៅបញ្ចូលគ្នានឹង**តៀវហ៊ុយ**ជួយគ្នា ទើបចាត់ឲ្យ**ប៊ីហាង** និង**ឡៅហាង**ពីរនាក់នេះនាំទាហានមួយពាន់ម្នាក់ កាន់ទង់ក្រហមមួយកង កាន់ទង់ខៀវមួយកង លើកទៅបង្កប់នៅតំបន់វាលឆប៊្វយដោ នៅស្រុកស៊ិនអៀចម្ងាយផ្លូវប្រហែលបីរយសិន (១២ គ.ម) ហើយបង្គាប់ថា បើឃើញកងទ័ព**ចូវឆ្វ**លើកមក ត្រូវឲ្យកងស្ដាំលើកឆ្លងទៅខាងកងឆ្វេង ឲ្យកងឆ្វេងលើកឆ្លងទៅកងស្ដាំ ផ្លាស់ប្តូរគ្នាទៅវិញទៅមកកុំឲ្យឈប់ កងទ័ព**ចូវឆ្វ**មិនដឹងក៏សម្គាល់ថា ទាហានកងទ័ពយើងច្រើន ក៏នឹងរង់នៅមិនអាចចូលទៅក្នុងស្រុកក្នុងពេលថ្ងៃ នឹងឲ្យទាហានលើកចូលស្រុកក្នុងពេលយប់វិញ បើនឹងមិនធ្វើទុកដូច្នេះ ទាហាន**ចូវឆ្វ**ចូលស្រុកបានក្នុងពេលថ្ងៃហើយ ការរបស់យើងគិតធ្វើនោះក៏នឹងមិនសម្រេច បើដល់ពេលយប់ត្រូវឲ្យអ្នកថយចេញឲ្យអស់ បើឃើញភ្លើងឆេះឡើងក្នុងស្រុកហើយ អ្នកចូរជួយ**ជូឡុង**ស្រែកហ៊ោសន្ធាប់ទៅ បើឃើញកងទ័ព**ចូវឆ្វ**បែកទៅហើយ អ្នកចូរនាំទាហានស្រួតទៅបញ្ចូលគ្នានឹងទ័ព**គួនអ៊ូ**ឯស្ទឹងប៉ែះហោ។

លុះ**ខុងបេង**ចាត់ចែងរៀបកងទ័ពឲ្យលើកទៅហើយ ក៏នាំ**ឡៅពី**ចេញពីស្រុកស៊ិនអៀ ទៅឡើងលើភ្នំខ្ពស់មួយអន្លើចាំមើលទាហានទាំងពួង។ ឯ**ខៅធូ**ដែលជានាយទ័ពស្រួចរបស់**ចូឆូ** លើកទាហានបីពាន់មកមុននោះ លុះលើកមកដល់វាលឆប៊ួយដោ ក្រឡេកឃើញកងទ័ព**ប៊ីហង, ឡៅហង**តាំងនៅដូច្នោះ ក៏បរពលចូលបំពារទៅមុខនឹងប្រយុទ្ធតគ្នា។ **ប៊ីហង, ឡៅហង**ឃើញ**ខៅធូ**ដេញទាហានចូលមក ក៏ឲ្យទាហានផ្លាស់កងស្តាំទៅឆ្វេង ផ្លាស់កងឆ្វេងទៅស្តាំ ប្រផ្លាស់គ្នាទៅវិញទៅមកមិនឈប់។ **ខៅធូ**ឃើញដូច្នោះក៏ឃាត់ទាហានទាំងពួងថា យើងនឹងចូលទៅច្បាំងក្នុងពេលនេះមិនទាន់បានទេ ខ្លាចក្រែង**ខុងបេង**នឹងប្រើកលឧបាយបង្កប់ទាហានទុកច្រើនកង **ខៅធូ**ក៏ស្រូតត្រឡប់វិលមកប្រាប់**ចោយិន, ចោហង**។ **ចោយិន**និយាយថា ដែល**ខុងបេង**ធ្វើបែបនេះ ជាកលឧបាយបញ្ឆោតយើងទេ អ្នកមិនដឹងក៏ភិតភ័យ នឹងខ្លាចអ្វី ចូរស្រូតលើកទៅចុះ សឹមយើងលើកទ័ពជំនួយទៅតាមក្រោយ។

ឯ**ខៅធូ**ក៏លើកទាហានចូលទៅដល់ចុងវាល ទទួលពេលជិតព្រលប់ ទើបឃើញកងទ័ពលើករត់ទៅចូលព្រៃទាំងអស់។ **ខៅធូ**រៀបទាហាននឹងឲ្យតាមទៅបញ្ចាន់រក ទទួលឮសូរសំឡេងមនុស្សស្រែកហ៊ោនៅលើភ្នំ ទើបងើយឡើងមើលឃើញ**ឡៅពី** និង**ខុងបេង**បាំងសប្បធនអង្គុយផឹកស្រាជាមួយគ្នា។ **ខៅធូ**ខឹងណាស់ ដេញទាហាននឹងឡើងទៅចាប់យកខ្លួន**ខុងបេង** ៗក៏ឲ្យទាហានទាំងពួងប្រមៀលដុំថ្មទម្លាក់ចុះមក ត្រូវទាហាន**ខៅធូ**ពិការស្លាប់អស់ជាច្រើន។ ឡើងទៅមិនបាន ក៏ថយត្រឡប់មកវិញ ហើយឮសូរសំឡេងមនុស្សស្រែកហ៊ោពីក្រោយភ្នំ។ **ខៅធូ**បម្រុងនឹងលើកទាហានវាងទៅតច្បាំង ទទួល**ចោយិន**លើកទ័ពជំនួយមកដល់ឃាត់ថា ពេលនេះយប់ងងឹតណាស់ កុំអាចចូលច្បាំង យើងត្រូវលើកទៅវាយយកស្រុកស៊ិនអៀសិន ត្រូវបង្អង់ឲ្យទាហានសម្រាកកម្លាំងបន្តិច។ ហាមដូច្នោះហើយក៏នាំ**ខៅធូ**លើក

ស្រូតទៅដល់ជើងកំពែងស្រុកស៊ិនអៀ ឃើញទ្វារបើកចំហទាំងប្រាំបីទិស មិនមានឃើញមនុស្សដល់ម្នាក់សោះ។ **ចោឃិន**មានអំណរណាស់ ក៏លើកទ័ពចូលទៅក្នុងស្រុក។ **ចោហាង**និយាយនឹង**ចោឃិន**ថា គ្រានេះឃើញថា **ខុងបេង** និង**ឡៅពី**ទាល់ចង្អៀតខ្លួនណាស់ហើយ ទើបលើកចោលស្រុកនាំគ្រប់គ្រួរត់ទៅអស់។ យើងត្រូវបង្អង់ឲ្យទាហានសម្រាកកម្លាំងនៅមួយយប់សិន ព្រឹកស្អែកសឹមលើកទៅតាមព័ទ្ធចាប់យកខ្លួន**ខុងបេង**និង**ឡៅពី**ឲ្យបាន។ **ចោឃិន** និង**ចោហាង**ក៏នាំគ្នាចូលទៅនៅក្នុងកន្លែងលំនៅ**ឡៅពី** ទាហានទាំងពួងក៏ដាក់ដេករៀងគ្នាគ្រប់ទីកន្លែង ខ្លះដែលនឿយហត់ណាស់ក៏ប្រះលក់ទៅ។

លុះដល់ពេលប្រហែលយាមបី កើតខ្យល់ព្យុះធំបោកបក់ជាខ្លាំង **ជូឡុង**ឃើញបានចំណាប់ ក៏ឲ្យទាហានអុជប្រឆេះនៅចុងព្រួញទាំងអស់ ហើយលើកធ្នូបាញ់ព្រមគ្នាចូលទៅក្នុងស្រុក។ មនុស្សដែលអង្គុយយាមឃើញភ្លើងឆេះគ្រប់ដំបូលផ្ទះ ក៏រត់ចូលទៅដាស់**ចោឃិន, ចោហាង**ថា ឥឡូវកើតភ្លើងឆេះគ្រប់ដំបូលផ្ទះហើយ។ **ចោឃិន**ឮដូច្នោះក៏ថាដែលភ្លើងឆេះនោះ ព្រោះទាហានទាំងពួងដុតដាំបាយប្រហែសបានជារាលឆេះ អ្នកទាំងគ្នាកុំភ័យបារម្ភអ្វីឡើយ ចូរប្រញាប់នាំគ្នាជួយលត់ឲ្យអស់ទៅ។ កាល**ចោឃិន**ថាដូច្នោះមិនទាន់ផុតមាត់ ភ្លើងក៏ឆេះព្រមគ្នាគ្រប់ទាំងបីទិស ពន្លឺភ្លឺដូចជាថ្ងៃ។

**ចោឃិន**ឃើញដូច្នោះក៏ភ័យតក់ស្លុត ស្រែកហៅទាហានទាំងអស់មកប្រជុំគ្នា ហើយ**ចោឃិន, ចោហាង**ក៏ឡើងសេះបរកាត់ភ្លើងឆ្លងទៅតាមទ្វារទិសឯកើត។ ខណៈ**ចោឃិន**រត់ភ្លឺភ្លើចេញទៅនោះ ទាហានទាំងពួងក៏ប្រជ្រៀតគ្នាចេញទៅតាមជាន់គ្នាស្លាប់ជាច្រើនណាស់។ **ជូឡុង**ក៏ឲ្យទាហានស្រែកហ៊ោសន្ធាប់ បីដូចនឹងដេញតាមសម្លាប់ពីក្រោយ។ ទាហាន**ចោឃិន**ក៏ភ្ញាក់ផ្អើលបណ្ដោយបែកទៅប្រពាក់ប្រពូនលើ

គ្នា។ **ប៊ីហង, ឡៅហង**ដែលលើកទៅបង្កប់ឃើញបានចំណាប់ដូច្នោះ ក៏ដេញទាហានពានទម្លាយចូលទៅស្កាត់ វាយចាក់កាប់សម្លាប់ទាហាន**ចោយិន**ខូចខាតជាច្រើនណាស់។ ទាហាន**ចោយិន**ក៏រឹតតែបែកបាក់ប្រពាក់ប្រពូនលើគ្នាជាច្រឡំបល់ លុះដល់ពេលយាមបីប្លាយ ក៏លើកគ្នាទៅដល់ស្ទឹងប៉ែះហោ ទាហានទាំងពួងក៏ចុះឆ្លងស្ទឹងនឹងទៅត្រើយខាងនាយ សំឡេងដែលស្តីនិយាយក៏លាន់ឮកក្រើកញ័រខ្ទ័រផែនដី។

ឯ**គួនអ៊ូ**ដែលនាំទាហានពួនបង្កប់នៅលើដើមទឹក ក៏ឲ្យទាហានទម្លាយទំនប់ដែលទប់នោះទាំងអស់ ទឹកក៏ហូរចាក់ធ្លាក់ចុះទៅ ទាហាន**ចោយិន**នឹងឆ្លងទៅមិនទាន់ ក៏លិចលង់ស្លាប់លើសលុបនឹងរាប់គណនាពុំបាន។ **គួនអ៊ូ**ក៏ដេញទាហានបំពារទៅចាក់កាប់សម្លាប់ទាហាន**ចោយិន** ៗឃើញដូច្នោះក៏ភ័យណាស់ ប្រឹងស្ទុះរត់ឆ្លងរំលងទឹកទៅដល់ត្រើយម្ខាង ហើយរត់វាងទៅដល់វាលកុកបេង។ **តៀវហ៊ុយ**ក៏លើកទាហានចេញមកស្ទាក់ពីមុខវាយខ្ទប់ប្រសព្វគ្នា ហើយស្រែកថាទីត្រង់នេះពួកអាចោរនឹងស្លាប់អស់ហើយ។ **ចោយិន, ចោហង, ខៅធូ**ឃើញ**តៀវហ៊ុយ**លើកទាហានចេញមកដូច្នោះ ក៏ស្តុតស្មារតីភ័យស្រឡាំងកាំងមិនបានប្រុងនឹងតស៊ូ ក៏នាំទាហានទាំងពួងស្ទុះរត់ចេញទៅ។ **តៀវហ៊ុយ**ក៏លើកទាហានដេញតាមជួបនឹង**ឡៅពី, ខុងបេង** ក៏នាំគ្នាត្រឡប់មកឯស្ទឹងប៉ែះហោវិញ។ **ខុងបេង**ក៏ឲ្យ**ប៊ីតុ**បង្ខំចម្លងទាហានទាំងពួងពីស្ទឹងប៉ែះហោ ស្រូតទៅស្រុកអ៊្លួនសៀអស់ស្រេច ហើយក៏ឲ្យពុះទម្លាយទូកនិងផែទាំងអស់ចេញ។

ឯ**ចោយិន** រួមទាហានដែលសល់ពីស្លាប់ និងខ្ចាត់ភ្លាត់នោះបានហើយ ក៏លើកទ័ពត្រឡប់ទៅតាំងនៅស្រុកស៊ិនអៀវិញ ទើបចាត់ឲ្យ**ចោហង**នាំដំណឹងទៅជម្រាប**ចូឆូ** ៗខឹងណាស់ ឲ្យលើកទាហានស្រូតមកទៀត លុះដល់ស្រុកស៊ិនអៀហើយ ក៏ឲ្យ

ទាហានជញ្ជូនដីលើកធ្វើទំនប់ទប់ស្ទឹងប៉ែះហោ ហើយក៏ចាត់ទាហានជាប្រាំបីកង នឹងឱ្យលើកទៅតាម**ឡៅពី**ប្រាថ្នានឹងជាន់សង្កត់ស្រុកអ៊្វិនសៀឱ្យបាន។

**ឡៅហ៊ូ**ទីប្រឹក្សាក៏និយាយនឹង**ចូឆ្វ**ថា ដែលមហាឧបរាជលើកមកនឹងប្រាប ប្រាមអាណាខេត្តខាងទិសទក្សិណគ្រានេះ គួរនឹងប្រែយកចិត្តអាណាប្រជានុរាស្ត្រ ទាំងពួង ឱ្យមានសេចក្តីមេត្រីស្រឡាញ់លោកសិន បើលោកនឹងបង្ខំលើកទៅដោយ កម្លាំងក្រោធឥឡូវនេះក៏គង់បាន តែថាអាណាប្រជានុរាស្ត្រទាំងពីរស្រុក នឹងបាន សេចក្តីទុក្ខក្តៅក្រហាយស្លាប់ខ្ចាត់ខ្ចាយអស់ ព្រោះ**ឡៅពី**ជាតួអាទិ៍ដើមហេតុ ហេតុ នេះសូមឱ្យលោកសម្រាកកងទ័ពទុកសិន ហើយប្រើបម្រើទៅនិយាយល្បួងយកចិត្ត **ឡៅពី** ឱ្យចូលមកស្ម័គ្រស្មាគមន៍វិញល្អជាជាង ទោះបីបើ**ឡៅពី**នឹងមិនមកក្តី អាណា ប្រជានុរាស្ត្រទាំងពួងក៏នឹងក្រឡេកឃើញថា លោកនៅមានចិត្តអាណិតអ្នកស្រុក មែនៗ បើ**ឡៅពី**មកលំអុតលំឱនដល់លោកហើយ អាណាខេត្តដែលជាចំណុះស្រុក កេងជីវនោះ ក៏នឹងបានមកជារបស់លោកទាំងអស់ដោយងាយ មិនបាច់នឹងច្បាំង ឱ្យលំបាកពលទាហានទាំងពួងឡើយ។

**ចូឆ្វ**បានស្តាប់ក៏យល់ចូលចិត្ត ទើបសួរថា បើដូច្នោះយើងនឹងប្រើឱ្យអ្នកឯង ណាទៅចរចាដោយល្អ? **ឡៅហ៊ូ**ឆ្លើយថា ដែលនឹងប្រើឱ្យអ្នកដទៃទៅនិយាយបញ្ចុះ បញ្ចូល**ឡៅពី**នោះ ឃើញជាមិនបានទេ មានតែ**ឈីស៊ី**មួយ ដែលអាចនឹងទៅនិយាយ បាន ព្រោះ**ឈីស៊ី**នោះ ពីដើមជាមនុស្សរាប់អានគ្នានឹង**ឡៅពី** ជាទីទុកចិត្តឥតដែល ទាស់អធ្យាស្រ័យ។ សូមឱ្យលោកប្រើ**ឈីស៊ី**នេះទៅចុះ មុខជានិយាយឱ្យបានការ។ **ចូឆ្វ**ថា អ្នកគិតនេះត្រូវណាស់ តែថា**ឈីស៊ី**នោះ ជាមនុស្សត្រូវអធ្យាស្រ័យនឹង**ឡៅពី** បើប្រើទៅហើយ**ឈីស៊ី**ត្រឡប់ជាមិនវិលមកវិញ យើងនឹងមិនខូចការឬ? **ឡៅហ៊ូ** ឆ្លើយថា ឯ**ឈីស៊ី**នោះជាមនុស្សសុចរិតណាស់ ដែលប្រើទៅហើយ នឹងមិនត្រឡប់

មករកលោកវិញនោះមិនមែនទេ ព្រោះមនុស្សនេះ ជាអ្នកខ្លាចសេចក្ដីនិន្ទាណាស់ លោកកុំសង្ស័យឡើយ ចូរប្រើឲ្យ**ឈីស៊ី**ទៅចុះគង់តែវិលត្រឡប់មកវិញជាប្រាកដ។

**ចូវឆ្វ**ឮដូច្នោះក៏ឲ្យហៅ**ឈីស៊ី**ចូលមកហើយនិយាយថា ឥឡូវយើងមានសេចក្ដីតូចចិត្តនឹង**ឡៅពី**ណាស់ គិតនឹងលើកទ័ពទៅជាន់សង្កត់ស្រុកអ៊ួនសៀឲ្យល្អិតជាធូលី តែមកគិតអាណិតអាណាប្រជានុរាស្ត្រទាំងពួង នឹងបណ្ដោយឲ្យខូចវិនាសទទេៗទៅមិនគួរសោះ សព្វថ្ងៃនេះយើងក៏ដឹងថា ខ្លួនអ្នកនិង**ឡៅពី**ជាមនុស្សត្រូវគំនិតគ្នា ទើបឲ្យអ្នកទៅចរចានិយាយនឹង**ឡៅពី** ឲ្យចូលមកលន់តួរអង្វរយើងដោយល្អ កុំឲ្យមានសេចក្ដីក្ដៅក្រហាយដល់បណ្ដារាស្ត្រហើយ ខ្លួនយើងក៏មិនយកទោស**ឡៅពី**ដែរ នឹងទំនុកបម្រុងឲ្យបានតាមសេចក្ដីប្រាថ្នា បើនឹងប្រើអ្នកដទៃឲ្យទៅនិយាយការ ខ្លាចក្រែងខូចសេចក្ដីដែលគិតទុក ឃើញតែអ្នកដែលមានសេចក្ដីទំនុកទុកចិត្តល្អត្រង់សុចរិត ចូរអ្នកគិតទៅនិយាយនឹង**ឡៅពី**តាមសម្ដីយើងចុះ។ **ឈីស៊ី**ទទួលពាក្យ**ចូវឆ្វ**ហើយ ក៏លាចេញទៅដល់ស្រុកអ៊ួនសៀ។

ខណៈនោះ**ឡៅពី, ខុងបេង**ដឹងថា **ឈីស៊ី**មកក៏មានអំណរណាស់ ចេញទៅទទួលនាំចូលមក ហើយសាកសួរសុខទុក្ខតាមទំនុកដែលនិរាស ប្រាសចាកគ្នាពីគ្រាមុនរហូតមកតាមប្រវេណី ហើយ**ឈីស៊ី**ក៏និយាយថា ដែលខ្ញុំបាទមកនេះ ព្រោះ**ចូវឆ្វ**ប្រើមកនិយាយល្បួងលួងលោមឲ្យលោកទៅចំណុះចុះចូល បើខ្ញុំបាទមិនទទួលមកនិយាយក៏មិនបាន តែតាមការដែលខ្ញុំបាទប្រមាណឃើញពិត ចិត្ត**ចូវឆ្វ**នោះប្រាថ្នានឹងយកចិត្តអស់អាណាប្រជានុរាស្ត្រទាំងពួងទេ ដើម្បីឲ្យអាណាប្រជានុរាស្ត្រទាំងអស់នោះស្មោះស្ម័គ្រស្រឡាញ់**ចូវឆ្វ** នឹងបានត្រង់អស់អញនិងលោកនោះក៏ឥតអង្គីមាន។ ឥឡូវ**ចូវឆ្វ**គិតធ្វើការធំណាស់ កេណ្ឌពលរេហ៍ឲ្យលើកទំនប់ទប់ទឹកស្ទឹងប៉ែះហោទាំងមូល ហើយប្រមូលទាហានលើកញែកទុកជាប្រាំបីកង ប៉ងនឹងមកកម្ចាត់លោក

ចេញឲ្យបាន។ ឯស្រុកអ៊្វិនសៀនេះជាទីតូចចង្អៀតណាស់ ឃើញថាទទួលកម្លាំង**ចូឆ្វ** មិនបាន ចូរឲ្យលោករិះគិតអានប្រែប្រួលទៅឲ្យឆាប់។ **ឡៅពី**តបថា ដែលអ្នកមកនិយាយដាស់តឿនស្មារតីឲ្យដឹងធូន់ស្រាលទាំងអម្បាលនេះ ពេញចិត្តខ្ញុំណាស់ ខ្លួនអ្នកនិងខ្ញុំបែកចាកគ្នាទៅយូរហើយ គ្រានេះខ្ញុំឃើញមុខអ្នកហើយ ក៏គឺបុណ្យភ័ព្វគួរតែអ្នកនឹងនៅឲ្យជាប់កុំត្រឡប់ទៅវិញឡើយ។ **ឈីស៊ី**ឮហើយក៏ឆ្លើយតបថា ខ្ញុំបាទនឹងនៅនឹងលោកមិនត្រឡប់ទៅរក**ចូឆ្វ**គ្រានេះ ក៏នឹងជាទីគរហានិន្ទាដល់មនុស្សទាំងពួងថា ជាមនុស្សគ្មានសេចក្ដីកតញ្ញូ មួយទៀតសពមាតាក៏ធ្លាក់ទៅនៅក្នុងស្រុកហ៊ូតោ ត្រូវតែត្រឡប់ទៅវិញសិន ដែលលោកនឹងធ្វើការតនឹង**ចូឆ្វ**នោះមិញ **ខុងបេង**មកនៅជាបង្គោលមាំមួនហើយ លោកនឹងភ័យបារម្ភថ្វី ការអ្វីគង់តែបានសម្រេចដូចប្រាថ្នាទាំងអស់។ **ឈីស៊ី**ថាដូច្នោះហើយ ក៏លា**ឡៅពី, ខុងបេង**ត្រឡប់ទៅប្រាប់**ចូឆ្វ**វិញ លុះទៅដល់ស្រុកស៊ិនអៀក៏ចូលទៅជម្រាប**ចូឆ្វ**ថា ខ្ញុំបាទបានទៅនិយាយល្បួង**ឡៅពី**ដោយសុភាពហើយ ឥឡូវ**ឡៅពី**មិនព្រមចូលមកលំអុតលំឱនដល់លោកទេ។ **ចូឆ្វ**ឮដូច្នោះក៏ខឹងណាស់ ទើបឲ្យលើកកងទ័ពស្រូតទៅនឹងជាន់សង្កត់ស្រុកអ៊្វិនសៀឲ្យបាន។

ឯ**ឡៅពី**ក៏សួរ**ខុងបេង**ថា ដែលយើងតតាំងច្បាំងនឹង**ចូឆ្វ**លើកនេះ តើត្រូវគិតប្រការម្ដេច? **ខុងបេង**ថា យើងនឹងតតាំងច្បាំងនឹងកងទ័ព**ចូឆ្វ**ក្នុងស្រុកអ៊្វិនសៀនេះមិនបានទេ ត្រូវតែចោលស្រុកអ៊្វិនសៀទៅនៅស្រុកសុងយ៉ុង ដែលជាទីមាំមួនទើបបាន។។ **ឡៅពី**ថា ដែលនឹងចោលស្រុកអ៊្វិនសៀទៅនៅស្រុកសុងយ៉ុងនោះ ក៏គួរណាស់ហើយ តែថាខ្ញុំមានសេចក្ដីព្រួយនឹងអាណាប្រជានុរាស្ត្រទាំងពួង បង់កម្លាំងប្រឹងតាមយើងមកផង យើងនឹងបោះបង់ចោលគ្នារត់ស្រូតយកតែខ្លួនក៏ដូចជាគ្មានធម៌សប្បុរស គួរឲ្យអាណិតអាណាថណាស់។ **ខុងបេង**ថា បើដូច្នោះត្រូវឲ្យបម្រើ

ទៅស្រែកប្រកាសថា ឥឡូវកងទ័ព**ចូឆ្វ**លើកមកធ្វើអន្តរាយស្រុកយើងនេះទៀតហើយ ឃើញថាលើសកម្លាំងនឹងទ្រាំនៅពុំបាន យើងត្រូវតែប្រែប្រួលបបួលគ្នាលើកទៅនៅស្រុកសុងយ៉ុង។ អ្នកទាំងឡាយនឹងទៅតាមយើងក៏ទៅ បើមិនទៅនឹងស្ម័គ្រចង់នៅក្នុងស្រុកនេះ ក៏តាមអធ្យាស្រ័យចុះ។ **ឡៅពី**ឮដូច្នោះក៏ប្រើ**គួនអ៊ូ**ចាត់ចែងរកទូកសម្រាប់ចម្លងគ្នាទៅស្រុកសុងយ៉ុង ហើយក៏ឲ្យ**ស៊ុនខៀន**និង**កាន់យ៉ុង**ទៅស្រែកប្រកាសប្រាប់ប្រជាជនទាំងពួងតាមពាក្យ**ខុងបេង**។

ខណៈនោះបណ្ដាអ្នកស្រុកដឹងដូច្នោះក៏ឆ្លើយថា យើងខ្ញុំនឹងនៅក្នុងស្រុកអ៊ួនសៀនោះ ស៊ូឲ្យស្លាប់ជីវិត មិននៅជាដាច់ខាត បើ**ឡៅពី**ទៅដល់ទីណា យើងខ្ញុំរាល់គ្នាក៏សុំទៅតាមជាមួយ។ អ្នកស្រុកទាំងពួងក៏ស្រុះស្រួលគ្នាព្រមចោលទីលំនៅទាំងអស់ លើកគ្រប់គ្រួចេញទៅតាម**ឡៅពី** ខ្លះយំស្រែកដោយផ្លូវទៅ។ លុះ**ឡៅពី**ឆ្លងទៅដល់កណ្ដាលទឹកស្ទឹងក្រឡេកមកក្រោយ ឃើញបណ្ដារាស្ត្រយំស្រែកអឺងកងតាមត្រើយទាំងសងខាង ក៏ទន់ចិត្តអាណិតអាសូរណាស់ **ឡៅពី**ក៏យំសោកាថា មនុស្សទាំងអស់នេះនាំគ្នាមក បានសេចក្ដីលំបាកព្រាត់ប្រាសទីកន្លែង ក៏ពីព្រោះយើងនេះឯង **ឡៅពី**ថាដូច្នោះហើយ ក៏ក្រោកឈរឡើងគិតនឹងលោតទឹកសម្លាប់។ ទាហានក៏ស្ទុះទៅចាប់ឃាត់ទុកហើយយំលោកទាំងអស់គ្នា។

លុះឆ្លងទៅដល់ត្រើយម្ខាងហើយ **ឡៅពី**ក៏នៅមិនទាន់ទៅទៀត រារង់បង្អង់ចាំពួកអ្នកស្រុកឲ្យឆ្លងទៅរួចទាំងអស់គ្នា បង្ខំឲ្យ**គួនអ៊ូ**យកទូកស្រូតទៅចាំចម្លងទាំងអស់គ្នា លុះអ្នកស្រុកឆ្លងអស់ហើយ **ឡៅពី**ក៏នាំទាំងស្រី ទាំងប្រុស ចាស់ក្មេងលើកទៅដល់ស្រុកសុងយ៉ុង នឹងចូលទៅក្នុងស្រុកក៏មិនបាន **ឡៅពី**ក៏ជិះសេះព័ទ្ធទៅតាមជើងកំពែង ហើយស្រែកហៅ**ឡៅថង**ថា ក្មួយអើយអ្នកកុំមានសេចក្ដីសង្ស័យ យើងនឹងលើកមកនេះមិនមែននឹងធ្វើប្រទូសរ៉ាយអ្នកទេ យើងមកដោយសេចក្ដីអាណិត

អាស្វរអ្នកស្រុកទាំងអស់គ្នា ចូរក្លួយបើកទ្វារឲ្យយើងចូលទៅចុះ។ ឯ**ឈ្លួម៉**និង**ទៀវអ៊ុន**ឃើញ**ឡៅពី**ព័ទ្ធវាងមកស្រែកហៅឲ្យបើកទ្វារដូច្នោះ ក៏ឡើងទៅលើសើនឲ្យទាហានបាញ់ធ្នូចម្រុះចេញមក។

ខណៈនោះ **អ៊ុយអៀន**ជាពួកស្រុកងីយ៉ុង ខ្ពស់ប្រាំមួយហត្ថ មុខក្រហមពណ៌ដូចផ្លែពុទ្រាទុំ នៅក្នុងស្រុកនេះ លុះឃើញ**ឈ្លួម៉** និង**ទៀវអ៊ុន**ធ្វើដូច្នោះ ក៏លើកពួកម៉ាកប្រហែលមួយរយនាក់ទៅត្រង់ទ្វារស្រុក ស្រែកជេរ**ឈ្លួម៉**និង**ទៀវអ៊ុន**ថា ឯងនេះជាសត្រូវលក់ម្ចាស់ មកធ្វើដូច្នេះគួរហើយឬ? **ឡៅពី**នេះជាមនុស្សចិត្តល្អនឹងអាណាប្រជានុរាស្ត្រទាំងពួងណាស់ ដែលលើកមកនេះព្រោះសង្គ្រោះដោះទុក្ខរាស្ត្រ មួយទៀតបិតាអ្នកស្លាប់ក៏បានផ្ដាំផ្ញើកិច្ចការសុខទុក្ខនឹង**ឡៅពី** ហេតុម្ដេចឯងមិនឲ្យ**ឡៅពី**ចូលមក? ថាដូច្នោះហើយក៏យកដាវដេញកាប់ទាហានដែលនៅរក្សាទ្វារស្លាប់ខ្ចាត់ខ្ចាយអស់ទៅ ទើបច្រានបើកទ្វារស្រុកចេញទៅទទួល**ឡៅពី**ស្រែកថា អញ្ជើញលោកនាំបណ្ដាអ្នកស្រុកទាំងអស់គ្នាចូលមកចុះ ចូរជួយកម្ចាត់សត្រូវលក់ម្ចាស់ចេញ។

**ឡៅពី**ឮដូច្នោះក៏អរណាស់ ទើបនាំទាហាននិងបណ្ដាអ្នកស្រុកចូលទៅទទួលជួបនឹង**ប៊ុនផេង**លើកទាហានមក ឃើញ**អ៊ុយអៀន**បើកទ្វារទទួល**ឡៅពី**ដូច្នោះ ក៏ស្រែកជេរថា ឯងគ្រាន់តែជាកូនទាហានគ្មាននរណារាប់អានសោះ ហេតុម្ដេចក៏មកបើកទ្វារទទួល**ឡៅពី**ឲ្យចូលមកដូច្នេះ ឯងនឹងចង់ឲ្យស្រុកនេះកើតចលាចលឬ? **អ៊ុយអៀន**ឮ**ប៊ុនផេង**ជេរប្រមាថដូច្នោះ ក៏ខឹងណាស់ បរសេះចូលទៅតយុទ្ធនឹង**ប៊ុនផេង**ជាពន្លឹក។ ទាហានទាំងសងខាងក៏ចូលតដៃគ្នាជាជ្រួលច្របល់វឹកវរឡើង។

**ឡៅពី**ឃើញដូច្នោះក៏ថា យើងមកគ្រានេះតាំងចិត្តនឹងអនុគ្រោះបណ្ដារាស្ត្រទាំងពួងឲ្យបានសេចក្ដីសុខព្រមមូលគ្នា យើងមិនទាន់នឹងចូលទៅដល់ស្រុក ម្ដេចក៏

មកបណ្ដាលទាស់ទែងគ្នាច្បាំងកាប់សម្លាប់រឹករវរដូច្នេះ ត្រឡប់ឲ្យបណ្ដាលរាស្ត្រក្នុងស្រុកនិងខាងក្រៅក្ដៅក្រហាយទៅវិញ? បើយើងចូលទៅហើយនឹងមិនកើតរឹករវរជាងនេះទៅទៀតឬ? ដែលតាំងចិត្តជួយឲ្យជាប្រយោជន៍នោះ ក៏នឹងអសារឥតការទទេទៅ ដូចយើងចូលទៅធ្វើឲ្យបណ្ដារាស្ត្របានទុក្ខក្ដៅឡើងទៀត យើងក៏មិនចូលទៅឡើយ។ **ខុងបេង**ថា បើដូច្នោះស្រុកកាំងឡេងក៏ជាទីដែនចំណុះស្រុកកេងជីវដែរ សូមឲ្យលោកលើករំលងទៅស្រុកនោះចុះ ដើម្បីនឹងបានការពាររក្សាខ្លួនដោយស្រួល។ **ឡៅពី**យល់ឃើញត្រូវ ក៏នាំទាហាននិងបណ្ដារាស្ត្រទាំងនោះលើកទៅស្រុកកាំងឡេង។

ឯពួកអ្នកស្រុកសុងយ៉ុង ឃើញកើតចលាចលរឹករវរដូច្នោះ ក៏នាំគ្នាលើកគ្រប់គ្រួតាម**ឡៅពី**ទៅជាច្រើនណាស់។ **អ៊ុយអៀន**និង**ប៊ុនផេង**ច្បាំងគ្នាពីព្រឹដល់ថ្ងៃត្រង់ ទាហានទាំងសងខាងរបួសពិការស្លាប់ជាច្រើន។ **អ៊ុយអៀន**តស៊ូនឹងកម្លាំង**ប៊ុនផេង**មិនបាន ក៏ញាក់សេះវេះរត់ចេញទៅក្រៅស្រុក នឹងទៅរក**ឡៅពី**មិនប្រទះ ក៏រត់ប្រះទៅនៅនឹង**ហាន់ហៀន**ចៅហ្វាយស្រុកទៀងសា។ ឯ**ឡៅពី**ក៏លើកគ្រប់គ្រួជ្រួលច្របល់ទៅគ្រានោះ មនុស្សប្រហែលប្រាំម៉ឺន លុះទៅដល់ឧម្មុង្គ**ឡៅពៀវ**ក៏ឲ្យឈប់ទ័ពសម្រាក។ **ឡៅពី**ចុះពីលើសេះចូលទៅគំនាប់សព**ឡៅពៀវ** ហើយយំសោកាថា លោកជាបងបានផ្ដែផ្ដាំទុកនឹងខ្ញុំពីដើម ឲ្យខំទំនុកបម្រុងកូនចៅ ខ្ញុំក៏នៅចាំពាក្យលោកទាំងអស់ តែឥឡូវនេះខ្ញុំក៏ធ្វើមិនបានរហូត ទោសក៏មានដល់ខ្ញុំច្រើនណាស់ សូមឲ្យលោកអត់ឱននូវទោសនោះដល់ខ្ញុំផងចុះ បីដូចលោកបានសង្គ្រោះដោះទុក្ខអាណាប្រជានុរាស្ត្រទាំងពួង ជួយឃុំគ្រងរក្សាឲ្យបានសេចក្ដីសុខតទៅ។

កាល**ឡៅពី**ចូលទៅគំនាប់សពយំសោកអាឡោះអាល័យ**ឡៅពៀវ**ដូច្នោះ មានបម្រើសេះមកប្រាប់ថា ឥឡូវ**ចូឆូ**លើកកងទ័ពកម្លងចូលមកដល់ស្រុកអ៊ួនសៀ

ហើយកំពុងចាត់ចែងទូកនឹងឆ្លងតាមមកទៀត។ ទាហានទាំងពួងឮដូច្នោះ ក៏នាំគ្នាទៅជម្រាប**ឡៅ**ពីថាលោកនឹងមកប្រកួតប្រកាន់កំណាន់ចិត្តគិតដល់គ្រប់គ្រួទាំងអស់នេះ មិនចង់លើកទៅឲ្យឆាប់ ដើរទ័ពមួយថ្ងៃត្រុយៗដូច្នេះឃើញថា រត់មិនផុតទេ បើ**ចូវ្ស**តាមមកទាន់ នឹងមិនបង់ការថ្ពោះផ្ដោយទៅទេឬ? សូមឲ្យលោកចោលគ្រប់គ្រួទាំងនេះទៅចុះ ខំស្រូតរូតទៅខាងមុខឲ្យដល់ស្រុកកាំងឡេងសិន ព្រោះស្រុកកាំងឡេងជាទីសំខាន់នឹងការពារតស៊ូនឹង**ចូវ្ស**បាន។ **ឡៅ**ពីយំបណ្ដើរនិយាយបណ្ដើរថា ប្រវេណីអ្នកមានប្រាជ្ញាប្រាថ្នានឹងគិតធ្វើការធំមាំមួននោះ រមែងនឹងតាំងចិត្តគ្រប់គ្រងការពារអាណាប្រជានុរាស្ត្រ ឲ្យមានសេចក្ដីមេត្រីស្រឡាញ់ ឲ្យអស់អញ្ជលំគេញអាត្មា គំនិតនោះជាឫសគល់ ទើបនឹងសម្រេចផលប្រយោជន៍បាន ឥឡូវបណ្ដារាស្ត្រទាំងអស់នេះ មានចិត្តអាណិតយើង ស៊ូដិតដោយតាមរជយ មកដោយលំបាកជាទីបំផុត យើងនឹងដោះរត់យកតែខ្លួនទៅមុនចោលឲ្យនៅកំព្រាទុរាទុរន់ ក៏ជាការមិនគួរសមសោះ។ បណ្ដារាស្ត្រទាំងអស់ ឮ**ឡៅ**ពីនិយាយដូច្នោះ ក៏យំសោកទាំងអស់គ្នារឹតតែមានចិត្តស្នេហាស្រឡាញ់**ឡៅ**ពីជាច្រើនណាស់។